# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៤៥

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ជូឡុង**ចាប់**ទៀវហាម**បាន **ឡៅពី**ប្រើ**តៀវហ៊ុយ**ទៅវាយស្រុកប៊ុនឡេងបានហើយ **គួនអ៊ូ**ទទួលយកអាសាទៅវាយស្រុកទៀងសាប៉ែក បាន **ហងតុង**និង **អ៊ុយអៀន**, **ស៊ុនគួន**ច្បាំងនឹង**ទៀវលៀវ** **ឡៅគី**ស្លាប់ **ឡោសុក**ទៅទារយកស្រុកកេងជីវពី**ឡៅពី**, **ខុងបេង**។)*

**ខុងបេង**សួរថា ហេតុម្ដេចបានជាចង**ទៀវហាម**ទុកដូច្នេះ? **ទៀវហាម**ក៏អធិប្បាយឲ្យ**ខុងបេង**ស្ដាប់គ្រប់ប្រការ។ **ខុងបេង**ឮដូច្នោះក៏ឲ្យស្រាយចំណង**ទៀវហាម**ចេញ ហើយនិយាយនឹង**ជូឡុង**ថា **ទៀវហាម**រាប់អានអ្នកដោយស្មោះត្រង់ បានជាលើកបងថ្លៃឲ្យជាភរិយាអ្នក នោះក៏ឃើញថាជាការគាប់ប្រសើរ ហេតុអ្វីអ្នកត្រឡប់ទៅខឹងសម្បារនឹងគេវិញ? **ជូឡុង**ថា **ទៀវហាម**និងខ្ញុំបានរាប់អានគ្នាដោយបាននាំរឿងរ៉ាវឃើញថា សែស្រឡាយជាមួយគ្នា គួរឬ**ទៀវហាម**មកលើកបងថ្លៃឲ្យខ្ញុំបាទនោះ មិនគួរសោះ ព្រោះនាងជាស្រីម៉េម៉ាយ នឹងបង្ខំឲ្យគេមានប្ដីក៏ខុសទៅ ប្រការមួយខ្ញុំបាទក៏នៅមិនទាន់ទុកចិត្ត ព្រោះ**ទៀវហាម**និងខ្ញុំបាទទើបតែនឹងស្គាល់គ្នា ខ្លាចនឹងប្រើជាកលឧបាយយ៉ាងណាក៏មិនដឹង ឯការដែលលោកប្រើមកជាមុខក៏នឹងខូចទៅ ប្រការមួយ **ឡៅពី**ជាចៅហ្វាយនាយកំពុងព្រួយចិត្តនឹងរិះគិតធ្វើការអ្វីៗ ពុំទាន់ឃើញមុខបាទយ៉ាងណា ប្រាថ្នានឹងទំនុកបម្រុងផែនដីក៏ពុំទាន់សម្រេច **ឡៅពី**នៅដេកធ្មេចភ្នែកមិនជិតជាប្រក្រតី ដែលខ្ញុំបាទនឹងមកយកស្រីជាភិយានោះ ឃើញថាមិនគួរសោះ ប្រៀបដូចនឹងឆ្អិនមុនដណ្ដាំ មនុស្សទាំងពួងក៏ចាំគរហានិន្ទា។

**ឡៅពី**ឮដូច្នោះក៏និយាយនឹង**ជូឡុង**ថា ការក្នុងស្រុកហ៊ុយអៀងក៏សម្រេចហើយ យើងនឹងរៀបចំឲ្យបានគ្នាជាភរិយាស្វាមីតាមពាក្យ**ទៀវហាម**ទៅចុះ។ **ជូឡុង**ថា ដែលលោកនឹងឲ្យខ្ញុំបាទយកស្រីមេម៉ាយនោះមិនគួរ ព្រោះក្រអ្វីស្រីក្រមុំពេញផែនដី ប្រការមួយ ខ្លួនលោកក៏តាំងទីមិនទាន់ប្រាកដនៅឡើយ នឹងប្រញាប់ទៅយកភរិយានោះ ខ្ញុំបាទមិនព្រមទេ។ **ឡៅពី**ឮដូច្នោះក៏សរសើរ**ជូឡុង**ថា ជាមនុស្សមានសេចក្ដីសត្យកតញ្ញូណាស់ ទើបយកមាសប្រាក់ឲ្យបំណាចរង្វាន់**ជូឡុង**ជាច្រើន ទើបយកត្រាសម្រាប់ងារនោះប្រគល់ឲ្យ**ទៀវហាម**ធ្វើជាចៅហ្វាយស្រុកដូចដើម។

**តៀវហ៊ុយ**ឃើញដូច្នោះ ក៏និយាយនឹង**ខុងបេង**ថា **ជូឡុង**បានយកអាសាមានសេចក្ដីគាប់ប្រសើរហើយ ឥឡូវខ្ញុំបាទនឹងសុំទាហានបីពាន់លើកទៅវាយយកស្រុកប៊ុឡេង ចាប់យកខ្លួន**កឹមស្វន**មកជូនលោក នឹងបានជាសេចក្ដីគាប់ប្រសើរខ្លះផង។ **ខុងបេង**ក៏និយាយនឹង**តៀវហ៊ុយ**ថា កាល**ជូឡុង**ទទួលយកអាសាមកធ្វើការនេះ បានសរសេរសំបុត្រសញ្ញាទុកឲ្យយើង ចុះខ្លួនអ្នកទៅវាយស្រុកប៊ុឡេងគ្រានេះ មានតែត្រូវសរសេរសំបុត្រសញ្ញាទុកឲ្យយើងសិនទើបបាន។ **តៀវហ៊ុយ**ក៏តាំងសរសេរសំបុត្រសញ្ញាទុកឲ្យ**ខុងបេង**ថា ខ្ញុំបាទនឹងសុំយកអាសាទៅវាយស្រុកប៊ុឡេងចាប់ខ្លួន**កឹមស្វន**ឲ្យបាន បើមិនបានដូចសញ្ញាទេ ក៏ឲ្យកាត់ក្បាលខ្ញុំបាទវិញចុះ ហើយ**តៀវហ៊ុយ**ក៏លា**ខុងបេង**នាំទាហានបីពាន់ ស្រូតលើកទៅដល់ស្រុកប៊ុឡេង ទើបឲ្យតាំងបន្ទាយមាំមួនខាងក្រៅស្រុក។

ឯ**កឹមស្វន**ចៅហ្វាយស្រុកដឹងថា**តៀវហ៊ុយ**លើកទ័ពមក ក៏រៀបបម្រុងសេនាទាហានទុកព្រម ដើម្បីនឹងលើកចេញមកច្បាំង **ខុងជី**ទីប្រឹក្សាក៏និយាយនឹង**កឹមស្វន**ថា ដែលលោកនឹងលើកចេញទៅតស៊ូនឹង**តៀវហ៊ុយ**នោះមិនគួរ ព្រោះ**ឡៅពី**ជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ** ហើយមានតម្រិះប្រាជ្ញា ទាំងចិត្តក៏ល្អសុភាពនឹងអាណា

ប្រជានុរាស្ត្រទាំងពួង ឯ**តៀវហ៊ុយ**ដែលជាប្អូន**ឡៅពី**លើកទ័ពមកគ្រានេះ ក៏ជាមនុស្សមានកម្លាំងខ្លាំងពូកែណាស់ មុខជាយើងតស៊ូមិនបាន សូមឲ្យលោកចេញទៅចំណុះចុះចូលនឹង**តៀវហ៊ុយ**តែម្តងទៅចុះ ទើបបានសេចក្តីសុខតទៅ។

**កឹមសួន**ឮដូច្នោះក៏ខឹងណាស់ ឆ្លើយតបទៅ**ខុងជឺ**ថា ខ្លួននេះគិតជាកលសឹកឬ? បានជានិយាយចូលទៅខាង**តៀវហ៊ុយ**ជាផ្លូវកោតញញើតដូច្នេះ? ហើយក៏បង្គាប់ទាហានឲ្យយកខ្លួន**ខុងជឺ**ទៅសម្លាប់។ ទីប្រឹក្សានិងទាហានទាំងពួងក៏និយាយជំទាស់ថា ការដែលនឹងធ្វើសឹកសង្គ្រាមជាធំលោកមិនខំគិត មកទាស់ចិត្តដោយពាក្យទីប្រឹក្សាជម្រាបប៉ុណ្ណោះ មិនគួរទេ សុំឲ្យលោកលើកទោសម្តងចុះ។ **កឹមសួន**ឮដូច្នោះក៏រសាយកំហឹង ឲ្យលើកទោស**ខុងជឺ** ហើយ**កឹមសួន**ក៏រៀបចាត់ចែងសេនាទាហានលើកចេញទៅចម្ងាយផ្លូវពីស្រុកប្រហែលពីររយសិន (៨ គ.ម) ប្រទះនឹងកងទ័ព**តៀវហ៊ុយ**លើកមក ក៏បញ្ឈប់ទាហាន។ **តៀវហ៊ុយ**ជិះសេះកាន់លំពែងចេញមកឈរនៅមុខទ័ព ហើយស្រែកសួរថា នរណាចេញមកតស៊ូនឹងយើង? **កឹមសួន**ឮដូច្នោះក៏ងាកទៅសួរទាហានទាំងអស់ថា នរណាទទួលយកអាសាចេញទៅតស៊ូនឹង**តៀវហ៊ុយ**គ្រានេះបាន? ទាហានទាំងអស់ក៏ស្ញើបខ្លាចថ្វីដៃ**តៀវហ៊ុយ** នៅស្ងៀមទាំងអស់គ្នា។ **កឹមសួន**ឃើញទាហានទាំងអស់ស្ងៀមដូច្នោះ ក៏បរសេះចេញទៅតយុទ្ធនឹង**តៀវហ៊ុយ**ៗឃើញ**កឹមសួន**ចេញមក ក៏ស្រែកគំហកដោយសំឡេងខ្លាំង។ **កឹមសួន**ស្លាំងកាំងភ័យស្លុត ក៏បំផាយសេះវេះរត់ថយមកក្រោយចូលទៅក្នុងស្រុកវិញ។ **តៀវហ៊ុយ**ក៏លើកទាហានដេញជិតជិតទៅជើងកំពែង **ខុងជឺ**និងទាហានដែលនៅក្នុងស្រុកនោះក្រឡេកឃើញ**កឹមសួន**បែកទ័ពត្រឡប់រត់ពី**តៀវហ៊ុយ**មកជិតដល់ទ្វារ ក៏ម្នីម្នាយកធ្នូមកបាញ់ចម្រុះចេញទៅ។ **កឹមសួន**ភ័យណាស់ ក្រឡេកទៅឃើញ**ខុងជឺ**ឈរពីលើសើន ស្រែកថា យើងបាននិយាយហាមឃាត់អ្នកឯង ៗមិនព្រមស្តាប់យើងតាំងពី

ដំបូង ត្រឡប់រករឿងគិតសម្លាប់យើងវិញ ឥឡូវពួកអ្នកស្រុកក៏ស្ម័គ្រចិត្តទៅនៅនឹង**ឡៅពី**ទាំងអស់គ្នាហើយ។ **ខុងជឺ**ក៏យកធ្នូបាញ់ទៅត្រូវ**គឹមស្វន**ធ្លាក់ពីលើសេះ។ ទាហានទាំងអស់ឃើញដូច្នោះ ក៏ចង់មានសេចក្តីគាប់ប្រសើរនាំគ្នាស្ទុះទៅប្រហារជីវិត កាត់ក្បាល**គឹមស្វន**យកទៅជូន**តៀវហ៊ុយ**។

ខណៈនោះ**ខុងជឺ**ក៏ឲ្យបើកទ្វារស្រុក នាំទាហានទៅគំនាប់**តៀវហ៊ុយ** ៗមានអំណរណាស់ នាំខ្លួន**ខុងជឺ**ទៅជួប**ឡៅពី, ខុងបេង**ឯស្រុកហ៊ុយអៀង ហើយស្នើសេចក្តីគាប់ប្រសើរ**ខុងជឺ**ជាច្រើន។ **ឡៅពី, ខុងបេង**ក៏សោមនស្សណាស់ នាំគ្នាលើកកងទ័ពត្រឡប់ទៅស្រុកប៊ុឡេង ហើយ**ឡៅពី**ក៏ប្រគល់ត្រាសម្រាប់ងារឲ្យ**ខុងជឺ**ធ្វើចៅហ្វាយស្រុក។ **ឡៅពី, ខុងបេង**ក៏ប្រើទាហានកាន់សំបុត្រទៅឲ្យ**គួនអ៊ូ**ឯស្រុកកេងជីវ ក្នុងសំបុត្រនោះសេចក្តីថា យើងលើកទ័ពទៅវាយបានស្រុកឡេងឡេង **ជូឡុង**លើកទៅវាយយកស្រុកហ៊ុយអៀងបាន **តៀវហ៊ុយ**លើកទៅវាយយកស្រុកប៊ុឡេងបានទៀត ខ្លួនយើងនិងសេនាទាហានទាំងអស់គ្នាក៏សុខសប្បាយគ្មានអន្តរាយដោយហេតុអ្វីទេ។

**គួនអ៊ូ**ដឹងក្នុងសំបុត្រដូច្នោះ ក៏ធ្វើសំបុត្រតបទៅ**ឡៅពី**វិញ សេចក្តីថា ខ្ញុំបាទ**គួនអ៊ូ**សូមគំនាប់មកដល់អ្នកជាបងបានជ្រាប ព្រោះខ្ញុំបាទដឹងថា អ្នកជាបងបានសេចក្តីសុខសប្បាយនោះ ខ្ញុំបាទត្រេកអរណាស់ ឯស្រុកហ៊ុយអៀង ស្រុកប៊ុឡេងនោះ **ជូឡុង**និង**តៀវហ៊ុយ**ទៅវាយបានអស់ហើយ នៅសល់តែស្រុកទៀងសាមួយមិនទាន់ចំណុះចុះចូលនៅឡើយ ខ្ញុំបាទជាអ្នកមានសតិបញ្ញានិងកម្លាំងតិច សុំទទួលយកអាសាទៅវាយយកស្រុកនោះឲ្យបាន ទាហានក៏នាំសំបុត្រទៅដល់**ឡៅពី** ៗទទួលមើលដឹងសេចក្តីមានអំណរណាស់ ទើបប្រើ**តៀវហ៊ុយ**ទៅនៅឈររក្សាស្រុកកេងជីវ ហើយឲ្យប្រាប់**គួនអ៊ូ**ស្រូតទៅជួបនឹង**ឡៅពី**ឯស្រុកប៊ុឡេង។

លុះ**គួនអ៊ួ**ទៅដល់ **ខុងបេង**ក៏ក្លែងនិយាយថា កាល**ជូឡុង**និង**តៀវហ៊ុយ**លើកទៅវាយបានស្រុកហ៊ុយអៀងនិងស្រុកប៉ុឡេងនោះ ក៏យកទាហានទៅតែម្នាក់បីពាន់ឯស្រុកទៀងសានោះ ពីដើមជាស្រុកចំណុះស្រុកកេងជីវ **ឡៅពៀវ**ឲ្យ**ឡៅភួន**ជាក្មួយទៅធ្វើចៅហ្វាយស្រុក ដល់**ឡៅពៀវ**ស្លាប់ទៅ ស្រុកទៀងសាក៏ឡើងស្រុកហ៊ូតោវិញ **ចូឆូ**តាំងឲ្យ**ហាន់ហៀន**ជាធំឈរក្សាស្រុកនោះ។ **ហាន់ហៀង**នោះជាមនុស្សល្ងង់អប្បឥតប្រាជ្ញា នឹងធ្វើការអ្វីមិនពិគ្រោះពិចារណា មានតែគំរាមកំហែងបណ្ដារាស្ត្រឲ្យបានសេចក្ដីក្ដៅក្រហាយ។ រាស្ត្រទាំងឡាយប្រែចិត្តឥតកោតខ្លាចស្រឡាញ់ តែវេលានេះនៅបារម្ភតែទាហានឯកម្នាក់ឈ្មោះ**ហាងតុង** ពួកស្រុកឡាំអៀង អាយុប្រហែលហុកសិបឆ្នាំហើយ មានកម្លាំងខ្លាំងពូកែណាស់ ពីដើមជាទាហាន**ឡៅភួន**ៗចេញពីរាជការទៅ **ហាងតុង**ក៏ស្ម័គ្រទៅនៅធ្វើការនឹង**ហាន់ហៀន** ដែលអ្នកនឹងលើកទ័ពទៅវាយស្រុកទៀងសាគ្រានេះ ត្រូវតែយកទាហានទៅឲ្យច្រើនទើបបាន ព្រោះ**ហាងតុង**ខ្លាំងពូកែណាស់។

**គួនអ៊ួ**ឮដូច្នោះ ក៏គិតមានះក្នុងចិត្តថា ខ្ញុំបាទនឹងខ្លាចថ្វីដៃ**ហាងតុង**នោះព្រោះជាមនុស្សចាស់ទៅហើយ ខ្ញុំបាទក៏សុំយកតែទាហានស្ម័គ្របក្សពួកខ្ញុំបាទប្រាំរយលើកទៅវាយយកស្រុកទៀងសា កាត់យកក្បាល**ហាន់ហៀន**និង**ហាងតុង**មកជូនលោកឲ្យបាន។ **ឡៅពី**ក៏និយាយនឹង**គួនអ៊ួ**ថា ប្អូនឯងកុំអាលមើលងាយប្រមាថ**ហាងតុង**ដូច្នោះ ទោះបីគេចាស់ក៏មែន តែមានកម្លាំងខ្លាំងពូកែណាស់ ដែលប្អូននឹងយកទាហានទៅតែប្រាំរយនោះ បងនៅមិនទាន់ទុកចិត្តសោះ ក្រែងថ្លោះការនឹងគេទេដឹង?

**គួនអ៊ួ**ឮដូច្នោះ ក៏មិនសុំយកទាហានថែមទៀត កុំឲ្យខុសនឹងពាក្យដែលថារួចហើយ **គួនអ៊ួ**ក៏លា**ឡៅពី**និង**ខុងបេង**លើកទាហានប្រាំរយចេញទៅ លុះ**គួនអ៊ួ**ទៅ **ខុងបេង**ក៏និយាយនឹង**ឡៅពី**ថា **គួនអ៊ួ**លើកពលទៅគ្រានេះ ឃើញថាមើលងាយ

ប្រមាថ**ហងតុង**ណាស់ ខ្លាចក្រែងថ្លោះការ ត្រូវយើងលើកទាហានជាជំនួយជូនទៅទៀត។ **ឡៅ**ពីយល់ព្រម ក៏រៀបចាត់ចែងទាហានលើកចេញទៅតាម**គួនអ៊ូ**ជាមួយនឹង**ខុងបេង**។

ឯ**ហាន់ហៀន**ចៅហ្វាយស្រុកទៀងសា លុះដឹងថា**គួនអ៊ូ**លើកទ័ពមក ក៏ប្រឹក្សានឹង**ហងតុង**ថា អ្នកនឹងជួយរិះគិតប្រការម្ដេច? **ហងតុង**ឆ្លើយថា លោកកុំព្រួយអ្វីឡើយ នឹងខ្លាចអ្វីថ្វីដៃ**គួនអ៊ូ**ប៉ុណ្ណោះ ទោះបី**គួនអ៊ូ**លើកទាហានមកប៉ុន្មានពាន់ ក៏នឹងស្លាប់ដោយគ្រឿងកៅទណ្ឌនិងដាវដងខ្ញុំមិនខាន។ **អៀវឡេង**នាយទាហានក៏និយាយនឹង**ហាន់ហៀន**ថា ដែលនឹងចេញតស៊ូនឹង**គួនអ៊ូ**នោះ មិនត្រូវឲ្យក្ដៅរំជួលទៅដល់**ហងតុង**ជាធំឡើយ សូម្បីតែត្រឹមខ្លួនខ្ញុំបាទក៏នឹងអាចចេញទៅចាប់ខ្លួន**គួនអ៊ូ**ឲ្យបាន។ **ហាន់ហៀង**ឮដូច្នោះក៏អរណាស់ ប្រគល់ទាហានមួយពាន់ឲ្យ**អៀវឡេង** ៗក៏លើកទាហានចេញពីស្រុកទៅចម្ងាយផ្លូវប្រហែលប្រាំរយសិន (២០ គ.ម) ទទួល**គួនអ៊ូ**លើកទ័ពមកប្រទះគ្នា **អៀវឡេង**ក៏ញាក់សេះស្ទុះទៅមុខទាហាន។ **គួនអ៊ូ**ឃើញដូច្នោះក៏បំផាយសេះដេញចូលទៅប្រយុទ្ធគ្នានឹង**អៀវឡេង**បានបីភ្លែង **គួនអ៊ុ**ក៏យកដាវកាប់ត្រូវ**អៀវឡេង**ធ្លាក់ពីលើសេះស្លាប់ ហើយក៏ដេញកាប់សម្លាប់ទាហាន**អៀវឡេង**ទៅទល់នឹងជើងកំពែង។ **ហាន់ហៀន**ឃើញដូច្នោះ ក៏តក់ស្លុតរន្ធត់ចិត្តទើបឲ្យ**ហងតុង**លើកទាហានប្រាំរយចេញទៅប្រយុទ្ធគ្នានឹង**គួនអ៊ូ** ៗឃើញ**ហងតុង**ជិះសេះលើកទាហានចេញមកក៏ស្រែកសួរថា អ្នកនេះឬឈ្មោះ**ហងតុង** ៗឆ្លើយថា អ្នកស្គាល់ឈ្មោះយើងហើយ ហេតុម្ដេចមកសួរធ្វើអ្វីទៀត? អ្នកមិនខ្លាចសេចក្ដីស្លាប់ទេឬ? **គួនអ៊ូ**តបថា យើងលើកទ័ពមកប្រាថ្នានឹងយកក្បាលអ្នកឯង។ **ហងតុង**ខឹងណាស់ញាក់សេះចូលប្រយុទ្ធនឹង**គួនអ៊ូ**បានមួយរយភ្លែង នៅមិនទាន់ចាញ់ឈ្នះ **ហាន់ហៀន**ក៏ឈរមើលលើសើនបន្ទាយ ហើយឃើញ**ហងតុង**ច្បាំងនឹង**គួនអ៊ូ**យូរណាស់ គិត

ខ្លាចថា **ហាងតុង**ជរាកម្លាំងតិច ក្រែងថ្កោះការនឹង**គួនអ៊ូ** ក៏វាយឈ្មោះហៅ**ហាងតុង**ឲ្យនាំទាហានត្រឡប់ចូលទៅក្នុងបន្ទាយវិញ។

ឯ**គួនអ៊ូ**លើកទាហានត្រឡប់ចូលបន្ទាយ ហើយគិតថា វេលាថ្ងៃនេះយើងច្បាំងនឹង**ហាងតុង**ដល់មួយរយភ្លេងហើយ ក៏នៅមិនទាន់ចាញ់ឈ្នះគ្នា វេលាព្រឹកស្អែកយើងនឹងប្រើកលឧបាយបញ្ឆោត**ហាងតុង**យកជ័យជម្នះឲ្យខាងតែបាន។ លុះវេលាព្រឹកឡើង **គួនអ៊ូ**ក៏លើកទាហានចូលទៅជើងកំពែងហើយស្រែកហៅ**ហាងតុង**, **ហាន់ហៀន**ឮដូច្នោះក៏ឲ្យ**ហាងតុង**លើកទាហានចេញទៅច្បាំងនឹង**គួនអ៊ូ**បានហាសិបភ្លេង **គួនអ៊ូ**ក្លែងធ្វើជាចាញ់ទាញសេះរត់ទៅក្រោយ **ហាងតុង**ក៏ដេញបណ្ដោយតាមទៅ សេះនោះក៏ភ្លាត់ជើង **ហាងតុង**ក៏ធ្លាក់ពីលើខ្នងសេះដួលសន្លប់ អាវុធក៏របូតពីដៃ **គួនអ៊ូ**ក្រឡេកមកឃើញលើកដាវឡើងនឹងកាប់ ក៏ត្រឡប់ចិត្តគិតឃើញថា យើងបានចេញពាក្យទុកថា បើនរណាគ្មានអាវុធនៅដៃ មិនត្រូវធ្វើឲ្យអន្តរាយ ឥឡូវ**ហាងតុង**ដួលសន្លប់ចុះជ្រុះអាវុធអស់ពីដៃ បើនឹងសម្លាប់ឲ្យក្ស័យក៏មិនគួរ **គួនអ៊ុ**ក៏និយាយនឹង**ហាងតុង**ថា គ្រានេះយើងទុកអាយុឲ្យអ្នក ៗចូរត្រឡប់វិលទៅស្រុកវិញចុះ យកសេះឯទៀតចេញមកតស៊ូនឹងយើងទៀត។

**ហាងតុង**ឮដូច្នោះក៏ក្រោកឡើងឡើងជិះសេះ នាំទាហានចូលទៅក្នុងស្រុកវិញ **ហាន់ហៀន**ក៏សួរ**ហាងតុង**ថា ហេតុម្ដេចបានជាអ្នកធ្លាក់ពីលើសេះ? **ហាងតុង**ថាសេះនេះមិនធ្លាប់ជិះចេញច្បាំងមកយូរហើយ បានជាភ្លាត់ជើងឲ្យធ្លាក់ដូច្នេះ។ **ហាន់ហៀន**ក៏ថា អ្នកធ្លាប់មានថ្វីដៃខ្លាំងពូកែ បើជាបាញ់នឹងធ្នូវិញក៏គ្មានអ្នកណាស្មើបាន ហេតុម្ដេចអ្នកមិនយកធ្នូបាញ់**គួនអ៊ូ**? **ហាងតុង**ថា ក្នុងថ្ងៃនេះច្បាំងជាប់ដៃគ្នាជាដរាបមក បើនឹងវិលមកយកធ្នូក៏មិនទាន់ការ ពេលព្រឹកស្អែកខ្ញុំនឹងធ្វើជាចាញ់ ឲ្យ**គួនអ៊ូ**ដេញមកដល់ជើងកំផែងស្រុក ហើយនឹងយកធ្នូបាញ់**គួនអ៊ូ**ឲ្យបាន។

**ហាន់ហៀន**ក៏យកសេះដែលជិះនោះឲ្យ**ហងតុង** ។ក៏ត្រឡប់ទៅកាន់ទីគេហដ្ឋាន ទើបរិះគិតថា ឮល្បីគេនិយាយថា **គួនអ៊ូ**នេះមានសេចក្ដីសត្យពិតត្រង់ ឃើញច្បាស់ប្រាកដមែន គឺ**គួនអ៊ូ**ទុកអាយុជីវិតយើង មានគុណដល់យើងខ្លាំងណាស់ ពេលព្រឹកស្អែកបើយើងនឹងយកធ្នូបាញ់សម្លាប់**គួនអ៊ូ**វិញក៏ពុំគួរ តែបើយើងមិនបាញ់ **ហាន់ហៀន**ក៏នឹងយកទោសយើង **ហងតុង**គិតវិតក្កដូច្នេះទើសភ្លឺដេកមិនលក់។ លុះព្រឹកឡើងមានទាហានចូលមកប្រាប់ថា **គួនអ៊ូ**ជិះសេះមកបញ្ឈរចាំច្បាំងនឹងលោកនៅជិតជើងកំផែង **ហងតុង**ឮដូច្នោះក៏ឡើងសេះនាំទាហានចេញពីក្នុងស្រុកទៅ។

ឯ**គួនអ៊ូ**ក៏គិតមើលងាយប្រមាថ ប៉ងនឹងយកជ័យជម្នះឲ្យបាន លុះឃើញ**ហងតុង**លើកទាហានចេញមក ក៏បរសេះចូលទៅច្បាំងនឹង**ហងតុង**បានសាមសិបភ្លែង **ហងតុង**ធ្វើជាចាញ់ទាញសេះរត់ទៅក្រោយ **គួនអ៊ូ**ក៏បំផាយសេះបណ្ដោយតាម**ហងតុង**ទៅ **ហងតុង**ក្រឡេកមើលមកក្រោយ ក៏យកដងធ្នូដំឡើងខ្សែ តែមិនបានយកព្រួញបាញ់ ។តែទទេដល់ពីរដង **គួនអ៊ូ**ចាំរង់មិនឃើញព្រួញទៅដល់ រឹតតែមានចិត្តកំរើបខ្លាំងឡើងទៀត ទើបបំផាយសេះទៅដល់ទឹមស្នាគ្នា **ហងតុង**រត់ទៅដល់ជើងកំពែងឃើញ**គួនអ៊ូ**ជិតចូលមក ក៏យកខ្សែដំឡើងធ្នូដាក់ព្រួញបាញ់តម្រង់ទៅរំភាយម្លូក**គួនអ៊ូ** ។ភ័យស្លុតក៏ត្រឡប់សេះវិលមកបន្ទាយវិញ។ **ហងតុង**ក៏ចូលទៅក្នុងស្រុក **គួនអ៊ូ**ក៏គិតថា ឮល្បីគេនិយាយថា **ហងតុង**ប៉ិនប្រសប់ខាងបាញ់ធ្នូណាស់ ក៏ឃើញមែនប្រាកដ វេលាថ្ងៃនេះប្រហែល**ហងតុង**គិតដល់គុណយើង ដែលយើងទុកអាយុជីវិតមិនសម្លាប់ បានជាបាញ់ធ្នូឲ្យត្រូវតែរំភាយម្លូកយើង។

ឯ**ហាន់ហៀន**នោះ កាល**ហងតុង**និង**គួនអ៊ូ**ច្បាំងគ្នា ក៏ឈរសម្លឹងមើលពីលើសើនបន្ទាយ ឃើញ**ហងតុង**បាញ់ធ្នូមិនដាក់ព្រួញក៏ខឹងណាស់ លុះ**ហងតុង**ត្រឡប់ចូលមក ក៏បង្គាប់ទាហានឲ្យចាប់**ហងតុង**យកទៅសម្លាប់។ **ហងតុង**ថា ដែលនឹងឲ្យ

សម្លាប់ខ្ញុំនោះ ដោយខុសពីទោសអ្វី? **ហាន់ហៀន**ថា កាលមុនដំបូង**គួនអ៊ូ**លើកទ័ពមក ខ្លួនក៏ទទួលអាសាថានឹងយកជ័យជម្នះឲ្យបាន នេះយើងចាំមើលខ្លួនធ្វើសឹកសង្គ្រាមតនឹង**គួនអ៊ូ**ដល់បីថ្ងៃហើយ ក៏មិនឃើញចាញ់ឈ្នះគ្នា កាលពីម្សិលមិញ ខ្លួនក្លែងធ្វើជាចាញ់**គួនអ៊ូ**បែករត់មកម្តងហើយ យើងក៏មិនយកទោស ដល់ថ្ងៃនេះ ខ្លួនបាញ់ធ្នូមិនដាក់ព្រួញ លុះឯក្រោយក៏បាញ់ត្រូវតែរំភាយម្លូក នេះគឺខ្លួនត្រូវគំនិតគប់គ្នានឹង**គួនអ៊ូ** គ្មានយកចិត្តឈឺក្តៅនឹងប្រឹងធ្វើការឲ្យយើងតាមពិតត្រង់ បើយើងនឹងមិនសម្លាប់អ្នកចេញគ្រានេះទេ មនុស្សទាំងពួងក៏នឹងរករឿងតាមគ្នាតទៅ។ ទាហាននិងទីប្រឹក្សាទាំងពួងក៏គិតគ្នានឹងសុំទោស**ហងតុង**។ **ហាន់ហៀន**ក៏និយាយទាំងទុក្ខប្រាថ្នានឹងមិនឲ្យអ្នកឯណាសុំទោសថាធ្វើសេចក្តីខុស ទោសដល់អស់ជីវិត គិតនឹងសម្លាប់ចេញជាប្រាកដ បើនរណាសុំទោសនឹងយកទោសអ្នកនោះវិញដូចជា**ហងតុង** ថាហើយក៏បង្គំទាហានឲ្យយកខ្លួន**ហងតុង**ទៅសម្លាប់។ ទាហានក៏យកខ្លួន**ហងតុង**ទៅ។

ខណៈនោះ**អ៊ុយអៀន**ជាពួកស្រុកងីអៀង កាល**ឡៅពី**ទៅច្បាំងឯស្រុកសុងយ៉ុងនោះ **អ៊ុយអៀន**ប្រុងទៅនៅនឹង**ឡៅពី**ក៏មិនជួបប្រទះ ទើបត្រឡប់មកចូលធ្វើការនឹង**ហាន់ហៀន** ៗមិនបានស្គាល់ជាមនុស្សចេះដឹងមានថ្វីដៃ ឬមិនមានថ្វីដៃសោះ ក៏មិនបានជប់លៀង**អ៊ុយអៀន**នៅប្រើជាកូនទាហានធម្មតា។ លុះ**អ៊ុយអៀន**ដឹងថា**ហាន់ហៀន**ឲ្យចាប់ខ្លួន**ហងតុង**ទៅសម្លាប់ដូច្នោះ ក៏រត់ទៅតាមចាប់ទាហាននោះសម្លាប់ចេញ ដណ្តើមយកខ្លួន**ហងតុង**មកបាន ហើយស្រែកប្រកាសនឹងពួកអ្នកស្រុកទាំងពួងថា **ហងតុង**នេះជាចារឹកបង្គោលក្នុងស្រុកទៀងសា **ហាន់ហៀន**នឹងឲ្យសម្លាប់**ហងតុង**ចេញនោះ ក៏ដូចសម្លាប់បណ្តារាស្រ្តទាំងពួងចេញ យើងដណ្តើម

ទុកបានគ្រានេះ ព្រោះយើងប្រុងនឹងសម្លាប់**ហាន់ហៀន**ចេញ នរណានឹងចូលខាងយើងខ្លះ?

ពួកអ្នកស្រុកទាំងអស់គ្នា ក៏មានចិត្តឈឺក្តៅស្អប់**ហាន់ហៀន**ណាស់ សឹងតែស្មោះស្ម័គ្រចូលទៅខាង**អ៊ុយអៀន**ជាច្រើន នាំគ្នាគិតទៅធ្វើអន្តរាយ**ហាន់ហៀន**។ **ហាងតុង**ចេះតែហាមឃាត់យ៉ាងម្តេច ក៏**អ៊ុយអៀន**មិនព្រមស្តាប់ នាំយកពួកអ្នកស្រុកខ្នាន់ខ្នាប់ចូលគ្រលុកទៅដល់សើនបន្ទាយ ឃើញ**ហាន់ហៀន**អង្គុយនិយាយនៅក្នុងទីនោះ **អ៊ុយអៀន**ក៏រត់តម្រង់ទៅ យកដាវកាប់**ហាន់ហៀន**ដាច់ពាក់កណ្តាលខ្លួន ហើយក៏កាត់យកក្បាល ឡើងសេះនាំទាហានទាំងពួងចេញទៅរក**គួនអ៊ូ**ឯបន្ទាយ។ **គួនអ៊ូ**ឃើញហើយក៏ទទួលអំណរណាស់ ទើបលើកទាហានចូលទៅក្នុងស្រុកទៀងសា ហើយប្រើទាហានទៅអញ្ជើញ**ហាងតុង** ៗឃើញថា **គួនអ៊ូ**មិនបានរាប់អានឲ្យតែទាហានទៅហៅដូច្នោះ ក៏ប្រាប់ថាឈឺទៅមិនបាន **គួនអ៊ូ**ក៏ធ្វើសំបុត្របកប្តឹងទៅដល់**ឡៅពី, ខុងបេង** តាមដែលបានខ្លួន**អ៊ុយអៀន**និង**ហាងតុង**ក្នុងស្រុកទៀងសា។

ឯ**ឡៅពី**និង**ខុងបេង**ដែលលើកទាហានតាមមកកណ្តាលផ្លូវ ឃើញទង់សសម្រាប់ហៅទាហានដែលហែពីមុខ**ឡៅពី** ត្រឡប់មូរចូលគ្នារុំនឹងដង ហើយមានក្អែកមួយហើរពីទិសខាងត្បូងបូលជាពីសំឡេង ហើយហើរទៅទិសឯជើង **ឡៅពី**ឃើញចម្លែកអស្ចារ្យក៏សួរសាក**ខុងបេង**ថា ដែលបង្កើតអាភេទដូច្នេះ **គួនអ៊ូ**ទៅវាយស្រុកទៀងសានោះបានឬមិនបានប្រការម្តេច? **ខុងបេង**ក៏ចាប់យាមតាមមាត្រាមើលដឹងក៏ឆ្លើយថា ឥឡូវ**គួនអ៊ូ**យកបានស្រុកទៀងសាហើយ បានទាំងទាហានឯកផង ពេលរសៀលថ្ងៃនេះនឹងឮដំណឹង។

លុះពេលថ្ងៃរសៀល បម្រើ**គួនអ៊ូ**កាន់សំបុត្រមកដល់ ក៏ចូលទៅជួប**ឡៅពី, ខុងបេង**ប្តឹងឲ្យការសព្វសេចក្តីហើយយកសំបុត្រនោះជូន **ឡៅពី**មើលដឹងសេចក្តីក៏

ត្រេកអរណាស់ នាំ**ខុងបេង**ស្រូតលើកទាហានទៅដល់ស្រុកទៀងសា។ **គួនអ៊ូ**ក៏ចេញម្នីម្នាមកទទួលអញ្ជើញ**ឡៅពី, ខុងបេង**ចូលទៅក្នុងស្រុក ហើយប្រារព្វរឿងដែលបានធ្វើការសង្គ្រាមនឹង**ហងតុង**នោះ ឱ្យ**ឡៅពី**ស្តាប់គ្រប់ប្រការ ហើយប្រាប់ថាឥឡូវខ្ញុំបានប្រើទាហានឱ្យទៅហៅហើយ **ហងតុង**មិនឃើញមក ប្រាប់ថាឈឺ។

**ឡៅពី**ឮដូច្នោះ ក៏គិតថា **ហងតុង**ជាមនុស្សចាស់មានទិដ្ឋិមានះប្រកាន់**គួនអ៊ូ**ឱ្យបម្រើទៅអញ្ជើញទើបមិនមក ត្រូវតែយើងទៅដោយខ្លួនឯងទើបត្រូវ ហើយ **ឡៅពី**ក៏ទៅរក**ហងតុង**ដល់ផ្ទះ **ហងតុង**ឃើញ**ឡៅពី**ទៅដល់ ក៏មានចិត្តត្រេកអរណាស់ ចេញទៅទទួល**ឡៅពី**ពីក្រៅផ្ទះនាំចូលទៅ **ឡៅពី**ក៏និយាយល្បួងលួងលោម**ហងតុង**មកកាន់ទីនៅក្នុងខេត្តនោះ។ **ហងតុង**អង្វរ**ឡៅពី**សុំយកសព**ហាន់ហៀន**ទៅបញ្ចុះតាមប្រវេណី ខាងក្រៅស្រុកឯទិសឯកើត។ **គួនអ៊ូ**ក៏នាំ**អ៊ុយអៀន**ចូលទៅគំនាប់**ឡៅពី, ខុងបេង** ហើយប្រារព្វសេចក្តីគាប់ប្រសើររបស់**អ៊ុយអៀន**ឱ្យស្តាប់។ **ខុងបេង**ឮហើយក៏បង្គាប់ទាហានឱ្យចាប់ខ្លួន**អ៊ុយអៀន**ទៅប្រហារជីវិត។ **ឡៅពី**ក៏ភ័យក្នុងចិត្ត ទើបសួរ**ខុងបេង**ថា **អ៊ុយអៀន**រិះគិតឧបាយសម្លាប់**ហាន់ហៀន**ចេញ ក៏មានសេចក្តីគាប់ប្រសើរដល់យើង ហេតុម្តេចលោកឱ្យយកទៅសម្លាប់វិញ ដោយឃើញទោសកំហុសពីអ្វី?

**ខុងបេង**ថា នរណាស៊ីបាយផឹកទឹកដេកសំណាក់អាស្រ័យនៅត្រង់ណា ហើយធ្វើចិត្តឫស្យាប្រទូសរ៉ាយគេដែលមានឧបការគុណនៅទីនោះ ឈ្មោះថាជាមនុស្សអកតញ្ញូ នរណានៅក្នុងដែនដីប្រទេសណា ហើយប្រែចិត្តគិតក្បត់ហើយយកផែនដីប្រទេសនោះ ទៅឱ្យអ្នកដទៃក្រៅវិញ អ្នកនោះក៏ពេញជាមនុស្សអកតញ្ញូដូចគ្នា ដូចយ៉ាង**អ៊ុយអៀន**នេះជាមនុស្សគ្មានកតញ្ញូសុចរិតត្រង់នឹងនាយចៅហ្វាយសោះ ទោះបីនឹងចិញ្ចឹមរក្សាទុកតទៅក៏មិនគួរ ម្យ៉ាងទៀតខ្ញុំពិគ្រោះមើលក្នុងលក្ខណៈ

**អ៊ុយអៀន**នោះឃើញថា ជាមនុស្សមិនស្លូតត្រង់នឹងអ្នកដ៏មានគុណ បើប្រសិនយើងនឹងរក្សាទុកជាគ្នា យូរទៅក៏នឹងគិតទុរយសជាប្រាកដ។ **ឡៅពី**ថា លោកមានប្រសាសន៍នោះគួរមែនហើយ តែវេលានេះបើយើងនឹងឲ្យសម្លាប់**អ៊ុយអៀន**ចេញ យើងនឹងធ្វើការសង្គ្រាមតទៅមុខ អ្នកដែលនឹងប្រុងស្ម័គ្រមកនៅនឹងយើងផង ក៏ញញើតរអាចិត្តលែងគិតប្រាថ្នានឹងមកទៀតហើយ ហេតុនេះខ្ញុំសុំឲ្យលោកអត់ទោស**អ៊ុយអៀន**ទុកម្តងទៅចុះ។

**ខុងបេង**ឮដូច្នោះក៏យល់ឃើញត្រូវ ទើបលើកដៃចង្អុលមុខ**អ៊ុយអៀន**ហើយថា គ្រានេះយើងលើកទោសម្តងចុះ តាំងពីថ្ងៃនេះទៅមុខ ខ្លួនមិនត្រូវគិតទុរយសអាក្រក់នឹងអ្នកមានគុណដូច្នេះទៀត បើខ្លួនមិនរាងចាលមិនស្តាប់ពាក្យយើងប្រដៅ យើងនឹងកាត់ក្បាលខ្លួនចេញ។ **អ៊ុយអៀន**ក៏ទទួលពាក្យប្តេជ្ញាគ្រប់ប្រការ ហើយគំនាប់លាទៅកាន់ទីលំនៅ។ **ហងតុង**ក៏ចូលទៅជម្រាប**ឡៅពី**ថា ឥឡូវ**ឡៅភួន**ជាក្មួយ**ឡៅពៀវ**នៅក្នុងស្រុកនេះ សុំឲ្យលោកហៅយកខ្លួនមកតាំងឲ្យធ្វើជាចៅហ្វាយស្រុកទើបស្រួល ព្រោះ**ឡៅភួន**ជាពូជពង្សវង្សត្រកូលជាប់នឹងលោក។ **ឡៅពី**ឮដូច្នោះក៏សោមនស្សត្រេកអរ ប្រើទាហានទៅហៅខ្លួន**ឡៅភួន**មកតាំងជាធំ គាំពាររក្សាបណ្តារាស្ត្រនិងទាហាន នៅក្នុងស្រុកតាមប្រក្រតី។

**ឡៅពី**បានប្រាបប្រាមអាណាខេត្តទាំងបួនតំបន់ស្រេចហើយ បានទាំងទាហាន និងទីប្រឹក្សាជាច្រើន ក៏នាំ**ខុងបេង, គួនអ៊ូ, ជូឡុង**លើកទ័ពត្រឡប់ទៅស្រុកកេងជីវវិញ ទើបផ្លាស់ប្រែឈ្មោះដោយអីវកាំងចាត់កំពង់ស្រុកកេងជីវ ឲ្យឈ្មោះជាកំពង់កាំងអាន់វិញ **ឡៅពី**ក៏ប្រមូលសេនាទាហាន និងស្បៀងអាហារទ្រព្យរបស់មកចំណាយជាបៀវត្សសម្រាប់ចែកចាយឲ្យទាហាន និងនាហ្មឺនមុខមន្ត្រីជាច្រើន

ហើយចាត់ចែងឲ្យទាហានដែលមានថ្វីដៃទៅត្រួតត្រារក្សាគយល្បាតគ្រប់មាត់កំពង់ និងទីដែនគ្រប់តំបន់ ពុំបានធ្វេសប្រហែស។

ឯ**ជីវយី**ទៅនៅរក្សារបួសខ្លួនក្នុងស្រុកឆសងគុន របួសនោះក៏សះជាគ្រាន់បើ ហើយ ទើបចាត់ឲ្យ**កាំឡេង**ទៅនៅរក្សាស្រុកប៉ាឡេង ឲ្យ**ឡេងថង**ទៅនៅរក្សាស្រុកអាន់អៀង ហើយបង្គាប់ថាឲ្យបម្រុងប្រុងប្រៀបទាហាន និងទូកចម្បាំងទុកឲ្យព្រម បើមានសង្គ្រាមមកវេលាណា ក៏នឹងបានប្រើការដោយរហ័ស ហើយឲ្យ**ឡោសុក** និង **ទៀវភៅ**លើកទាហានចេញទៅជួយជាកម្លាំង**ស៊ុនគួន**ឯស្រុកហាប់ប៉ា។

ឯ**ស៊ុនគួន**ក៏លើកទ័ពទៅនៅស្រុកហាប់ប៉ាយូរណាស់ បានតាំងច្បាំងនឹង **ទៀវលៀវ**ជាងដប់គ្រា ក៏មិនចាញ់មិនឈ្នះ ទើបថយមកតាំងពីចម្ងាយកំផែងស្រុកផ្លូវប្រហែល**៥00**សិន (២០ គ.ម) លុះដឹងដំណឹងថា **ជីវយីប្រើឡោសុក** និង**ទៀវភៅ** លើកទាហានមកជួយ ក៏មានអំណរណាស់ ឡើងសេះទៅទទួលក្រៅបន្ទាយ ទាហានក៏នាំដំណឹងទៅប្រាប់ថា **ឡោសុក**មកជាមួយដែរ។ **ស៊ុនគួន**ឮដូច្នោះ ក៏ចុះពីលើសេះចាំទទួល**ឡោសុក**។

**ឡោសុក**ជិះសេះមកឃើញ**ស៊ុនគួន**ឈរចាំនៅដី ក៏ចុះពីលើសេះពីចម្ងាយដើរចូលមកគំនាប់**ស៊ុនគួន** ៗក៏ធ្វើជាឱនគំនាប់**ឡោសុក**យ៉ាងសុភាព ហើយហៅថា អាចារ្យៗ ទាហានទាំងពួងឃើញដូច្នោះ ក៏មានសេចក្ដីកោតញញើត**ឡោសុក**ជាច្រើន។ **ស៊ុនគួន**បបួល**ឡោសុក**ជិះសេះម្នាក់មួយ ដើរទឹមគ្នាចូលទៅក្នុងបន្ទាយ **ស៊ុនគួន**ឱនខ្សឹបប្រាប់ថា ខ្ញុំធ្វើសេចក្ដីលំអុតលំឱនលើកតម្កើងអ្នកយ៉ាងដូច្នេះ អ្នកត្រូវចិត្តឬទេ? **ឡោសុក**ថា ដែលត្រូវចិត្តខ្ញុំនោះ ខ្ញុំសុំឲ្យលោករិះគិតតាំងខ្លួនធ្វើធំឲ្យត្រាតែបានទើបប្រពៃ ហើយត្រូវតាំងនៅក្នុងសត្យានុសត្យសុចរិតល្អ ដើម្បីនឹងទំនុកបម្រុងអាណាប្រជានុរាស្ត្រឲ្យបានសេចក្ដីសុខក្សេមក្សាន្ត អំណើះទៅមុខ ទើបឈ្មោះខ្ញុំមានល្បី

ល្បាញប្រាកដ ថាជាខ្ញុំរាជការជួយទំនុកបម្រុងលោកឲ្យបានជាធំ។ **ស៊ុនគួន**ឮដូច្នោះក៏ទះដៃអស់សំណើចដោយសប្បាយណាស់ ហើយនាំ**ឡោសុក**ទៅបន្ទាយ ក៏ឲ្យរៀបចំតុលៀងអាហារព្រមទាំងសេនាទាហានទាំងពួង ហើយប្រឹក្សាគ្នានឹងលើកទៅវាយយកស្រុកហាប់ប៉ាឲ្យបាន។ ទទួលបម្រើសេះចូលមកប្រាប់ថា **ទៀវលៀវ**ឲ្យបម្រើកាន់សំបុត្រមកជូនលោក **ស៊ុនគួន**ក៏ឲ្យទាហាននោះចូលមក ហើយទទួលសំបុត្រមកមើល សេចក្ដីថា **ស៊ុនគួន**បានទាហានមកបំពេញថែមទៀតជាច្រើនហើយ ឲ្យលើកមកច្បាំងគ្នាទៀតចុះ **ស៊ុនគួន**ឮដូច្នោះក៏ខឹងណាស់ថា យើ! **ទៀវលៀវ**នេះមើលងាយអញពេកណាស់តើ! ព្រោះឃើញថា**ឡោសុក**និង**ទៀភៅ**ទើបមកដល់ បានជាប្រើទាហានឲ្យកាន់សំបុត្រមកនិយាយដៀមដាមចំអក ពេលព្រឹកស្អែកអញមិនយកទាហានថ្មីទៅទេ កម្លាំងទាហានចាស់ក៏ល្មមចេញទៅច្បាំងនឹង**ទៀវលៀវ**ឲ្យអស់ថ្វីដៃម្ដងចុះ។ អ្នកកាន់សំបុត្រនោះក៏លា**ស៊ុនគួន**ត្រឡប់ទៅប្រាប់**ទៀវលៀវ**។

លុះដល់ពេលយាមបីប្លាយ **ស៊ុនគួន**ក៏ឲ្យរៀបចំទាហានលើកចេញពីបន្ទាយសំដៅទៅច្បាំងនឹង**ទៀវលៀវ** លុះលើកទៅដល់កណ្ដាលផ្លូវពេលស៊ីបាយព្រឹករួច ៗ ទទួលកងទ័ព**ទៀវលៀវ**លើកមកជួបគ្នា ទាំងសងខាងក៏ឈប់ទ័ពប្រទល់គ្នា **ស៊ុនគួន**ក៏តែងខ្លួនពាក់ក្រោះមាសមួកមាសឡើងជិះសេះកាន់លំពែង ឲ្យ**សុងខៀម**អមខាងស្ដាំ ឲ្យ**កែហ៊្វូ**អមខាងឆ្វេង ហើយឲ្យទាហានវាយឃ្មោះគងទូងស្គរ ហើយ**ស៊ុនគួន**ក៏ចេញទៅឈរនៅមុខទាហាន **ទៀវលៀវ**ឃើញដូច្នោះ ក៏ឡើងសេះឲ្យ**លីទៀន**អមខាងស្ដាំ ឲ្យ**ង៉ាក់ជិន**អមខាងឆ្វេង រាំលំពែងចេញមកហៅ**ស៊ុនគួន**ឲ្យចូលមកច្បាំងគ្នា។ **ស៊ុនគួន**ក៏បរសេះចូលទៅប៉ងច្បាំងនឹង**ទៀវលៀវ**។ **ថៃស៊ូជូ**ឃើញដូច្នោះ ក៏

បំផាយសេះដែកចូលទៅច្បាំងនឹង**ទៀវលៀវ**ជំនួស**ស៊ុនគួន**បានហាសិបភ្លែង នៅមិនទាន់ចាញ់ឈ្នះ។

**ស៊ុនគួន**បញ្ឈប់សេះមើល**ថៃស៊ូជូ**និង**ទៀវលៀវ**ច្បាំងគ្នាក្នុងភ្លែងអាវុធ ក៏កើតភិស្សូវង្សស្តុងស្មារតីទៅ មិនបានរវាំងខ្លួន **លីទៀន**ក៏និយាយនឹង**ង៉ាក់ជិន**ថា ដែលពាក់ក្រោះមាសជិះសេះនោះ**ស៊ុនគួន**ឬ? បើយើងចាប់ខ្លួនបានក៏ដូចជាសងសឹកឲ្យមហាឧបរាជ។ **ង៉ាក់ជិន**ឮដូច្នោះក៏គិតនឹងចង់បានសេចក្តីគាប់ ក៏កាន់ដាវបំផាយសេះតម្រង់ទៅដល់**ស៊ុនគួន** លើកដាវឡើងនឹងកាប់ **សុងខៀម**និង**កែហ៊ូ**ក្រឡេកទាន់ ក៏យកលំពែងទទួលរងទាំងសងខាង ផ្តែលំពែងនោះវាយ**ង៉ាក់ជិន** ៗបំផាយសេះរត់ទៅវិញ **សុងខៀម**ក៏ដណ្តើមយកលំពែងពីដៃទាហាន ហើយបំផាយសេះតាម**ង៉ាក់ជិន**ទៅ **លីទៀន**ឃើញ**សុងខៀម**ដេញ**ង៉ាក់ជិន**ជិតទាន់ ក៏លើកធ្នូឡើងបាញ់ត្រូវដើមទ្រូង**សុងខៀម**ធ្លាក់ពីលើសេះស្លាប់។ **ថៃស៊ូជូ**ឃើញដូច្នោះភ័យណាស់ លុះដោះដៃពី**ទៀវលៀវ**ចេញក៏បំផាយសេះរត់ **ទៀវលៀវ**បានចំណាប់ក៏ដេញទាហានតាមសង្កុញចូលទៅក្នុងកងទ័ព**ស៊ុនគួន** ទាហាន**ស៊ុនគួន**ក៏បែកខ្ចាត់ខ្ចាយទៅ **ទៀវលៀវ**ក្រឡេកឃើញខ្លួន**ស៊ុនគួន** ក៏បំផាយសេះតម្រង់ចូលទៅ ខណៈកាល**ស៊ុនគួន**លើកទ័ពទៅនោះ **ទៀភៅ**នៅក្នុងបន្ទាយមិនទុកចិត្តខ្លាច**ស៊ុនគួន**អន្តរាយ ក៏លើកទាហានចេញមកបង្កប់កណ្តាលផ្លូវលុះឃើញ**ទៀវលៀវ** ៗឃើញទាហាន**ស៊ុនគួន**ចេញស្រមកពីសងខាងផ្លូវ គិតថានឹងដេញតាមទៅក៏នឹកខ្លាច ទើបនាំទាហានវិលត្រឡប់មកវិញ **ស៊ុនគួន**ក៏លើកទាហានចូលបន្ទាយ ហើយយំសោកាល័យ**សុងខៀម**ជាច្រើន។

**ទៀវហៀន**ទីប្រឹក្សាក៏និយាយនឹង**ស៊ុនគួន**ថា ដែលជាហេតុដូច្នេះ ព្រោះលោកលើកកម្ពស់ខ្លួនមើលងាយមិនខ្លាចដល់សឹកសត្រូវ មិនសូវរវាំងការពាររក្សាខ្លួន ឯ

ប្រវេណីការសង្គ្រាមនេះគួរនឹងប្រើទាហានដែលមានថ្វីដៃខ្លាំងពូកែចេញច្បាំងជាមុន មិនត្រូវមេទ័ពនឹងចេញច្បាំងដោយខ្លួនឯងជាមុន**ទេ** ខ្លួនលោកជាធំមិនសមនឹងមិនពិគ្រោះមើលការគួរឬមិនគួរ ប្រញាប់តែចេញទៅតច្បាំងនឹង**ទៀវលៀវ** ដែលត្រឹមតែជានាយទាហាន បានជាមានសេចក្តីថ្លោះការខូចខាតទាហានឯកយ៉ាងនេះ គួរឲ្យស្តាយណាស់ **ស៊ុនគួន**ទទួលខ្លួនថា ខ្ញុំផ្តោយខ្លួនខុសហើយ អ្នកនិយាយនោះត្រូវណាស់ ការដែលថ្លោះផ្តោយដូច្នេះ ព្រោះយើងគិតខុសដោយខ្លួនឯង។

ខណៈនោះ **ថៃស៊ូជូ**ក៏ចូលមកជម្រាប**ស៊ុនគួន**ថា **កោតេង**បាវខ្ញុំបាទមានបងប្អូនឈ្មោះ "**អាវចោ**" ជាមនុស្សឃ្វាលសេះរបស់**ទៀវលៀវ**។ **អាវចោ**គ្មានទោសខុសពីអ្វីសោះ **ទៀវលៀវ**យកខ្លួនទៅធ្វើទោស **អាវចោ**មានសេចក្តីខឹងក្តៅក្រហាយឲ្យមនុស្សមកប្រាប់ខ្ញុំបាទថា ពេលយប់នេះ អាវចោនឹងគិតសម្លាប់**ទៀវលៀវ**ចេញហើយដុតភ្លើងឡើងជាសម្គាល់ ខ្ញុំបាទនឹងសុំទាហានលើកទៅធ្វើការជាមួយនឹង**អាវចោ** មុខជានឹងសងសឹកជំនួស**សុងខៀម**បាន។ **ស៊ុនគួន**ថា ឥឡូវ**កោតេង**នៅឯណា **ថៃស៊ូជូ**ថា **កោតេង**បន្លំជា**ទា**ហាន**ទៀវលៀវ**ចូលទៅក្នុងស្រុកហាប់ប៉ាហើយ **ស៊ុនគួន**ឮដូច្នោះក៏មានអំណរណាស់ ទើបចាត់ទាហានមួយពាន់ឲ្យ**ថៃស៊ូជូ**។ **ជូកាត់កិន**ក៏និយាយនឹង**ថៃស៊ូជូ**ថា **ទៀវលៀវ**នោះមានតម្រិះ ប្រាជ្ញា និងថ្វីដៃខ្លាំងពូកែណាស់ មុខជាមិនធ្វេសប្រមាទ អ្នកត្រូវរិះគិតឲ្យល្អិតល្អន់កុំអាលមើលងាយ**ទៀវលៀវ**នោះឡើយ។ **ថៃស៊ូជូ**មិនបានឆ្លើយតបថាម្តេច ក៏លា**ស៊ុនគួន**លើកទាហានចេញចាកបន្ទាយទៅ។

ឯ**កោតេង**ដែលបន្លំជាទាហាន**ទៀវលៀវ**ចូលទៅក្នុងស្រុកហាប់ប៉ានោះ ក៏និយាយនឹង**អាវចោ**ថា ថ្ងៃមិញយើងឲ្យមនុស្សទៅប្រាប់**ថៃស៊ូជូ**ៗផ្តាំមកថា ពេលយប់នេះ នឹងលើកទាហានមកចាំខាងក្រៅកំផែងស្រុក ការខាងក្នុងនេះអ្នកនឹងរិះគិត

ប្រការម្តេច? **អាវចោ**ថា ទីលំនៅដែលខ្ញុំស្នាក់នៅនេះជិតទៀបកន្លែង**ទៀវលៀវ**ណាស់ ពេលយប់នេះខ្ញុំនឹងយកភ្លើងដុតគំនរចំបើងឱ្យឆេះភ្លឺឡើង បើកាលណាភ្លើងឆេះហើយឱ្យអ្នកស្រែកថា សត្រូវចូលស្រុកបានហើយ ពួកអ្នកស្រុកទាំងអស់គ្នាមិនទាន់ដឹងការ ក៏នឹងភ្ញាក់ផ្អើលជ្រួលច្របល់វឹកវរឡើង បើ**ទៀវលៀវ**នឹងមកលត់ភ្លើង ខ្ញុំនឹងលបចាក់**ទៀវលៀវ**ឱ្យស្លាប់។ **កោតេង**ឮដូច្នោះក៏យល់ឃើញត្រូវ។

ឯ**ទៀវលៀវ**កាលដែលត្រឡប់ចូលទៅក្នុងស្រុកហាប់ប៉ាវិញ ក៏ត្រួតត្រារក្សាទាហានទាំងអស់ឱ្យយាមល្បាតហើយបង្គាប់ថា ពេលយប់នេះអ្នករាល់គ្នាកុំបីប្រមាទ ឱ្យរិះគិតការពាររក្សាខ្លួនឱ្យមែនទែន ត្រូវតែពាក់គ្រោះសៀតអាវុធដេកគ្រប់គ្នា។ ទាហានទាំងពួងឆ្លើយថា កាលពីថ្ងៃដែលយើងមានជ័យជម្នះ **ស៊ុនគួន**បែកបាក់ទៅហើយ លោកនឹងឱ្យវាំងរក្សាដោយហេតុអ្វី? **ទៀវលៀវ**ថា ធម្មតាអ្នកដែលជានាយកងនាយទ័ពនឹងធ្វើការសង្គ្រាមនោះ បើចាញ់ក៏កុំអាលតូចចិត្តណាស់ បើបានជ័យជម្នះក៏កុំអាលត្រេកត្រអាលណាស់ កាលពីថ្ងៃដែលយើងបានជ័យជម្នះហើយ បើប្រមាទធ្លោយក្រែង**ស៊ុនគួន**មានចិត្តគិតក្តៅឃើញថាយើងភ្លើតភ្លើន ក៏នឹងលើកទាហានមកចោមវាយ យើងនឹងមិនអន្តរាយទេឬ ហេតុនេះបានជាយើងហាមប្រាមអ្នករាល់គ្នាឱ្យប្រុងប្រយ័ត្នដោយហេតុនេះ។

ខណៈកាល**ទៀវលៀវ**កំពុងនិយាយនឹងទាហាននោះ ក៏ឃើញភ្លើងឆេះឡើងភ្លឺខាងក្រោយបន្ទាយហើយស្រែកថា សត្រូវចូលស្រុកបានហើយ ពួកអ្នកស្រុកទាំងពួងក៏ភ្ញាក់ផ្អើលជ្រួលច្របល់វរវឹកសន្ធឹកណាស់ **ទៀវលៀវ**ឃើញដូច្នោះក៏តក់ស្លុតក្នុងចិត្ត **ទើប**ឡើងសេះនាំទាហានបួននាក់ចេញទៅឈរទទឹងខ្លួន ទាហានស្រែកថា ឮសំឡេងជិតណាស់មកហើយ មុខជាសត្រូវនឹងចូលមកដល់ **ទៀវលៀវ**ថាមិនទាន់ឃើញអ្វីជាចម្លែកទេ វាធ្វើក្លែងដូច្នេះប្រាថ្នានឹងឱ្យមនុស្សទាំងអស់គ្នាភ្ញាក់ផ្អើលទេ

ហើយ**ទៀវលៀវ**ក៏ប្រាប់ទាហានទាំងពួងថា បើនរណាផ្អើលរឹករវនឹងឲ្យកាត់ក្បាលចេញ ឲ្យនាំគ្នាចាប់ខ្លួនឈ្មោះណាជាដើមហេតុឲ្យបាន។ ប្រហែលមួយម៉ោង **លីទៀន**ក៏ចាប់ខ្លួន**កោតេង**និង**អាវចោ**មកឲ្យ**ទៀវលៀវ** ៗសួរសាកដឹងសេចក្ដីហើយ ក៏ឲ្យទាហាននាំខ្លួន**កោតេង** និង**អាវចោ**ទៅប្រហារជីវិត ទទួលសំឡេងទាហានវាយឃ្មោះគងទូងស្គរបោ៊ាកញ្ជៀវអឹងកងក្រៅស្រុក **ទៀវលៀវ**ក៏និយាយនឹងទាហានទាំងពួងថា កងទ័ព**ស៊ុនគួន**លើកមកចាំធ្វើការតាមសញ្ញា**កោតេង**ហើយ យើងត្រូវគិតត្រួតកល**ស៊ុនគួន**ឲ្យបានវិញ **ទៀវលៀវ**ក៏ឲ្យទាហានយកភ្លើងដុតឡើងក្នុងស្រុក ហើយបើកទ្វារចេញស្រែកថា សម្លាប់សត្រូវចូលស្រុកបានហើយ។

**ថៃស៊ូជូ**ឮដូច្នោះក៏សម្គាល់ថា **កោតេង**និង**អាវចោ**ធ្វើការសម្រេចហើយ ក៏បំផាយសេះជ្រែកមកមុខទាហានទៅក្នុងស្រុក **ទៀវលៀវ**ឲ្យយកធ្នូបាញ់ចម្រុះចូលមកទាំងសងខាងផ្លូវ ត្រូវ**ថៃស៊ូជូ**ជាច្រើនអន្លើ **ថៃស៊ូជូ**ភ័យណាស់ក៏ញាក់សេះត្រឡប់ទៅវិញ **ទៀវលៀវ**ក៏ឲ្យ**ង៉ាក់ជិន**ដេញពីក្រោយ **ថៃស៊ូជូ**ទៅដល់ពីមុខបន្ទាយ**ស៊ុនគួន** **ឡុកស៊ុន**និង**តាំងសិត**ឃើញដូច្នោះ ក៏លើកទាហានចេញមកជួយ**ថៃស៊ូជូ**។ **លីទៀន**និង**ង៉ាក់ជិន**ដេញកាប់សម្លាប់ទាហាន**ថៃស៊ូជូ**ស្លាប់ជាច្រើន ហើយឃើញ**ឡុកស៊ុន**, **តាំងសិត**ចេញមកជួយ**ថៃស៊ូជូ**។ **លីទៀន**និង**ង៉ាក់ជិន**ក៏លើកទាហានត្រឡប់ចូលទៅក្នុងស្រុកវិញ **ឡុកស៊ុន**និង**តាំងសិត**ក៏នាំថៃស៊ូជូចូលទៅក្នុងបន្ទាយ **ស៊ុនគួន**ឃើញ**ថៃស៊ូជូ**ត្រូវរបួសព្រួញឈឺចាប់ជាទម្ងន់ជាច្រើនអន្លើ ឃើញថានឹងមិនរស់ជីវិត ក៏នឹកអាណិតណាស់។

**ទៀវជៀវ**និយាយនឹង**ស៊ុនគួន**ថា យើងលើកទ័ពមកគ្រានេះ ឃើញខូចខាតទាហានច្រើនណាស់ គ្រានេះ**ថៃស៊ូជូ**ក៏ពិការធ្ងន់ទៅទៀត សុំឲ្យលើកទ័ពត្រឡប់ទៅស្រុកយើងសិនចុះ នឹងបានរិះគិតការតទៅទៀត។ **ស៊ុនគួន**ក៏យល់ឃើញត្រូវ ទើប

ចាត់ឲ្យទាហានរៀបចំទូកចម្បាំង លើកទ័ពត្រឡប់ទៅស្រុក**ឡាំស៊ី** លុះទៅដល់**ថៃស៊ូជូ** ក៏រឹតតែឈឺធ្ងន់ចុះ **ស៊ុនគួន**ក៏ឲ្យ**ទៀវជៀវ**ទៅសួរ**ថៃស៊ូជូ**ៗនិយាយនឹង**ទៀវជៀវ**ថា កើតមកជាកូនប្រុស ទោះបីនឹងស្លាប់ក្នុងទីសង្គ្រាមសឹក ក៏មិនត្រូវនឹកស្តាយអាយុជីវិត ត្រូវតែគិតធ្វើការឲ្យពេញដៃជើង ឥឡូវខ្លួនយើងមកអស់អាយុកំពុងពេញពាល ដូច្នេះ **ថៃស៊ូជូ**ថាតែប៉ុណ្ណេះក៏ដាច់ខ្យល់ស្លាប់ កាល**ថៃស៊ូជូ**ស្លាប់នោះទើបបានអាយុ ៤១ឆ្នាំ **ស៊ុនគួន**ដឹងថា**ថៃស៊ូជូ**ស្លាប់ក៏នឹកអាណិតអានាថពន់ប្រមាណណាស់ ទើបឲ្យតែងការសពនាំទៅកប់ទុកនៅជើងភ្នំបាក់គូ ហើយយក**ថៃស៊ូអៀង**ជាបុត្រ**ថៃស៊ូជូ**មកធ្វើការជំនួសបិតា។

ឯ**ឡៅពី**នៅស្រុកកេងជីវ ឮថា**ស៊ុនគួន**លើកទ័ពទៅវាយស្រុកហាប់ប៉ាបរាជ័យនឹង**ទៀវលៀវ** ត្រឡប់លើកទ័ពមកស្រុកឡាំស៊ី ក៏ហៅ**ខុងបេង**មកប្រឹក្សា **ខុងបេង**ថា កាលពីយប់មិញខ្ញុំមើលឫក្សឃើញផ្កាយមួយដួង ធ្លាក់ចុះមកខាងទិសឯជើងឆៀងខាងលិច ឃើញថានឹងខូចវង្សរបស់លោកម្នាក់ជាប្រាកដ ទទួលទាហានមកប្រាប់**ឡៅពី**ថា **ឡៅគី**ជាបុត្រ**ឡៅពៀវ**ដែលឈឺនោះស្លាប់ទៅហើយ **ឡៅពី**ឮដូច្នោះក៏យំសោកាល័យ**ឡៅគី**។ **ខុងបេង**ក៏និយាយនឹងឡៅពីថា ការដែលកើតមកហើយរមែងជាគូគ្នានឹងសេចក្តីស្លាប់គ្រប់ៗរូបកាយ គេយើងទាំងឡាយនឹងចៀសចាកមិនបានទេ លោកនឹងមកសោកយំដូច្នេះ រោគក៏នឹងបង្កើតឡើង កិច្ចការដែលយើងនឹងគិតធ្វើតទៅនោះក៏ជាច្រើនណាស់ សុំឲ្យលោករិះគិតចាត់ទាហានឲ្យទៅនៅរក្សាស្រុកសុងយ៉ុងជំនួស**ឡៅគី**ចុះ។

**ឡៅពី**ក៏ប្រើ**គួនអ៊ូ**ឲ្យទៅរៀបចំសព**ឡៅគី** ហើយឲ្យនៅរក្សាស្រុកសុងយ៉ុង **ឡៅពី**ក៏និយាយនឹង**ខុងបេង**ថា ឥឡូវ**ឡៅគី**ស្លាប់ហើយ មុខជា**ស៊ុនគួន**នឹងឲ្យមកទារយកស្រុកកេងជីវជាប្រាកដ លោកនឹងរិះគិតកែខៃយ៉ាងណា? **ខុងបេង**ថា លោកកុំ

ព្រួយរវល់ជាទុក្ខឡើយ ការនេះជាភ្នាក់ងាររបស់ខ្ញុំនឹងទទួលជាធុរៈ។ លុះកន្លងមកដប់ប្រាំថ្ងៃ មានទាហានមកប្រាប់**ឡៅពី**ថា **ស៊ុនគួន**ឲ្យ**ឡោសុក**មកសួរដំណឹង**ឡៅគី**។ **ខុងបេង**ក៏បបួល**ឡៅពី**ចេញទៅទទួល**ឡោសុក**ចូលមកដល់ទីលំនៅ គំនាប់គ្នាហើយ**ឡោសុក**ក៏ថា **ស៊ុនគួន**ឮថា **ឡៅគី**អនិច្ចកម្ម បានជាប្រើខ្ញុំឲ្យយកធូបទៀនមកសួរជាដំណឹងសពតាមទម្លាប់រាប់អាន កាលខ្ញុំនឹងមកនោះ**ជីវយី**ក៏បានឲ្យពរមកដល់លោកផង **ឡៅពី** និង**ខុងបេង**ឮដូច្នោះ ក៏ក្រោកឡើងគំនាប់ទទួលយកធូបទៀនហើយអញ្ជើញ**ឡោសុក**ឲ្យបរិភោគអាហារ។ ខណៈកាលកំពុងសេពសុរា **ឡោសុក**ក៏សួរ**ឡៅពី**ថា ពីដើមលោកបានមានប្រសាសន៍នឹងខ្ញុំថា បើ**ឡៅគី**អស់ព្រេងសំណាងហើយ នឹងបង្វិលស្រុកកេងជីវឲ្យ**ស៊ុនគួន**វិញ ឥឡូវ**ឡៅគី**អនិច្ចកម្មហើយ លោកនឹងបង្វិលស្រុកឲ្យខ្ញុំថ្ងៃណា នឹងបានចាត់អ្នករាជការឲ្យមកឈររក្សាតទៅ? **ឡៅពី**ថា អញ្ជើញអ្នកពិសាក្រយាស្រាបាយឲ្យសប្បាយចិត្តសិនចុះ រួចសឹមប្រឹក្សាគ្នាជាក្រោយ។ **ឡោសុក**ជំទាស់នឹង**ឡៅពី**មិនបាន ក៏ស្ងៀមខំតែបរិភោគអាហារ លុះយូរបន្តិច**ឡោសុក**ក៏ឡើងនិយាយទៅ**ឡៅពី**ទៀត **ឡៅពី**មិនឆ្លើយថាម្ដេច។

**ខុងបេង**ធ្វើជាខឹងនិយាយនឹង**ឡោសុក**ថា អ្នកជាមនុស្សមានតម្រិះប្រាជ្ញាដឹងការរាក់ជ្រៅ បើនៅស្ងៀមនឹងឲ្យយើងបើកមាត់និយាយផងបានឬ? កាលគ្រាព្រះចៅ**ហាន់កោចោ**នោះ ទ្រង់ក៏មានព្រះទ័យអាសូរករុណាអស់អាណាប្រជានុរាស្ត្រទាំងពួង ទើបបានសោយរាជសម្បត្តិតព្រះរាជវង្សរៀងមក លុះដល់ព្រះចៅ**ហៀនតេ**សព្វថ្ងៃនេះ ដែនដីក៏នៅមិនទាន់រាបទាប ព្រោះនាហ្មឺនខេត្តខណ្ឌទាំងពួងដែលមានសតិកម្លាំងប្រហែលគ្នា ក៏នៅមិនទាន់រួបរួមជួយគ្នាទំនុកបម្រុងព្រះចៅ**ហៀនតេ**សោះ បណ្ដាអាណាខេត្តទាំងអស់ក៏សឹងតែប្រទូសគ្នាមិនចំណុះចូលទៅខាងណា **ឡៅពី**ជាចៅហ្វាយខ្ញុំ ក៏ជាពូជព្រះរាជវង្សជាប់លោហិតតមកពីព្រះចៅ "**ហៅកេងតេ**"

បានម្ដែប្អូនផ្ដូវក្សត្រ លុះដល់**ឡៅពី** ៗក៏ជាប់ព្រះចៅ**ហៀនតេ** ប្រាកដនោះត្រឹមតែផែនដីមួយដុំប៉ុនស្រុកកេងជីវប៉ុណ្ណោះ នឹងយកទុកជាទីស្នាក់អាស្រ័យមិនបានឬ? ឯ**ស៊ុនគួន**ចៅ**ហ្វាយ**អ្នកជាពូជភូឃុំស្រុកជីតងទេតើ ឥឡូវបានជាធំក្នុងស្រុកកាំងតាំងមានស្រុកទៅប្រាំមួយតំបន់ ទាំងពលទាហានក៏មាំមួនច្រើនណាស់ នៅមិនទាន់ឆ្អែតចិត្តទេឬ? បានជាឲ្យមកទារស្រុកកេងជីវទៀត មួយទៀតកាល**ចូឆូ**លើកទ័ពទឹកទ័ពគោកមកវាយស្រុកកាំងតាំងនោះ **ឡៅពី**ក៏បានលើកទាហានទៅជួយច្បាំងជាមាំមួនទាំងខ្លួនខ្ញុំក៏បានជួយហៅខ្យល់ឲ្យ**ស៊ុនគួន** ទើបមិនបានជាអន្តរាយ បើខ្ញុំមិនទៅជួយកុំថាតែបុត្រីនាង**កៀវកុកឡោ**ប៉ុណ្ណោះ ទោះភរិយាបុត្ររបស់អ្នកនឹងជាមិត្តភក្តិរបស់ចូឆូទាំងអស់។

**ឡោសុក**ឮដូច្នោះក៏មិនបានតបថាប្រការម្ដេច ស្ងៀមនៅយូរណាស់ ក៏ឆ្លើយផ្ដាស់តបទៅ**ខុងបេង**ថា ឯស្រុកកេងជីវនេះជាធុរៈចំពោះលើខ្លួនខ្ញុំផង ដែលលោកមានប្រសាសន៍ប្រៀបធៀបដូច្នេះ មិនត្រូវផ្លូវសេចក្ដីសោះ **ខុងបេង**ក៏សួរ**ឡោសុក**ថាហេតុម្ដេចបានជាអ្នកថាមិនត្រូវផ្លូវសេចក្ដី? **ឡោសុក**ថា កាលគ្រា**ឡៅពី**បានសេចក្ដីលំបាក បែកទ័ពពី**ចូឆូ**នៅស្រុកសុងយ៉ុងនោះ ខ្ញុំក៏បាននាំលោកទៅជួបនឹង**ស៊ុនគួន** ខ្ញុំក៏បានខ្ចីស្រុកកេងជីវឲ្យលោក លុះ**ជីវយី**លើកទ័ពមកនឹងយកស្រុកកេងជីវវិញ ខ្ញុំក៏បាននិយាយឃាត់ឃាំងរាំងរាមិនឲ្យ**ជីវយី**លើកមក បានជាខ្ញុំមកជួបនឹងលោក ៗនិង**ឡៅពី**ក៏បាននិយាយប្ដេជ្ញាថា បើ**ឡៅគី**អស់បុណ្យវាសនាកាលណា នឹងបង្វិលស្រុក**កេងជីវ**ឲ្យ**ស៊ុនគួន**វិញ ខ្ញុំក៏បានរ៉ាប់រងធានា ឥឡូវលោកចរចាខុសអំពីពាក្យមុន ខ្ញុំនឹងយកសេចក្ដីត្រង់ណាទៅដោះសានឹង**ស៊ុនគួន**បាន? ឯ**ជីវយី**និង**ស៊ុនគួន** ក៏រាប់អានលោកនិង**ឡៅពីថា** មានពាក្យសត្យពិតត្រង់ បើខ្ញុំទៅប្រាប់តាមពាក្យលោកនិយាយ**ស៊ុនគួន**ក៏មិនជឿស្ដាប់ ត្រឡប់យកទោសខ្ញុំវិញ ទោះបីខ្លួនខ្ញុំនឹងស្លាប់មិញ ខ្ញុំក៏មិន

ស្ដាយជីវិត តែនៅគិតបរិវិតក្កថា មុខជា**ស៊ុនគួន**និង**ឡៅពី**ប្រែទៅជាសត្រូវនឹងគ្នា បើ**ឡៅពី** និង**ស៊ុនគួន**ជាខ្មាំងសត្រូវនឹងគ្នាហើយ លោកក៏អស់បានសេចក្ដីសុខ មនុស្សអ្នកស្រុកទាំងអស់ក៏នឹងសើចដំនៀលថា លោកជាអ្នកមានតម្រិះប្រាជ្ញាមកចរចា ត្រឡប់ត្រឡិនមិនពិតត្រង់ បានជាកើតហេតុដូច្នេះ។

**ខុងបេង**ថាអ្នកកុំនិយាយថ្វី ខ្ញុំនឹងខ្លាចអ្វីដំណួចជីវិត**ជីវយី**ប៉ុណ្ណោះ ព្រោះជាក្មេងតូចណាស់ សូម្បី**ចូឆូ**នឹងលើកមករាប់រយម៉ឺន ម្ដេចខ្ញុំមិនខ្លាច តែខ្ញុំឃើញអ្នកមានសេចក្ដីរអែងខ្លាចខុស ខ្ញុំនឹងរិះគិតនឹង**ឡៅពី**សរសេរសំបុត្រសញ្ញាផ្ញើទៅ**ស៊ុនគួន**ថានឹងខ្ចីស្រុកកេងជីវទុកជាទីស្នាក់អាស្រ័យសិន តទៅមុខ បើ**ឡៅពី**ទៅច្បាំងបានស្រុកណា សឹមបង្វិលស្រុកកេងជីវឲ្យវិញ តើអ្នកនឹងយល់ឃើញដូចម្ដេច?

**ឡោសុក**ក៏សួរថា លោកវាយបានស្រុកណាទើបនឹងបង្វិលស្រុកកេងជីវឲ្យវិញ? **ខុងបេង**ថា ខ្ញុំគិតនឹងទៅវាយយកស្រុកហ៊្វូតោ ដែលឃើញថាជាស្រុកធំនិងយកដោយរហ័ស ឆាប់ពុំបាន ឯស្រុកសែឈួននោះសោត **ឡៅជៀង**ចៅហ្វាយស្រុកជាមនុស្សល្ងង់អាប់ឥតប្រាជ្ញា ខ្ញុំនឹងឲ្យ**ឡៅពី**ទៅវាយយកដែរ បើបានស្រុកសែឈួនហើយ ទើបខ្ញុំនឹងបង្វិលស្រុកកេងជីវឲ្យវិញ។ **ឡោសុក**ឮដូច្នោះក៏អារម្មណ៍ចិត្ត**ខុងបេង** ព្រមទទួលតាមដែល**ខុងបេង**និយាយគ្រប់ប្រការ។

ខណៈនោះ**ឡៅពី**ក៏សរសេរសំបុត្រតាមពាក្យដែល**ខុងបេង**ថានោះ ដាក់ឈ្មោះ**ខុងបេង**ជានាយប្រកាន់ទទួលធានា **ខុងបេង**ក៏និយាយនឹង**ឡោសុក**ថា ខ្លួនខ្ញុំជាពួកម៉ាករបស់**ឡៅពី**ចុះឈ្មោះជាអ្នកធានា មុខជា**ស៊ុនគួន**មិនសុខចិត្ត នឹងសុំឈ្មោះអ្នកដាក់ចុះក្នុងសំបុត្រជាធានាផង ទើប**ស៊ុនគួន**អស់សង្ស័យ។ **ឡោសុក**ថា ឯខ្លួនខ្ញុំរាប់អាន**ឡៅពី**ថាជាមនុស្សមានចិត្តមេត្តារាប់អានដោយសុចរិតពិតត្រង់ បើចង់ចុះឈ្មោះខ្ញុំផងក៏បាន។ **ឡៅពី**ក៏សរសេរចុះឈ្មោះ**ឡោសុក**ជាអ្នកធានាខាងចុងក្រដាស

ហើយប្រគល់សំបុត្រនោះទៅឲ្យ**ឡោសុក** ៗទទួលសំបុត្រហើយក៏លា**ឡៅពី, ខុងបេង**ទៅវិញ។ **ឡៅពី, ខុងបេង**ក៏តាមជូនដំណើរ**ឡោសុក**ទៅដល់ទូក កាល**ឡោសុក**នឹងចេញទូកទៅនោះ **ខុងបេង**ក្លែងនិយាយថា បើអ្នកទៅដល់**ស៊ុនគួន**ហើយ ចូរជួយនិយាយឲ្យល្អផង ដើម្បីនឹងឲ្យចៅហ្វាយយើងទាំងពីរប្រក្រតីនឹងគ្នាតទៅ កុំឲ្យ**ចូឆូ**មើលងាយប្រមាថយើងបាន បើអ្នកមិនធ្វើតាមពាក្យខ្ញុំនិយាយទេ ទោះបីស្រុកកាំងតាំងនិងអាណាខេត្តឯទៀត ខ្ញុំក៏នឹងវាយដណ្តើមយកទាំងអស់។

# **រឿង សាមកុក**

**អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង**

**កណ្ឌទី ៤៦**

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ឡោសុក**យកសំបុត្រសញ្ញា**ឡៅពី**ទៅឲ្យ**ជីវយី** ហើយ**ស៊ុនគួន** និង **ជីវយី**គិតកលចង់លើកនាង**ស៊ុនហ៊ូយិន**ឲ្យទៅ**ឡៅពី** ៗទៅរៀបការនឹងនាង**ស៊ុនហ៊ូយិន** ហើយនាំនាង**ស៊ុនហ៊ូយិន**រត់ទៅ លុះ**ជីវយី**ប្រើ**ឈីសេង, តេងហាង**ទៅតាម**ឡៅពី**ទាន់ **ជូឡុង**ហែកសំបុត្រទីបីមើល។)*

**ឡោសុក**ទទួលពាក្យ**ខុងបេង**ហើយ ក៏ចេញទូកទៅដល់ស្រុកឆសងគុន ចូលទៅជួបនឹង**ជីវយី** ៗឃើញ**ឡោសុក**ទៅដល់មានអំណរណាស់សួរថា ម្ដេចអ្នកទៅទារស្រុកកេងជីវបានហើយឬ? **ឡោសុក**ក៏ហុចសំបុត្រទៅឲ្យ**ជីវយី**មើល។ **ជីវយី**ឃើញដូច្នោះក៏ខឹងណាស់ ទន្ទ្រាំជើងហើយថា អ្នកឯងចាញ់ប្រាជ្ញា**ខុងបេង**ទៀតហើយ មើលចុះក្នុងសេចក្ដីថា ខ្ចីស្រុកកេងជីវនោះ គ្មានកំណត់ថ្ងៃខែណាសោះ ដឹងថាកាលណា**ឡៅពី**នឹងបានស្រុកសែឈ្វនោះ បើជាវាយស្រុកសែឈ្វនមិនបាន យើងក៏មិនបានស្រុកកេងជីវមកវិញដែរ។ សំបុត្រយ៉ាងនេះនឹងយកមកធ្វើប្រយោជន៍អ្វី ហើយថែមមានចុះឈ្មោះខ្លួនជាអ្នកធានាថែមទៀត បើ**ឡៅពី**មិនបង្វិលស្រុកឲ្យទេ សេចក្ដីខុសនឹងមិនធ្លាក់មកលើខ្លួនអ្នកទេឬ? បើ**ស៊ុនគួន**នឹងយកទោស អ្នកនឹងគិតប្រការម្ដេច?

**ឡោសុក**ឮដូច្នោះ ក៏ដូចជាភ្ញាក់ខ្លួនស្ពាំងកាំង ហើយនិយាយថា **ឡៅពី**នេះមុខជាមិនគិតវៀចនឹងយើងទេ។ **ជីវយី**ថា អ្នកកុំអាលជឿពេក ឯ**ឡៅពី**នោះល្អតែខាងក្រៅឥតសៅហ្មងសោះ តែខាងក្នុងនោះនឹងធ្វើការអ្វីប្រកបទៅដោយកិច្ចកលមាយាល្បួងបញ្ឆោត ឯ**ខុងបេង**សោតក៏មានតម្រិះប្រាជ្ញាប្រើវោហារត្រឡប់ត្រឡិនទៅ

ផ្សេងៗ ឃើញថាចិត្ត**ឡៅពី**និង**ខុងបេង**មិនមែនដូចចិត្តអ្នកទេ។ **ឡោសុក**ថា នឹងឲ្យខ្ញុំរិះគិតយ៉ាងម្ដេចទៅវិញ? **ជីវយី**ថា ខ្ញុំនៅគិតដល់ខ្លួនអ្នក ដែលធ្លាប់មានឧបការគុណដល់ខ្ញុំមកពីដើម គឺអ្នកបានឲ្យអាហារខ្ញុំបរិភោគកាលគ្រាទ័លក្រ បានជាខ្ញុំជួយដាស់តឿនស្មារតីអ្នកទាំងម្ល៉េះ អ្នកកុំគិតវីវរឡើយ យើងត្រូវរង់ចាំស្ដាប់ដំណឹងទាហានដែលទៅស៊ើបការណ៍រាជការខាង**ចូឆ្វ** បើត្រឡប់មកហើយ យើងនឹងគិតតទៅទៀត។ **ឡោសុក**ក៏គិតវិតក្កវិចារៈ មិនមានសេចក្ដីសប្បាយ។

ក្រោយនោះទាហានដែលទៅស៊ើបការណ៍រាជការខាងស្រុកកេងជីវ ក៏ត្រឡប់មកប្រាប់**ជីវយី**ថា ក្នុងស្រុកកេងជីវនោះ **ឡៅពី**ឲ្យពួកទាហាន និងពួកអ្នកស្រុកទាំងពួងស្លៀកជូតក្បាលសគ្រប់គ្នា។ **ជីវយី**ក៏តក់ស្លុតសួរថា ដោយហេតុភេទអ្វីបានជាធ្វើដូច្នោះ? ទាហាននោះឆ្លើយថា នាង**កាំហ៊ូយិន**ប្រពន្ធ**ឡៅពី**ស្លាប់។ **ជីវយី**និយាយនឹង**ឡោសុក**ថា យើងគិតកលឧបាយបានម្យ៉ាងទៀត ហើយគ្រានេះមុខជា**ឡៅពី**មកនៅក្នុងកណ្ដាប់ដៃយើង។ **ឡោសុក**សួរថា លោកនឹងរិះគិតធ្វើប្រការម្ដេច? **ជីវយី**ថា គ្រានេះ**ឡៅពី**គ្មានប្រពន្ធ ហើយមុខជានឹងគិតរកប្រពន្ធថ្មីទៀត នាង**ស៊ុនហ៊ូយិន**ជាប្អូនថៅហ្វាយយើងនៅមិនទាន់មានប្ដីនៅឡើយ ហើយក៏មានថ្វីដៃលើសស្រីទាំងពួង យើងនឹងចាត់ការរកខ្ញុំស្រីដល់រយនាក់ឲ្យកាន់គ្រឿងសាស្ត្រាវុធបង្កប់ទុកក្នុងផ្ទះ ហើយរៀបចំទីកន្លែងឲ្យបានចំណាប់ រួចឲ្យ**ស៊ុនគួន**មានសំបុត្រទៅដល់**ឡៅពី**ថា នឹងលើកប្អូនក្រមុំឲ្យជាភរិយា**ឡៅពី** បញ្ឆោតឲ្យ**ឡៅពី**មករៀបការឯស្រុកឡាំស៊ី។ បើមកវេលាណា យើងនឹងរិះរកឧបាយចាប់ខ្លួន**ឡៅពី**ដាក់គុកទុក ហើយនឹងឲ្យទាហានទៅប្រាប់**ខុងបេង** ឲ្យបង្វិលស្រុកកេងជីវមកប្ដូរយកខ្លួន**ឡៅពី** បើបានស្រុកកេងជីវហើយ សឹមរិះគិតតាមគំនិតតទៅទៀត ខ្លួនអ្នកក៏អស់ជំពាក់ពីសេចក្ដីខុស។ **ឡោសុក**បាឮដូច្នោះក៏យល់ឃើញត្រូវ **ជីវយី**ក៏ឲ្យសរសេរសំបុត្រតាម

គំនិតដែលគិតនោះ ឲ្យ**ឡោសុក**នាំទៅជូន**ស៊ុនគួន**។ **ឡោសុក**ក៏លា**ជីវយី**ទៅដល់ស្រុកឡាំស៊ី ទើបចូលទៅជួបនឹង**ស៊ុនគួន** ហើយប្រាវព្វអាថ៌សេចក្ដីទាំងពួងឲ្យ**ស៊ុនគួន**ស្ដាប់ ហើយយកសំបុត្រសញ្ញារបស់**ឡៅពី**ឲ្យ**ស៊ុនគួន** ៗទទួលសំបុត្រនោះមកមើល ហើយនិយាយថា សំបុត្រអ្នកយកមកប្រយោជន៍អ្វី?

**ឡោសុក**ថា សំបុត្រ**ជីវយី**ឲ្យមកមួយច្បាប់ទៀត ហើយក៏ហុចសំបុត្រនោះទៅ**ស៊ុនគួន**។ **ស៊ុនគួន**លាមើលឃើញសេចក្ដីសព្វគ្រប់ ក៏សោមនស្សត្រេកអរណាស់ញាក់មុខហើយទទួលយកទុក ទើបនិយាយថា នឹងបានអ្នកឯណាដែលនឹងប្រើឲ្យទៅជាអ្នកចែចូវទៅមកនិយាយនឹង**ឡៅពី**បាន សម្លឹងមើលឃើញតែ**លីហាម**មួយ **ស៊ុនគួន**ក៏ប្រើទាហានឲ្យទៅហៅ**លីហាម**ឲ្យចូលមកហើយថា ឥឡូវភរិយា**ឡៅពី**ស្លាប់ហើយយើងនឹងចង់លើកនាង**ស៊ុនហ៊ួយិន**ឲ្យជាភរិយា**ឡៅពី** យើងនឹង**ឡៅពី**ក៏នឹងបានជាចិត្តគំនិតមួយនឹងគ្នា ជួយគ្នាគិតកម្ចាត់**ចូឆូ**ចេញ តែឥតនរណានឹងទៅនិយាយឲ្យ**ឡៅពី**ចូលចិត្តស្ដាប់បាន ឃើញតែអ្នកមួយនឹងជួយធុរៈយើងទៅនិយាយឲ្យ**ឡៅពី**ដឹងសេចក្ដីនេះ។ **លីហាម**ក៏ទទួលពាក្យ**ស៊ុនគួន**ហើយក៏លាចុះទូកទៅ។

ឯ**ឡៅពី**តាំងពីនាង**កាំហ៊ួយិន**អនិច្ចកម្មទៅកាលណា ក៏មានតែទុក្ខសោកាគ្មានសេចក្ដីសប្បាយ ព្រោះ**ឡៅសៀន**ជាបុត្រនៅក្មេងតូចណាស់ នឹងរកអ្នកឯណាថែរក្សាគ្មាន **ឡៅពី**ក៏ឲ្យអញ្ជើញ**ខុងបេង**មកប្រឹក្សារាជការ ប្រាថ្នានឹងឲ្យរសាយសេចក្ដីទុក្ខសោកសៅ ទទួលទាហានចូលមកជម្រាបថា **ស៊ុនគួន**ប្រើ**លីហាម**មកនិយាយការ។ **ខុងបេង**ឮដូច្នោះក៏អស់សំណើច ហើយថា ដែល**លីហាម**មកនេះជាកលរបស់**ជីវយី** បើ**លីហាម**នឹងនិយាយពីការអ្វីៗ លោកកុំអាលទទួលពាក្យថាព្រមល្មមឡើយ ខ្ញុំនឹងអែបស្ដាប់ពីក្នុងឆាក បើខុសត្រូវប្រការម្ដេច ខ្ញុំនឹងរិះគិតជាក្រោយទៀត។ **ឡៅពី**ទទួលពាក្យ**ខុងបេង**ហើយឲ្យទាហានចេញទៅទទួល**លីហាម**ចូលមក គំនាប់គ្នា

ហើយ**ឡៅពី**ក៏សួរថា អ្នកមកនេះដោយកិច្ចធុរៈពីការអ្វី? **លីហាម**ឆ្លើយថា ខ្ញុំបាទឮថាភរិយាលោកទទួលអនិច្ចកម្ម ក៏មានសេចក្តីវិតក្កដល់លោកមិនភ្លេច។ ខ្ញុំបាទឃើញស្រីម្នាក់សមគួរល្មមនឹងលោកណាស់ គិតនឹងចង់អញ្ជើញលោកទៅដណ្តឹងយក តែមិនដឹងច្បាស់ថា ចិត្តរបស់លោកនឹងគិតប្រការម្តេច? **ឡៅពី**តបថា ខ្លួនខ្ញុំក៏នៅមិនទាន់ចាស់ជរាប៉ុន្មាន ជាវិបាកខាងភរិយាឲ្យអស់វាសនាទៅកំពុងពាក់កណ្តាលអាយុដូច្នេះ នឹងរិះគិតរកភរិយាថ្មីទៀត អារម្មណ៍ចិត្តក៏នៅគិតស្រណោះអាឡោះអាល័យភរិយាចាស់ ព្រោះការកម្សត់កម្រនឹងគ្នា។

**លីហាម**ឮដូច្នោះក៏ថា ធម្មតាកើតមកជាបុរស បើមិនមានភរិយាជាមេផ្ទះ នឹងធ្វើការអ្វី ក៏រមែងខូចខាតនឹងគិតការអ្វីក៏មិនបានស្អាតល្អបរិបូរឲ្យដូចមេផ្ទះនោះឡើយ ដូចខ្លួនលោកជាធំ ត្រូវតែខំរិះគិតរកមេផ្ទះឲ្យស្រួលបួលទើបគួរ។ **ស៊ុនគួន**ចៅហ្វាយខ្ញុំបាទមានប្អូនស្រីមួយនៅក្រមុំពុំទាន់មានស្វាមី រូបភាពក៏ល្អប្រិមប្រិយលើសស្រីឯទៀតទាំងអស់ ទាំងតម្រិះប្រាជ្ញាក៏ឆ្លៀវឆ្លាត ព្រមទាំងកិរិយាមារយាទគួរជាភរិយាអ្នកធំ សមនឹងប្រណិប័តន៍លោកបាន ហើយលោកនិង**ស៊ុនគួន**បានជាបងប្អូនថ្លៃនឹងគ្នាហើយ សមមនឹងស្រឡាញ់រាប់អានគ្នាជាចិត្តគំនិតមួយ ឃើញថា**ចូឆូ**នឹងប្រមាថមើលងាយពុំបាន ខ្ញុំបាទថានេះដោយសេចក្តីស្រឡាញ់រាប់អានលោកពិត លោកកុំបីគិតរង្កៀសចិត្តឡើយ ឯនាង**ស៊ុនហ៊ូយិន**នោះ នាង**ង៉ុកថៃ**ជាមាតាក៏ស្នេហាស្រឡាញ់ណាស់ បើលោកយល់ឃើញដូចខ្ញុំបាទហើយ សុំឲ្យប្រញាប់រិះគិតទៅដណ្តឹងរៀបការឯស្រុកតងង៉ចុះ។

**ឡៅពី**ក៏សួរថា ការដែលអ្នកនិយាយយ៉ាងនេះ **ស៊ុនគួន**ដឹងដែរឬទេ? **លីហាម**តបថា បើ**ស៊ុនគួន**មិនដឹង ខ្ញុំបាទនឹងហ៊ានមកជម្រាបលោកឬ? **ឡៅពី**ថា ខ្លួនខ្ញុំអាយុហាសិបឆ្នាំហើយ សក់និងពុកមាត់ក៏ស្កូវទៅខ្លះ ប្អូនក្រមុំ**ស៊ុនគួន**នៅក្មេងម្ល៉េះ ក្រែង

មិនសមនឹងខ្ញុំទេដឹង? **លីហម**ថា ឯនាង**ស៊ុនហ៊ុយិន**នោះជាស្រីក្រមុំក៏មែន តែចិត្តទាហានហានក្លាជាងប្រុសទៅទៀត បើនរណាមិនមានតម្រិះប្រាជ្ញា និងពូជត្រកូលខ្ពង់ខ្ពស់ហើយ ក៏មិនព្រមធ្វើជាភរិយាអ្នកនោះទេ ឯត្រង់អាយុចាស់នោះមិនត្រូវការគិត ដូចខ្លួនលោកក៏ឮល្បីកេរ្តិ៍ឈ្មោះ និងតម្រិះប្រាជ្ញា ត្រូវនឹងសេចក្តីប្រាថ្នានៃនាងនោះហើយ **ស៊ុនគួន**ក៏ពេញចិត្តលោកដែរ លោកនឹងនៅធ្វើព្រងើយកន្តើយថ្វីទៀត។

**ឡៅពី**ថា អ្នកទើបមកដល់មិនទាន់អស់ហត់នឿយផង ពេលព្រឹកស្អែកសឹមយើងនិយាយគ្នាទៀត។ **ឡៅពី**ក៏អញ្ជើញ**លីហម**ឲ្យបរិភោគអាហារ ហើយឲ្យទៅសំណាក់ក្នុងផ្ទះទទួលភ្ញៀវ **លីហម**ក៏លា**ឡៅពី**ទៅ។ លុះពេលយប់**ឡៅពី**ក៏ប្រឹក្សានឹង**ខុងបេង** ៗនិយាយថា ដែល**ស៊ុនគួន**ធ្វើកលក្លែងប្រើឲ្យ**លីហម**មក ខ្ញុំក៏អាចដឹងអស់ហើយ ថ្ងៃនេះខ្ញុំក៏បានសង្កេតឃើញថា លោកនឹងមានលាភសម្រេចដូចសេចក្តីប្រាថ្នា។ លោកត្រូវទទួលតាមពាក្យ**លីហម**ចុះ បើទៅណាត់ការនឹងរៀបវិវាហមង្គល នឹងឲ្យ**ស៊ុនខៀន**ទៅដណ្តឹងដល់**ស៊ុនគួន** ឲ្យ**ស៊ុនគួន**ទទួលពាក្យមត់គ្នាជាប្រាកដហើយ សឹមនិយាយថ្ងៃខែដែលនឹងរៀបមង្គលការ។ **ឡៅពី**ថា ដែល**ជីវយី**គិតគំនិតធ្វើប្រទូសរ៉ាយយើង ហើយយើងប្រហែលធ្វេសចូលទៅដល់កណ្តាប់ដៃគេនោះ បីដូចជាយកសាច់ទៅឲ្យខ្លា សុំឲ្យលោកត្រិះរិះមើលតាមការគួរសិនចុះ។

**ខុងបេង**ថា ឯគំនិត**ជីវយី**ដែលធ្វើកលគ្រានេះ មិនមែនលើសគំនិតខ្ញុំទេ ខ្ញុំនឹងធ្វើឲ្យ**ជីវយី**ចាញ់គំនិតរបស់ខ្ញុំឲ្យបាន ទាំងប្អូន**ស៊ុនគួន**ក៏ខ្ញុំនឹងឲ្យបានមកលោក បើលោកនឹង**ស៊ុនគួន**ជាដន្លងនឹងគ្នាហើយ ស្រុកកេងជីវក៏នឹងជាកម្មសិទ្ធិរបស់លោក។ **ឡៅពី**ឮ**ខុងបេង**ថា ក៏នៅមិនទុកចិត្តគិតតែសង្ស័យមិនស្រឡះ។ **ខុងបេង**ក៏បង្គាប់ឲ្យ**ស៊ុនខៀន**ថា អ្នកចូលទៅនឹង**លីហម**និយាយដណ្តឹង ហើយសុំណាត់ពេលដែលនឹងធ្វើវិវាហមង្គលនាង**ស៊ុនហ៊ុយិន**និង**ឡៅពី**។

លុះវេលាព្រឹក **លីហាម**ក៏ចូលមកជួបនឹង**ឡៅពី** **ខុងបេង**ក៏សួរ**លីហាម**ថា ឲ្យអ្នកវិលទៅជម្រាប**ស៊ុនគួន**ចុះថា **ឡៅពី**មានសេចក្ដីត្រេកអរណាស់ ខ្ញុំនឹងប្រើ**ស៊ុនខៀន**ឲ្យទៅជួបនឹង**ស៊ុនគួន**។ **លីហាម**ក៏គំនាប់លានាំ**ស៊ុនខៀន**ទៅដល់ស្រុកឡាំស៊ីក៏នាំចូលទៅជួបនឹង**ស៊ុនគួន** ៗក៏ប្រាប់**ស៊ុនខៀន**ថា អ្នកចូរវិលទៅប្រាប់**ឡៅពី**ចុះថា យើងស្រឡាញ់**ឡៅពី**ដោយសុចរិត គ្មានចិត្តវង្វៀសពីអ្វីទេ បានជាលើកប្អូនក្រមុំយើងឲ្យ ៗ**ខុងបេង**ពិគ្រោះមើលឫក្សពារពេលាដែលល្អនឹងរៀបមង្គលការ បើបានពេលាណាចូរឲ្យដំណឹងមកដល់យើងកុំឲ្យខាន។ **ស៊ុនខៀន**ក៏គំនាប់លា**ស៊ុនគួន**ត្រឡប់មកដល់ស្រុកកេងជីវ ហើយអធិប្បាយសេចក្ដីទាំងពួងឲ្យ**ឡៅពី**ស្ដាប់គ្រប់ប្រការ។

**ឡៅពី**ឮដូច្នោះក៏នៅតែមានចិត្តមន្ទិលសង្ស័យ **ខុងបេង**និយាយនឹង**ឡៅពី**ថា លោកត្រូវទៅតាមពាក្យ**ស៊ុនគួន**ចុះ ខ្ញុំនឹងធ្វើសំបុត្របីច្បាប់ឲ្យ**ជូឡុង**ទៅជាមួយនឹងលោកផង។ **ខុងបេង**ក៏សរសេរសំបុត្របីច្បាប់ ច្រកស្រោមបិទឲ្យជិតហើយផ្ដាំថា បើមានសេចក្ដីទ័លក្រប្រការម្ដេច ឲ្យហែកសំបុត្រទីមួយមើលជាមុន រួចទើបសំបុត្រទីពីរ ទីបី ត្រាតែសម្រេចត្រឡប់មកស្រុកកេងជីវវិញ។ **ខុងបេង**ក៏ហៅ**ជូឡុង**មកខ្សិបផ្ដាំថា គ្រានេះ**ឡៅពី**ចៅហ្វាយយើងនឹងទៅរៀបមង្គលការនាង**ស៊ុនហ៊ូយិន**ប្អូនក្រមុំ**ស៊ុនគួន**។ អ្នកត្រូវទៅជាមួយឲ្យមើលការខុសត្រូវ ខំយកចិត្តទុកដាក់កុំឲ្យ**ឡៅពី**អន្តរាយ បើមានភ័យអាសន្នវេលាណាចូរធ្វើតាមសំបុត្រយើងសរសេរនោះចុះ ហើយក៏ប្រគល់សំបុត្រទាំងបីច្បាប់នោះឲ្យ**ជូឡុង**។

លុះដល់កំណត់ឫក្សល្អ **ខុងបេង**ក៏រៀបចំចាត់បណ្ណាការឲ្យទាហានយកទៅជូន**ស៊ុនគួន** ប្រាប់ព័ត៌មានដែលនឹងរៀបមង្គលការ**ឡៅពី** ហើយ**ខុងបេង**ក៏ចាត់ទូកចម្បាំងដប់ និងទាហានប្រាំរយឲ្យទៅ**ឡៅពី**, **ជូឡុង**, **ស៊ុនខៀន** លើកទៅស្រុក

ឡាំស៊ី។ ឯ**ឡៅពី**ក៏មានសេចក្តីមន្ទិលសង្ស័យ ចេះតែមានសេចក្តីវិតក្កកើតទុក្ខមិនសប្បាយ។ លុះទូកចម្បាំងទៅដល់កំពង់ស្រុកឡាំស៊ី **ជូឡុង**ក៏និយាយនឹង**ឡៅពី**ថា **ខុងបេង**ផ្តាំមកថា បើមានសេចក្តីភ័យអាសន្នប្រការម្តេច ឲ្យហែកស្រោមសំបុត្រច្បាប់ទីមួយមើលជាមុន **ជូឡុង**ក៏ហែកស្រោមមើល ឃើញសេចក្តីថាឲ្យទាហានទាំងពួងតែងខ្លួនប្រាណឲ្យស្អាតបាតដូចគ្នា ហើយឡើងដើរទៅទិញទំនិញក្នុងផ្សារស្រុកឡាំស៊ី បើអ្នកស្រុកសួរថា មកដោយធុរៈអ្វី ក៏ឲ្យប្រាប់ថា **ឡៅពី**នឹងមករៀបមង្គលការនាង**ស៊ុនហ៊ូយិន**ជាប្អូនក្រមុំ**ស៊ុនគួន** ឲ្យនិយាយទាល់តែអ្នកស្រុកដឹងទូទៅគ្រប់គ្នា ហើយឲ្យ**ឡៅពី**នាំបណ្ណាការគំនាប់ជូន**កៀវកុកឡោ** ដែលជាមាតាភរិយា**ស៊ុនសេក** និង**ជីវយី** កុំឲ្យខាន។

**ជូឡុង**ដឹងតាមសេចក្តីសំបុត្រនោះហើយ ក៏ឲ្យទាហានទាំងពួងរាតត្បាតទិញទំនិញតាមទីផ្សារស្រុកឡាំស៊ី ហើយក្លែងនិយាយតាមសេចក្តីដែលមានក្នុងសំបុត្រនោះគ្រប់ប្រការ។ អស់បណ្តាអ្នកស្រុកក្នុងផ្សារក៏និយាយឮៗតគ្នាទៅថា **ឡៅពី**នឹងមករៀបមង្គលការនឹងប្អូនស្រី**ស៊ុនគួន** ហើយ**ឡៅពី**ក៏រៀបចំរបស់ជាបណ្ណាការនាំទៅគំនាប់**កៀវកុកឡោ** ហើយជម្រាបថា ខ្ញុំបាទមកគ្រានេះនឹងរៀបមង្គលការជាមួយប្អូនក្រមុំ**ស៊ុនគួន**។

ខណៈនោះ**ស៊ុនគួន**ឮថា**ឡៅពី**មកដល់ក៏ត្រេកអរណាស់ ឲ្យ**លីហាម**ចុះទៅទទួលអញ្ជើញ**ឡៅពី**ទៅនៅលើផ្ទះទទួលភ្ញៀវ។ ឯ**កៀវកុកឡោ**នោះ ដឹងសេចក្តីដោយ**ឡៅពី**គំនាប់ ក៏ទៅជួបនឹងនាង**ង៉ុកថៃ** ហើយសួរថា អ្នកបានដឹងសេចក្តីឬទេ? ឬអ្នកបានលើកបុត្រីឲ្យជាភរិយា**ឡៅពី** បានជាពួកអ្នកស្រុកនិយាយតៗគ្នា? ឥឡូវ**ឡៅពី**មកដល់ហើយ នឹងរៀបមង្គលការនាង**ស៊ុនហ៊ូយិន** អ្នកចាំលាក់បាំងនឹងខ្ញុំធ្វើអ្វី?

នាង**ង៉ំកុកថៃ**ឮដូច្នោះក៏ភ្ញាក់ខ្លួន ទើបសួរសាកសេចក្តីថា រឿងនេះខ្ញុំអត់ដឹងសោះឡើយ ក៏ឲ្យមនុស្សបម្រើទៅស៊ើបស្តាប់ដំណឹងថា ដូចពាក្យ**កៀកកុកឡោ**និយាយមែនឬដូចម្តេច? បម្រើវិលមកប្រាប់ថា ឮពួកអ្នកផ្សារនិយាយថា **ស៊ុនគួន**នឹងលើកប្អូនក្រមុំឲ្យទៅ**ឡៅពី**ពិតមែន **លីហាម**ជាអ្នកនាំចែចូវនាំផ្លូវទៅវិញទៅមក ឯ**ឡៅពី**ប្រើ**ស៊ុនខៀន**ជាអ្នកមហា។ ឥឡូវនេះ**ឡៅពី**ក៏ចូលមកដល់ស្រុកនេះហើយ **ស៊ុនគួន**អញ្ជើញទៅសំណាក់នៅផ្ទះទទួលភ្ញៀវ។

នាង**ង៉ំកុកថៃ**ឮដូច្នោះក៏ឲ្យហៅ**ស៊ុនគួន**មក ហើយនាង**ង៉ំកុកថៃ**ក៏គក់ដើមទ្រូងយំ **ស៊ុនគួន**ភ័យណាស់ក៏សួរថា អ្នកម្តាយស្រែកយំដោយហេតុអ្វី? នាង**ង៉ំកុកថៃ**ឆ្លើយថា ខ្លួនចៅឯងមិនមែនកើតចេញពីឧទរម៉ែទេ តែម៉ែបានប្តូរចិត្តស្រឡាញ់ដូចបុត្របង្កើត កាលបងម៉ែទៀបស្លាប់បានផ្តាំចៅទុកថា បើនឹងគិតធ្វើការអ្វីៗ ឲ្យប្រឹក្សាពិគ្រោះនឹងម៉ែសិន ហេតុម្តេចចៅធ្វើការធំយ៉ាងនេះមិនប្រាប់ម៉ែឲ្យដឹងផង? **ស៊ុនគួន**ឮដូច្នោះក៏ភ័យណាស់ ទើបសួរថា ខ្ញុំបានធ្វើការអ្វីឲ្យទាស់ចិត្តអ្នកម្តាយ? ចូរមានប្រសាសន៍មកចុះ នឹងមកស្ងៀម ហើយស្រាប់តែយំដូច្នេះមិនគួរទេ។ ខ្ញុំបាទមិនសប្បាយចិត្តសោះឡើយ។ នាង**ង៉ំកុកថៃ**ឆ្លើយថា ធម្មតាកើតមកជាមនុស្ស កូនស្រីប្រុសលុះពេញការហើយក៏រមែងតាក់តែងរៀបឲ្យមានគូស្រករដូចគ្នា។ ខ្លួនម៉ែជាម្តាយចុងនៃចៅ ប៉ុន្តែដូចជាមាតាបង្កើត ចៅហ៊ានលួចរិះគិតយកបុត្រីរបស់ម៉ែជាប្អូនចៅលើកឲ្យ**ឡៅពី** ហើយណាត់ពេលថ្ងៃខែឲ្យគេមករៀបមង្គលការ គេក៏មកដល់ទីនេះហើយ ហេតុម្តេចក៏មិនឲ្យម៉ែដឹងសោះ?

**ស៊ុនគួន**ក៏សួរទៅវិញថា នរណាមកជម្រាបម្តាយ? នាង**ង៉ំកុកថៃ**ថា ធម្មតាការយ៉ាងនេះបើមិនចង់ឲ្យគេដឹងក៏កុំធ្វើ បើធ្វើហើយនឹងបិទឲ្យជិតនោះមិនបានទេ បណ្តាអ្នកស្រុកកំឡុងក្នុងផ្សារស្រុកឡាំស៊ីនេះ ក៏ដឹងឮគ្រប់ៗគ្នាមកជាយូរថ្ងៃណាស់

ហើយ ចៅចាំមកលាក់បាំងធ្វើអ្វីទៀត? **កៀវកុកឡោ**និយាយឡើងថា ការនេះខ្ញុំក៏ដឹងមកយូរថ្ងៃហើយ ខ្ញុំមើលទៅគួរស្រឡាញ់ពេញចិត្តណាស់ បានជាមកជម្រាបអ្នកជាដំណឹង។ **ស៊ុនគួន**ឃើញមាតាខឹងសម្បារខ្លាំងណាស់ ហើយ**កៀវកុកឡោ**ក៏បានហុចពាក្យជាបន្ទាល់ផង ទើបនិយាយកែខ្លួនថា ការទាំងអម្បាលនេះ ខ្ញុំបាទនឹងបានជាដើមគំនិតគិតក៏ទេ គឺជាគំនិតរបស់**ជីវយី**ប្រើឧបាយនឹងចង់ទារយកស្រុកកេងជីវផ្លាស់ប្តូរបញ្ឆោតឲ្យ**ឡៅពី**ចូលមក ហើយនឹងចាប់យកខ្លួនដាក់គុកទុក ឲ្យ**ខុងបេង**យកស្រុកកេងជីវមកប្តូរដោះយកខ្លួន**ឡៅពី**ទៅ បើ**ខុងបេង**មិនធ្វើតាមទេ ក៏នឹងសម្លាប់**ឡៅពី**ចេញ មិនមែននឹងធ្វើដោយសុចរិតទេ បានជាខ្ញុំបាទមិនបានមកជម្រាបពិគ្រោះនឹងអ្នកម្តាយឲ្យជ្រាប។

នាង**ង៉ំកុកថៃ**បានឮដូច្នោះក៏រឹតតែខឹងណាស់ ជេរប្រទេច**ជីវយី**ថា ខ្លួនវាជានាយទាហានធំក្នុងស្រុកកាំងតាំង មានស្រុកចំណុះសម្រាប់ឯកដល់ប្រាំមួយមណ្ឌល សម្រាបទោ ត្រី ចត្វា ដល់ប៉ែតសិបមួយតំបន់ អាជ្ញាសិទ្ធិក៏សម្រេចលើខ្លួនវា ៗនឹងរកតម្រិះរិះគិតឧបាយកលយកស្រុកកេងជីវប៉ុណ្ណោះមិនបានឬ? ម្តេចក៏ចាំយកកូនអញទៅធ្វើនុយបញ្ឆោតសម្លាប់**ឡៅពី** ឲ្យមនុស្សទាំងពួងឮល្បីសាយសុសថា អញលើកបុត្រីឲ្យធ្វើជាភរិយា? ចុះបើ**ឡៅពី**ស្លាប់ ហើយកូនស្រីអញមិនទៅជាម៉េម៉ាយទេឬ? តទៅមុខនរណានឹងចង់មកដណ្តឹងយកធ្វើជាប្រពន្ធគេពេញមុខបាន? ធ្វើយ៉ាងនេះនឹងឲ្យកូនអញខូចអសារឥតការព្រោះតែគំនិតវា។ **កៀវកុកឡោ**ឆ្លើយថា ឯតម្រិះរិះគិតរបស់**ជីវយី**ដូចជានិយាយយ៉ាងនេះ ក៏នឹងបានស្រុកកេងជីវជាប្រាកដ តែបើសម្លាប់**ឡៅពី**ហើយ អស់បណ្តាអ្នកស្រុកនឹងដំនៀលសើចលេងថា អ្នកយកកូនក្រមុំទៅបញ្ឆោតសម្លាប់**ឡៅពី**ចេញ សេចក្តីអប្បយសក៏នឹងកើតមានឲ្យអាស្រូវ។ **ស៊ុនគួន**ឮ**កៀវកុកឡោ**ថាដូច្នោះ ក៏អស់គំនិតគិត អារម្មណ៍ខ្លាចមាតា មិនហ៊ានហើបមាត់

ស្រដី។ នាង**ង៉កុកថៃ**ក៏រឹតតែមានសេចក្ដីក្រេវក្រោធជេរប្រទេច**ជីវយី**មិនដាច់ពីមាត់។ **កៀកកុកឡោ**ក៏សួរនាង**ង៉កុកថៃ**ថា ការក៏ជ្រុលហួសប៉ុណ្ណេះទៅហើយ រាស្ត្រអ្នកស្រុកទាំងអស់គ្នាដឹងឮសាយសុស **ឡៅពី**ក៏ជាមនុស្សមានតម្រិះប្រាជ្ញា ហើយជាពូជពង្សរាជវង្សព្រះចៅ**ហៀនតេ** គួរនឹងយកជាកូនប្រសារទៅចុះ ទើបនឹងអស់សេចក្ដីគរហានិន្ទា។

**ស៊ុនគួន**ឮដូច្នោះក៏និយាយថា **ឡៅពី**មានតម្រិះប្រាជ្ញាមែន តែជាមនុស្សចាស់អាយុជ្រុលណាស់ទៅហើយ មិនសមគ្នានឹងប្អូនខ្ញុំបាទសោះ។ **កៀវកុកឡោ**ឆ្លើយថា **ឡៅពី**ជាមនុស្សល្អប្រកបដោយចិត្តសុចរិតស្លូតសុភាព អាណិតអាណាប្រជានុរាស្ត្រទាំងពួង រូបរាងក៏ស្អាតបាត យូរទៅក៏នឹងបានជាធំ បើបានជាថ្លៃក៏ខ្មាសមុខប្អូនស្រីប៉ុន្មាន។ នាង**ង៉កុកថៃ**ឮដូច្នោះក៏និយាយនឹង**ស៊ុនគួន**ថា **ឡៅពី**នោះម៉ែឮតែឈ្មោះ មិនដែលឃើញមុខមាត់ច្បាស់សោះ ពេលព្រឹកស្អែកឲ្យអញ្ជើញ**ឡៅពី**ទៅជួបឯវត្តកាំឡូ ម៉ែនឹងពិនិត្យមើលរូបភាព បើសមគួរនឹងចិត្តហើយ ម៉ែនឹងលើកឲ្យតែម្ដងទៅ បើមិនត្រូវចិត្តម៉ែទេ ចៅនឹងចង់ធ្វើអ្វីក៏តាមសេចក្ដីគិតរបស់ចៅចុះ។

**ស៊ុនគួន**ជាមនុស្សមានកតញ្ញូនឹងអ្នកដ៏មានគុណ នាង**ង៉កុកថៃ**បានក៏បានចិញ្ចឹមរក្សាតាំងពីតូចមក លុះឮមាតាថាដូច្នោះក៏មិនអាចនឹងរឹងទទឹង ទើបលាចេញមកគេហដ្ឋាន ហើយហៅ**លីហាម**មកបង្គាប់ថា ព្រឹកស្អែកឲ្យអញ្ជើញ**ឡៅពី**ទៅបរិភោគលៀងឯវត្តកាំឡូ មាតាយើងនឹងពិនិត្យមើលរូបភាព បើមិនត្រូវចិត្តក៏អនុញ្ញាតឲ្យយើងគិតធ្វើតាមគំនិតយើង ដែលបានគិតទុកមកអំពីមុននោះ។ **លីហាម**ថា បើដូច្នោះខ្ញុំសុំឲ្យលោកវិះគិតបង្គាប់**កែហ៊្វ** ឲ្យលើកទាហានបីរយទៅបង្កប់សងខាងផ្លូវវត្តកាំឡូ បើមាតាលោកមិនត្រូវចិត្តហើយ ក៏ឲ្យសញ្ញានឹង**កែហ៊្វ**នូវបណ្ដាទាហានឲ្យចេញមកចាប់ខ្លួន**ឡៅពី**ទុក ការដែលយើងគិតក៏នឹងសម្រេចបានដោយ

ងាយ។ **ស៊ុនគួន**យល់ឃើញត្រូវផង ទើបឲ្យហៅ**កែហ៊្វឹ**មកបង្គាប់ឲ្យលើកទាហានទៅបង្កប់ដូចពាក្យ**លីហាម**និយាយ។

ឯនាង**កៀវកុកឡោ**ក៏លានាង**ង៉ំកុកថៃ**ទៅកាន់ទីលំនៅ ហើយឲ្យបម្រើទៅប្រាប់**ឡៅពី**ថា ពេលព្រឹកស្អែកនាង**ង៉ុំកកថៃ**នឹងចង់មើលឲ្យឃើញរូបភាពអ្នកឲ្យច្បាស់ បង្គាប់ឲ្យអញ្ជើញអ្នកទៅបរិភោគអាហារឯវត្តកាំឡ ត្រូវឲ្យអ្នករៀបចំខ្លួនប្រាណឲ្យស្អាតបាតចុះ។ **ឡៅពី**ឮដូច្នោះក៏ហៅ**ជូឡុង, ស៊ុនខៀន**មកប្រឹក្សា **ជូឡុង**ថានាង**ង៉ំកុកថៃ**ឲ្យអញ្ជើញលោកទៅនោះ នឹងទុកចិត្ត**ស៊ុនគួន**ជាត្រង់មិនបានទេ ខ្ញុំនឹងសុំលើកទាហានប្រាំរយតាមទៅផង នឹងបានជួយការពារប្រុងប្រយ័ត្នរក្សាខ្លួនលោក។ លុះវេលាព្រឹកនាង**ង៉ំកុកថៃ** និង**កៀវកុកឡោ**ក៏នាំគ្នាទៅចាំ**ឡៅពី**ជាមុន **ស៊ុនគួន**ក៏រៀបចំតុតាំងលៀងអាហារហើយ ក៏នាំទីប្រឹក្សាទាំងពួងទៅប្រជុំព្រមគ្នានៅទីវត្តកាំឡ ហើយឲ្យ**លីហាម**ទៅអញ្ជើញ**ឡៅពី**។

**ឡៅពី**ក៏តែងខ្លួនស្លៀកពាក់ប្រដាប់ថ្មី ហើយពាក់ក្រោះពីក្រៅ ឯទាហានដែលនឹងទៅផងនោះ ក៏ឲ្យតែងខ្លួនស្ពាយសង្វារសៀតគ្រប៊ីគ្រប់គ្នា **ឡៅពី**ក៏ឡើងសេះទៅនឹង**លីហាម**។ **ជូឡុង**ក៏តែងខ្លួនពាក់ក្រោះបែបដូចចូលទៅធ្វើការក្នុងសង្គ្រាម លើកទាហានតាម**ឡៅពី**ទៅ លុះទៅដល់វត្តកាំឡហើយ **ឡៅពី**ក៏ចុះពីលើសេះដើរចូលទៅ។ **ស៊ុនគួន**ក្រឡេកឃើញ**ឡៅពី**តែងខ្លួនស្អាតបាត សមនឹងរូបរាងយ៉ាងស្រស់គិតខ្លាច**ឡៅពី** ហើយថែមទាំងឲ្យមានចិត្តអាណិតស្រឡាញ់ ទើបនឹកគិតថា ដែលយើងជាប្រុសតាំងចិត្តប៉ងនឹងធ្វើអន្តរាយ**ឡៅពី** ម្ដេចក៏គង់មានចិត្តអាណិតស្រឡាញ់ម្ល៉េះទៅហើយ ចំណង់បើមាតាយើងអើយ លោកជាស្រីបានឃើញរូប**ឡៅពី**យ៉ាងនេះសមនឹងមានចិត្តអាណិតស្រឡាញ់លើសយើងទៅទៀត ការដែលយើងគិតទុកមុខជា

មិនសម្រេចទេដឹង **ស៊ុនគួន**គិតរំពឹងហើយក៏ក្រោកចេញមកទទួលគំនាប់**ឡៅពី** ហើយនាំចូលទៅគំនាប់នាង**ង៉់កុកថៃ**ជាមាតា។

នាង**ង៉់កុកថៃ**ក្រឡេកឃើញ**ឡៅពី**ចូលទៅដល់ ក៏មានចិត្តសោមនស្សប្រីតា អញ្ជើញ**ឡៅពី**ឲ្យបរិភោគអាហារ ហើយនិយាយនឹង**កៀវកុកឡោ**ថា **ឡៅពី**នេះមានរូបភាពចរិតកិរិយាក៏សមគួរជាកូនប្រសារយើងហើយ។ **កៀវកុកឡោ**ថា ឯលក្ខណៈ**ឡៅពី**នេះល្អណាស់ មានកិរិយានិងចិត្តក៏ទន់សុភាពរៀបរយ តែងអាស្សូរករុណាបណ្ដារាស្ត្រទាំងពួង យូរទៅគង់នឹងមានបុណ្យវាសនាអាយុក៏យឺនយូរអង្វែង គួរដែលជាបុត្រប្រសាររបស់អ្នក។ ខណៈកាលកំពុងនិយាយគ្នានោះ នាង**ង៉់កុកថៃ**ក្រឡេកឃើញ**ជូឡុង**តែងខ្លួនជាទាហាន សៀតគ្រប៉ីដើរចូលមកឈរពីក្រោយ**ឡៅពី** នាងក៏សួរ**ឡៅពី**ថា ទាហាននេះឈ្មោះអ្វី? **ឡៅពី**ឆ្លើយថា ឈ្មោះ**ជូឡុង** **សែទៀវ** ជាពួកស្រុកសៀងសាន។

នាង**ង៉់កុកថៃ**សួរថា កាល**ចូឆូ**លើកទាហានមកច្បាំងនឹងអ្នកនៅស្រុកតុងអៀងឡោមព័ទ្ធគ្រប់គ្រួរបស់អ្នក **ជូឡុង**នេះឬដែលច្បាំងដណ្ដើមយកគ្រប់គ្រួបុត្រភរិយារបស់អ្នកចេញពីក្នុងចំណោមបាន? **ឡៅពី**ឆ្លើយថា បាទគឺ**ជូឡុង**នេះហើយ។ នាង**ង៉់កុកថៃ**ក៏សរសើរ**ជូឡុង**ថាមានរូបរាងកិរិយាសមគួរជានាយទាហានឯក ហើយក៏ឲ្យមនុស្សបម្រើចាក់ស្រាមួយពែងហុចទៅឲ្យ**ជូឡុង**ផឹក **ជូឡុង**ក៏ខ្សឹបប្រាប់**ឡៅពី**ថា ខ្ញុំបាទដើរចូលមកឃើញទាហានប្រហែលបីរយកាន់គ្រឿងសាស្ត្រាវុធបង្កប់សងខាងផ្លូវ ឲ្យលោករិះគិតប្រយ័ត្នខ្លួនឲ្យមួនមាំ មុខជាគេនឹងគិតធ្វើប្រទូសរ៉ាយលោកហើយ។ នាង**ង៉់កុកថៃ**សួរ**ឡៅពី**ថា **ជូឡុង**ខ្សឹបនិយាយពីការអ្វី? **ឡៅពី**ក៏យំខ្សឹកខ្សួល ហើយឱនគំនាប់ជម្រាបថា លោកនឹងសម្លាប់ខ្ញុំបាទចេញក៏តាមការចុះ តែសូមមេត្តាកុំឲ្យមានសេចក្ដីវេទនាលំបាកឡើយ។ នាង**ង៉់កុកថៃ**សួរថា

ហេតុម្តេចបានជាអ្នកនិយាយដូច្នេះ? **ឡៅពី**ក៏អធិប្បាយតាមពាក្យ**ជូឡុង**និយាយ។ នាង**ង៉កុកថៃ**ឮដូច្នោះខឹងណាស់ ស្រែកឱ្យ**ស៊ុនគួន**ថា **ឡៅពី**ជាកូនប្រសារអញហើយ ហេតុម្តេចខ្លួនឱ្យលើកទាហានមកបង្កប់ទុកនឹងធ្វើអន្តរាយ**ឡៅពី**ដូច្នោះ?

**ស៊ុនគួន**ឮដូច្នោះ ដោយសេចក្តីខ្លាចមាតាក៏ឆ្លើយថា ការនេះខ្ញុំបាទមិនបានដឹងសោះ ទើបក្តែងហៅ**លីហាម**សួរថា នរណាមករិះគិតធ្វើការនាំទាហានមកបង្កប់ដូច្នេះ? **លីហាម**ឃើញ**ស៊ុនគួន**និយាយកែដោយខ្លាចមាតាដូច្នោះ ក៏ដោះសារថា ការនេះខ្ញុំបាទមិនបានដឹងដែរ **កែហ៊្វ**រិះគិតធ្វើដោយអំពើចិត្តខ្លួនផ្សេងទេ។ នាង**ង៉កុកថៃ**ឮដូច្នោះក៏ឱ្យហៅ**កែហ៊្វ**មកជេរប្រទេចផ្តាសាជាច្រើន ហើយបង្គាប់ទាហានឱ្យយកខ្លួន**កែហ៊្វ**ទៅប្រហារជីវិត។

**ឡៅពី**និយាយនឹងនាង**ង៉កុកថៃ**ថា គ្រានេះមកធ្វើការមង្គល ដែលលោកនឹងសម្លាប់ទាហានចេញពីព្រោះខ្លួនខ្ញុំនោះមិនគួរ មួយទៀតខ្ញុំបាទនឹងនៅពឹងបុណ្យលោកតទៅក៏នឹងមិនមានសេចក្តីសុខ ចូរលោកមេត្តាខ្ញុំបាទ ហើយអាណិតលើកទោស**កែហ៊្វ**ម្តងចុះ។ **កៀវកុកឡោ**ក៏ជួយសុំទោសជាមួយនឹង**ឡៅពី** ឯនាង**ង៉កុកថៃ**ក៏ព្រមលើកទោស**កែហ៊្វ** ហើយក៏បណ្តេញឱ្យដើរចេញទៅ។ ទាហានទាំងពួងដែលបង្កប់នៅនោះ លុះដឹងដូច្នោះក៏នាំគ្នារត់ចេញអស់ទៅ។

ឯនាង**ង៉កុកថៃ** និង**កៀវកុកឡោ** លុះលោមលៀង**ឡៅពី**សម្រេចហើយក៏នាំគ្នាទៅកាន់ទីលំនៅវិញ **ឡៅពី**និង**ស៊ុនគួន**ក៏នាំគ្នាត្រឡប់មកដល់មុខវត្ត ឃើញថ្មសិលាមួយផ្ទាំងធំនៅក្បែរផ្លូវ **ឡៅពី**ក៏ហូតគ្រប៊ីហើយសំពះព្រះអធិដ្ឋានថា បើខ្ញុំនឹងបានត្រឡប់វិលទៅស្រុកកេងជីវវិញ ហើយបានទំនុកបម្រុងរាស្ត្រប្រជាឱ្យបានសេចក្តីសុខ សុំឱ្យខ្ញុំកាប់ថ្មនេះដាច់ជាពីរកំណាត់ បើខ្ញុំនឹងស្លាប់នៅក្នុងស្រុកឡាំស៊ីមិនបានត្រឡប់ទៅវិញទេ សុំកុំឱ្យថ្មនេះបែកប្រេះឆាអ្វីឡើយ ហើយ**ឡៅពី**ក៏កាប់ចុះទៅ ថ្ម

ផ្ទាំងនោះក៏ដាច់ចេញជាពីរកំណាត់។ **ស៊ុនគួន**ដើរពីក្រោយ**ឡៅពី** ក្រឡេកឃើញដូច្នោះក៏សួរថា អ្នកខឹងនឹងថ្មនេះដោយហេតុអ្វី? **ឡៅពី**ថា ខ្លួនខ្ញុំអាយុដល់ហាសិបឆ្នាំហើយ មិនទាន់បានធ្វើការទំនុកបម្រុងផែនដីព្រះចៅ**ហៀនតេ**ជួយកម្ចាត់សត្រូវរាជសម្បត្តិចេញបាន ឥឡូវជាបុណ្យរបស់អ្នក នាង**ង៉ុកថៃ**មានសេចក្តីករុណាលើកបុត្រីឲ្យជាភរិយាខ្ញុំ ៗក៏មានចិត្តសោមនស្សត្រេកអរណាស់ បានជាខ្ញុំសុំអធិដ្ឋានផ្សងសច្ចាថា បើខ្លួនខ្ញុំនឹងអ្នកជាសាច់ថ្លៃនឹងគ្នាហើយ នឹងបានជួយគ្នាកម្ចាត់**ចូឆ្វ**ជួយទំនុកទម្រុងប្រជានុរាស្ត្របានសេចក្តីសុខតទៅ សុំឲ្យកាប់ថ្មសិលានេះដាច់ចេញជាពីរកំណាត់ចុះ ខ្ញុំក៏កាប់ថ្មនេះដាច់ដូចសច្ចា។

**ស៊ុនគួន**ឮដូច្នោះ ក៏ហូតគ្របីចេញអធិដ្ឋានថា បើខ្ញុំនឹងទារយកស្រុកកេងជីវបាន នឹងបានទំនុកបម្រុងឲ្យរាស្ត្រប្រជាស្រុកតងង៉ជាសុខតទៅ សុំឲ្យកាប់ថ្មនេះដាច់ដូច**ឡៅពី**ចុះ ហើយនិយាយឮថា ខ្ញុំសូមអធិដ្ឋានដល់ទេពារ័ក្សទាំងពួង បើខ្ញុំនិង**ឡៅពី**នឹងបានជួយគ្នាកម្ចាត់**ចូឆ្វ**ជាសត្រូវរាជសម្បត្តិបានដូចប្រាថ្នា សុំឲ្យសិលានេះដាច់ជាពីរកំណាត់ចុះ។ **ស៊ុនគួន**ក៏យកគ្របីកាប់ចុះ ថ្មនោះក៏ដាច់ដូច**ឡៅពី**។ **ស៊ុនគួន**និង**ឡៅពី**ក៏ត្រេកអរជាមួយគ្នា ចាប់ដៃគ្នាសើច ហើយត្រឡប់ចូលទៅផឹកសុរាក្នុងវត្ត។

**ស៊ុនខៀន**ឃើញ**ឡៅពី**ផឹកសុរាជាមួយ**ស៊ុនគួន**យូរណាស់ ក៏ចោលកន្ទុយភ្នែកមិចឲ្យ**ឡៅពី** ៗឃើញដូច្នោះក៏ដឹងគំនិតគិតរបស់**ស៊ុនខៀន** ទើបនិយាយនឹង**ស៊ុនគួន**ថា ខ្ញុំទទួលទានស្រាមិនសូវបានទេ សុំលាអ្នកទៅសិន។ **ស៊ុនគួន**ក៏ដាក់ពែងស្រាចេញ ដឹកដៃ**ឡៅពី**ឡើងទៅលើភ្នំនៅក្បែរវត្តកាំឡូ ចង្អុលឲ្យមើលទីភូមិឋានក្នុងស្រុកតងង៉នេះ មនុស្សម្នាមានទ្រព្យសម្បត្តិផ្ទះសម្បែងមាំមួនណាស់ លើសជាងទីដទៃ។ **ឡៅពី**ក្រឡេកមើលទៅឃើញទូកតូចមួយ ចែវទៅពីមុខស្រុកនោះលឿនរហ័សណាស់ ក៏និយាយនឹង**ស៊ុនគួន**ថា ខ្ញុំឮល្បីគេនិយាយថា ពួកស្រុកកាំងតាំងចំណានក្នុង

ការទូកនិងថែរ និងបើកក្តោងក៏លឿនរហ័សដូចគ្នា ឯស្រុកកាំងប៉ុកខាងទិសឯជើង ក៏ចំណានក្នុងការជិះសេះ ក៏ឃើញថាចំណេះនោះវិសេសពិតដូចគេនិយាយ។

**ស៊ុនគួន**ឮដូច្នោះក៏ថា អ្នកចរចាយ៉ាងនេះគឺចំអកឲ្យខ្ញុំទេ ព្រោះឃើញថាស្រុកកាំងតាំងចំណានតែការទូកម្យ៉ាង ទើបឲ្យទាហានទៅយកសេះដែលធ្លាប់ជិះនោះមក **ស៊ុនគួន**ក៏ឡើងលើសេះបំផាយចុះពីលើភ្នំ ហើយត្រឡប់បំផាយទៅវិញ **ស៊ុនគួន**ក៏សើចចំអកឲ្យ**ឡៅពី**ថា ពួកស្រុកកាំងតាំងមិនចេះជិះសេះសោះ។ **ឡៅពី**ឮដូច្នោះក៏ប្រើទាហានទៅយកសេះមកជិះឲ្យ**ស៊ុនគួន**មើល **ស៊ុនគួន**ក៏ជិះសេះបំផាយតាម**ឡៅពី** ចុះមកពីលើភ្នំនឹងតម្រង់ទៅទីសំណាក់វាស្ត្រ។ អ្នកស្រុករាល់គ្នាឃើញ**ស៊ុនគួន**និង**ឡៅពី**បំផាយសេះតាមគ្នាមក ក៏មានសេចក្តីសប្បាយរីករាយ។

លុះ**ឡៅពី**ទៅដល់ទីកន្លែង **ស៊ុនខៀន**និង**ជូឡុង**និយាយថា សុំឲ្យលោករិះគិតការទៅនិយាយនឹង**កៀវកុកឡោ**អង្វរករឲ្យប្រញាប់រៀបការងារចុះ បើបង្អង់នៅយូរខ្លាចក្រែង**ជីវយី**នឹងរកឧបាយពន្យល់**ស៊ុនគួន**ប្រការម្តេចទៅទៀតក៏មិនដឹង កិច្ចការរបស់យើងក៏នឹងខូចអសារឥតការ។ លុះវេលាព្រឹក **ឡៅពី**ក៏ចូលទៅគំនាប់**កៀវកុកឡោ** ៗក៏ចេញមកគំនាប់តបគ្នា ហើយនាំចូលទៅខាងក្នុង។ **ឡៅពី**និយាយថា ឥឡូវខ្ញុំបាទមកអាស្រ័យនៅក្នុងផ្ទះទទួលភ្ញៀវល្ហេវល្ហណាស់ ព្រោះទីនោះគ្មានបិទបាំងឲ្យមាំមួន ដែលនាង**ង៉ំកុកថៃ** និង**ស៊ុនគួន**មានសេចក្តីមេត្តាខ្ញុំបាទ ៗក៏ដឹងអស់ហើយ តែក្រែងពួកទាហាននិងបណ្តាអ្នកស្រុកគិតធ្វើអន្តរាយខ្ញុំបាទ ព្រោះខ្ញុំបាទនៅយូរទៅទៀតមិនបាន។

**កៀវកុកឡោ**ថា អ្នកកុំវិតក្កព្រួយឡើយ ខ្ញុំនឹងទៅនិយាយឲ្យនាង**ង៉ំកុកថៃ**រៀបចាត់ការពិភក្តិរក្សាអ្នកឲ្យស្រួលបួល។ **ឡៅពី**ក៏លាត្រឡប់ចេញមកវិញ។ **កៀវកុកឡោ**ក៏ទៅឯនាង**ង៉ំកុកថៃ**ហើយនិយាយថា **ឡៅពី**មកនិយាយនឹងខ្ញុំថា នឹងទ្រាំនៅយូរ

មិនបាន ក្រែងទាហាននិងបណ្ដាអ្នកស្រុកចិត្តអាក្រក់គិតធ្វើអន្តរាយផ្សេងៗ។ នាង**ង៉់កុកថៃ**ថា **ឡៅពី**ជាកូនប្រសារខ្ញុំហើយ នរណានឹងហ៊ានមកបៀតបៀនបាន? ហើយក៏ចាត់ចែងទទួល**ឡៅពី**ឲ្យចូលទៅនៅទីខាងក្នុង ដើម្បីនឹងរកមើលឫក្សល្អដែលនឹងរៀបមង្គលការ។ **ឡៅពី**ក៏និយាយនឹងនាង**ង៉់កុកថៃ**ថា ខ្លួនបានមកនៅក្នុងស្រុកនេះហើយ **ជូឡុង** និង**ស៊ុនខៀន**ឃុំទាហាននៅខាងក្រៅ មិនមាននរណានឹងជួបនិយាយស្ដីរឭក ក្រែងនាំទាហានទៅកំហែងគំរាមរាស្ត្រប្រជា។ នាង**ង៉់កុកថៃ**ក៏ឲ្យរៀបចំទីកន្លែងឲ្យ**ជូឡុង** និង**ស៊ុនខៀន** ហើយនិងពួកទាហានចូលមកនៅខាងក្នុង។

លុះថ្ងៃបានឫក្សជោគជ័យល្អ នាង**ង៉់កុកថៃ**ក៏ឲ្យរៀបតុតាំងលៀងអាហារអស់បណ្ដានាហ្មឺនសព្វមុខមន្ត្រី ហើយនិងរៀបវិវាហមង្គល**ឡៅពី** និងនាង**ស៊ុនហ៊ូយិន**តាមប្រវេណី លុះវេលាយប់បណ្ដានាហ្មឺនក៏លាត្រឡប់ទៅផ្ទះរៀងៗខ្លួន។ នាង**ង៉់កុកថៃ**ក៏អុជទៀនបំភ្លឺទាំងសងខាងមាគា តាំងពីទីលំនៅ**ឡៅពី**រហូតទៅដល់បន្ទប់នាង**ស៊ុនហ៊ូយិន** ហើយឲ្យចាស់ទុំនាំ**ឡៅពី**ចូលទៅរួមដំណេកនឹងនាង**ស៊ុនហ៊ូយិន**។ លុះ**ឡៅពី**ដើរដល់កន្លែងនាង**ស៊ុនហ៊ូយិន**នៅ ក៏ឃើញសុទ្ធតែពួកស្ត្រីទាំងពួងតែងខ្លួនសៀតគ្រប៊ី ដូចពួកទាហានចូលច្បាំងក្នុងសង្គ្រាម ហើយឃើញគ្រឿងសាស្ត្រាវុធផ្សេងៗរៀបបញ្ឈរព្យួរទុកជាច្រើន។ **ឡៅពី**ក៏ភ័យតក់ស្លុតឈរស្លាំងកាំង។

ស្រីចាស់ម្នាក់និយាយនឹង**ឡៅពី**ថា លោកកុំភ័យ! នាង**ស៊ុនហ៊ូយិន**តាំងពីតូចមកចូលចិត្តតែហាត់រៀនខាងក្បួនអាវុធ បែបពួកពិជ័យសង្គ្រាម ហើយចូលចិត្តមើលទាហានរាំភ្លេងអាវុធចូលប្រយុទ្ធគ្នា បានជាវេលានេះនាងក៏ហ្វឹកហាត់ពួកស្រីឲ្យរាំគ្រប៊ី និងចូលតយុទ្ធគ្នាដោយភ្លេងអាវុធផ្សេងៗឲ្យលោកមើល។ **ឡៅពី**ថា ឯការរាំភ្លេងអាវុធច្បាំងគ្នានេះមិនជាការគួរសមនឹងនាង**ស៊ុនហ៊ូយិន**មើលសោះ ព្រោះចិត្តខ្ញុំជាអ្នកញញើតខ្លាចណាស់ ឲ្យប្រមូលរៀបលាក់ទុកឲ្យអស់ទៅ។ ស្រីចាស់នោះក៏

ចូលទៅប្រាប់នាង**ស៊ុនហ៊ូយិន** ៗឮដូច្នោះក៏អស់សំណើចហើយថា ធ្វើការសង្គ្រាមមកដល់អាយុប៉ុណ្ណោះហើយ ឃើញគ្រឿងសាស្ត្រាវុធត្រឡប់ជាខ្លាចវិញ។ ហើយនាងក៏បង្គាប់ឲ្យពួកស្រីបម្រើទាំងឡាយ ឲ្យប្រមូលគ្រឿងអាវុធទាំងអស់យកទៅទុកដាក់អស់ ហើយក៏អញ្ជើញ**ឡៅពី**ចូលទៅដល់ដំណេកនាង**ស៊ុនហ៊ូយិន**។ អ្នកទាំងពីរក៏បានរួមសុខទុក្ខនឹងគ្នាតាមប្រពៃណីធម្មតា ជាទីសោមនស្សស្មោះសរទៅវិញទៅមក។ លុះនៅនឹងគ្នាយូរថ្ងៃ **ឡៅពី**ក៏រៀបចំចំណាយរបស់ទ្រព្យសព្វវត្ថុមាសប្រាក់ ឲ្យជាបំណាច់រង្វាន់ពួកស្រីបម្រើក្នុងទីនោះជាច្រើនគ្រប់ៗគ្នា ប្រាថ្នានឹងចងចិត្តឲ្យគិតរាប់អានស្រឡាញ់ខ្លួន ហើយក៏ប្រើ**ស៊ុនខៀន**ឲ្យនាំព័ត៌មានទាំងពួងទៅជម្រាបប**ខុងបេង**ឯស្រុកកេងជីវគ្រប់ប្រការ។

ឯ**ស៊ុនគួន**សរសេរសំបុត្រឲ្យដំណឹងដល់**ជីវយី**នៅស្រុកឆសងគុនតាមហេតុគ្រប់ប្រការ **ជីវយីដឹ**ងហើយក៏តូចចិត្តគិតបរិវតក្កពន់ប្រមាណ ទើបរិះគិតកលឧបាយបានម្យ៉ាងទៀត ក៏ផ្ញើតសរសេរផ្ញើមក**ស៊ុនគួន**សេចក្តីថា ពីដើមខ្លួនខ្ញុំគិតធ្វើការនេះប្រាថ្នានឹងធ្វើអន្តរាយ**ឡៅពី** ដើម្បីនឹងទារយកស្រុកកេងជីវមកវិញប៉ុណ្ណោះ ការដែលគិតធ្វើនោះក៏ត្រឡប់ជាខុសខាងយើង ក៏បានចំណេញទៅខាង**ឡៅពី**ទៅវិញ ដូច្នេះតម្រិះរបស់ខ្ញុំនឹងគិតក**លឧ**បាយទៅទៀត តែថា**ឡៅពី**នេះជាមនុស្សមានតម្រិះប្រាជ្ញាណាស់ ធ្វើកិរិយាខាងក្រៅជាល្អរួសរាយនឹងអាណាប្រជានុរាស្ត្រទាំងឡាយទូទៅ សមបានជា**ខុងបេង**មកជាទីប្រឹក្សាធំថែម**ទៀ**ត មានទាំង**គួនអ៊ូ, តៀវហ៊ុយ, ជូឡុង**ជានាយទាហានឯក មុខជាមិនមែនទៅនៅក្រោមបង្គាប់អ្នកឯណា ការនេះសុំឲ្យលោកប្រើប្រាជ្ញាប្រលោមយកខ្លួន**ឡៅពី**ឲ្យភាន់វង្វេងនៅក្នុងស្រុកតងង៉ំតំណរទៅ **ឡៅពី**នឹងភ្លេចបោះបង់**ខុងបេង, គួនអ៊ូ, តៀវហ៊ុយ** យើងនឹងលើកទ័ពទៅវាយយកស្រុកកេងជីវ គង់នឹងសម្រេចបានដោយងាយ។ បើ**ឡៅពី**ត្រឡប់ទៅស្រុកវិញបាន

ក៏ដូចលែងត្រីទៅក្នុងសមុទ្រ គង់គិតត្រឡប់ធ្វើជាសត្រូវទៅថ្ងៃមុខ ឲ្យលោកពិគ្រោះមើលតាមការគួរចុះ។ ហើយក៏ប្រើទាហានឲ្យកាន់សំបុត្រនោះទៅឲ្យ**ស៊ុនគួន**ឯស្រុកឡាំស៊ី។

**ស៊ុនគួន**ទទួលសំបុត្រនោះមើលដឹងសេចក្តីហើយ ក៏ឲ្យហៅ**ទៀវជៀវ**មកប្រឹក្សា **ទៀវជៀវ**ក៏និយាយនឹង**ស៊ុនគួន**ថា សេចក្តីដែលជីវយីគិតល្អណាស់ ត្រូវនឹងគំនិតខ្ញុំបាទដែរ សុំឲ្យលោកសាងគ្រឹះស្ថានមួយឲ្យ**ឡៅពីនៅ** ហើយជីកជាស្រះស្រង់ដាំព្រលឹតរំចង់ស្បង្ក័ជ និងឈូកសឈូកច្រាលគ្រប់ពណ៌ រួចធ្វើជាសួនច្បារដាំផ្កាដែលមានក្លិនក្រអូបក្រអែបសព្វទិសា ជ្រើសរើសរកស្រីកញ្ញាដែលមានរូបឆោមលោមពណ៌ល្អ ឲ្យបម្រើបម្រាស់**ឡៅពី**ជា**ទី**តម្រេកត្រេកត្រអាល ឯ**ឡៅពី**ជាមនុស្សចិត្តស្រាលធ្លាប់ទ័លក្រមកយូរហើយ មិនធ្លាប់មានរុងរឿង បើនឹងទំនុកបម្រុងឲ្យថ្កើងសប្បាយ ឲ្យមាសប្រាក់ចេញចាយមិនមានខ្វះខាត ក៏នឹងត្រេកអរភ្លើនចិត្តភ្លេចគិតដល់**ខុងបេង, គួនអ៊ូ** និង**តៀវហ៊ុយ** សូន្យសោះ ឯ**ខុងបេង, គួនអ៊ូ** និង**តៀវហ៊ុយ**នោះក៏នឹងតូចចិត្តលែងគិតស្រណោះ**ឡៅពី**ជាទីពឹង យើងក៏គង់នឹងបានស្រុកកេងជីវដោយងាយ សុំលោកប្រញាប់រិះគិតធ្វើតាមគំនិត**ជីវយី**ថានោះចុះ។

**ស៊ុនគួន**ឮដូច្នោះ ក៏មានចិត្តត្រេកអរណាស់ ទើបចាត់មេការឲ្យកសាងគ្រឹះស្ថានមានជីកស្រះស្រង់និងសួនផ្កាសម្រេចហើយ ក៏ឲ្យអញ្ជើញ**ឡៅពី** នាង**ស៊ុនហ៊ូយិន**ទៅនៅសំណាក់ ហើយចាត់ខ្ញុំស្រីប្រុសជាមនុស្សបម្រើនិងមាសប្រាក់ជាច្រើន ហើយឲ្យជ្រើសរើសរកស្រីកញ្ញា ដែលមានរូបឆោមល្អចំនួនដប់នាក់ ឲ្យច្រៀងរាំបម្រើ**ឡៅពី** គ្រប់ទិនទិវារាត្រី។ នាង**ង៉កុកថៃ**ឃើញ**ស៊ុនគួន**រាប់អានស្រឡាញ់**ឡៅពី**ដូច្នោះ ក៏មិនបានដឹងកលឧបាយ មានចិត្តសប្បាយសោមនស្សពេកណាស់។

សម័យនោះ **ឡៅពី**ទៅជាមនុស្សមានទ្រព្យសម្បត្តិបរិបូរដោយបរិវា ក៏ធ្វេសវង្វេងមិនបានគិតវិលត្រឡប់ទៅស្រុកកេងជីវវិញសោះឡើយ ម៉្លោះហើយ **ជូឡុង**ក៏គ្មានកិច្ចការអ្វីធ្វើ តែងនាំទាហានទាំងប្រាំរយដើរចេញទៅ ឲ្យទាហានទាំងនោះហាត់ជិះសេះបាញ់ធ្នូរាល់ៗថ្ងៃ។ លុះយូរទៅក៏កន្លងចូលឆ្នាំថ្មី **ជូឡុង**ក៏ភ្នកស្មារតីនឹកឃើញដល់ពាក្យ**ខុងបេង**ផ្ដាំទុកថា បើទៅដល់ស្រុកឡាំស៊ីឲ្យហែកស្រោមសំបុត្រទីមួយបើកមើល បើដល់ចូលឆ្នាំថ្មីឲ្យហែកស្រោមសំបុត្រទីពីរបើកមើល ឯសំបុត្រទីបីឲ្យហែកមើលក្នុងគ្រាដែលមានអាសន្នក្រ។ គ្រានេះចៅហ្វាយយើងមកនៅក៏យូរលង់ដល់ចូលឆ្នាំថ្មី ឃើញធ្វេសប្រហែសវង្វេងទៅដោយសេចក្ដីស្រឡាញ់ភរិយាថ្មីពេកណាស់ មិនដែលជួបប្រទះនិយាយការអ្វីនឹងយើងដល់ម្ដងសោះ គួរនឹងហែកស្រោមសំបុត្រទីពីរបើកមើលចុះ។

**ជូឡុង**គិតដូច្នោះ ក៏ហែកស្រោមសំបុត្រទីពីរមើលឃើញសេចក្ដីថា បើ**ឡៅពី**ធ្វេសស្មារតីដោយសេចក្ដីប្រតិព័ទ្ធចំពោះភរិយាថ្មី ដោយកលឧបាយ**ស៊ុនគួន** មិនបានគិតរឭកនឹកនឹងចង់ត្រឡប់ទៅស្រុកវិញទេ ឲ្យ**ជូឡុង**ទៅល្បួងបញ្ឆោត**ឡៅពី**ថា **ចូឆូ**លើកទ័ពមកវាយស្រុកកេងជីវហើយ **ខុងបេង**ឲ្យ**គួនអ៊ូ, តៀវហ៊ុយ**ចេញច្បាំងរាំងរាជាពន្លឹកណាស់ កងទ័ព**ចូឆូ**ក៏នៅមិនទាន់វិលត្រឡប់ បើនិយាយរៀបរាប់ដូច្នោះហើយ **ឡៅពី**នៅតែអាឡោះអាល័យភរិយា ក៏ត្រូវឲ្យថា រំឭក**ឡៅពី**ឲ្យនាំរឿងរ៉ាវដែល**ជីវយី**និង**ស៊ុនគួន**ធ្វើកលឧបាយនោះ ឲ្យនាង**ស៊ុនហ៊ូយិន**ស្ដាប់ ឯនាង**ស៊ុនហ៊ូយិន**នោះ ជាមនុស្សប្រកបដោយសត្យពិតត្រង់ គង់នឹងដាច់ចិត្តដិតដោយតាម**ឡៅពី**ទៅជាប្រាកដ។ **ជូឡុង**លុះដឹងតាមសេចក្ដីសំបុត្រដូច្នោះហើយ ក៏ចូលទៅសុំជួបនឹង**ឡៅពី** លុះទៅដល់ទ្វារផ្ទះក៏ឲ្យស្រីម្នាក់ចូលទៅជម្រាប**ឡៅពី**ថា **ជូឡុង**ចូលមកចង់ជួប ព្រោះមានការអាសន្នប្លែក **ឡៅពី**ឮដូច្នោះក៏ចេញទៅជួបនឹង**ជូឡុង** ៗក៏ធ្វើជា

ភ័យរលះរលាំងនិយាយនឹង**ឡៅពី**ថា លោកមកនៅបានសេចក្ដីសុខសម្រាន្តក្នុងដែនស្រុកនេះហើយ ប្រហែលជាភ្លេចស្រុកកេងជីវសោះទេដឹង? **ឡៅពី**ក៏សួរថា ហេតុម្ដេចបានជាភ័យភិតបែបដូចរត់ចូលមក? **ជូឡុង**ឆ្លើយតាមសេចក្ដីសំបុត្រ**ខុងបេង**សរសេរទុកមកនោះគ្រប់ប្រការ។ **ឡៅពី**ឮដូច្នោះក៏ថា ចាំយើងទៅប្រឹក្សានឹងនាង**ស៊ុនហ៊ួយិន**។ **ជូឡុង**ថា ដែលលោកនឹងប្រឹក្សានោះមុខជានាង**ស៊ុនហ៊ួយិន**មិនឲ្យលោកទៅទេ លោកកុំឲ្យនាង**ស៊ុនហ៊ួយិន**ដឹងឡើយ ពេលយប់នេះយើងនាំគ្នារត់ទៅដើម្បីនឹងបានជួយ**ខុងបេង**ប្រឹងរិះគិតធ្វើការច្បាំងនឹង**ចូឆ្វ**។

**ឡៅពី**ថា អ្នកវិលទៅក្រៅសិនចុះ ចាំយើងត្រិះរិះមើលសិន។ **ជូឡុង**ក៏គំនាប់លា**ឡៅពី**ចេញទៅ **ឡៅពី**ក៏ត្រឡប់ចូលមកកន្លែងធ្វើជាយំសោក ប្រាថ្នានឹងឲ្យភរិយាសាកសួរ នាង**ស៊ុនហ៊ួយិន**ឃើញហើយក៏សួរថា អ្នកមានទុក្ខរឿងអ្វីបានជាយំសោកដូច្នេះ? **ឡៅពី**ក៏ថ្លែងប្រាប់ថា បងគិតរិតក្ដដល់គុណមាតាបិតា កាលលោករស់នៅក៏មិនបានតបគុណអ្វីឡើយ លុះលោកអនិច្ចកម្មទៅហើយក៏មិនបានទៅគោរពបូជាដូចមិនមានសេចក្ដីកតញ្ញូសោះ បងមកនៅនឹងប្អូនគ្រានេះក៏យូរណាស់ហើយ គ្រានេះក៏ចូលឆ្នាំថែមទៅទៀត បងគិតនឹកដល់គុណូបការៈបិតាមាតាដូច្នេះ បានជាមិនមានសេចក្ដីសប្បាយ។ នាង**ស៊ុនហ៊ួយិន**ថា អ្នកកុំនិយាយបញ្ឆោតខ្ញុំថ្វីទៀត សេចក្ដីដែល**ជូឡុង**មកជម្រាបអ្នកនោះ ខ្ញុំក៏បានឮជាក់ហើយ អ្នកនឹងចង់ត្រឡប់ទៅស្រុកកេងជីវវិញជាប្រញាប់ ហេតុអ្វីអ្នកមកសារស័ព្ទប្រាប់ខ្ញុំដូច្នេះវិញ?

**ឡៅពី**តបថា សេចក្ដីទាំងអម្បាលនេះ បើប្អូនដឹងអស់ហើយនឹងបង្អង់នៅយូរមិនវិលទៅស្រុកកេងជីវឯណាបាន បើកើតថ្លោះការណ៍ឡើង មនុស្សទាំងពួងក៏នឹងនាំគ្នាសើចដំនៀលដៀលត្មះថា បងធ្វេសរង្វេងដោយភរិយា ទាល់តែអន្តរាយស្រុកដោយ**ចូឆ្វ** តែថាបើនឹងទៅឥឡូវនេះសោត បងក៏ជាប់ចិត្តអាល័យប្អូនដូចរូបខ្លួនបង

ហេតុនេះបានជាបងទប់សំណោកពុំបាន ។ នាង**ស៊ុនហ៊ួយិន**ឆ្លើយថា ខ្លួនខ្ញុំជាបាទបរិច្ចាគដាច់ស្រេចជារបស់អ្នកហើយ បើអ្នកនឹងរិះគិតដោយប្រការយ៉ាងណា ខ្ញុំត្រូវតែស្តាប់តាមអធ្យាស្រ័យនៃអ្នកទាំងអស់។ **ឡៅពី**ឆ្លើយថា ប្អូននិយាយនេះត្រូវណាស់ តែបងនៅបារម្ភចិត្តមាតារបស់ប្អូននិង**ស៊ុនគួន**ជាបង ក្រែងមិនព្រមឲ្យទៅ បើប្អូនមានមេត្តា មិនឲ្យទ្រូងបងរងកម្មទ្រាំទុក្ខក្នុងរឿងនេះ ក៏ចូរត្រិះរិះគិតឲ្យស្រួលទៅផងចុះ បងនឹងគិតស្រូតរូតត្រឡប់ទៅស្រុកកេងជីវវិញជាប្រញាប់ នឹងបានរិះគិតច្បាំងតស៊ូនឹង**ចូឆូ** ហើយ**ឡៅពី**ក៏ធ្វើជាយំសញ្ជប់ជ្រប់ឱរា។

នាង**ស៊ុនហ៊ួយិន**ក៏លួងលោមថា កុំឲ្យអ្នកកើតទុក្ខអ្វីឡើយ ខ្ញុំនឹងទៅស្រដីអង្វរករអ្នកម្តាយ ប្រហែលជានឹងព្រមឲ្យយើងទៅស្រុកនាយទាំងពីរនាក់។ **ឡៅពី**ថា បើប្រសិនមាតាប្អូនព្រមឲ្យទៅហើយ តែបើ**ស៊ុនគួន**មិនព្រមឲ្យទៅវិញ ប្អូននឹងរិះគិតម្តេចទៅទៀត? នាង**ស៊ុនហ៊ួយិន**ថា ខ្ញុំនឹងទៅលាមាតាថា ដល់ចូលឆ្នាំថ្មីជាថ្ងៃខែត្រូវធ្វើពិធីសែនរំឭកគុណបិតាមាតា អ្នកត្រូវការធ្វើទៅតាមទំនៀមនឹងខាននៅស្ងៀមក៏ពុំបាន ខ្ញុំក៏ត្រូវទៅជាមួយបង បើមាតាព្រមអនុញ្ញាតហើយ យើងនឹងនាំគ្នាលបរត់ទៅកុំឲ្យ**ស៊ុនគួន**ដឹងទាន់។

**ឡៅពី**ឮដូច្នោះ ក៏មានចិត្តសោមនស្សត្រេកអរពន់ប្រមាណ បាននិយាយនឹងនាង**ស៊ុនហ៊ួយិន**ថា បងមិនបង់ចិត្តដែលបានប្តូរជីវិតស្រឡាញ់ប្អូន បើប្អូនរិះគិតបានដូចប្រាថ្នាក្នុងគ្រានេះ ទោះបីនឹងស្លាប់បងក៏មិនភ្លេចគុណប្អូន។ ហើយ**ឡៅពី**ក៏ឲ្យហៅ**ជូឡុង**មកបង្គាប់ថា ដល់ថ្ងៃនក្ខត្តឫក្សចូលឆ្នាំថ្មី ឲ្យលើកទាហានទាំងអស់ចេញទៅព្រមគ្នា រង់ចាំយើងនៅផ្លូវហ្លួងខាងក្រៅស្រុក យើងនឹងនាង**ស៊ុនហ៊ួយិន**នឹងធ្វើឧបាយកលនាំគ្នារត់ទៅ អ្នកចូរត្រៀមបម្រុងការទុកឲ្យព្រម។ **ជូឡុង**ទទួលប្រសាសន៍ហើយ ក៏លាចេញទៅចាត់ការតាម**ឡៅពី**បង្គាប់។ ខណៈនោះ ព្រះចៅ

**ហៀនតេ**សោយរាជសម្បត្តិបានដប់ប្រាំមួយឆ្នាំ ជាថ្ងៃនក្ខត្តឫក្សចូលឆ្នាំថ្មី។ **ស៊ុនគួន**ក៏ឲ្យរៀបតុតាំងលៀងអាហារដល់នាហ្មឺនតូចធំទាំងពួង។

**ឡៅពី**និងនាង**ស៊ុនហ៊ូយិន**ក៏នាំគ្នាចូលទៅគំនាប់លានាង**ង៉ុកថៃ** ហើយនាង**ស៊ុនហ៊ូយិន**ជម្រាបមាតាថា **ឡៅពី**រឭកនឹកដល់គុណបិតាមាតាគណៈញាតិទាំងឡាយដែលចាកឋានទៅហើយនោះ បានបញ្ចុះសពទុកនៅស្រុកទុនគួន មកសូមប្រណិប័តន៍លាអ្នកម្ដាយទៅសែនសពបិតាមាតា តែល្មមជតាហេតុតាមទំនៀមទម្លាប់ដូនតា ខ្ញុំក៏សុំលាអ្នកម្ដាយទៅជាមួយផង។

នាង**ង៉ុកថៃ**ឆ្លើយថា ការនេះជាទំនៀមប្រវេណី កូនចៅត្រូវដឹងគុណបិតាមាតា មួយទៀតនាងឯងក៏នៅមិនទាន់បានទៅគំនាប់សពបិតាមាតាខាងប្ដីសោះ បើចង់ទៅក៏ទៅចុះ។ នាង**ស៊ុនហ៊ូយិន**ក៏មានអំណរណាស់ ទាំងពីរនាក់ក៏គំនាប់លាមាតាមកទីលំនៅវិញ ហើយរៀបចាត់ចែងគ្រឿងមាសប្រាក់ និងរបស់ទ្រព្យសព្វវត្ថុទាំងពួង រើសយកតែរបស់ណាដែលល្អមានតម្លៃដាក់ផ្ទុកលើរថ ឡៅពីក៏ឡើងជិះសេះឲ្យនាង**ស៊ុនហ៊ូយិន**ឡើងជិះរថជាមួយនឹងបាវស្រីៗដែលស្និទ្ធ ចេញចាកស្រុកឡាំស៊ីទៅតាមផ្លូវដែលសញ្ញាឲ្យ**ជូឡុង**នៅរង់ចាំនោះ លុះ**ជូឡុង**ក្រឡេកឃើញ**ឡៅពី**និងនាង**ស៊ុនហ៊ូយិន**បររថមកដល់ មានអំណរណាស់ ក៏លើកទាហានទាំងពួងការពារពីក្រោយទៅ។

ឯ**ស៊ុនគួន**និងនាហ្មឺនទាំងពួងសេពសុរាបរិភោគអាហារ នៅទាល់តែរសៀលល្ងាច ទាហានទាំងពួងឃើញ**ស៊ុនគួន**ស្រវឹងស្រាខ្លាំងណាស់ មិនដឹងស្មារតី ក៏បបួលគ្នាគ្រាហ៍**ស៊ុនគួន**ចូលទៅក្នុងផ្ទះ អស់បណ្ដានាហ្មឺនមុខមន្ត្រីទាំងពួងក៏នាំគ្នាវិលទៅទីលំនៅរៀងខ្លួន។ ខណៈនោះមានទាហានម្នាក់ដឹងសេចក្ដីថា **ឡៅពី**និងនាង**ស៊ុនហ៊ូយិន**នាំគ្នារត់ទៅហើយ ក៏ស្រូតរូតចូលទៅនឹងជម្រាប**ស៊ុនគួន** ឃើញ**ស៊ុនគួន**ស្រវឹងស្រា

មិនដឹងខ្លួនទាល់តែភ្លឺឡើង **ស៊ុនគួន**ក៏ស្វាងស្រាភ្ញាក់ពីដេក ទាហានក៏ជម្រាបថា **ឡៅពី**និងនាង**ស៊ុនហ៊្វយិន**រត់ទៅបាត់ពីម្សិលមិញទៅហើយ **ស៊ុនគួន**ឮដូច្នោះក៏ភ័យស្លុតស្មារតី ឲ្យហៅនាហ្មឺនមុខមន្ត្រីមកប្រជុំប្រឹក្សា។

**ទៀវជៀវ**ឆ្លើយថា **ឡៅពី**មានតម្រិះប្រាជ្ញាជ្រៅណាស់ បើវិលទៅដល់ស្រុកហើយ យូរទៅនឹងជាសត្រូវដល់លោកវិញ សុំលោកស្រូតប្រញាប់ចាត់ទាហានឲ្យលើកទៅតាមចាប់យកខ្លួន**ឡៅពី**មកវិញ។ **ស៊ុនគួន**យល់ឃើញត្រូវផង ទើបឲ្យហៅ**តាន់ប៊ូ** និង**ភូជៀង**មកបង្គាប់ថា អ្នកឯងទាំងពីរនាក់ត្រូវលើកទាហានប្រាំរយតាមទៅចាប់ខ្លួន**ឡៅពី**មកឲ្យបាន។ **តាន់ប៊ូ, ភូជៀង**ក៏លើកទាហានតាមទៅ។ **ស៊ុនគួន**មានសេចក្ដីខឹងក្តៅខ្លាំងណាស់ យកដបទឹកខ្មៅចោលសំដៅទៅត្រូវជញ្ជាំងផ្ទះ ទាល់តែដបនោះល្អិតបែកខ្ទេច។ **ទៀវភៅ**ថា លោកមកក្រោធខឹងយ៉ាងណាក៏មិនជាការមានប្រយោជន៍សោះ ខ្ញុំបាទយល់ឃើញថា **តាន់ប៊ូ, ភូជៀង**ដែលលោកប្រើឲ្យលើកទាហានតាមទៅនោះ មុខជាមិនបានខ្លួន**ឡៅពី**មកទេ ព្រោះនាង**ស៊ុនហ៊្វយិន**ជាស្រីមានតម្រិះប្រាជ្ញា ហើយមាតាលោកក៏រាប់អានស្រឡាញ់ស្មើជីវិត នាងក៏ព្រមចិត្តទៅជាមួយនឹង**ឡៅពី** មុខជាទាហានទាំងអស់នឹងក្រែងខ្លាចពុំអាចចូលទៅចាប់បាន។

**ស៊ុនគួន**ឮដូច្នោះក៏យល់ត្រូវ ទើបយកគ្រប៉ីអាជ្ញាសិទ្ធិប្រគល់ឲ្យ**ជីវឃឹម** និង**ជីវថាយ**ហើយបង្គាប់ថា អ្នកឯងខំស្រូតលើកទាហានទៅតាម**តាន់ប៊ូ, ភូជៀង**ទៅទៀត បើទាន់ហើយឲ្យយកគ្រប៉ីនេះកាត់ក្បាល**ឡៅពី**និងនាង**ស៊ុនហ៊្វយិន**មកឲ្យយើងឲ្យខាងតែបាន បើមិនបានទេ យើងនឹងត្រូវកាត់ក្បាលអ្នកឯងជំនួស។ **ជីវឃឹម, ជីវថាយ**ក៏ទទួលប្រសាសន៍**ស៊ុនគួន** លើកទាហានមួយពាន់តាមទៅ។

ឯ**ឡៅពី**រត់ទៅក្នុងថ្ងៃនោះ លុះពេលយាមពីរក៏ឈប់សម្រាកទាហានមួយស្របក់ ហើយក៏ស្រូតលើកទៅដែនស្រុកឆសងគុន បានឮសំឡេងទាហានស្រែក

ហ៊ោ ហើយលើកជិតដោយតាមពីក្រោយហុយធូលីងងឹតពេញផ្លូវ។ **ឡៅពី**ក៏ប្រឹក្សានឹង**ជូឡុង**ថា ឥឡូវទាហានលើកជិតតាមមកច្រើនណាស់ យើងនឹងរិះគិតប្រការម្ដេច? **ជូឡុង**ថា លោកខំស្រូតរូតឲ្យលឿនទៅមុខចុះ ខ្ញុំបាទនិងទាហានទាំងពួងនឹងរាំងរាការពារពីក្រោយ។ **ឡៅពី**ក៏នាំនាង**ស៊ុនហ៊ូយិន**រត់វាងផ្លូវទៅតាមជើងភ្នំក្រោយស្រុកឆសងគុន។

ខណៈនោះ**ជីវយី**ដឹងថា **ឡៅពី**និងនាង**ស៊ុនហ៊ូយិន**នាំគ្នារត់មកពីស្រុកឡាំស៊ីក៏គិតរំពឹងថា ឡៅពីរត់មកគ្រានេះ បើមកផ្លូវគោកមុខជាវាងស្រុកយើងមកតាមជើងភ្នំជាប្រាកដ ទើបប្រើ**ឈីសេង, តេងហង**ឲ្យលើកទាហានបីពាន់ទៅចាំស្ទាក់ផ្លូវ។ **ឈីសេង, តេងហង**ក៏ឡើងមើលលើភ្នំ ក្រឡេកទៅឃើញ**ឡៅពី**មកពីចម្ងាយក៏ចេញស្ទាក់ផ្លូវពីមុខហើយស្រែកថា **ជីវយី**ប្រើយើងឲ្យមកចាំនៅទីនេះយូរហើយ ចូរអ្នកចុះពីលើសេះ យើងនឹងចាប់ខ្លួនឲ្យ**ជីវយី**។

**ឡៅពី**បានឮដូច្នោះក៏ភ័យស្លុតស្មារតី មើលទៅឃើញទាហានស្ទាក់ផ្លូវជាច្រើន ទើបបំផាយសេះរត់ត្រឡប់មករក**ជូឡុង** ហើយប្រាប់ថា ទាហានចាំស្ទាក់ផ្លូវពីមុខច្រើនណាស់ យើងនឹងរិះគិតប្រការម្ដេច? **ជូឡុង**ឆ្លើយថា លោកកុំវិតក្កឡើយ កាលយើងនឹងមកនោះ **ខុងបេង**ក៏បានឲ្យសំបុត្របីច្បាប់ បានមើលពីរច្បាប់ហើយក៏បានធ្វើការរួចខ្លួនរហូត មកដល់ពេលនេះ នៅសំបុត្រច្បាប់ទីបី **ខុងបេង**ផ្ដាំថា បើមានភ័យអាសន្នមកដល់ខ្លួនវេលាណា ត្រូវឲ្យហែកស្រោមមើល ឥឡូវដល់ភ័យអាសន្នមកហើយ ត្រូវតែហែកមើលសំបុត្រនោះឲ្យដឹង នឹងបានរិះគិតតទៅទៀត ហើយ**ជូឡុង**ក៏ហែកស្រោមសំបុត្រច្បាប់ទីបីហុចឲ្យទៅ**ឡៅពី**មើល។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

### កណ្ឌទី ៤៧

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ឡៅពី**ឃើញសេចក្ដីសំបុត្រ**ខុងបេង**ច្បាប់ទីបី ហើយនាំនាង**ស៊ុនហ៊ូយិន**រត់ទៅជួបនឹង**ខុងបេង**យកទូកមកទទួល **ជីវយី**លើកទ័ពតាម ហើយ**ចូអ្ន**ល្បួងទាហាន **ឡោសុក**មកទារស្រុកកេងជីវ **ជីវយី**គិតកលឧបាយទៅវាយស្រុកសែឈួន **ខុងបេង**គិតត្រូវកល**ជីវយី**ចាត់ទ័ពលើកទៅ។)*

**ឡៅពី**ដឹងសេចក្ដីក្នុងសំបុត្រនោះហើយ ក៏ត្រឡប់ទៅប្រាប់នាង**ស៊ុនហ៊ូយិន**តាមសេចក្ដីសំបុត្រនោះថា ពីដើម**ស៊ុនគួន**និង**ជីវយី**គិតកលឧបាយថានឹងលើកប្អូនឯងឲ្យធ្វើជាភរិយាបង ប៉ងនឹងបញ្ឆោតបងឲ្យមកឯស្រុកឡាំស៊ី ហើយចាប់ខ្លួនបងដាក់គុក បើបង្វិលស្រុកកេងជីវឲ្យវិញកាលណា នឹងប្រហារជីវិតបង់ចេញកាលណោះ មិនមែនឲ្យប្អូនដោយស្មោះត្រង់ទេ គឺយករូបប្អូនធ្វើជានុយទៅបញ្ឆោតឲ្យបងមក មួយទៀតបងដឹងច្បាស់ថា ខ្លួនប្អូនជាស្រីក៏មែន តែមានតម្រិះប្រាជ្ញាចេះរិះគិតលើសជាងប្រុសទៅទៀត បានជាបងប្រថុយខ្លួនមករកប្អូនមិនមានខ្លាចសេចក្ដីស្លាប់ នេះព្រោះមាតានិង**កៀវកុកឡោ**មានសេចក្ដីមេត្តា បានជាបងរួចចាកសេចក្ដីស្លាប់ បានភប់ប្រសព្វនឹងប្អូនរហូតមក ឥឡូវ**ស៊ុនគួន**និង**ជីវយី**ចេះតែគិតកលឧបាយផ្សេងៗ ដោយចិត្តចងវេរាព្យាបាទនឹងធ្វើអន្តរាយជីវិតបង ។យល់ថា នៅក្នុងស្រុកឡាំស៊ីតទៅ មុខជាមិនរួចពីសេចក្ដីស្លាប់ ទើបប្រញាប់គិតត្រឡប់ទៅស្រុកកេងជីវវិញ ហើយក្លែងប្រាប់ប្អូនថា ស្រុកកេងជីវកើតសឹកនឹងស្រូតទៅធ្វើការសង្គ្រាមជាប្រញាប់ ប្អូនក៏មានចិត្តសត្យពិតត្រង់នឹងបងដាច់ចិត្តដិតដោយតាមមកផង ដោយស្នេហាអាល័យ គុណប្អូនដ៏ធ្ងន់ក្រាស់ក្រៃនឹងរកទីបំផុតគ្មាន បងក៏នៅមិនទាន់បានតបស្នងគុណសោះ គ្រានេះ **ស៊ុនគួន**ក៏គ្មានចិត្តសប្បុរសទុកយើងជាបងប្អូន លើកទ័ពពពាក់ពពូនតាមមកទៀតច្រើនណាស់ ទាំង**ជីវយី**ខាងនេះក៏ឲ្យទាហានមកចាំ

ស្ទាក់ពីមុខ ប៉ងនឹងធ្វើទុក្ខផ្តាច់ជីវិតយើងហើយ ឯទាហានទាំងសងខាងនេះក៏នៅក្នុងអំណាចប្អូន បើប្អូនមិនជួយកែខៃហើយ បងក៏ត្រូវតែស្លាប់ក្នុងទីនេះជាប្រាកដ ដែលជីវិតបងនឹងស្លាប់ក៏មិនសោកស្តាយប៉ុន្មាន នឹកស្តាយតែប្អូនកល្យាណ បងមិនទាន់បានតបស្នងសងគុណប្អូន ដែលទៀងត្រង់សុចរិតចំពោះបងនោះពន់ប្រមាណណាស់។

នាង**ស៊ុនហ៊្វយិន**ឮដូច្នោះ ទោមនស្សតូចចិត្តចំពោះ**ស៊ុនគួន**ខ្លាំងណាស់ ទើបចេញវាចាថា ដែល**ស៊ុនគួន**ធ្វើទាំងម្ល៉េះ គឺលះបង់អាល័យនៃសាច់ឈាមដែលជាបងប្អូននឹងគ្នាអស់ហើយ ម្ល៉េះហើយនឹងត្រឡប់ទៅមើលមុខ**ស៊ុនគួន**វិញធ្វើម្តេចបាន ការទាំងប៉ុន្មានក្នុងគ្រានេះ ខ្ញុំក៏សុំរិះគិតកែខៃឲ្យរួចភ័យអន្តរាយតាមប្រាជ្ញាខ្ញុំចុះ។ នាង**ស៊ុនហ៊្វយិន**ក៏ឲ្យមនុស្សបម្រើប្អូងសក់ឡើងស្រឡះមុខមាត់ ហើយក៏ឡើងបររថស្រូតទៅ ឃើញ**ឈីសេង, តេងហង**លើកកងទាហាននៅស្ទាក់ពីមុខ នាង**ស៊ុនហ៊្វយិន**ក៏ស្រែកថា ខ្លួនទាំងពីរនាក់មកធ្វើយ៉ាងនេះប្រុងនឹងប្រហារជីវិតអញឬ? **ឈីសេង, តេងហង**ឮដូច្នោះ ក៏ស្លុតស្លាំងកាំងស្មារតីលោតចុះពីលើសេះបោះអាវុធផុតពីដៃ ហើយចូលទៅគំនាប់នាង**ស៊ុនហ៊្វយិន**ពីមុខ រួចហើយថា យើងខ្ញុំនឹងបានរិះគិតដោយគំនិតឯងក្លែងមកធ្វើអន្តរាយអ្នកក៏ទេ **ជីវយី**ប្រើយើងខ្ញុំឲ្យនាំទាហានលើកមកចាប់**ឡៅពី**។

នាង**ស៊ុនហ៊្វយិន**ឮដូច្នោះខឹងណាស់ ក៏ជេរប្រទេច**ជីវយី**ថា អាចោរកំណាចមិនមានសេចក្តីកតញ្ញូសោះ វាមកនៅស្រុកកាំងតាំងនេះ បានស៊ីបាយផឹកទឹកបងអញ ៗក៏បានតាំងឲ្យវាធ្វើជាទាហានធំ ហើយចិញ្ចឹមរក្សាមិនឲ្យមោះហ្មង គួរឬវាមិនដឹងគុណខុសត្រូវ**ឡៅពី**ជាមាព្រះថៅ**ហៀនតេ** ម្តាយអញនិង**ស៊ុនគួន**ក៏បានលើកអញឲ្យជាធ្វើជាភរិយា**ឡៅពី** កាល**ឡៅពី**ដឹកនាំអញមកនេះ ម្តាយអញនិង**ស៊ុនគួន**ក៏បានព្រមអនុញ្ញាតឲ្យអញមក **ជីវយី**យល់ថាអញបានរបស់ទ្រព្យសព្វវត្ថុមកច្រើនឬបានជាប្រើឯងទាំងពីរឲ្យលើកទាហានបន្តុំ ធ្វើចោរមកប្លន់ដណ្តើមសម្បត្តិរបស់អញ?

**ឈីសេង, តេងហង**ឮដូច្នោះ ក៏ខ្លាចខ្លួនក្រែងមានសេចក្ដីខុសទើបឆ្លើយថា ខ្ញុំបាទទាំងពីរនាក់នេះនឹងបានគិតប្រទូសរ៉ាយអ្នកក៏ទេ ព្រោះខ្លាចអាជ្ញា**ជីវយី**ប្រើបានជាលើកទាហានមក អ្នកចូរមេត្តាលើកទោសខ្ញុំបាទទាំងពីរចុះ។ នាង**ស៊ុនហ៊ូយិន**ក៏ស្រែកគំហកថា **ជីវយី**មានអាជ្ញាសិទ្ធិឲ្យសម្លាប់បាន ៗជាខ្លួនធ្វើតាម ឯខ្លួនយើងនឹងសម្លាប់ខ្លួនវិញមិនបានឬ បានជាមកពាលោធ្វើដូច្នេះ? នាង**ស៊ុនហ៊ូយិន**ក៏ជេរប្រទេច**ជីវយី**ជាច្រើនណាស់ ហើយក៏បង្ខំបររថស្រូតទៅ។ **ឡៅពី**និង**ជូឡុង**ក៏លើកទាហានតាមពីក្រោយ។

ឯ**ឈីសេង, តេងហង**ខ្លាចនាង**ស៊ុនហ៊ូយិន** ក្រឡេកឃើញ**ជូឡុង**ជានាយទាហានមានថ្វីដៃនៅពីក្រោយ**ឡៅពី** ក៏មិនអាចធ្វើប្រការម្ដេច ឲ្យទាហានវែកបើកផ្លូវទៅ។ កាល**ឡៅពី**ទៅឆ្ងាយហើយ ចម្ងាយផ្លូវប្រហែល៦០សិន (២,៤ គ.ម) ឃើញ**តាន់ប៊ូ** និង**ភូជៀង**លើកតាម**ឡៅពី**មកដល់ទីនេះ **ឈីសេង, តេងហង**ក៏អធិប្បាយរ៉ាយរឿងឲ្យ**តាន់ប៊ូ, ភូជៀង**ស្ដាប់។ **តាន់ប៊ូ**ថា អ្នកបណ្ដោយឲ្យ**ឡៅពី**ទៅរួចនោះខុសណាស់ហើយ ឥឡូវ**ស៊ុនគួន**ប្រើខ្ញុំទាំងពីរមកចាប់**ឡៅពី**និងនាង**ស៊ុនហ៊ូយិន**ឲ្យបាននាំទៅវិញ។ **ឈីសេង, តេងហង**ឮដូច្នោះក៏ភ័យស្លុត លើកទាហានរត់តាមទៅទាំងពីរកងជាមួយគ្នា។

ឯ**ឡៅពី** បានឮសំឡេងទាហានស្រែកហ៊ោពីក្រោយ ក៏និយាយនឹងនាង**ស៊ុនហ៊ូយិន**ថា ឥឡូវមានទាហានតាមមកទៀតហើយ យើងនឹងគិតប្រការម្ដេច? នាង**ស៊ុនហ៊ូយិន**ថា អ្នកខំស្រូតទៅមុនចុះ ខ្ញុំនិង**ជូឡុង**នៅតទល់ពីក្រោយ។ **ឡៅពី**និងទាហានបីរយក៏ស្រូតទៅតាមមាត់ទន្លេ **ជូឡុង**ក៏ឲ្យទាហានឈរផ្ទុំគ្នាកណ្ដាលផ្លូវ ឯខ្លួន**ជូឡុង**ក៏បរសេះកាន់លំពែងឈរអមរថនាង**ស៊ុនហ៊ូយិន** ទទួលទាហានទាំងបួននាយលើកតាមមកទាន់ ក៏ចុះពីលើសេះចូលទៅគំនាប់នាង**ស៊ុនហ៊ូយិន** ៗក៏សួរ**តាន់ប៊ូ, ភូជៀង**ថា ខ្លួនគិតតាមមកនេះដោយគិតប្រាថ្នាការប្រការម្ដេច? **តាន់ប៊ូ, ភូជៀង**ឆ្លើយថា **ស៊ុនគួន**ប្រើខ្ញុំបាទឲ្យមកអញ្ជើញអ្នកនាងនិង**ឡៅពី**ទៅវិញ។

នាង**ស៊ុនហ៊ួយមិន**ឮដូច្នោះ ក៏ធ្វើជាខឹងក្រេវក្រោធស្រែកគំហកថា ព្រោះមនុស្សពួកនេះទេតើ វាធ្វើឲ្យយើងបងប្អូនខុសអធ្យាស្រ័យចិត្តនឹងគ្នា មាតាយើងនិង**ស៊ុនគួន**ក៏បានរៀបការយើងនឹង**ឡៅពី** ឲ្យជាស្វាមីភរិយា កាលយើងនិង**ឡៅពី**មកនេះក៏បានលាមាតា ៗព្រមឲ្យយើងទៅនៅស្រុកកេងជីវជាមួយស្វាមីយើងហើយ យើងមិនមែនលបរត់មកតាមអំពើចិត្តឯងក៏ទេ សូម្បី**ស៊ុនគួន**ជាបងយើងក៏គង់និយាយអនុលោមយល់ព្រមតាមទម្លាប់ទំនៀមយកចិត្តយើងខ្លះ តែខ្លួនពីរនាក់នេះឯងបង្គាប់**ស៊ុនគួន**ឲ្យលើកទាហានមកប៉ងនឹងធ្វើអន្តរាយយើងឬ?

នាយទាហានបួននាក់ឮដូច្នោះក៏គិតថា នាង**ស៊ុនហ៊ួយមិន**និង**ស៊ុនគួន**ជាបងប្អូននឹងគ្នា នាង**ង៉កុកថៃ**ជាមាតាស្រឡាញ់ស្មើជីវិត បើយើងនឹងធ្វើបំពានគ្រានេះទៅ **ស៊ុនគួន**ដែលមានចិត្តកតញ្ញូដឹងគុណមាតា មិនអាចរឹងទទឹងទាស់ចិត្តមាតាបាន យើងក៏នឹងមានទោសខុស ព្រោះ**ស៊ុនគួន**ខ្លាចមាតាណាស់ គង់នឹងក្រឡាស់យកឲ្យរួចខ្លួន សេចក្តីខុសក៏នឹងផ្ទួនធ្លាក់មកលើយើងរាល់គ្នា បើយើងធ្វើសេចក្តីគាប់ប្រសើរទុកនឹងល្អជាង យូរទៅក៏មិនមានសេចក្តីខុស ហើយក៏មិនឃើញ**ឡៅពី**ក្នុងគ្រានេះសោះ ចំពោះឃើញតែ**ជូឡុង**និងនាង**ស៊ុនហ៊ួយមិន** ឯ**ជូឡុង**ក៏ជិះសេះកាន់លំពែងចេញអាការៈយ៉ាងមាំមួនបីដូចនឹងចូលសង្គ្រាម។ នាយទាហានបួននាក់គិតគំនិតត្រូវគ្នាដូច្នោះ ទាំងអស់គ្នាក៏ឱនគំនាប់ ហើយបើកឲ្យនាង**ស៊ុនហ៊ួយមិន**និង**ជូឡុង**ចេញទៅ។

នាង**ស៊ុនហ៊ួយមិន**ក៏បង្ខំទាហានឲ្យបររថតាមទៅទាន់**ឡៅពី**។ **ឈីសេង**ក៏និយាយនឹងទាហានទាំងពួងថា ឥឡូវនាង**ស៊ុនហ៊ួយមិន**ក៏ទៅហួសទៅហើយ យើងនឹងវិលទៅវិញ តើនឹងយកសេចក្តីអ្វីទៅនិយាយ មានតែយកពាក្យដែលនាង**ស៊ុនហ៊ួយមិន**ថានោះ ទៅប្រាប់**ជីវយី**ចុះមិនជាអ្វីទេ ប្រឹក្សាគ្នាក៏មិនចុះរុះ ទទួល**ជីវយឹម**, **ជីវថាយ**មកដល់ ក៏សួរនាយទាហានទាំងបួនថា អ្នករាល់គ្នាបានជួបប្រទះនឹង**ឡៅពី**ឬទេ? នាយទាហានទាំងបួននាក់ឆ្លើយថា ជួបប្រទះពីព្រឹក ឥឡូវ**ឡៅពី**លើកស្រូតរូតទៅហួសហើយ។ **ជីវយឹម**ថា អ្នករាល់គ្នាបានជួបប្រទះនឹង**ឡៅពី**ហើយ ហេតុម្តេចមិនចាប់ខ្លួនឲ្យបាន? **តាន់ប៊ូ**និង**ភូជៀង**ក៏អធិប្បាយរ៉ាយរឿងឲ្យ**ជីវយឹម**ស្តាប់។ **ជីវយឹម**

ថា អ្នករាល់គ្នាគិតរអែងខ្លាចនាង**ស៊ុនហ៊ួយិន**មិនបានចាប់ខ្លួន**ឡៅពី**ទុក នោះមុខជាមានទោសខុសជាទម្ងន់ណាស់ហើយ បើ**ស៊ុនគួន**គិតស្រឡាញ់នាង**ស៊ុនហ៊ួយិន**ជាប្អូនហើយនិងបារម្ភខ្លាចមាតាជាប្រាកដ កាលណានឹងប្រគល់គ្រប៊ីអាជ្ញាសិទ្ធិនេះមកឲ្យយើង បង្គាប់យើងថា បើជួបប្រទះនឹង**ឡៅពី**នៅទីណា ត្រូវឲ្យប្រហារជីវិតនាង**ស៊ុនហ៊ួយិន**ជាមុន រួចសឹមសម្លាប់**ឡៅពី**ជាក្រោយ ហើយឲ្យកាត់យកក្បាលទាំងពីរនាក់យកទៅឲ្យបាន បើមិនបានក្បាលអ្នកទាំងពីរទៅឲ្យ**ស៊ុនគួន**ទេ **ស៊ុនគួន**នឹងឲ្យកាត់ក្បាលយើងជំនួសវិញ។

នាយទាហានទាំងបួននាក់ឮដូច្នោះ ក៏ភ័យតក់ស្លុតហើយថា ឥឡូវ**ឡៅពី**លើកទៅជាយូរហើយ យើងនឹងគិតយ៉ាងម្ដេចទើបស្រួល? **ជីវឃឹម**ប្រាប់**ឈីសេង, តេងហង**ថា **ឡៅពី**លើកទៅនោះសុទ្ធតែទាហានដើរជើង ទោះដូចម្ដេចក៏ស្ទុះរត់ពីយើងមិនផុត ឲ្យអ្នកទាំងពីរស្រូតទៅប្រាប់**ជីវឃី**ឲ្យលើកទាហានទូកយ៉ាងរហ័សទៅចាំស្ទាក់នៅផ្លូវមាត់ទន្លេ ខ្លួនយើងបួននាក់និងពួកទាហានក៏ស្រូតលើកពីខាងនេះទៅតាមផ្លូវគោកឲ្យខាងតែទាន់ ម្ដងនេះបើនាង**ស៊ុនហ៊ួយិន**និង**ឡៅពី**និយាយយ៉ាងណា ក៏ពុំត្រូវជឿស្ដាប់ ត្រូវតែចាប់កាត់ក្បាលឲ្យខាងតែបាន។ **ឈីសេង, តេងហង**ស្ដាប់យល់ឃើញត្រូវ ក៏នាំគ្នាស្រូតរូតទៅប្រាប់**ជីវឃី**ឯស្រុកឆសងគុន។ **ជីវឃឹម, ជីវថាយ, តាន់ប៊ូ, ភូជៀង**ក៏ដេញកងទ័ពស្រូតរូតប្រញាប់ទៅ។

ឯ**ឡៅពី**និងនាង**ស៊ុនហ៊ួយិន** នាំគ្នាទៅផុតដែនស្រុកឆសងគុន ហើយក៏ចុះទៅដល់មាត់ទន្លេកន្លែងមួយ ឈ្មោះតំបន់ឡៅឡងថៃ **ឡៅពី**ក៏នាំទាហានរកមើលក្បែរមាត់កំពង់ដើម្បីនឹងរកទូកឆ្លងទៅស្រុកកេងជីវ ក៏មិនឃើញមានទូកឆ្លងទៅមកសោះ **ឡៅពី**ក៏រឹតតែព្រួយវិតក្កណាស់ **ជូឡុង**ក៏និយាយនឹង**ឡៅពី**ថា យើងមកដល់ទីនេះផុតដែនស្រុកឆសងគុនហើយ ចូលមកជាប់ដែនស្រុកកេងជីវ បីដូចខ្លារួចពីទ្រុង លោកកុំវិតក្កពេកឡើយ យើងធ្វើសង្គ្រាមសម្រេចមករាល់គ្នា ក៏ដោយសារតម្រិះ**ខុងបេង**រិះគិត ឥឡូវយើងមកជិតដល់ស្រុកហើយ មុខជា**ខុងបេង**ដឹងនឹងគិតឲ្យជាស្រេចមិនបាច់ព្រួយរវល់ប៉ុន្មាន។ **ឡៅពី**ស្ដាប់**ជូឡុង**និយាយក៏គិតដល់សេចក្ដីលំបាកព្រួយ

ដោយទុក្ខមកតាមផ្លូវ ហើយក៏នឹកដល់សេចក្ដីសុខសម្រាន្តដែល**ស៊ុនគួន**បានទំនុកបម្រុងក្នុងស្រុកតងង៉។ **ឡៅពី**អង្គុយសោកាអាណិតអានាថខ្លួននៅមាត់កំពង់ ទទួលឮសំឡេងទាហានសេះលើកតាមមកជាច្រើន ក៏ប្រឹក្សានឹង**ជូឡុង**ថា គ្រានេះទាហានសេះលើកតាមមកច្រើនណាស់ មុខជាយើងដល់នូវសេចក្ដីស្លាប់ក្នុងគ្រានេះហើយ។ **ជូឡុង**ក៏មិនទាន់នឹងឆ្លើយតបថាម្ដេច ទទួលក្រឡេកទៅឃើញទូកប្រហែលម្ភៃថែវមកតាមមាត់ទន្លេ **ជូឡុង**ក៏ថា បុណ្យរបស់យើងដល់ហើយបានជាមានទូកមកដល់ សុំឲ្យលោកស្រូតប្រញាប់ដេញទាហានចុះដោយសារទូកនោះចុះឆ្លងទៅឲ្យរួចពីភ័យអន្តរាយ។

លុះទូកនោះចូលមកដល់ជិត **ឡៅពី**ពិគ្រោះមើលឃើញជាទូកអ្នកជំនួញ ក្រឡេកមើលទៅទៀតក៏ឃើញ**ខុងបេង**ពាក់អាវនិងមួកចេញមកពីក្នុងដំបូល **ឡៅពី**ក៏អរណាស់នឹងប្រៀបពុំបាន ទើបនាំនាង**ស៊ុនហ៊ូយិន**នូវបណ្ដាទាហាន លោតឡើងលើទូកនោះគ្រប់គ្នា។ **ខុងបេង**ឃើញ**ឡៅពី**ភ័យភិតក៏អស់សំណើចហើយថា តាំងពីខ្ញុំចាត់ទាហានបន្លំជាទូកអ្នកជំនួញមកចាំទទួលលោកក៏យូរណាស់ហើយ **ឡៅពី**ឮដូច្នោះក៏ដេញទាហានឲ្យថយទូកផុតពីមាត់ច្រាំងទៅដល់កណ្ដាលទន្លេ ទទួល **ជីវយ៉ឺម, ជីវថាយ, តាន់ប៊ូ, ភូជៀង**លើកទាហានមកដល់មាត់ទន្លេ។

**ខុងបេង**សើចចំអកហើយលើកដៃចង្អុលទៅថា នែអស់អ្នករាល់គ្នា ចូរត្រឡប់ទៅប្រាប់**ជីវយី**ជានាយខ្លួនចុះថា យើងបណ្ដោយឲ្យ**ជីវយី**និង**ស៊ុនគួន**ធ្វើកលឧបាយមកច្រើនគ្រាហើយ យើងក៏ទទួលតាមកលមកដល់ថ្ងៃនេះ ការក៏សម្រេចមកខាងយើងទាំងអស់ ដែល**ជីវយី**និង**ស៊ុនគួន**ចិត្តសប្បុរសលើកនាង**ស៊ុនហ៊ូយិន**ឲ្យជាភរិយា**ឡៅពី** ហើយថែមឲ្យអស់អ្នករាល់គ្នាលើកគ្នាមកតាមជូនដំណើរ**ឡៅពី**ទៀតនោះ យើងក៏គាប់ចិត្តណាស់ **ឡៅពី**មិនមានភ័យអន្តរាយអ្វីទេ កុំឲ្យ**ជីវយី**គិតកលឧបាយអ្វីតទៅទៀតឡើយ ពួកទាហានទាំងនោះឮហើយ ក៏យកធ្នូបាញ់ចម្រុះទៅដូចគ្រាប់ភ្លៀង ព្រួញក៏ស្ទុះទៅមិនដល់។ **ខុងបេង**ក៏បង្គំឲ្យទាហានចែវទូកឆ្លងទៅត្រើយខាងនាយ ជិតទៅមាត់ច្រាំង។

ឯ**ជីវយី**ដែលដឹងសេចក្ដីដោយ**ឈីសេង**, **តេងហង**ទៅប្រាប់ ក៏ប្រញាប់លើកទ័ពទូកឲ្យ**អ៊ុយកាយ**ជាប៉ែកស្ដាំ **ហាន់តុង**ជាប៉ែកឆ្វេង ខ្លួន**ជីវយី**ជាទ័ពហ្លួងស្រូតលើកតាម**ឡៅពី**ទៅ។ **ជីវយី**ឃើញ**ឡៅពី**ឆ្លងទៅដល់ត្រើយខាងនោះ ហើយក៏ដេញទាហានចែវទូកទៅឲ្យទាន់ **ខុងបេង**ឃើញ**ជីវយី**ដេញត្រសុកចូលមក ក៏ឲ្យទាហានចតទូកឡើងច្រាំងខាងជើងនាំ**ឡៅពី**និងនាង**ស៊ុនហ៊ូយិន**ឡើងគោករត់ទៅ។ **ជីវយី**ក៏ជិះសេះនាំ**អ៊ុយកាយ**, **ហាន់តុង**, **ឈីសេង**, **តេងហង**និងទាហានទាំងពួងលើកតាមទៅ។

ឯ**ខុងបេង**និង**ឡៅពី**រត់ទៅដល់ភ្នំ ក្នុងដែនតំបន់អង់ជីវ ដែលឲ្យ**គួនអ៊ូ**បង្កប់ទាហាននៅទីនោះ ក៏នាំ**ឡៅពី**និងនាង**ស៊ុនហ៊ូយិន**ឡើងទៅលើកំពូលភ្នំ លុះឃើញ**ជីវយី**លើកតាមទៅដល់ភ្នំនោះ **គួនអ៊ូ**និង**អ៊ុយអៀន**, **ហងតុង**ក៏លើកទាហានចេញស្ទាក់ពីមុខ។ **ជីវយី**នឹងដេញទាហានចូលច្បាំងនឹង**គួនអ៊ូ**ក៏នឹកញញើតខ្លាច ព្រោះទាហានខ្លួនចំណានតែខាងជើងទឹក មិនប៉ិនប្រសប់ច្បាំងខាងផ្លូវគោក ហើយក៏គ្មានសេះជិះគ្រប់គ្នា **ជីវយី**ក៏ថយទាហានត្រឡប់ក្រោយទៅវិញ។ **គួនអ៊ូ**ក៏ដេញចាក់កាប់សម្លាប់ទាហាន**ជីវយី** ស្លាប់អស់ជាច្រើន។ **ហាន់តុង**និង**អ៊ុយកាយ**ក៏ចូលប្រយុទ្ធគ្នា **ជីវយី**ក៏នាំទាហានចុះទូកបាន **គួនអ៊ូ**ក៏លើកទាហានតាមទៅដល់មាត់កំពង់ ក៏ឲ្យទាហានស្រែកឲ្យ**ជីវយី**ថា អ្នកឯងប្រើកលឧបាយបញ្ឆោតយើង ៗក៏ដឹងដល់ស្គាល់គំនិតអ្នកឯងទាំងអស់ ឥឡូវអ្នកឯងចាញ់កលយើងវិញថែមទាំងលើកទាហានមកជូនដំណើរ**ឡៅពី** ឲ្យខូចខាតទាហានទៅទៀត គំនិតអ្នកឯងយ៉ាងនេះឬ ដែលនឹងបង្ក្រាបផែនដីតទៅ!

**ជីវយី**ឮដូច្នោះ ក៏ក្រឡេកមើលទៅឃើញ**ឡៅពី**និងនាង**ស៊ុនហ៊ូយិន**នូវពួកស្រីបម្រើនៅលើកំពូលភ្នំ ក៏នឹកខឹងក្ដៅក្នុងចិត្តខ្លាំងណាស់ ទើបបង្គាប់ទាហានឲ្យឡើងទៅច្បាំងទៀត។ **ហាន់តុង**និង**អ៊ុយកាយ**ក៏និយាយឃាត់ថា ទាហានយើងគ្មានសេះជិះសោះ ទាហានខាងនោះគេសុទ្ធតែជិះសេះគ្រប់ខ្លួន យើងតស៊ូនឹង**គួនអ៊ូ**មិនបានទេ។ **ជីវយី**យល់ឃើញត្រូវ ក៏គិតតែក្នុងចិត្តថា យើងគិតកលឧបាយឲ្យ**ស៊ុនគួន**ធ្វើគ្រានេះ

ប៉ងនឹងចាប់ខ្លួន**ឡៅពី**ទារយកស្រុកកេងជីវឲ្យបាន ក៏ថែមឲ្យរំខានខូចខាតរបស់ឥតអំពើសោះ យើងនឹងត្រឡប់ទៅស្រុកតងង៉មើលមុខ**ស៊ុនគួន**ក៏មិនពេញភ្នែក **ជីវឃី**គិតក្តៅក្តួលរំជួលចិត្តស្ទើរនឹងបែកទ្រូងរហែកជាពីរ ឯពិសព្រួញដែលជ្រួតជ្រាបនៅក្នុងឥន្ទ្រិយពីមុននោះ ក៏កម្រើកពើតពិសឲ្យដួលសន្លប់ទៅមិនដឹងស្មារតី ពួកទាហានក៏ភិតភ័យជ្រួលច្របល់ នាំគ្នាកែខៃកោសខ្យល់ឲ្យ**ជីវឃី**ដឹងខ្លួនឡើងវិញ ហើយក៏លើកទាហានត្រឡប់ទៅស្រុកឆសងគុន។

ខណៈនោះ **ខុងបេង**ក៏នាំ**ឡៅពី**ត្រឡប់ទៅស្រុកកេងជីវ ហើយក៏ចែកបំណាច់រង្វាន់ពួកសេនាទាហានតាមសមគួរ។ ឯ**ជីវឃឹម, ជីវថាយ, តាន់ប៊ូ, ភូជៀង**ក៏លើកទាហានទៅស្រុកឡាំស៊ី លុះទៅដល់ហើយក៏នាំគ្នាចូលទៅពណ៌នារឿងរ៉ាវជម្រាប**ស៊ុនគួន**គ្រប់ប្រការ។ **ស៊ុនគួន**ឮដូច្នោះក៏ខឹងណាស់ ទើបចាត់**ទៀវអៅ**ជាមេទ័ពគិតលើកទៅវាយស្រុកកេងជីវ ទទួល**ជីវឃី**ឲ្យនាំសំបុត្រមកដល់**ស៊ុនគួន**សេចក្តីថា ដែលខ្ញុំបាទបានរិះគិតកលឧបាយគ្រានេះ ព្រោះគំនិតនិងតម្រិះប្រាជ្ញា**ខុងបេង**ខ្ពស់ជាងខ្ញុំបាទ បានជាខូចការអសារទៅ ទោសខ្ញុំបាទក៏ខុសណាស់ទៅហើយ វេលានេះខ្ញុំបាទនឹងសុំទាហានលោកលើកទៅវាយយកស្រុកកេងជីវឲ្យត្រាតែបាន ជាទីសងសឹកវិញ។

**ស៊ុនគួន**ឃើញសំបុត្រដូច្នេះ ក៏ឲ្យកេណ្ឌទាហានលើកទៅដោយខ្លួនឯង។ **ទៀវជៀវ**ក៏និយាយហាមឃាត់ថា លោកនឹងលើកទ័ពទៅវាយយកស្រុកកេងជីវនោះឲ្យរិះគិតពិគ្រោះមើលកលការឲ្យស្រួលបួលសិន ព្រោះ**ចូឆូ**បរាជ័យនឹងយើងបែកទ័ពទៅគ្រានេះ ក៏នឹងរិះចងចិត្តគិតអាឃាតព្យាបាទមិនរសាយទេ តែដោយសារវាឃើញថា លោកនិង**ឡៅពី**សព្វថ្ងៃប្រាស្រ័យរាប់អានគ្នាជាចិត្តមួយ វាក៏នៅព្រួយមិនអាចនឹងលើកទ័ពមកច្បាំង វេលានេះបើវាយល់ដឹងថា លោកលើកទ័ពទៅវាយស្រុកកេងជីវហើយ កាលណាឡើយ**ចូឆូ**នឹងមិនលើកទ័ពមកព្រួតវាយយកស្រុកកាំងតាំងខាងនេះ ព្រោះវាឃើញថា លោកនិង**ឡៅពី**បែកចិត្តពីគ្នា គ្រាក្រោយនេះយើងក៏នឹងទប់ទល់ដោយកម្រណាស់។

**កោះយ៉ុង**និយាយនឹង**ស៊ុនគួន**ឡើងទៀតថា សព្វថ្ងៃ**ចូឆ្វ**បានប្រើមនុស្សមកឈ្លបស្ដាប់ការជាដរាប បើឃើញថាលោកនិង**ឡៅពី**បែកចិត្តពីគ្នាហើយ **ចូឆ្វ**គង់នឹងប្រើកលទៅល្បួង**ឡៅពី** ៗខ្លាចយើងលើកទៅវាយយកស្រុក ក៏ប្រែមុខទៅចូលនឹង**ចូឆ្វ**មិនខាន បើ**ចូឆ្វ**បាន**ឡៅពី**ជាពួកមួយហើយ ក៏គង់នឹងរួមគំនិតគិតការធ្វើត្រូវគ្នាទាំងអស់ អំណើះទៅមុខស្រុកកាំងតាំងនេះក៏នឹងអន្តរាយវិនាសជាមិនខាន គំនិតខ្ញុំបាទយល់ដោយស្មានថា បើលោកធ្វើចុតហ្មាយចូលទៅក្រាបបង្គំទូលព្រះចៅ**ហៀនតេ** ឲ្យតាំង**ឡៅពី**ជាចៅហ្វាយស្រុកកេងជីវពេញទីតែម្ដង ប្រហែលស្រួលជាជាង ព្រោះ**ចូឆ្វ**ឃើញថា លោកនិង**ឡៅពី**ត្រូវគ្នាជាខ្លួនមួយចិត្តមួយហើយ កាលណាឡើយវានឹងលើកទ័ពមកច្បាំងនឹងយើងទៀត។ មួយទៀត**ឡៅពី**ក៏មិនមានគុំគួនខឹងអ្វីនឹងលោកសោះ រួចអំពីនោះសឹមយើងរិះគិតរកឧបាយទៅនិយាយបញ្ឆោតឲ្យ**ឡៅពី**និង**ចូឆ្វ**ខុសអធ្យាស្រ័យគ្នាវិញ គង់តែអ្នកទាំងពីរនេះមិញនឹងតតាំងច្បាំងគ្នាឡើង យើងក៏ត្រូវលើកទ័ពទៅវាយខ្ទប់យកស្រុកកេងជីវ ឃើញនឹងបានដោយងាយ។ **ស៊ុនគួន**ស្ដាប់និយាយក៏គិតឃើញត្រូវ ទើបសួរ**កោះយ៉ុង**ថា អ្នកសម្លឹងមើលទៅឃើញនរណា ដែលគួរនឹងប្រើឲ្យកាន់ចុតហ្មាយទៅថ្វាយដល់ស្រុកហ៊ូតោបាន? **កោះយ៉ុង**ថា ឃើញតែ**ហ្វ៊ហ៊ឹម**មួយនោះ មានតម្រិះប្រាជ្ញាវាងវៃណាស់ **ចូឆ្វ**ក៏ធ្លាប់ជួបប្រទះស្គាល់រាប់អានគ្នាមកពីដើម។ **ស៊ុនគួន**យល់ត្រូវ ក៏ធ្វើចុតហ្មាយតាមពាក្យ**កោះយ៉ុង**និយាយ។ លុះធ្វើរួចក៏ច្រកស្រោមប្រគល់ឲ្យ**ហ្វ៊ហ៊ឹម** ៗក៏លាចេញទៅស្រុកហ៊ូតោ ទទួល**ចូឆ្វ**នាំនាហ្មឺនមុខមន្ត្រីខ្ញុំរាជការទៅស្វែងលេងឯស្រុកងៀបគុន **ហ្វ៊ហ៊ឹម**ក៏ស្រូតតាមទៅ។

ឯ**ចូឆ្វ**នោះ តាំងពីបែកទ័ពទឹកខូចខាតទ្រព្យរបស់ស្បៀងអាហារនិងសេនាទាហានក៏មានសេចក្ដីអប្បយសអៀនខ្មាស ចេះតែរិះគិតគុំគួននៅមិនដាច់ តែឃើញថា **ស៊ុនគួន**និង**ឡៅពី**នៅធ្វើការរួបរួមយកចិត្តគ្នា ក៏មិនអាចនឹងលើកកងទ័ពមកច្បាំងយកស្រុកកាំងតាំងនោះ។ លុះព្រះចៅ**ហៀនតេ**សោយរាជ្យបាន១៦ឆ្នាំ ជារដូវទេសកាលគិម្ហន្ត។ **ចូឆ្វ**ក៏នាំស្រីង្គារបរិវារនូវបណ្ដានាហ្មឺនសព្វមុខមន្ត្រីទៅមើល

ប្រាសាទ “តងសេកតៃ” ដែលកសាងថ្មីនៅក្បែរមាត់ទន្លេជៀងហោ។ **ចូឆ្វ**ក៏គាត់តែងរៀបខ្លួនប្រាណពាក់អាវខៀវម្ជូកមាសឡើងអង្គុយលើប្រាសាទ។ **ចូឆ្វ**គិតចង់មើលថ្វីដៃទាហាន ក៏ឲ្យយកសំពត់ព្រែពណ៌ក្រហមយ៉ាងល្អទៅចងពាក់លើមែកឈើថ្វាន់ ហើយឲ្យយក(វង់បាញ់) វង់ខ្មៅទៅដោតទុកនៅចំមុខប្រាសាទចម្ងាយម្ភៃប្រាំព្យាម ឲ្យទាហានតែងខ្លួនជាពីរពួក ទាហានណាសែជាមួយនឹង**ចូឆ្វ** ៗឲ្យស្លៀកពាក់ពណ៌ក្រហមម្ជូកក្រហម ទាហានក្រៅពីនោះឲ្យស្លៀកពាក់ពណ៌ខៀវម្ជូកខៀវ ឈររៀងគ្នាត្រង់មុខប្រាសាទហើយបង្គាប់ថា បើអ្នកបាញ់ត្រូវ (វង់បាញ់) ត្រង់វង់ខ្មៅ យើងនឹងឲ្យបំណាច់រង្វាន់អាវមួយ បើបាញ់មិនត្រូវ យើងនឹងឲ្យផឹកទឹកមួយពែង។

ពួកទាហានក៏រៀបគ្នាឡើងជិះសេះ **ចោហ៊ីវ**ពាក់អាវក្រហមម្ជូកក្រហម បរសេះវង់វិលចេញទៅមុខទាហានបានបីជុំ ហើយយឹតធ្នូបាញ់ត្រូវវង់ខ្មៅ ទាហានទាំងពួងក៏វាយគងឃ្មោះហ៊ោកញ្ជ្រៀវគឹកកង **ចូឆ្វ**មានចិត្តត្រេកអរណាស់ថា មិនបង្ស៊ៀតដែល**ចោហ៊ីវ**ជាសែលោហិតនឹងយើង ហើយស្រែកបង្គាប់ទាហានឲ្យយកអាវមកឲ្យ**ចោហ៊ីវ**។ ខណៈនោះ**ប៊ុនផេង**នាយទាហានក៏បំផាយសេះចេញមកនិយាយនឹង**ចូឆ្វ**ថា លោកកុំអាលយកអាវឲ្យ**ចោហ៊ីវ**សិន ហើយ**ប៊ុនផេង**ក៏យឹតធ្នូបាញ់ត្រូវត្រង់វង់ខ្មៅទៀត ទាហានទាំងពួងក៏ស្រែកហ៊ោអឺងកងឡើងទៀត។

**ប៊ុនផេង**ស្រែកថា ទាហានទៅយកអាវមកឲ្យយើង។ **ចោហាង**ឮដូច្នោះក៏បំផាយសេះចេញមកទៀត ស្រែកប្រាប់**ប៊ុនផេង**ថា អ្នកកុំអាលទៅដណ្ដើមយកអាវនោះឡើយ យើងនឹងបាញ់ឲ្យល្អជាងអ្នកទៅទៀត។ **ចោហាង**ក៏យឹតធ្នូបាញ់ទៅត្រូវត្រង់វង់ខ្មៅ ព្រួញក៏ដោតសៀតគ្នានឹងព្រួញមុន។ **ទៀវខាប់**ឃើញដូច្នោះក៏ថា ដែលអ្នកទាំងបីបាញ់ធ្នូមុននោះ មិនវិសេសដូចយើងទេ **ទៀវខាប់**ក៏ងាកខ្លួនលើកធ្នូបាញ់ទៅ ព្រួញដោតជាប់ជិតព្រួញមុនជាបួនជ្រុងស្មើគ្នា **ហែហ្ស៊ូអៀន**ពាក់អាវក្រហមមកបញ្ឈរសេះនៅមុខទាហានឃើញដូច្នោះ ក៏យឹតធ្នូបាញ់ប្រែក្រោយទៅត្រូវបន្លោះព្រួញបួនដែលជាប់មុន ក៏ស្រែកថា យើងបាញ់ប្លែកជាងអ្នករាល់គ្នា ហើយក៏បំផាយសេះចូលនឹងដណ្ដើមយកអាវ។

**ស៊ីឡុង**ស្រែកថា អ្នកទាំងប្រាំបាញ់ត្រូវតែវង់ខ្មៅ ហើយនឹងយកអាវនោះមិនគួរទេ ខ្ញុំនឹងបាញ់ឲ្យប្លែកជាអ្នករាល់គ្នាទៅទៀត ហើយ**ស៊ីឡុង**ក៏យឹតធ្នូបាញ់ទៅត្រូវមែកថ្វាន់ដែលពាក់អាវនោះ ដាច់ធ្លាក់ចុះមក **ស៊ីឡុង**ក៏បំផាយសេះទៅយកអាវនោះពាក់ត្រឡប់មកគំនាប់**ចូឆូ** ទាហានទាំងពួងឃើញដូច្នោះក៏សរសើរ**ស៊ីឡុង**ថា ប៉ិនបាញ់ធ្នូនឹងរកអ្នកឯណាស្មើគ្មាន។ **ស៊ីឡុង**ក៏បរសេះចេញមក **ខៅធូ**ឃើញដូច្នោះក៏ស្រែកឲ្យ**ស៊ីឡុង**ថា អ្នកកុំអាលយកអាវនោះ ត្រូវទុកឲ្យយើងវិញ។ **ស៊ីឡុង**ថា អាវនេះយើងបាញ់ត្រូវហើយ ត្រូវបានមកយើង ៗមិនត្រូវឲ្យអ្នកទេ។ **ខៅធូ**ឮដូច្នោះក៏មិនឆ្លើយតប បំផាយសេះចូលទៅដណ្តើមយកអាវ **ស៊ីឡុង**ក៏យកដងធ្នូវាត់ទៅត្រូវ**ខៅធូ** ៗក៏យកដៃចាប់បានកន្ត្រាក់មកនឹងឲ្យ**ស៊ីឡុង**ធ្លាក់ពីលើសេះ។ **ស៊ីឡុង**លែងធ្នូលោតចុះពីលើសេះ **ខៅធូ**ក៏ចុះពីលើសេះដូចគ្នា ទាំងពីរនាក់ក៏ចំបាប់ដណ្តើមយកអាវទាល់តែអាវនោះដាច់រហែកទៅទាំងអស់។

**ចូឆូ**ឃើញ**ខៅធូ** និង**ស៊ីឡុង**ចំបាប់គ្នាដោយទោសោទៅវិញទៅមកទាំងសងខាងដូច្នោះ ក៏ឲ្យទាហានស្ទុះទៅហាមឃាត់ចាប់ទាញចេញពីគ្នា ហើយឲ្យឡើងមកលើប្រាសាទ ឯ**ខៅធូ** និង**ស៊ីឡុង**ក៏គគ្រឹតធ្មេញ ធ្វើអាការៈបីដូចនឹងចូលតស៊ូគ្នាទៀត។ **ចូឆូ**ក៏អស់សំណើចថា អ្នកទាំងពីរជាទាហានមានថ្វីដៃស្មើគ្នា ហើយមកធ្វើការទាស់ទែងគ្នាពីព្រោះអាវមួយដូច្នេះមិនគួរសោះ។ **ចូឆូ**ក៏ហៅទាំងអស់មកលើប្រាសាទ ចែកព្រែច្រើនបែបឲ្យម្នាក់មួយផាប់ ហើយក៏ឲ្យរៀបតុលៀងអាហារគ្រប់គ្នា។ **ចូឆូ**ថា យើងមកលែងគ្រានេះមានសេចក្តីសប្បាយណាស់ ព្រោះបានឃើញថ្វីដៃទាហានផ្សេងៗ ហើយក៏និយាយនឹងទាហានទាំងពួងថា អ្នករាល់គ្នាជាអ្នកមានតម្រិះប្រាជ្ញាមានបណ្ឌាស័ក្តិ ត្រូវឲ្យតែងពាក្យកាព្យឃ្លោងសរសើរប្រាសាទថ្មីនេះដើម្បីឲ្យសប្បាយចិត្ត។

នាហ្មឺនទាំងពួងក៏ទទួលប្រសាសន៍**ចូឆូ** គឺ **អងឡេង១, ចុងហ៊ីវ១, អង់ផាន់១, តាន់លឹម១** ក៏តែងពាក្យកាព្យឃ្លោងមួយបទម្នាក់ សេចក្តីថា៖

វីមហាឧបរាជអាចជាធំ    យើងគេនិយមព្រមចេតនា

លើកលោកឲ្យខ្ពស់ពេញយសា ដូចមហាក្សត្រាផុតផែនដី។
បានទាំងប្រាបប្រាមសង្គ្រាមសឹក ហាត់ហ្វឹកសកលពលសេនីយ
ប្រឡូងជ័យជាញឲ្យឃើញថ្មី ពេញចិត្តឫទ្ធិល្បីក្រៃអស្ចារ។
ទីប្រាង្គដែលសាងឡើងខ្ពង់ខ្ពស់ ក៏ពុំស្មើឈ្មោះយសសក្តា
គួរសាងឡើងទៀតសុទ្ធសិលា ហៅមហាមហិនិវេសន៍រដ្ឋ។
ឲ្យមានឋានតាំងបល្ល័ង្កពេជ្រ រំលេចក្បាច់ក្បាំងវាំងរាជវ័តិ
ទើបសមជាទីមហាចក្រពត្តិ គ្រប់គ្រងក្នុងភទ្ទសីមាអើយ។

លុះតែងហើយ ក៏ជូនទៅឲ្យ**ចូឆ្ន** ៗទទួលកាព្យនោះមកហើយក៏ថា កាព្យនេះល្អប្រពៃណាស់ តែអ្នកសរសើរលើសណាស់ កាលពីដើមយើងក៏ជាមនុស្សប្រាជ្ញាតិច ប្តេជ្ញាចិត្តគិតកាន់តែសម្រេចសត្យពិតត្រង់ជាទីតាំង លុះដល់គ្រាព្រះចៅ**ហៀនតេ**បានសោយរាជសម្បត្តិ ផែនដីក៏កើតវិបរិតផ្សេងៗ យើងក៏បានសង់គ្រឹហាឋាននៅក្រៅស្រុកចៅគុណខាងទិសឯកើត ចម្ងាយពីស្រុកទៅផ្លូវប្រហែលប្រាំរយសិន លុះដល់គិម្ហន្តរដូវនិងវស្សន្តរដូវយើងក៏ទៅមើលទម្លាប់ទំនៀមផ្សេងៗ លុះដល់ហេមន្តរដូវ យើងក៏ទៅស្វែងបាញ់សត្វលេងក្នុងចិត្តគិតថា បើផែនដីសុខរាបទាបហើយ នឹងចង់ចូលធ្វើរាជការជានាហ្មឺនខ្ញុំផែនដី មិនបានដឹងថា ព្រះចៅ**ហៀនតេ**នឹងចំពោះឲ្យយើងជានាយទាហានដូច្នេះសោះ ឥឡូវនេះយើងក៏មានចិត្តកតញ្ញូនឹងព្រះមហាក្សត្រ គិតតែនឹងប្រាបប្រាមសឹកសត្រូវឲ្យផែនដីរាបទាបជាសុខថ្វាយប៉ុណ្ណោះ ចំពោះតែយកសេចក្តីគាប់ប្រសើរតទៅមុខ ឲ្យរន្ទឺឮថា យើងជានាយទាហានបានជួយទំនុកបម្រុងផែនដីនៃព្រះចៅ**ហៀនតេ** វេលានេះក៏ឃើញថា ល្មមសមគួរតាមតម្រិះគិតខ្លះមកហើយ ព្រោះយើងបានប្រាបប្រាមកម្ចាត់សត្រូវរាជសម្បត្តិចេញជាច្រើន តាំងពីកាលគ្រា**ទៀវកុក** ពួកចោរជួតក្បាលលឿងនោះ ដរាបដល់សព្វថ្ងៃនេះព្រះចៅ**ហៀនតេ**ក៏ប្រោសតាំងយើងជាមហាឧបរាជធំជាងនាហ្មឺនទាំងពួង ហើយយើងនឹងបានគិតយកយសសក្តិឲ្យលើសជាងនេះទៅទៀតក៏ទេ តែយើងនេះរិះគិតថាបានជួយទំនុកបម្រុងផែនដីហើយក៏ត្រូវធ្វើឲ្យរហូតទៅ មួយទៀតផែនដីព្រះចៅ

**ហៀនតេ**នេះបើកុំបានយើង គង់នឹងមានមនុស្សកំណាចមកតាំងខ្លួនជាស្តេចគ្រប់តំបន់មិនខាន ឯមនុស្សដែលគ្មានតម្រិះប្រាជ្ញា ក៏មិនអាចគិតដល់គុណូបការៈយើងឲ្យឃើញថា យើងបានជាធំនឹងបង្គាប់បញ្ជាអ្វីក៏ជាកម្មសិទ្ធិ នៅតែគិតសង្ស័យថាយើងដូច្នេះដូច្នោះក៏ខុសទទេទៅមិនត្រូវសោះឡើយ ម្ល៉ោះហើយខ្លះក៏ចាញ់ភ័យខ្លួនឯង សព្វថ្ងៃនេះយើងក៏តាំងចិត្តគិតធ្វើរាជការតបស្នងឆ្លងព្រះតេជព្រះគុណព្រះចៅ**ហៀនតេ**ដោយសុចរិត គិតវិតក្កព្រួយមួយយ៉ាងទៀតថា ចង់នឹងលើកទីមហាឧបរាជនេះឲ្យដល់ព្រះញាតិវង្សពង្សព្រះចៅ**ហៀនតេ** ក៏មិនបានឃើញរូបណានឹងចេះដឹងល្មមនឹងជួយទំនុកបម្រុងផែនដីបាន បើឃើញមិនចេះស្មានលើកឲ្យទៅតែម្តងក៏គង់នឹងនាំឲ្យសៅហ្មងខូចផ្លូវរាជការ ដំណាទៅមុខខ្លួនយើងនឹងភ្លយបានទុក្ខក្តៅក្រហាយជាមួយគ្នា ដែលយើងថាដូច្នេះជាសេចក្តីពិត មិនមែនគិតថាតែមាត់ក្រៅនោះទេ អ្នកទាំងពួងមិនទាន់ដឹងចិត្តយើងទេឬ? បើមិនដឹងហើយក៏នឹងសម្គាល់ថាយើងយកតែពាក្យល្អមកចរចា។

នាហ្មឺនទាំងអស់គ្នាគំនាប់ហើយថា គំនិតរបស់មហាឧបរាជដែលទំនុកបម្រុងផែនដីគ្រានេះ ល្អប្រសើរជាង**អ៊ុអិន**និង**ជីវកង**ដែលជួយទំនុកបម្រុងផែនដីនៃព្រះចៅ**សេងផង**និងព្រះចៅ**សេងហង**នោះទៅទៀត។ **ចូឆ្វ**ឮដូច្នោះ ក៏រឹតតែកំរើបចិត្តផឹកស្រាជាច្រើនពែង ហើយយកពិតនិងក្រដាសមកនឹងសរសេរឃ្លោង។ ទទួលបម្រើ**ស៊ុនគួន**ឈ្មោះ**ហ៊្វហឹម**នាំសំបុត្រមកដល់ជូនទៅ**ចូឆ្វ** សេចក្តីថា ឲ្យក្រាបទូលព្រះចៅ**ហៀនតេ** ព្រោះ**ឡៅពី**នៅស្រុកកេងជីវវាយបានអាណាខេត្តជាចំណុះច្រើនតំបន់ហើយ ឥឡូវ**ស៊ុនគួន**ឲ្យលើកប្អូនស្រីជាភរិយា**ឡៅពី** សុំឲ្យតាំង**ឡៅពី**ពេញជាទីចៅហ្វាយស្រុកកេងជីវ។ **ចូឆ្វ**ឃើញសេចក្តីសំបុត្រដូច្នោះក៏តក់ស្លុតស្មារតី ដៃដែលកាន់ពិតក៏របូសធ្លាក់ចុះ។ **ធៀយ៉ុក**ឃើញដូច្នោះក៏សួរថា មហាឧបរាជចូលទៅក្នុងទីពិជ័យសង្គ្រាម ប្រថុយស្លាប់អាយុជីវិតដូចមិនមានគិតភិតភ័យបារម្ភប៉ុន្មាន ថ្ងៃនេះគ្រាន់តែឮព័ត៌មានមកប៉ុណ្ណេះ ក៏របេះជ្រុះធ្លាក់ពីដៃ សេចក្តីប៉ុណ្ណោះ តើនឹងយ៉ាងម្តេចទៅ? **ចូឆ្វ**ថា **ឡៅពី**នោះឧបមាដូចមករ ធ្លាក់នៅក្នុងទឹកត្រពាំងបឹងបួតាំងពីកំណើត

មិនធ្លាប់ស្គាល់ទឹកជ្រៅសោះ ហើយវេលានេះ ទៅបានចុះក្នុងទឹកនព្វមហាសមុទ្រដ៏ជ្រៅពន្លឹក ដូចជា**ឡៅពី**បានស្រុកកេងជីវ ក៏រឹតតែមានកម្លាំងក្លៀវក្លាឡើង ដូចមករនោះឯង អំណើះតទៅមុខ មុខជាយើងនឹងមានព្រួយដោយកម្ចាត់**ឡៅពី**ពុំបានតាមប្រាថ្នាដោយអាការដូច្នេះ បានជាយើងតក់ស្លុតក្នុងចិត្ត។

**ផៀយ៉ុក**ថា ដែល**ហ៊្លឹហឹម**កាន់សំបុត្រមកនេះ លោកជ្រាបកលខ្លះឬទេ? គឺ**ស៊ុនគួន**គិតឧបាយយ៉ាងម្ដេចខ្លះ? **ចូឆូ**ថា គិតមិនយល់ទេ។ **ផៀយ៉ុក**ថា **ស៊ុនគួន**ធ្វើកលឲ្យសំបុត្រមកនេះ មិនមែននឹងចង់ទំនុកបម្រុងដោយស្រឡាញ់**ឡៅពី**សុចរិតស្មោះត្រង់នោះទេ **ស៊ុនគួន**និង**ឡៅពី**មុខជាបែកចិត្តពីគ្នាហើយ តែបើ**ស៊ុនគួន**លើកទ័ពទៅវាយយកស្រុកកេងជីវ ក៏ឲ្យអារម្មណ៍ខ្លាចមហាឧបរាជ នឹងលើកទ័ពទៅវាយយកស្រុកកាំងតាំង បានជាបំបាំងធ្វើឧបាយឲ្យមានសំបុត្រមកក្រាបទូលព្រះចៅ**ហៀនតេ**ឲ្យតាំង**ឡៅពី**ពេញទីជាចៅហ្វាយស្រុកកេងជីវតែម្ដង ប៉ងនឹងឲ្យ**ឡៅពី**ទុកចិត្ត ហើយនឹងឲ្យលោកច្រឡំគិតថា **ស៊ុនគួន**និង**ឡៅពី**ត្រូវគំនិតគ្នា មិនអាចនឹងលើកពលយោធាទៅវាយស្រុកកាំងតាំង បើលោកភាន់ភាំងហើយ **ស៊ុនគួន**ក៏នឹងបានធ្វើការជាមាំមួន ខ្ញុំបាទនឹងគិតកលឧបាយមួយយ៉ាង ឲ្យ**ឡៅពី**និង**ស៊ុនគួន**គិតវិវាទគ្នាច្បាំងគ្នាឲ្យខាងតែបាន។

**ចូឆូ**សួរថា កលឧបាយរបស់អ្នកប្រការម្ដេច? **ផៀយ៉ុក**ថា សព្វថ្ងៃនេះ**ស៊ុនគួន**ជាធំក្នុងស្រុកកាំងតាំង ក៏អាស្រ័យសេចក្ដីរិះគិតរបស់**ជីវយី**តែម្នាក់ សុំឲ្យលោកក្រាបទូលព្រះចៅ**ហៀនតេ** ឲ្យតាំង**ជីវយី**ជាចៅហ្វាយស្រុកឡាំគុន ឲ្យ**ទៀនៅ**ជាចៅហ្វាយស្រុកកាំងហែ ឯខ្លួន**ហ៊្លឹហឹម**ដែលកាន់សំបុត្រមកនេះត្រូវយកទុកប្រើការក្នុងទីក្រុង។ ខាង**ជីវយី**នោះនៅមានចិត្តព្យាបាទ**ឡៅពី, ខុងបេង**ជាដរាប បើកាលណាព្រះចៅ**ហៀនតេ**ទ្រង់តាំងឲ្យធ្វើជាធំហើយ ក៏នឹងមានចិត្តកំរើបលើកទ័ពទៅវាយស្រុកកេងជីវសងសឹក**ឡៅពី** និង**ខុងបេង**ជាប្រាកដ បើ**ស៊ុនគួន**និង**ឡៅពី**កើតវិវាទចម្បាំងនឹងគ្នាឡើង សឹមយើងរិះគិតតទៅទៀត។

**ចូឆ្ង**យល់ឃើញត្រូវ ក៏ឲ្យហៅខ្លួន**ហ៊្វហឹម**ឡើងទៅលើប្រាសាទ ឲ្យបំណាច់រង្វាន់តាមសមគួរ រួចនាំខ្លួន**ហ៊្វហឹម**និងនាហ្មឺនខ្ញុំរាជការទាំងពួងឡើងក្រុងហ៊្វតោ។ **ចូឆ្ង**ក៏ចូលទៅក្រាបបង្គំគាល់ព្រះចៅ**ហៀនតេ** ក្រាបទូលសុំតាំង**ជីវយី**ជាចៅហ្វាយស្រុកឡាំគុន តាំង**ទៀវភៅ**ជាចៅហ្វាយស្រុកកាំងហែ។ ព្រះចៅ**ហៀនតេ**ក៏ប្រោសព្រះរាជទាន។ **ចូឆ្ង**ក៏តាំង**ហ៊្វហឹម**ជានាហ្មឺនធំនៅស្រុកហ៊្វតោ ហើយប្រើទាហានជាបម្រើឲ្យកាន់សំបុត្រព្រះរាជតម្រាស់និងត្រាតាំង ហើយមានសំបុត្រទៅដល់**ស៊ុនគួន** សេចក្ដីថា ដ្បិតមានព្រះរាជតម្រាស់តាំងឲ្យ**ជីវយី**ជាចៅហ្វាយស្រុកឡាំគុន។ បម្រើក៏នាំសំបុត្រព្រះរាជតម្រាស់ទៅដល់**ជីវយី** និង**ទៀវភៅ**។

**ជីវយី**ទទួលព្រះរាជតម្រាស់និងត្រាតាំងហើយ មានសេចក្ដីត្រេកអរណាស់ ធ្វើសំបុត្រចាត់បម្រើឲ្យនាំសំបុត្រ**ចូឆ្ង** និងសំបុត្របកទៅ**ស៊ុនគួន** សេចក្ដីថា ដ្បិតមានព្រះរាជតម្រាស់និងត្រាតាំងព្រះចៅ**ហៀនតេ**ប្រោសព្រះរាជទាន ឲ្យខ្លួនខ្ញុំឡើងជាទីចៅហ្វាយស្រុកឡាំគុនហើយ ដែល**ខុងបេង**និង**ឡៅពី**ធ្វើការសងសឹកលោកនោះ ខ្ញុំនឹងសុំអាសាសងសឹកវិញឲ្យបាន សូមឲ្យលោកប្រើ**ឡោសុក**ទៅរំឭកទារយកស្រុកកេងជីវ ស្ដាប់សំនួន**ឡៅពី** និង**ខុងបេង**មើលម្ដងសិន រួចសឹមគិតការតទៅ។

**ស៊ុនគួន**ដឹងសេចក្ដីក្នុងសំបុត្រដូច្នោះ ក៏ឲ្យហៅ**ឡោសុក**ទៅនិយាយថា ស្រុកកេងជីវនោះមុនដំបូងអ្នកក៏បានខ្ចីឲ្យ**ឡៅពី** ហើយអ្នកក៏ទទួលជាអ្នកធានាផង ឥឡូវ**ឡៅពី**ធ្វើព្រងើយកន្តើយ មិនចង់ឲ្យស្រុកនោះមកយើងសោះ អ្នកនឹងគិតយ៉ាងណា? **ឡោសុក**ថា សេចក្ដីទាំងអម្បាលនេះ **ឡៅពី**ក៏បាននិយាយ ដូចមានសេចក្ដីក្នុងសំបុត្រស្រាប់។ **ស៊ុនគួន**ឮដូច្នោះក៏ខឹងណាស់ គំហកឲ្យ**ឡោសុក**ថា ក្នុងសំបុត្រ**ឡៅពី**ថា បើវាយបានស្រុកសែឈ្វនកាលណា នឹងបង្វិលស្រុកកេងជីវឲ្យកាលនោះ តាំងពីពេលនោះមក មិនឃើញ**ឡៅពី**រិះគិតទៅវាយយកស្រុកសែឈ្វនសោះ នឹងឲ្យយើងរង់ចាំយកទាល់តែចាស់ទៅឬ? **ឡោសុក**ឃើញ**ស៊ុនគួន**ខឹងដូច្នោះក៏ឆ្លើយថា ខ្ញុំបាទនឹងសុំលាលោកទៅបង្ខំទារយកស្រុកកេងជីវ ស្ដាប់ដំណឹង**ខុងបេង**ម្ដងទៀតមើល។ **ស៊ុនគួន**ក៏ចាត់ទូកឲ្យ**ឡោសុក**ចេញទៅស្រុកកេងជីវ។

ឯ**ឡៅពី**និង**ខុងបេង**តាំងពីបាននាង**ស៊ុនហ៊្យិន**ទៅដល់ស្រុកកេងជីវហើយ ក៏តាំងតែប្រមូលបញ្ចុះបញ្ចូលទាហានសន្សំស្បៀងអាហារ ហើយបង្ហាត់បង្រៀនក្បួនអាវុធរាល់ថ្ងៃ អ្នកដែលមានតម្រិះប្រាជ្ញានិងថ្វីដៃខ្លាំងពូកែ សឹងតែមកចុះចូលនៅនឹង**ឡៅពី**ច្រើន ទទួលមនុស្សចូលមកជម្រាប**ឡៅពី**ថា **ស៊ុនគួន**ប្រើ**ឡោសុក**មកជួបនឹងលោក។ **ឡៅពី**ក៏សួរ**ខុងបេង**ថា ដែល**ឡោសុក**មកនេះមានបំណងដូចម្ដេច? **ខុងបេង**ថា ពីដើម**ស៊ុនគួន**ឲ្យមានសំបុត្រចូលទៅក្រុងហ៊ូតោ ក្រាបទូលព្រះចៅ**ហៀនតេ**សុំឲ្យតាំងលោកពេញទីជាចៅហ្វាយស្រុកកេងជីវ ប៉ងនឹងឲ្យ**ចូឆូ**កោតញញើតថា**ស៊ុនគួន**និងលោកនៅរួមគំនិតចិត្តជាមួយគ្នា។ **ចូឆូ**ដឹងដល់កលឧបាយ**ស៊ុនគួន** ទើបត្រឡប់ក្រាបទូលព្រះចៅ**ហៀនតេ** តាំង**ជីវយី**ជាចៅហ្វាយស្រុកឡាំគុនវិញ តាំង**ទៀភៅ**ជាចៅហ្វាយស្រុកកាំងហែ ប្រាថ្នានឹងឲ្យ**ជីវយី**កំរើបចិត្តគិតធ្វើសង្គ្រាមតនឹងលោកទៅថ្ងៃមុខ ទើប**ចូឆូ**នឹងបានគិតការបានមាំមួន ដែល**ឡោសុក**មកនេះ មុខជាគំនិត**ស៊ុនគួន**និង**ជីវយី** ប្រើឲ្យមកទារស្រុកកេងជីវប្រាកដ។

**ឡៅពី**ក៏សួរ**ខុងបេង**ថា លោកនឹងឲ្យខ្ញុំឆ្លើយដោះសាដូចម្ដេច? **ខុងបេង**ថា បើ**ឡោសុក**មករកលោក ហើយនិយាយពីរឿងការស្រុកទេស លោកកុំអាលឆ្លើយតបឲ្យសោះ ត្រូវធ្វើជាយំសោកខ្សឹកខ្សួលឲ្យខ្លាំង ខ្ញុំនឹងមកនិយាយខ្លួនឯងជាផ្លូវកែខៃតាមតម្រិះប្រាជ្ញា។ **ឡៅពី**ក៏អញ្ជើញ**ឡោសុក**ចូលមក ហើយគំនាប់គ្នាតាមការគួរ **ឡៅពី**អញ្ជើញ**ឡោសុក**ឲ្យអង្គុយទន្ទឹមគ្នា **ឡោសុក**ក៏និយាយថា លោកជាមាព្រះចៅ**ហៀនតេ** ហើយក៏ជាប្អូនថ្លៃចៅហ្វាយខ្ញុំទៀត នឹងឲ្យខ្ញុំអង្គុយស្មើពុំគួរសម។ **ឡៅពី**អស់សំណើចហើយនិយាយថា អ្នកនិងខ្ញុំជាមិត្តភក្ដិរាប់អានគ្នាមកពីដើម ហេតុម្ដេចបានជាអ្នកមកនិយាយបន្ទាបខ្លួនដូច្នេះ? **ឡោសុក**ឮដូច្នោះ ក៏អង្គុយចុះហើយថា ខ្ញុំមករកលោកគ្រានេះ ព្រោះ**ស៊ុនគួន**ប្រើមកឲ្យទារយកស្រុកកេងជីវ ឯលោកនិង**ស៊ុនគួន**ក៏បានជាបងថ្លៃនិងប្អូនថ្លៃនឹងគ្នាហើយ ចូរឃើញដោយសេចក្ដីមេត្រី កុំឲ្យទាស់អធ្យាស្រ័យគ្នា ចូរបង្វិលស្រុកកេងជីវឲ្យ**ស៊ុនគួន**ចុះ លោកនិង**ស៊ុនគួន**នឹងបានរួចចិត្តគំនិតជាមួយគ្នាធ្វើការតទៅ។

**ឡៅពី**ឮដូច្នោះ ក៏ធ្វើជាយំសោកខ្សឹកខ្សួល មិនបានឆ្លើយតបថាដូចម្ដេច។ **ឡៅសុក**ឃើញដូច្នោះក៏ស្ដុតចិត្តសួរថា លោកយំសោកដោយហេតុអ្វី? **ឡៅពី**ក៏រឹតតែយំអណ្ដឺតអណ្ដកខ្លាំងឡើងទៀត។ **ខុងបេង**អែបនៅខាងក្រោយឆាក ក៏ងាកដើរចេញមកនិយាយចំពោះ**ឡោសុក**ថា ខ្ញុំចាំស្ដាប់ជាយូរមកហើយ មិនឃើញមានសេចក្ដីអ្វីសោះ អ្នកដឹងឬទេ ចៅហ្វាយខ្ញុំយំសោកសោយហេតុអ្វី? **ឡោសុក**ថា ខ្ញុំមិនយល់សោះ។ **ខុងបេង**ថា អ្នកមិនដឹងខ្ញុំនឹងពោលឲ្យស្ដាប់ ពីរឿង**ឡៅពី**ឲ្យសំបុត្រសញ្ញាទៅដល់**ស៊ុនគួន**ថា បើបានស្រុកសែឈ្វនកាលណា នឹងបង្វិលស្រុកកេងជីវឲ្យ**ស៊ុនគួន**កាលណោះ គ្រានេះ**ឡៅជៀង**ជាចៅហ្វាយស្រុកសែឈ្វននោះ ក៏ជាប់ជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ**ជាប់ក្រសែលោហិតគ្នានឹងចៅហ្វាយខ្ញុំ បើនឹងស្ទៀមខាននៅក្នុងស្រុកកេងជីវ ក៏ខ្លាច**ស៊ុនគួន**ខឹងសម្បារ បើនឹងបង្វិលស្រុកកេងជីវឲ្យទៅ ក៏នឹងរកទីលំនៅពុំទាន់បានសោះ ហេតុនេះបានជាចៅហ្វាយខ្ញុំយំសោកដូច្នេះ។ **ឡៅពី**ក៏ធ្វើជាយំខ្លាំងច្រើនទៅទៀត។

**ឡោសុក**ក៏មានចិត្តអាណិតអានាថពន់ប្រមាណណាស់ ទើបលួងលោម**ឡៅពី**ថា លោកកុំយំសោករីករវរធ្វើអ្វីឡើយ ចូររិះគិតនឹង**ខុងបេង**កែខៃឲ្យតែខាងស្រួលទៅចុះ។ **ខុងបេង**ឃើញ**ឡោសុក**ចិត្តទន់ក៏និយាយថា បើដូច្នោះចូរអ្នកអនុគ្រោះ យកសេចក្ដីទុក្ខវេទនានេះទៅនិយាយប្រាប់**ស៊ុនគួន**ឲ្យអាណិតបង្អង់សិន។ **ឡោសុក**ថា ដែលខ្ញុំទៅនិយាយនឹង**ស៊ុនគួន**នោះ ក៏ប្រហែលជាបាន តែថាបើ**ស៊ុនគួន**មិនព្រមតើលោកនឹងរិះគិតម្ដេចទៅវិញ? **ខុងបេង**ថា ចៅហ្វាយខ្ញុំក៏ជាប្អូនថ្លៃ**ស៊ុនគួន**ហើយ ដែលថា**ស៊ុនគួន**មិនយល់ព្រមសោះនោះ ខ្ញុំមិនឃើញផងសោះ ចូរអ្នកអនុគ្រោះទៅនិយាយជម្រាបដោយល្អសុភាពចុះ។ ឯ**ឡោសុក**នោះជាមនុស្សត្រង់ ក៏គិតអាណិតអាសូរ**ឡៅពី** ព្រមទទួលពាក្យហើយក៏លា**ខុងបេង**ចុះទូកទៅស្រុកឆសងគុនវិញ ទើបចូលទៅជួបនឹង**ជីវយី** ហើយពណ៌នាតាមសម្ដីដែល**ខុងបេង**និយាយនោះឲ្យ**ជីវយី**ស្ដាប់។

**ជីវយី**ខឹងទន្ទ្រាំជើង ហើយថា **ឡោសុក**នេះចាញ់ប្រាជ្ញា**ខុងបេង**ទៀតហើយ ឯចិត្ត**ឡៅពី**នោះមិនមែនដូចមាត់និយាយទេ កាល**ឡៅពី**នៅនឹង**ឡៅពៀវ** ក៏គិតប្រទូសរ៉ាយ**ឡៅពៀវ**នឹងដណ្ដើមយកស្រុក ឥឡូវ**ឡៅពី**នឹងទៅឃោគយល់**ឡៅជៀង**នោះដោយប្រយោជន៍អ្វី តែហាក់ថាមិនឲ្យស្រុកកេងជីវមកយើង បានជាក្លែងថាតាមទំនើងចិត្តដូច្នេះ។ ខ្លួនជាអ្នកធានាក៏ភ្លយបានទុក្ខវេទនាមកផង ខ្ញុំគិតបានកលឧបាយម្យ៉ាងទៀត បើ**ខុងបេង**មានគំនិតគិតតិចក៏គង់មិនរួចពីដៃយើង តែឲ្យអ្នកឧស្សាហ៍វិលត្រឡប់ទៅស្រុកកេងជីវម្ដងទៀត។ **ឡោសុក**ថា កលឧបាយលោកគិតដូចម្ដេច? **ជីវយី**ថា អ្នកកុំបាច់ទៅប្រាប់**ស៊ុនគួន**ឡើយ ចូរត្រឡប់ទៅស្រុកកេងជីវប្រាប់**ឡៅពី**ថា ដែល**ឡៅពី**មិនទៅវាយស្រុកសែឈ្នួននោះ ព្រោះ**ឡៅជៀង**ជាសែជាមួយគ្នានឹង**ឡៅពី** ខ្លាចមនុស្សទាំងពួងគរហានិន្ទាក៏ត្រូវហើយ ឥឡូវ**ស៊ុនគួន**ប្រឹក្សាយល់ឃើញថា នឹងត្រូវលើកទ័ពទៅវាយស្រុកសែឈ្នួនឲ្យបាន បើបានហើយក៏នឹងលើកឲ្យ**ឡៅពី** ដើម្បីនឹងប្ដូរយកស្រុកកេងជីវមកវិញ។ **ឡោសុក**ថា ដែលលោកគិតទៅវាយស្រុកសែឈ្នួននោះជាផ្លូវឆ្ងាយស្រយាលណាស់។ **ជីវយី**ឮដូច្នោះក៏អស់សំណើចហើយថា **ឡោសុក**នេះត្រង់ពេកណាស់ មិនមែនយើងនឹងទៅវាយស្រុកសែឈ្នួនដោយពិតនោះទេ យើងនឹងបញ្ឆោតឲ្យ**ឡៅពី**ពេញចិត្តថា យើងនឹងលើកទៅវាយស្រុកសែឈ្នួនឲ្យ បើយើងលើកទៅដល់មុខស្រុកកេងជីវកាលណា យើងនឹងឲ្យទៅសុំស្បៀង**ឡៅពី** ៗមិនដឹងខ្លួនក៏នឹងចេញមកទទួលគួរសមនឹងយើង ៗត្រូវចាប់ខ្លួន**ឡៅពី**សម្លាប់ចេញ ហើយយកស្រុកកេងជីវតែម្ដងទៅ នឹងបានសងសឹកដែលយើងចាញ់ប្រាជ្ញា**ខុងបេង** ទាំងខ្លួនអ្នកក៏ផុតពីសេចក្ដីខុស។

**ឡោសុក**ឮដូច្នោះក៏យល់ឃើញត្រូវ ទើបលា**ជីវយី**ចុះទូកទៅស្រុកកេងជីវម្ដងទៀត លុះទៅដល់ទាហានក៏ចូលទៅជម្រាប**ឡៅពី**ថា **ឡោសុក**មករក។ **ខុងបេង**ក៏និយាយនឹង**ឡៅពី**ថា ដែល**ឡោសុក**ត្រឡប់មកគ្រានេះ មុខជាមិនទៅដល់**ស៊ុនគួន**ទេ អាក្រក់ល្អគឺ**ជីវយី**គិតកលឧបាយឲ្យ**ឡោសុក**មកបញ្ឆោតយើងជាពិតប្រាកដ។ បើ**ឡោសុក**ចូលមកដល់នឹងនិយាយការអ្វី ឲ្យក្រឡេកមើលមុខខ្ញុំសិន។ លុះប្រឹក្សាគ្នា

ហើយ **ឡៅពី**ក៏ឲ្យទៅទទួល**ឡោសុក** ឡើងមកគំនាប់គ្នាហើយ **ឡោសុក**ក៏និយាយថា ខ្ញុំបាទត្រឡប់ទៅស្រុកកាំងតាំង ថ្លែងព័ត៌មានទុក្ខសុខរបស់លោកឲ្យ**ស៊ុនគួន**ស្ដាប់គ្រប់ប្រការ **ស៊ុនគួន**ក៏មានចិត្តអាណិតមេត្តាសរសើរលោកថា មានតម្រិះប្រាជ្ញាដឹងខុសត្រូវ **ស៊ុនគួន**ក៏ឲ្យហៅនាហ្មឺនមុខមន្ត្រីមកប្រឹក្សានឹងលើកកងទ័ពទៅវាយស្រុកសែឈ្នួនហើយនឹងបានប្ដូរយកស្រុកកេងជីវវិញ។ នាហ្មឺនទាំងពួងក៏យល់ឃើញត្រូវព្រមគ្នាទាំងអស់ បានជា**ស៊ុនគួន**ប្រើខ្ញុំត្រឡប់មកជម្រាបលោកថា បើកាលណាលើកទ័ពទៅវាយស្រុកសែឈ្នួននោះ គឺជាផ្លូវដាច់ស្រយាលឆ្ងាយណាស់ ទោះបីខ្វះខាតដោយស្បៀងអាហាររបស់អ្វីក្ដី ឲ្យលោកអនុគ្រោះផង។

**ខុងបេង**ឮដូច្នោះ ក៏ញាក់មុខដាក់**ឡៅពី**ថា ដែល**ស៊ុនគួន**មានចិត្តអាណិតមេត្តាដូច្នេះគឺយល់ថា មានសេចក្ដីទុក្ខក្ដៅក្រហាយ បានជារិះគិតរកឧបាយជួយជាធុរៈ **ឡៅពី**ក៏លើកដៃឡើងគំនាប់ហើយថា ដែល**ស៊ុនគួន**មានចិត្តមេត្តាខ្ញុំទាំងអម្បាលនេះ ក៏ព្រោះ**ឡោសុក**ជួយនិយាយ គុណរបស់**ឡោសុក**នៅលើខ្លួនខ្ញុំក៏ជាទម្ងន់ណាស់។ **ខុងបេង**ថា បើ**ស៊ុនគួន**នឹងលើកកងទ័ពមកវេលាណា ខ្ញុំនឹងលើកគ្រប់គ្រួចេញទៅទទួលនៅក្រៅស្រុក ហើយនិយាយនឹង**ឡោសុក**ថា ឲ្យអ្នកត្រឡប់ទៅប្រាប់**ស៊ុនគួន**ចុះថា ដែលនឹងលើកទ័ពទៅវាយស្រុកសែឈ្នួននោះ កុំឲ្យព្រួយគិតនឹងស្បៀងអាហារឡើយ។ ចៅហ្វាយខ្ញុំនៅអាយហើយជាប្អូនថ្លៃនឹងទទួលធុរៈមិនឲ្យខ្វះខាត។ **ឡោសុក**ក៏មានចិត្តត្រេកអរណាស់។ **ឡៅពី**លុះអញ្ជើញ**ឡោសុក**បរិភោគហើយ **ឡោសុក**ក៏ត្រឡប់ទៅស្រុកឆសងគុនវិញ។

**ឡៅពី**ក៏សួរ**ខុងបេង**ថា ដែល**ឡោសុក**មកនិយាយអម្បាញ់មិញនេះ លោកគិតឃើញប្រការម្ដេចខ្លះ? **ខុងបេង**អស់សំណើចហើយថា **ជីវយី**គ្រានេះមុខជាដល់នូវសេចក្ដីស្លាប់ពុំខាន ព្រោះតម្រិះប្រាជ្ញា**ជីវយី**គ្រានេះ សូម្បីតែក្មេងតូចមួយក៏វាគង់ដឹងបាន គួរឬមកគិតបញ្ឆោតយើងជាមនុស្សចាស់។ **ឡៅពី**សួរថា គំនិត**ជីវយី**នោះដូចម្ដេចខ្លះ? **ខុងបេង**ថា **ជីវយី**រិះគិតការនេះ ដូចកាលព្រះចៅ**ជិនហៀនកុង**នឹងលើកទ័ពទៅវាយស្រុកខេក ជាផ្លូវឆ្លងស្រុកងីទៅ ស្រុកទាំងបីតំបន់នេះជាផ្លូវត្រូវលើគ្នាព្រះ

ចៅ**ជិនហៀនកុង**ក៏ទ្រង់ប្រជុំទីប្រឹក្សាថា យើងនឹងលើកទៅវាយស្រុកខេកគ្រានេះ ខ្លាចចៅហ្វាយស្រុកងឺនឹងលើកទ័ពមកស្ទាក់ផ្លូវពីខាងមុខ យើងមិនថ្លោះការទេឬ? **ស៊ុនសេង**ជានាហ្មឺនធំក្រាបទូលថា ចៅហ្វាយស្រុកងឺជាមនុស្សលោភស្រឡាញ់ទ្រព្យណាស់ សុំឲ្យព្រះអង្គរៀបគ្រឿងបណ្ណាការនិងកែវមណីវិសេសសម្រាប់ស្រុកយើងនេះទៅឲ្យចៅហ្វាយស្រុកងឺ ដើម្បីនឹងខ្ចីផ្លូវទៅច្បាំងឯស្រុកខេកមុខជានឹងបានដោយងាយ។ ព្រះចៅ**ជិនហៀនកុង**ថា កែវមណីសម្រាប់នគររបស់យើងជាទ្រព្យល្អវិសេសមានតម្លៃច្រើនណាស់ ដែលអ្នកនឹងឲ្យយកទៅឲ្យចៅហ្វាយស្រុកងឺនោះ ទោះបីយើងនឹងវាយយកបានស្រុកខេក ក៏មិនទាន់ស្មើតម្លៃនឹងកែវរបស់យើងនេះឡើយ។ **ស៊ុនសេង**ទូលថា សុំកុំឲ្យព្រះអង្គព្រួយព្រះទ័យឡើង ដែលយើងនឹងយកកែវទៅឲ្យចៅហ្វាយស្រុកងឺនោះ ក៏បីដូចជាយកទៅផ្ញើឲ្យរក្សាទុកដូចនៅក្នុងផ្ទៃព្រះឃ្លាំងដូចគ្នា យើងវាយយកបានស្រុកខេកកាលណា នឹងលើកកងទ័ពត្រឡប់មកវាយយកស្រុកងឺទៀត ក៏នឹងបាយដោយងាយ សូម្បីកែវនិងគ្រឿងបណ្ណាការទាំងឡាយ ក៏គង់នៅជារបស់យើងទាំងអស់។

**ហាន់ឡេង**ទីប្រឹក្សា ក៏ឆ្លើយតបទៅ**ស៊ុនសេង**ថា លោកកុំអាលមើលងាយចៅហ្វាយស្រុកងឺនោះទៀត ព្រោះ**កុងជីគី**ដែលជានាហ្មឺនធំក្នុងស្រុកងឺ មានតម្រិះប្រាជ្ញាវាងវៃណាស់ មុខជាជំទាស់មិនឲ្យចៅហ្វាយស្រុកងឺទទួលភស្តុភារបណ្ណាការរបស់យើងទៅ។ **ស៊ុនសេង**ថា **កុងជីគី**មានតម្រិះប្រាជ្ញាពិតមែនហើយ ប៉ុន្តែខ្លាចអាជ្ញាចៅហ្វាយស្រុកងឺណាស់ ព្រោះចៅហ្វាយស្រុកងឺជាមនុស្សលោភមិនដឹងខុសត្រូវ។

ព្រះចៅ**ជិនហៀនកុង**ទ្រង់ព្រះសណ្ដាប់ក៏ចាប់ព្រះទ័យយល់ត្រូវ ទើបរៀបគ្រឿងបណ្ណាការ និងកែវមណីដ៏មានតម្លៃបញ្ជូនទៅឲ្យចៅហ្វាយស្រុកងឺតាមពាក្យ**ស៊ុនសេង**។ ចៅហ្វាយស្រុកងឺ ឃើញទ្រព្យរបស់មិនបានពិចារណា ក៏ព្រមទទួលវត្ថុទាំងនោះ។ **កុងជីគី**ក៏និយាយនឹងចៅហ្វាយស្រុកងឺថា ដែលលោកទទួលគ្រឿងបណ្ណាការទុក ដើម្បីនឹងឲ្យព្រះចៅ**ជិនហៀនកុង**លើកទ័ពទៅវាយស្រុកខេកនោះមិន

គួរសោះ ព្រោះស្រុកខេកជាកម្លាំងរបស់យើង បើព្រះចៅ**ជិនហៀនកុង**វាយយកបានហើយ ក៏នឹងលើកមកវាយយកស្រុកយើងទៀតបានដោយងាយ។ ចៅហ្វាយស្រុកងីមិនស្តាប់ ក៏ស្រែកគំហកឲ្យ**កុងជីគី**។

តមក ព្រះចៅ**ហៀនកុង** ក៏លើកទ័ពទម្លុះស្រុកងីទៅវាយស្រុកខេកបានហើយក៏លើកទ័ពត្រឡប់មកវាយស្រុកងីបានទៀត។

គ្រានេះ**ជីវយី** គិតកលឧបាយនឹងលើកទ័ពទៅវាយស្រុកសែឈ្សួនឲ្យយើងប្រាថ្នានឹងឲ្យយើងជឿទុកចិត្ត បើ**ជីវយី**លើកកងទ័ពមកដល់ស្រុកយើងហើយ លោកនឹងនាំស្បៀងអាហារទៅជួយឲ្យសេនាទាហានទាំងនោះ មុខជា**ជីវយី**នឹងចាប់លោកសម្លាប់ដណ្តើយមកស្រុកកេងជីវតែម្តង។ **ឡៅពី**ក៏សួរ**ខុងបេង**ថា បើដូច្នោះយើងនឹងគិតដូចម្តេច? **ខុងបេង**ថា លោកកុំព្រួយឡើយ ការគ្រានេះជាធុរៈលើខ្លួនខ្ញុំ នឹងរិះគិតទុកឲ្យព្រមជាស្រេច បីដូចលើកអង្គប់ដាក់ខ្លា ធ្វើជុចដាក់ត្រី មិនត្រូវចាំឃើញខ្លានិងត្រីផុសឡើង ទើបតាំងធ្វើការនោះមិនបានទេ។ ឯ**ជីវយី**គ្រានេះ មុខជានឹងចាញ់ប្រាជ្ញារបស់យើង ក្រំចិត្តស្លាប់ជាប្រាកដ។

**ខុងបេង**ក៏ហៅ**ជូឡុង**មកបង្គាប់ថា ការយើងនឹងបានធ្វើតបនឹង**ជីវយី**នោះឃើញចង្អៀតចង្អល់តែកាលគ្រាម្តងនោះទេ ឥឡូវឲ្យអ្នករៀបចំបម្រុងទាហានទុកឲ្យព្រមដោយគ្រឿងសាស្ត្រាវុធ ឡើងរក្សាសើនបន្ទាយឲ្យមាំមួន បើ**ជីវយី**លើកកងទ័ពមកដល់មុខស្រុកវេលាណា ត្រូវការសួររកយើងនិង**ឡៅពី** អ្នកចូរឆ្លើយតាមពាក្យដែលយើងផ្តាំទុកគ្រប់ប្រការ។ **ជូឡុង**ទទួលពាក្យបណ្តាំ**ខុងបេង**ហើយ ក៏ទៅរៀបចំត្រៀមទាហានតាមពាក្យ**ខុងបេង**បង្គាប់ រួចសរសេរសំបុត្រមួយច្បាប់ប្រាប់ទៅ**ឡៅហង** និង**គួនប៉េង**ហើយផ្តាំថា អ្នកទាំងពីរចូរលើកទាហានទៅចាំស្កាត់ផ្លូវខាងលើទឹក ត្រង់ផ្លូវនឹងទៅស្រុកសែឈ្សួននោះ បើឃើញ**ជីវយី**លើកទ័ពមកដល់មុខស្រុកកេងជីវ បានឮ**គួនអ៊ូ**និយាយបញ្ឈឺចិត្ត **ជីវយី**ក៏នឹងគិតទៅវាយស្រុកសែឈ្សួនដោយមានះ ចៅចូរយកសំបុត្រនេះទៅឲ្យ**ជីវយី**។

**ឡៅហង** និង**គួនប៉េង**ក៏ទទួលពាក្យបណ្ដាំគំនាប់លា**ខុងបេង**ចេញទៅ ហើយ**ខុងបេង**ក៏ឲ្យ**គួនអ៊ូ**លើកទាហានទៅតាំងនៅផ្លូវស្រុកកាំងឡេង ឲ្យ**តៀវហ៊ុយ**ទៅតាំងនៅស្រុកជីកុយ ឲ្យ**ហងតុង**ទៅតាំងនៅឈ្យូងកាំងអាន់ ឲ្យ**អ៊ុយអៀន**ទៅតាំងនៅតំបន់អ៊ីឡេង ជាផ្លូវជិតស្រុកកេងជីវទាំងបួនអន្លើ ហើយផ្ដាំថា បើអ្នករាល់គ្នាឃើញ**ជីវឃី**លើកមកដល់ជើងកំពែង ក៏ឲ្យទាហានស្រែកហ៊ោថា នឹងចាប់**ជីវឃី** តែត្រូវថាតែមាត់ មិនត្រូវទៅធ្វើអន្តរាយអ្វីឡើយ។ ទាំងបួននាយឮហើយ ក៏ទទួលបង្គាប់គំនាប់លាចេញទៅ។

# រឿង សាមកុក

អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

កណ្ឌទី ៤៨

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ជីវយី**លើកទ័ពទៅស្រុកកេងជីវ ចាញ់កល**ខុងបេង** ហើយឈឺចិត្តប្រេះថ្លើមស្លាប់ **ខុងបេង**ទៅសួរសព**ជីវយី** ជួបនឹង**បាំងថង** ៗទៅនៅនឹង**ឡៅពី** **ចូឆូ**ឲ្យសំបុត្រទៅហៅខ្លួន**ម៉ាថេង** ៗលើកទ័ពទៅលុះដល់ទាហាន**ចូឆូ**ចាប់ខ្លួន**ម៉ាថេង**បាន។)*

**ឯឡោស៊ុក** កាលទៅដល់ស្រុកឆសងគុណ ក៏ចូលទៅជួបនឹង**ជីវយី** ហើយអធិប្បាយរាយរឿងប្រាប់សេចក្តី តាមពាក្យ**ខុងបេង**និង**ឡៅពី**និយាយនោះគ្រប់ប្រការ។ **ជីវយី**ឮដូច្នោះ ក៏ទះដៃសើចហើយថា **ខុងបេង**ម្តងនេះមុខជាចាញ់កលរបស់យើងហើយ។ យើងនឹងបានសងសឹក**ខុងបេង**ក្នុងគ្រានេះវិញ។ អ្នកចូរនាំព័ត៌មាននេះទៅជម្រាប**ស៊ុនគួន**ឲ្យជ្រាបផងចុះ។ **ឡោស៊ុក**ក៏លា**ជីវយី**ទៅជួបនឹង**ស៊ុនគួន** ហើយបានពណ៌នារឿងរ៉ាវប្រាប់សព្វប្រការ។ **ស៊ុនគួន**បានឮសព្វគ្រប់ក៏មានអំណរណាស់ ទើបចាត់ប្រើ**ទៀភៅ**លើកទាហានទៅជួយរាជការ**ជីវយី**។ **ជីវយី**ក៏ចាត់ការប្រមូលសេនាទាហានបានប្រាំម៉ឺននាក់ ចេកចេញជាបួនកង ឲ្យ**កាំឡេង**លើកទាហានជាកងមុខ ឲ្យ**ឈីសេង**និង**តេងហង**ជាកងកណ្តាល ឲ្យ**ឡេងថង**និង**លីបង**ជាកងក្រោយ ខ្លួន**ជីវយី**និង**ទៀភៅ** រួមបញ្ចូលទាហានគ្នាជាកងទ័ពហ្លួង។ លុះបានឫក្សល្អ ក៏ចុះទូកចម្បាំងលើកទ័ពចេញពីស្រុកឆសងគុនទៅ។

**ខុងបេង**ដឹងដំណឹងថា **ជីវយី**លើកកងទ័ពមកហើយ ក៏ហៅ**ប៊ីតុក**មកបង្គាប់ថា អ្នកចូរស្រួតទៅចាំទទួល**ជីវយី**នៅមាត់ឈូងហែខៅចុះ បើ**ជីវយី**សួររកយើងនិង**ឡៅពី** ត្រូវប្រាប់ថា ចេញទៅប្រមូលគ្រប់គ្រួសារចាំទទួលនៅក្រៅស្រុកកេងជីវ ហើយ ឲ្យ**ជីវយី**ស្រួតលើកទ័ពទៅចុះ។ **ប៊ីតុក**ទទួលប្រសាសន៍**ខុងបេង**ហើយក៏លាចេញទៅ។ **ខុងបេង**ក៏នាំ**ឡៅពី**ទៅដើរលេងលើកំពូលភ្នំក្បែរស្រុកកេងជីវ។

លុះ**ជីវយី**លើកទ័ពទៅដល់មាត់កំពង់ឈូងហែខៅ ក៏សួរទាហាននៅទីនោះថា **ឡៅពី**ឲ្យអ្នកណាមកចាំទទួលយើងខ្លះទេ? ថាមិនទាន់ផុតមាត់ ទទួលទាហានចូលមកជម្រាបថា **ឡៅពី**ឲ្យ**ប៊ីតុក**មកចាំទទួលលោក។ **ជីវយី**ក៏ឲ្យហៅ**ប៊ីតុក**ចូលមក។ **ប៊ីតុក**គំនាប់ហើយថា **ឡៅពី**ចៅហ្វាយខ្ញុំបាទបានឮថា លោកលើកកងទ័ពមកក៏មានចិត្តសោមនស្សត្រេកអរណាស់ បានត្រៀមការទាំងពួងទុកស្រេចហើយ ឥឡូវចេញតាំងរោងនៅក្រៅស្រុកចាប់ពែងស្រា ចាំចាក់ជូនលោកពិសា ប្រើខ្ញុំបាទឲ្យមកចាំជម្រាបលោកនៅទីនោះ សុំឲ្យលោកស្រួតលើកទ័ពទៅមុនចុះ។

**ជីវយី**ឮដូច្នោះក៏អរណាស់ ទើបនិយាយនឹង**ប៊ីតុក**ថា យើងលើកកងទ័ពមកគ្រានេះគឺជាកិច្ចធុរៈរបស់ចៅហ្វាយអ្នកឯងទេ ឲ្យអ្នកស្រួតត្រឡប់ទៅប្រាប់**ឡៅពី**ថា ឲ្យត្រៀមបម្រុងស្បៀងអាហារដែលត្រូវបញ្ជូនទៅឲ្យកងទ័ពបរិភោគ។ **ប៊ីតុក**ក៏គំនាប់លា។ **ជីវយី**លើកទ័ពទៅដល់ឈូងកាំងអាន់ ក៏មិនឃើញមានមនុស្សម្នាមកចាំទទួលដូចពាក្យ**ប៊ីតុក**ប្រាប់សោះ ក៏គិតមន្ទិលប្លែកក្នុងចិត្ត ទើបស្រួតកងទ័ពទៅដល់ស្រុកកេងជីវ ឃើញទ្វារស្រុកបិទជិត មិនឃើញមានមនុស្សម្នាដើរទៅមកសោះ ឃើញតែទង់សពីរដើមដោតទុកលើសើន។ **ជីវយី**សង្ស័យណាស់ ក៏ឲ្យចតទូកចម្បាំងទុកនៅនោះ ហើយឡើងគោកជិះសេះនាំ**កាំឡេង**, **ឈីសេង**, **តេងហាង** និងទាហានបីពាន់នាក់ចូលទៅដល់ជើងកំផែងស្រុកកេងជីវ ប្រើទាហានចូលទៅស្រែកហៅអ្នកចាំទ្វារឲ្យបើកទទួល។ នាយទ្វារស្រែកសួរមកវិញថា អ្នកឯឈ្មោះអ្វី? មានការអ្វីមកនេះ? ទាហាននោះឆ្លើយថា យើងជាទាហាន**ជីវយី** ឥឡូវ**ជីវយី**លើកកងទ័ពមកដល់ហើយ។

**ជូឡុង**ក៏ឲ្យវាយឃ្មោះ គង ទូងស្គរ សញ្ញាហៅទាហានទាំងពួងដែលកាន់គ្រឿងសាស្ត្រាវុធនៅលើសើនបន្ទាយ ឲ្យឈរឡើងព្រមគ្នាហើយក៏ស្រែកថា លោកលើកកងទ័ពមកនេះ ត្រូវការលើកហួសទៅឯណា? **ជីវយី**ស្រែកតបថា អ្នកឯងមិនដឹងទេឬ យើងលើកទៅវាយស្រុកសែឈ្នួនឲ្យចៅហ្វាយអ្នកឯង។ **ជូឡុង**ថា លោកគិតកលឧបាយយ៉ាងព្រះចៅ**ជិនហៀនកុង** ខ្ចីផ្លូវចៅហ្វាយស្រុកងីទៅវាយស្រុកខេក

នោះឬ? **ខុងបេង**ដឹងអស់ហើយ បានជាប្រើយើងឲ្យលើកទាហានមកនៅរក្សាសើនបន្ទាយ ចាំជម្រាបឲ្យលោកជ្រាប ដែលលោកនឹងទៅវាយស្រុកសែឈ្នួននោះ ក៏ឲ្យស្រួតទៅវាយចុះ បើស្រុកសែឈ្នួនវិនាសហើយ **ឡៅពី**ចៅហ្វាយខ្ញុំក៏មិនរលុបសេចក្ដីអៀនខ្មាស ព្រោះ**ឡៅជៀង**និង**ឡៅពី**ជាជនជាប់លោហិតគ្នា បានជាផ្ដាំឲ្យយើងជម្រាបលោកថា បើលោកវាយស្រុកសែឈ្នួនបានដូចបំណាងមែន **ឡៅពី** និង **ខុងបេង**នឹងបង្វិលស្រុកកេងជីវឲ្យលោកវិញ ហើយក៏ឲ្យនាំសេនាទាហាននិងគ្រួសារទៅនៅក្នុងព្រៃ មិនរិះគិតធ្វើការសង្គ្រាមតទៅទៀតទេ។

**ជីវយី**ឮដូច្នោះ ក៏រំពឹងឃើញថា**ខុងបេង**ដឹងខ្លួន បានប្រុងប្រយ័ត្នការទុកព្រមអស់ហើយ ក៏ញាក់សេះវិលថយទៅក្រោយ។ ទទួល**គួនអ៊ូ**, **តៀវហ៊ុយ**, **ហងតុង**, **អ៊ុយអៀន**ស្រែកថា ឲ្យចាប់ខ្លួន**ជីវយី**ឲ្យបាន។ **ជីវយី**ឮដូច្នោះ ក្រឡេកមើលទៅក្នុងព្រៃមិនដឹងថាទាហានច្រើនឬតិចប៉ុន្មាន បានឮតែសំឡេងហ៊ោចម្ងាយផ្លូវប្រហែលមួយរយសិន (៤ គ.ម)។ **ជីវយី**នឹកតូចចិត្តដោយចាញ់តម្រិះ**ខុងបេង** ពិសព្រួញដែលត្រូវរបួសពីមុននោះ ក៏កម្រើករំជួលសព្វសព៌ាង្គកាយ ក៏ធ្លាក់ពីលើសេះសន្លប់បាត់ស្មារតី ពួកទាហានក៏ស្ទុះទៅគ្រាហ៍នាំទៅដាក់ក្នុងទូក កាលបើ**ជីវយី**ដឹងខ្លួនវិញហើយ ទាហានទាំងពួងក៏ជម្រាបថា យើងខ្ញុំឃើញ**ខុងបេង**និង**ឡៅពី**ឡើងទៅអង្គុយផឹកស្រាសប្បាយលើកំពូលភ្នំប្របស្រុកកេងជីវ។

**ជីវយី**ឮដូច្នោះក៏នឹកខ្ញាញ់ក្នុងចិត្តពន់ប្រមាណណាស់ គិតថា បើលើកទាហានពានពារទម្លាយ ទៅវាយយកខ្លួន**ឡៅពី**, **ខុងបេង**ក៏មិនដឹងកលឧបាយដែល**ខុងបេង**នឹងគិតដូចម្ដេចខ្លះ ដែល**ខុងបេង**មើលងាយប្រមាថយើង មកធ្វើការចំអកបញ្ឈឺចិត្តយើងដូច្នេះ បើយើងនឹងមិនទៅវាយយកស្រុកសែឈ្នួននោះក៏មិនបាន ព្រោះយើងបានបញ្ចេញវាចារួចទៅហើយ ត្រូវតែលើកកងទ័ពទៅវាយយកស្រុកសែឈ្នួនឲ្យបាន។ ខណៈនោះទទួល**ស៊ុនគួន**ប្រើ**ស៊ុនយី**ជាប្អូន ឲ្យលើកទាហានជំនួយមកជួយ**ជីវយី** ៗក៏ឲ្យ**ស៊ុនយី**ចូលមក ហើយពណ៌នាសេចក្ដីដែល**ខុងបេង**ធ្វើត្រឡប់ត្រឡិនឲ្យ**ស៊ុនយី**ស្ដាប់គ្រប់ប្រការ។ ហើយ**ជីវយី**និង**ស៊ុនយី**ក៏ឲ្យទាហានចេញទូកចម្បាំងប៉ង

នឹងទៅវាយយកស្រុកសែឈ្នួន លុះទៅដល់តំបន់ប៉ាយីវ ទទួល**ឡៅហាង** និង**គួនប៉េង** លើកទាហានទៅស្ទាក់ចាំពីលើទឹកនោះ យកសំបុត្រ**ខុងបេង**ទៅឲ្យ**ជីវយី** ៗទទួលសំបុត្រនោះមកមើលឃើញសេចក្ដីថា “**ខុងបេង**ឲ្យពរដល់**ជីវយី** ដែលជាទីប្រឹក្សាធំបំផុតក្នុងស្រុកកាំងតាំង ព្រោះខ្លួនខ្ញុំតាំងពីឃ្លាតចាកអ្នកមកក៏យូរលង់ហើយ តែនៅមានគំនិតគិតដល់ផ្លូវមេត្រីនឹងអ្នកគ្រប់ពេលមិនដែលធ្វេសសោះ គ្រានេះខ្ញុំដឹងថាអ្នកនឹងលើកកងទ័ពទៅវាយស្រុកសែឈ្នួននោះ ស្បៀងអាហារនិងសេនាទាហានក៏មានបរិបូរ សូម្បី**ឡៅជៀង**មិនសូវមានតម្រិះប្រាជ្ញាក៏គង់នឹងការពាររក្សាស្រុកបាន ដែលអ្នកនឹងលើកទ័ពទៅវេលានេះ ផ្លូវក៏ដាច់ស្រយាលឆ្ងាយណាស់ បើនឹងប្រែផ្លាស់បញ្ជូនស្បៀងអាហារក៏លំបាក មួយទៀត **ចូឆូ**នោះចាប់ដើមតាំងពីខូចសេនាទាហានប៉ែតសិបបីម៉ឺននាក់កាលគ្រាមុន ក៏ស៊ុនហួសចិត្តគិតតែនឹងសងសឹកវិញមិនរលត់សោះ ពេលនេះបើដឹងថា អ្នកលើកទ័ពទៅខាងណោះ បោះបង់ស្រុកនៅទំនេរដូច្នេះ ក៏នឹងរិះគិតលើកទ័ពមកវាយស្រុកកាំងតាំងកុំឲ្យដឹងខ្លួន ទោះបី**ស៊ុនគួន**នៅឯអាយក៏មិនងាយតស៊ូជាមួយ**ចូឆូ**បាន ស្រុកកាំងតាំងក៏នឹងខូចអសារបានទៅ**ចូឆូ**ជាប្រាកដ។ ខ្លួនខ្ញុំនិងអ្នកក៏បានសន្មតចិត្តជាមេត្រីនឹងគ្នាមកហើយ បើនឹងនៅស្ងៀមកន្តើយមិននិយាយក៏ដូចជាចាំមើលបំណាំ ចាំឲ្យធ្វើខុសស្រាប់តែទះដៃត្រេកអរដូចជាពុំគួរសោះ ហេតុនេះបានជាខ្ញុំជួយដាស់តឿនស្មារតី ទោះបីជឿឬពុំជឿក៏ស្រេចនូវចិត្តអ្នកចុះ។

**ជីវយី**ឃើញសេចក្ដីក្នុងសំបុត្រដូច្នោះ ក៏ដកដង្ហើមធំឈឺធំក្នុងចិត្តខ្លាំងណាស់ ពិសព្រួញក៏កម្រើកឡើងដួលសន្លប់ទៅ។ ទាហានដែលនៅជិតខាងក៏កែខៃឲ្យដឹងស្មារតីឡើងវិញ។ **ជីវយី**ដឹងខ្លួនថា មុខជាមិនរស់រួចជីវិត ក៏តាំងសរសេរសំបុត្រទុកមួយច្បាប់ ហើយបង្គាប់នាយទ័ពនាយកងទាំងពួងទុកថា យើងខំធ្វើការទាំងម្ល៉េះ ព្រោះតាំងចិត្តគិតនឹងទំនុកបម្រុង**ស៊ុនគួន**ដោយស្មោះត្រង់ តែគិតទៅមិនផ្ដុះផ្ដាយ គ្រានេះជីវិតយើងវិនាសអន្តរាយហើយ អ្នកទាំងឡាយនៅឯក្រោយ ក៏ត្រូវជួយទំនុកបម្រុងចៅហ្វាយយើងឲ្យបានសម្រេចតាមការដែលគិតនោះផងចុះ អ្នកចូរយក

សំបុត្រនេះទៅឲ្យ**ស៊ុនគួន**ថា យើងសូមគំនាប់លាហើយ។ **ជីវយី**ផ្តាំតែប៉ុណ្ណោះ ពិសព្រួញក៏រត់សព្វសាច់សន្លប់បាត់ស្មារតីម្តងទៀត ទាហានខំកែខៃដឹងស្មារតីឡើងវិញ។ **ជីវយី**គ្នាន់ខ្នាញ់ឈឺក្នុងចិត្តណាស់ ក៏ងើយមើលទៅលើអាកាសហើយស្រែកថា "ទេព្តាអង្គណាហ្ន៎! ដែលឲ្យយើងកើតមកហើយ ម្តេចឡើយក៏ឲ្យ**ខុងបេង**កើតមកផងដូច្នេះ?" **ជីវយី**ស្រែកប្រកាសដូច្នេះជាច្រើនម៉ាត់ ដោយចិត្តខឹងខ្លាំង ពិសព្រួញក៏តាំងតែជ្រួតជ្រាបសព្វសព៌ាង្គកាយ ក៏ដល់នូវសេចក្តីអន្តរាយជីវិតក្នុងខណៈនោះក្នុងអាយុ៣៦ឆ្នាំ។

បណ្តាពួកនាយកងនាយទ័ព ក៏លើកត្រឡប់នាំសព**ជីវយី**ទៅទុកដាក់តាមបណ្តាស័ក្តនាហ្មឺនធំ។ ឯបម្រើក៏នាំសំបុត្រដែល**ជីវយី**សរសេរនោះទៅឲ្យ**ស៊ុនគួន**ហើយសាស័ព្ទប្រាប់សេចក្តីឲ្យ**ស៊ុនគួន**ស្តាប់គ្រប់ប្រការ។ ឯ**ស៊ុនគួន** កាលបើដឹងថា**ជីវយី**ស្លាប់ដូច្នោះក៏យំសោកអាឡោះអាល័យឥតឧបមា ហើយយកសំបុត្រនោះមកមើលឃើញសេចក្តីថា "ខ្ញុំបាទ**ជីវយី** សូមគំនាប់មកដល់លោក ព្រោះលោកមេត្តាតាំងខ្លួនខ្ញុំឲ្យធ្វើជាមេទ័ពធំ និងប្រជុំប្រឹក្សាការពាររាជការទាំងពួង នោះព្រះតេជព្រះគុណធ្ងន់មិនមានទីបំផុត ខ្ញុំបាទក៏តាំងចិត្តធ្វើការដោយចិត្តស្មោះត្រង់ ប៉ងនឹងតបស្នងសងគុណលោកឲ្យបាន តែគ្រានេះការរបស់លោកទាំងប៉ុន្មានក៏នៅមិនទាន់ស្រេច ខ្ញុំមានអកុសលកម្មនាំមកផ្តាច់ឲ្យអស់ជីវិតទៅ ដោយសេចក្តីទុក្ខក្តៅក្នុងចិត្ត ព្រោះសព្វថ្ងៃនេះផែនដីក៏នៅមិនទាន់រាបទាប ឯទិសខាងជើង **ចូឆូ**ក៏បានជាធំនៅក្នុងស្រុកហ៊ូតោមានចិត្តរីករាយណាស់ ឯ**ឡៅពី**ដែលនៅក្នុងស្រុកកេងជីវ ក៏ដោយសារស្រុកកាំងតាំងជួយជាកម្លាំងផងទើបបានសេចក្តីសុខ លោកនឹងបង្អង់ទុកក៏ដូចជាចិញ្ចឹមខ្លាសាហាវ អំណើះតទៅគង់នឹងមានកម្លាំងពីខាងក្រៅត្រឡប់ជាសត្រូវនឹងលោកវិញ ក្នុងស្រុកយើងក៏មិនបានសម្រេចការអ្វីសោះ ព្រោះនាហ្មឺនក្នុងស្រុកកាំងតាំងសព្វថ្ងៃនេះ បើសម្លឹងមើលក៏ពុំឃើញនរណា អាចចូលមុខងារជំនួសខ្ញុំបាន ឃើញមានតែ**ឡោសុក**មួយ មានតម្រិះប្រាជ្ញាមាំមួនជាសមស្ងួនជាធំ ព្រោះជា

មនុស្សទៀងត្រង់សុចរិត សូមឲ្យលោកតាំងចិត្តរាប់អាន**ឡោសុក** ហើយតាំងជាមន្ត្រីធំជំនួសខ្លួនខ្ញុំចុះ បើលោកនឹងអនុគ្រោះ ក៏សូមឲ្យធ្វើតាមខ្ញុំគ្រប់ប្រការ"។

**ស៊ុនគួន**ឃើញសេចក្ដីក្នុងសំបុត្រដូច្នោះក៏ថា **ជីវយី**នេះមានតម្រិះប្រាជ្ញាណាស់ គួរទទួលតំណែងជាមហាឧបរាជបាន តែមកមានអាយុខ្លី គួរគប្បីឲ្យស្ដាយពន់ពេកណាស់ វេលានេះយើងនឹងបាននរណាមកជួយរិះគិតធ្វើការតទៅទៀត ដែល**ជីវយី**ផ្ដាំទុកនោះសោត យើងក៏យល់ស្របដែរ។ ខណៈនោះ **ស៊ុនគួន**ក៏តាំង**ឡោសុក**ជានាហ្មឺនជំនួស**ជីវយី** ហើយក៏ឲ្យទាហានទៅទទួលសព**ជីវយី**មកសែនព្រេនតាមទំនៀមក្នុងស្រុកឆសងគុន តាមបណ្ដាសក្តិនាហ្មឺនធំ។

ឯ**ខុងបេង**នោះ លុះ**ជីវយី**លើកទ័ពទៅហើយ ក៏នាំ**ឡៅពី**ចុះពីលើភ្នំត្រឡប់ទៅស្រុកកេងជីវ លុះវេលាយប់**ខុងបេង**ក៏ពិគ្រោះមើលឫក្សលើអាកាស ក្រឡេកឃើញផ្កាយធ្លាក់ចុះពីលើអាកាសមួយដួង **ខុងបេង**អស់សំណើចហើយប្រាប់**ឡៅពី**ថា **ជីវយី**ស្លាប់ទៅហើយ។ **ឡៅពី**ក៏ប្រឹក្សានឹង**ខុងបេង**ថា យើងនឹងគិតធ្វើដូចម្ដេច? **ខុងបេង**ថា **ជីវយី**ស្លាប់ទៅហើយ ឃើញតែ**ឡោសុក**មួយនឹងអាចជំនួស**ជីវយី** មួយទៀតខ្ញុំបាទមើលឫក្សលើអាកាស ឃើញផ្កាយនៅប្រជុំគ្នានៅទិសខាងកើត ចាំខ្ញុំទៅសួរសព**ជីវយី**ឯស្រុកកាំងតាំង នឹងបានស៊ើបរកអ្នកមានតម្រិះប្រាជ្ញាបញ្ចុះបញ្ចូលមកជួយធ្វើការនឹងលោក។

**ឡៅពី**ឆ្លើយតបទៅ**ខុងបេង**វិញថា ដែលលោកនឹងទៅស្រុកកាំងតាំងនោះ ខ្លាចក្រែងនាហ្មឺនមុខមន្ត្រីនិងទាហានធ្វើអន្តរាយដល់លោក។ **ខុងបេង**ឆ្លើយថា អម្បាល**ជីវយី**រស់នៅម្ដេចខ្ញុំទៅបានមិនខ្លាច ឥឡូវ**ជីវយី**ស្លាប់ទៅហើយនឹងត្រូវកោតខ្លាចនរណាទៀត ហើយ**ខុងបេង**ក៏បង្គាប់**ជូឡុង**ឲ្យលើកទាហានប្រាំរយ និងរៀបបម្រុងគ្រឿងពិធីការទៅជាមួយផង លុះចុះទូកទៅដល់កណ្ដាលផ្លូវ បានឮដំណឹងអ្នកស្រុកតាមផ្លូវនិយាយថា **ស៊ុនគួន**តាំង**ឡោសុក**ជានាហ្មឺនធំជំនួស**ជីវយី** ឯសព**ជីវយី** **ស៊ុនគួន**ឲ្យនាំទៅទុកឯស្រុកឆសងគុន។ **ខុងបេង**ឮដូច្នោះក៏ឲ្យចែវទូកតម្រង់ទៅស្រុកឆសងគុន។

**ឡោសុក**ដឹងថា**ខុងបេង**ទៅដល់ ក៏ចុះទៅអញ្ជើញឲ្យឡើងមក គំនាប់គ្នាតាមទំនៀម ឯទាហាន**ជីវយី**ក្រឡេកឃើញមុខ**ខុងបេង** ក៏ខឹងក្តៅខ្លាំងណាស់ គិតនឹងសម្លាប់**ខុងបេង** លុះ**ខុងបេង**ទៅដល់សព**ជីវយី**ហើយ ក៏សែនព្រេនតាមទំនៀម ហើយធ្វើជាយំសោកអាឡោះអាល័យខ្លាំងណាស់។ ពួកទាហាន**ជីវយី**ឃើញ**ខុងបេង**យំសោកដូច្នោះក៏និយាយគ្នាថា ខាងក្រៅឮល្បីគេនិយាយថា **ខុងបេង**និង**ជីវយី**ជាសត្រូវនឹងគ្នា ឥឡូវ**ខុងបេង**មកសែនព្រេនឲ្យ**ជីវយី** ហើយយំសោកអាឡោះអាល័យដូច្នេះ ក៏ឃើញថា **ខុងបេង**នេះមានចិត្តសុចរិតនឹង**ជីវយី** មិនសមនឹងពាក្យដែលឮល្បីថា សត្រូវនឹងគ្នាសោះ។ **ឡោសុក**ឃើញ**ខុងបេង**ធ្វើអាការសៅសោកទួញយំដូច្នោះ ក៏យំសោកអាណិតជាមួយនឹង**ខុងបេង** ហើយគិតថា **ខុងបេង**នេះចិត្តល្អសុភាពល្អណាស់ គ្មានការអាឃាតព្យាបាទសោះ ឯ**ជីវយី**ជាមនុស្សមានចិត្តឫស្យាព្យាបាទគេទាល់តែស្លាប់ខ្លួន **ឡោសុក**លុះគិតដូច្នោះហើយ ក៏ឲ្យរៀបតុលៀងអាហារអញ្ជើញ**ខុងបេង**បរិភោគ លុះរួចហើយ**ខុងបេង**ក៏លាឡោសុកទៅវិញ។

ឯ**បាំងថង** ក្រឡេកឃើញ**ខុងបេង**ក៏ដើរចូលមក ចាប់ជាយអាវ**ខុងបេង**ហើយអស់សំណើចថា អ្នកក្លែងធ្វើកលឧបាយឲ្យ**ជីវយី**ឈឺចិត្តទាល់តែដាច់ខ្យល់ស្លាប់ ហើយថែមទាំងមកក្លែងធ្វើជាសែនព្រេន ទួញយំអាឡោះអាល័យ**ជីវយី**ទៀត អ្នកធ្វើការចំអកឡកឡឺយមើលងាយគេដូច្នេះ ឃើញថាស្រុកកាំងតាំងនេះ គ្មានមនុស្សដឹងដល់កលឧបាយរបស់អ្នកទេឬ?

**ខុងបេង**តក់ស្លុតក្នុងចិត្ត ក៏ក្រឡេកមើលទៅឃើញ**បាំងថង**ជាភឿនសម្លាញ់ ក៏រសាយសេចក្តីភ័យបារម្ភ ទើបអស់សំណើច ហើយដឹកដៃ**បាំងថង**ចុះទៅអង្គុយក្នុងទូកសន្ទនាគ្នាដោយសេចក្តីរីករាយយ៉ាងក្រៃលែង ហើយ**ខុងបេង**ក៏សរសេរសំបុត្របិទស្រោមបោះត្រាប្រគល់ទុកឲ្យ**បាំងថង**មួយច្បាប់ ហើយផ្តាំពាក្យក្រៅសំបុត្រនោះថា បើ**ស៊ុនគួន**មិនបានយកអ្នកទុកធ្វើការរាជការទេ ឬក៏អ្នកមិនពេញចិត្តដោយប្រការយ៉ាងណា ក៏ឲ្យអ្នកអញ្ជើញទៅស្រុកកេងជីវចុះ ដើម្បីនឹងជួយគ្នាធ្វើការរាជការទំនុកបម្រុងផែនដី**ឡៅពី**តទៅមុខ។ **ឡៅពី**ក៏នឹងបានជាធំ មិនបង់កម្លាំង

ដែលអ្នកបានរៀនចេះដឹងមកជាមួយគ្នា បើអ្នកទៅហើយមិនបានជួបនឹងខ្ញុំ ក៏ឲ្យយកសំបុត្រនេះទៅបង្ហាញ**ឡៅពី**ចុះ។ **បាំងថង**ក៏ទទួលពាក្យថា ព្រមទៅ។ **ខុងបេង**ក៏លាទៅស្រុកកេងជីវវិញ។

ឯ**ឡោសុក**ក៏ជូនដំណើរសព**ជីវយី**ទៅតំបន់ប៊ូអាវ។ **ស៊ុនគួន**ក៏ចាត់ចែងទ្រព្យរបស់ទៅសែនសព**ជីវយី** ហើយក៏យំសោកចំពោះសព**ជីវយី**ជាខ្លាំង រួចបង្គាប់ពួកទាហានឲ្យតែងការសព**ជីវយី**តាមបណ្ដាស័ក្តិបញ្ចុះទុកត្រង់ស្រុកកំណើត ហើយយក**ជីវស៊ុន**, **ជីវអ៊ុន**កូន**ជីវយី**ទាំងពីរមកចិញ្ចឹមព្យាបាល។

ថ្ងៃមួយ **ឡោសុក**បាននិយាយនឹង**ស៊ុនគួន**ថា ដែលលោកតាំងខ្លួនខ្ញុំជំនួស**ជីវយី**នោះ ជាគុនធ្ងន់រកទីបំផុតគ្មានតែតម្រេះប្រាជ្ញារបស់ខ្ញុំតិចណាស់ មិនដឹងដល់ផ្លូវរាជការ ខ្ញុំនឹងសុំទៅអញ្ជើញអ្នកមានតម្រិះប្រាជ្ញាម្នាក់ឈ្មោះ**បាំងថង** មកឲ្យនៅជួយធ្វើការលោក។ ឈ្មោះនេះនិងខ្ញុំជាភឿនសម្លាញ់នឹងគ្នាមកពីដើម ចេះដឹងមើលលក្ខណៈឫក្សពារ ខាងលើអាកាសនិងក្រោមផែនដី ដោយតម្រិះប្រាជ្ញាឆ្លៀវឆ្លាតណាស់ បានរៀនវិជ្ជាសិល្បសាស្ត្រនេះគ្រូជាមួយនឹង**ខុងបេង** សូម្បី**ខុងបេង**និង**ជីវយី**ក៏រមែងស្រឡាញ់រាប់អាន ពីដើម**បាំងថង**នៅស្រុកសុងយ៉ុង ឥឡូវចូលមកនៅស្រុកយើង។

**ស៊ុនគួន**ឮ**ឡោសុក**និយាយដូច្នោះ ក៏ពេញចិត្តណាស់ថា យើងបានឮឈ្មោះនេះមកយូរហើយ ចូរអ្នកឲ្យទៅអញ្ជើញចូលមកចុះ។ **ឡោសុក**ក៏ទៅអញ្ជើញ**បាំងថង**ចូលទៅជួបនឹង**ស៊ុនគួន** គំនាប់ហើយ**ស៊ុនគួន**ក៏សម្លឹងមើលរូបលក្ខណៈ**បាំងថង**ឃើញចិញ្ចើមធំ ច្រមុះកោង មុខខ្មៅ ពុកចង្កាខ្លី រូបវិបរិតវិកលណាស់ ចិត្តមិនសូវត្រេកអរ **ស៊ុនគួន**ក៏សួរថា តម្រិះដែលអ្នកបានរៀនចេះដឹងមកនោះ យកអ្វីជាគោលចារឹក។ **បាំងថង**ថា ដែលនឹងយកជាគោលចារឹកលើសជាងទាំងអស់នោះ គឺសុទ្ធតែជាការប្រមាណ លុះតែមានការមកដល់ ទើបគិតឃើញតទៅ។

**ស៊ុនគួន**សួរថា វិជ្ជាសិល្បសាស្ត្រដែលអ្នកបានសង្វាតរៀនមកនោះ ហើយនិងតម្រិះ**ជីវយី**ប្លែកគ្នាយ៉ាងណា? **បាំងថង**ថា វិជ្ជាសិល្បសាស្ត្រដែលខ្ញុំរៀន ខុសគ្នា

នឹងតម្រិះ**ជីវយី**ច្រើនណាស់។ **ស៊ុនគួន**ឮដូច្នោះ ហេតុតែចិត្តនៅស្រឡាញ់**ជីវយី**ច្រើន ក៏ស្ដាប់មិនពេញចិត្ត ហើយប្រាប់**បាំងថង**ថា អញ្ជើញអ្នកចេញទៅសិនចុះ បើមានការអាសន្នទៅខាងមុខ សឹមឲ្យអញ្ជើញអ្នកមកជួយរិះគិតការនោះៗ។ **បាំងថង**ឮដូច្នោះ ក៏ដកដង្ហើមធំ ហើយដើរចេញទៅវិញ។

**ឡោសុក**ឃើញ**បាំងថង**ដើរចេញទៅ ក៏សួរ**ស៊ុនគួន**ថា ហេតុម្ដេចលោកមិនយក**បាំងថង**ទុកធ្វើរាជការផង។ **ស៊ុនគួន**ថា ខ្ញុំពិនិត្យមើលរូបរាង មិនសមជាអ្នកមានតម្រិះប្រាជ្ញាសោះ ហើយនិយាយក្រអឺតក្រអាង បើនឹងយកទុកក៏មិនឃើញបានជាការអ្វី។ **ឡោសុក**ថា គ្រាកាល**ចូឆូ**លើកទ័ពទូកមកច្បាំងនឹងស្រុកយើងពីថ្ងៃមុន **បាំងថង**បានទៅជួយ**ជីវយី** ប្រើឧបាយទៅបញ្ឆោត**ចូឆូ** បានជា**ជីវយី**ដុតទ័ព**ចូឆូ**ស្លាប់ទាហានជាច្រើន។ ខ្ញុំឃើញថា **បាំងថង**មានគុណគាប់ប្រសើរណាស់ សូមឲ្យលោកត្រិះរិះគិតមើលសិន។

**ស៊ុនគួន**ថា **ចូឆូ**ធ្វើការគ្រានោះ ព្រោះគំនិត**ចូឆូ**ខ្លួនឯង មិនមែនជាគំនិត**បាំងថង**ទៅបញ្ឆោតទេ។ **ឡោសុក**ទៅជួបនឹង**បាំងថង**ហើយថា ខ្ញុំបានជួយទំនុកបម្រុងអ្នកក៏អស់ប៉ុណ្ណឹងហើយ **ស៊ុនគួន**មិនព្រមយកអ្នកទុកជាគ្នា ចូរអ្នករង់ចាំស្ដាប់ការបន្តិចទៅទៀតចុះ។ **បាំងថង**ឮ**ឡោសុក**និយាយដូច្នោះ ក៏ឱនដាក់មុខនឹកតូចចិត្ត មិនបាននិយាយតបប្រការម្ដេច ចេះតែដកដង្ហើមធំ។ **ឡោសុក**ថា ខ្ញុំឃើញកិរិយាអាការក្នុងខ្លួនអ្នក មុខជាមិនចង់នៅក្នុងស្រុកកាំងតាំងហើយ អ្នកក៏មានវិជ្ជាសិល្បសាស្ត្រប្រកបដោយតម្រិះប្រាជ្ញា ចូរពិគ្រោះពិចារណាមើលចុះ បើឃើញថានឹងទៅខាងទីណាតំបន់ណាស្រួល ក៏ចូរទៅនៅតាមអធ្យាស្រ័យអ្នកចុះ។

**បាំងថង**ឮដូច្នោះក៏ឆ្លើយថា ចិត្តរបស់ខ្ញុំចង់ទៅនៅនឹង**ចូឆូ**។ **ឡោសុក**ថា អ្នកមានតម្រិះប្រាជ្ញាភ្លឺថ្លាដូចកែវដ៏ល្អពិសេស បើអ្នកទៅនៅនឹង**ចូឆូ**នោះ បីដូចជាទៅនៅក្នុងទីងងឹត មិនគួរសមទេ សូមអ្នកទៅនៅឯស្រុកកេងជីវ នៅធ្វើការជាមួយ**ឡៅពី**វិញ នឹងមានប្រយោជន៍ចំណេញដល់ខ្លួនអ្នក។ **បាំងថង**ថា សេចក្ដីពិតក្នុងចិត្តខ្ញុំ ក៏គិតដូចអ្នកថា តែដែលខ្ញុំថាទៅនៅនឹង**ចូឆូ**នោះ ហាក់នឹងចង់ពិសោធចិត្តអ្នកមើលទេ

តើ។ **ឡោសុក**ថា បើដូច្នោះសឹមខ្ញុំធ្វើសំបុត្រមួយទៅដល់**ឡៅពី** ផ្ញើឲ្យអ្នកទៅជួយទំនុកបម្រុង**ឡៅពី** ដើម្បីមិនឲ្យ**ឡៅពី**និង**ស៊ុនគួន**ចៅហ្វាយខ្ញុំជាហរិចិត្តទាំងសងខាងជួយរំលាងបំផ្លាញ**ចូវឆ្វ**ចេញ។ **បាំងថង**ថា គំនិតរបស់អ្នកគិតនោះ ដូចជាគំនិតរបស់ខ្ញុំគិតដែរ សុំឲ្យអ្នកសរសេរសំបុត្រទៅចុះ។ **ឡោសុក**ក៏សរសេរសំបុត្រឲ្យ**បាំងថង**ៗ ទទួលហើយក៏ទៅស្រុកកេងជីវប៉ងនឹងចូលទៅជួប**ឡៅពី**។

វេលានោះជួនជា**ខុងបេង**មិននៅ ចេញទៅជម្រះសេចក្ដីដោះទុក្ខរាស្ត្រខេត្តទាំងបួន នាយទ្វារក៏ចូលទៅជម្រាប**ឡៅពី**ថា **បាំងថង**មកពីស្រុកកាំងតាំង មានការមករកលោក។ **ឡៅពី**ដឹង**បាំងថង**មករកក៏និយាយថា ខ្ញុំឮល្បីគេនិយាយមកយូរហើយ តែមិនដែលជួបមុខសោះ ក៏ឲ្យនាយទ្វារអញ្ជើញ**បាំងថង**ចូលមក។ ខណៈនោះ **បាំងថង**ក៏មិនបានគួរសមគំនាប់តាមប្រក្រតីឡើយ។ **ឡៅពី**បានពិនិត្យមើលលក្ខណៈសព្វគ្រប់ ក៏ឃើញអាការៈជាឧបធិរាងកាយ ក្នុងចិត្តពុំសូវត្រេកអរវីករាយ ក៏ក្លែងនិយាយថា អ្នកមករកយើងពីស្រុកឆ្ងាយ យើងក៏មិនទាន់មានធុរៈអ្វីនឹងត្រូវការ។

**បាំងថង**ឃើញ**ឡៅពី**មិនសូវរាក់ទាក់រាប់អាន ក៏ទោមនស្សតូចចិត្ត មិនយកសំបុត្ររបស់**ខុងបេង**និង**ឡោសុក**បង្ហាញឲ្យ**ឡៅពី**ឡើយ គ្រាន់តែនិយាយថា ខ្ញុំឮល្បីថា មារបស់ព្រះចៅ**ហៀនតេ**នេះ រមែងបញ្ចុះបញ្ចូលមនុស្សដែលមានតម្រិះប្រាជ្ញានិងសេនាទាហានដែលមានថ្វីដៃខ្លាំងពូកែណាស់ ខ្ញុំក៏ឧស្សាហ៍ស្វះស្វែងមករក។

**ឡៅពី**ថា ស្រុកកេងជីវនេះក៏ស្ងប់រាបទាបហើយ បើនឹងយកអ្នកឲ្យនៅផងក៏មិនគួរសម ឃើញនៅទំនេរតែស្រុកឡូយអៀងខាងទិសបូព៌ា ឆៀងឧត្តរចម្ងាយផ្លូវពីនេះទៅប្រហែល១៣០០សិន (៥២ គ.ម) មិនទាន់មានចៅហ្វាយស្រុកថ្មី អញ្ជើញអ្នកទៅស្រដីរាជការធ្វើជាចៅហ្វាយស្រុក ខេត្តនោះសិនចុះ បើថ្ងៃក្រោយមានទីដទៃក្រៅពីនោះគួរសម សឹមខ្ញុំផ្លាស់ចេញពីទីនោះ។ **បាំងថង**ក៏គិតក្នុងចិត្តថា **ឡៅពី**នេះមើលងាយហើយមិនរាប់អានអញសោះ បើអញនៅសន្ទនាឲ្យឃើញសតិបញ្ញា

សោត **ខុងបេង**ក៏មិននៅទៀត ត្រូវតែប្រថុយទទួលទៅចុះ គិតដូច្នោះហើយក៏លា**ឡៅពី**ទៅ។

លុះទៅដល់ស្រុកឡយអៀងកាលណា **បាំងថង**ចេះតែផឹកស្រាស៊ីដេក ក្រោកពីដំណេកផឹកស្រាមិននិយាយការរាជការសោះ បណ្ដារាស្ត្រក្នុងស្រុកនោះទាស់អធ្យាស្រ័យ ក៏ចូលមកស្រដីប្ដឹងផ្ដល់ដល់**ឡៅពី**ថា **បាំងថង**ចេះតែផឹកស្រាស្រវឹងគ្មានប្រឹងនិយាយដោះសុខទុក្ខបណ្ដារាស្ត្រ តាមសណ្ដាប់ធ្នាប់អ្នកធំសោះ។ **ឡៅពី**ឮដូច្នោះខឹងណាស់ក៏និយាយថា **បាំងថង**នោះជាមនុស្សមិនល្អនាំឲ្យយើងខូចការ ក៏ចាត់ប្រើ**តៀវហ៊ុយ**ជាអាជ្ញាកណ្ដាល ទៅមើល**បាំងថង**ឯស្រុកឡយអៀង បើឃើញមិនយកចិត្តទុកដាក់នឹងធ្វើរាជការពិតប្រាកដ ដូចពាក្យរាស្ត្រមកប្ដឹងមែន ត្រូវឲ្យបញ្ជូនខ្លួនមក គិតហើយក៏ត្រឡប់មានស្មារតីថា **តៀវហ៊ុយ**ធ្វើការអ្វីរមែងច្រឡឹសបើសណាស់ ក៏ឲ្យ**ស៊ុនខៀន**ទៅអមជាមួយផង ដើម្បីនឹងបានជួយមើលការខុសត្រូវ។

**តៀវហ៊ុយ, ស៊ុនខៀន** និងទាហានក៏នាំគ្នាទៅដល់ស្រុកឡយអៀង ឃើញតែពួកទាហាន និងរាស្ត្រនាំគ្នាចេញមកទទួលក្រៅស្រុក មិនបានឃើញ**បាំងថង**ចៅហ្វាយស្រុកចេញមកគួរសមតាមធម្មតា **តៀវហ៊ុយ**សួរថា ចៅហ្វាយស្រុកទៅណា បានជាមិនចេញមកទទួលយើង? រាស្ត្រទាំងអស់ឆ្លើយថា លោកចៅហ្វាយស្រុកផឹកស្រាស្រវឹងដេកលក់ទៅហើយ។ **តៀវហ៊ុយ**ឮដូច្នោះក៏ខឹងណាស់ បង្គាប់ទាហានទៅចាប់ខ្លួន**បាំងថង**នាំមក។ **ស៊ុនខៀន**ក៏ហាមឃាត់**តៀវហ៊ុយ**ថា កុំអាលខឹងច្រឡោតមើលងាយគេ ត្រូវយើងចូលទៅក្នុងស្រុក យកខ្លួនមកសាកសួរឲ្យដឹងការណ៍ខុសត្រូវសិន បើពិតប្រាកដដូចពាក្យរាស្ត្រទៅប្ដឹងសាទុក្ខមែន សឹមធ្វើតាមទោស។ **តៀវហ៊ុយ**ឮដូច្នោះក៏យល់ឃើញត្រូវ ទើបនាំគ្នាចូលទៅសាលាកណ្ដាល ហើយឲ្យបម្រើចូលទៅហៅខ្លួន**បាំងថង**ចេញមក។ បម្រើចូលទៅឃើញ**បាំងថង**កំពុងស្រវឹងស្រាក៏គ្រាហ៍ចេញមកអង្គុយ។ **តៀវហ៊ុយ**ឃើញ**បាំងថង**ស្រវឹងជ្រុលដូច្នោះខឹងណាស់និយាយថា បងខ្ញុំយល់ឃើញថា អ្នកជាមនុស្សល្អបានជាឲ្យមកធ្វើ

ចៅហ្វាយស្រុក ហេតុម្ដេចអ្នកមកអង្គុយសំកុកផឹកតែស្រា លះបង់ការរាជការមុខងាររបស់ខ្លួនសូន្យសោះ? **បាំងថង**ឮដូច្នោះក៏អស់សំណើចហើយថា អ្នកមកនិយាយថា យើងលះបង់ការរាជការមុខងារក្នុងខេត្តនោះ តើលះបង់ដូចម្ដេច?

**តៀវហ៊ុយ**ថា អ្នកមករក្សាសេចក្ដីសុខទុក្ខរាស្ត្រក្នុងស្រុកនេះជាងមួយរយថ្ងៃហើយ ចេះតែផឹកស្រាមិនបានកាត់សេចក្ដីតាមពាក្យបណ្ដឹងដែលរាស្ត្រប្ដឹង ទាល់តែប្រជារាស្ត្រចូលទៅសាទុក្ខ។ **បាំងថង**ថា ស្រុកនេះតូចណាស់ ក្រអ្វីនឹងកាត់សេចក្ដីប៉ុណ្ណោះ អញ្ជើញអង្គុយចាំខ្ញុំមួយស្របក់ចុះ ខ្ញុំនឹងជម្រះកាត់សេចក្ដីដែលរាស្ត្រប្ដឹងនោះឲ្យអ្នកស្ដាប់។ **បាំងថង**ឲ្យយកពាក្យបណ្ដឹងទាំងចោទទាំងឆ្លើយ ហើយឲ្យហៅគូក្ដីទាំងសងខាងមកអង្គុយរៀងគ្នាពេញសាលា ហើយឲ្យស្មៀនសូត្រសារពាក្យបណ្ដឹងនិងចម្លើយ ទៅវិញទៅមកចប់ចុះ ត្រចៀក**បាំងថង**នោះក៏ផ្ទៀងស្ដាប់ ដៃក៏ចាប់ពិតសរសេរកត់ត្រា មាត់ពិភាក្សាកាត់សេចក្ដីវែរហ័សទាំងដៃទាំងមាត់ ស្ទាត់ទាំងស្ដាប់ចំណាប់ទាំងស្មារតីវៃទាំងប្រាជ្ញាព្រមគ្នា តែមួយស្របក់ក៏កាត់អស់សេចក្ដីទាំងប៉ុន្មានគ្មានទាស់អធ្យាស្រ័យនៃគូក្ដីណាមួយ ត្រូវសេចក្ដីតាមច្បាប់គ្រប់មាត្រា សាលក្រមដែលពិភាក្សាក៏សរសេររួចជាស្រេច។ អស់អាណាប្រជានុរាស្ត្រទាំងឡាយ ក៏នាំគ្នាកោតសរសើរតម្រិះប្រាជ្ញាអឺងកងទូទៅ។ **បាំងថង**ក៏និយាយនឹង**តៀវហ៊ុយ**ថា ខ្ញុំលះបង់មុខការនោះសោត តើមុខការអ្វី? សូមថាមកទៀតចុះ។ **តៀវហ៊ុយ**ថា សេចក្ដីទាំងអម្បាលនេះក៏អស់រលីងទៅហើយ។ **បាំងថង**ថា បើសេចក្ដីតែត្រឹមប៉ុណ្ណោះទេនឹងជាអ្វី ខ្ញុំនឹងនិយាយមិនបានឬ? តែមិនសប្បាយចិត្តបានជាមិនរវល់នឹងជម្រះកាត់សេចក្ដី ទោះបីរាជការខាង**ចូឆ្វូ**និង**ស៊ុនគួន**ក្ដីក៏មិនដូចជាខ្ញុំចាប់សរសេរអក្សរលើបាតដៃប៉ុណ្ណោះ បើលាដៃមើលកាលណា ក៏នឹងឃើញច្បាស់កាលនោះទាំងអស់។ **តៀវហ៊ុយ**ឮដូច្នោះ ក៏តក់ស្លុតក្នុងចិត្តនិយាយនឹង**បាំងថង**ថា **ឡៅពី**និងខ្ញុំពុំបានដឹងសោះឡើយថា អ្នកមានតម្រិះប្រាជ្ញាដល់ប៉ុណ្ណោះ គិតថាអ្នកលះបង់ការរាជការសោះ បានជាប្រើខ្ញុំមកពិនិត្យមើល។ **បាំងថង**ថា កាលជួបគ្នាពីដំបូងនោះ **ឡៅពី**ក៏មិនបានដឹងថាខ្លួនខ្ញុំដូចម្ដេចសោះ បើនឹងបង្ហាញសំបុត្រនោះឲ្យ

មើលក៏ហាក់ដូចខ្ញុំក្លែងសុំសំបុត្រគេមកបង្អួតខ្លួនឯង ទុកឲ្យអ្នកដទៃសរសើរជំនួសវិញវិសេសជាង រួចសឹមបង្ហាញសំបុត្រនោះជាភស្តុតាង។ **តៀវហ៊ុយ**ក៏និយាយនឹង**ស៊ុនខៀន**ថា បើកុំតែអ្នកឃាត់ឃាំងរាំងរាខ្ញុំពីដំបូង នឹងមិនជ្រុលខូចការទៅទេឬ? ថាតែប៉ុណ្ណោះហើយ **តៀវហ៊ុយ**និង**ស៊ុនខៀន**ក៏លា**បាំងថង**ទៅស្រុកកេងជីវវិញ លុះទៅដល់ក៏ពណ៌នាសេចក្តីឲ្យ**ឡៅពី**ស្តាប់គ្រប់ប្រការ។ ហើយហុចសំបុត្រឲ្យ**ឡៅពី**មើលដែលមានសេចក្តីថា៖

“**បាំងថង**នេះ បានរៀនសូត្រចេះដឹងវិជ្ជាសិល្បសាស្ត្រច្រើនណាស់ ជាមនុស្សមានតម្រិះប្រាជ្ញាគួរតាំងជាទីប្រឹក្សាលោកបាន បើនឹងក្រឡេកមើលខ្លួនប្រាណក៏ឃើញថារូបរាងកាយខាងក្រៅមិនសមជាអ្នកមានតម្រិះប្រាជ្ញាសោះ ខ្ញុំមានសេចក្តីសោកស្រណោះ**បាំងថង**ណាស់ ខ្លាចក្រែងស្វះស្វែងទៅនៅនឹងអ្នកដទៃទៀត ទើបខ្ញុំផ្ញៀតសរសេរសំបុត្រឲ្យ**បាំងថង**កាន់មកជួបនឹងលោកសិន”។

**ឡៅពី**បានឃើញសំបុត្រដូច្នោះ ក៏នៅគិតត្រិះរិះសន្និសង្ស័យ ទទួលទាហានចូលទៅថ្លែងសេចក្តីថា **ខុងបេង**ត្រឡប់មកវិញហើយ។ **ឡៅពី**ក៏ចេញទៅទទួលចូលមក ហើយ**ខុងបេង**សួរថា **បាំងថង**បានមកនៅនឹងលោក តើគេបានសេចក្តីសុខសប្បាយឬទេ? **ឡៅពី**ក្លែងឆ្លើយថា **បាំងថង**បានមកជួបនឹងខ្ញុំ ៗក៏តាំងឲ្យធ្វើចៅហ្វាយស្រុកឡុយអៀង ចេះតែលះបង់ការងារ មិនបានត្រួតត្រានិយាយឲ្យរាស្ត្របានសេចក្តីសុខចិត្តគិតតែផឹកស្រាព្រឹកល្ងាចជានិច្ច ហើយដេកធ្មេចមិនធ្វើការអ្វីសោះ។ **ខុងបេង**ឮដូច្នោះក៏អស់សំណើចហើយថា **បាំងថង**នេះជាមនុស្សបានរៀនវិជ្ជាចេះដឹងមានតម្រិះប្រាជ្ញាច្រើនណាស់ ចំពោះគេនិងខ្ញុំពុំមែនដូចគ្នាទេ គេចេះជាងខ្ញុំដប់ភាគទៅទៀត ខ្ញុំបានសរសេរសំបុត្រផ្ញើទុកជូនលោកមួយច្បាប់ផង **បាំងថង**ជូនមកលោកឃើញឬទេ? **ឡៅពី**ឆ្លើយថា ថ្ងៃនេះបានឃើញតែសំបុត្រ**ឡោសុក**ផ្ញើមក ឯសំបុត្ររបស់លោកមិនបានឃើញនៅឡើយ។

**ខុងបេង**ថា លោកតាំង**បាំងថង**ឲ្យធ្វើចៅហ្វាយស្រុកឡុយអៀង ដែលជាស្រុកតូចនោះ ប្រហែលជាទាស់ចិត្ត បានជាក្លែងលះបង់មុខការងាររាជការ ផឹកតែ

ស្រាស៊ីដេកដូច្នោះ។ **ឡៅពី**ថា បើ**តៀវហ៊ុយ**មិនមកប្រាប់ ក៏នឹងខូចអសារមនុស្សមានប្រាជ្ញាម្នាក់ទៅសោះ ហើយ**ខុងបេង**ក៏ប្រើ**តៀវហ៊ុយ**ឲ្យទៅអញ្ជើញ**បាំងថង**មក។ **តៀវហ៊ុយ**ក៏ទៅអញ្ជើញ**បាំងថង**ឯស្រុកឡុយអៀងមកដល់ស្រុកកេងជីវ។ **ឡៅពី, ខុងបេង**ក៏នាំគ្នាចេញទៅទទួល**បាំងថង**ដល់ក្រៅទ្វារស្រុក គំនាប់គ្នាតាមទំនៀម ហើយ**ឡៅពី**ក៏និយាយនឹង**បាំងថង**ថា ខ្ញុំជាមនុស្សចិត្តស្រាលរហ័ស ទើបមិនបានស្គាល់ច្បាស់ថា អ្នកមានតម្រិះប្រាជ្ញាចាត់ប្រើអ្នកឲ្យទៅធ្វើរាជការស្រុកតូចនោះ ខ្ញុំសុំសារភាពទទួលខុស ឲ្យអ្នកអនុគ្រោះលើកទោសម្តងចុះ លុះនិយាយហើយក៏នាំគ្នាទៅអង្គុយលើគេហដ្ឋាន។ **បាំងថង**ក៏យកសំបុត្រ**ខុងបេង**បង្ហាញទៅ**ឡៅពី** ៗ ទទួលយកមកមើលសេចក្តីថា៖

“**ហាងស៊ូ**ដែលជាឈ្មោះ**បាំងថង**នោះ បើបានមកដល់វេលាណា សូមឲ្យ**ឡៅពី**រក្សាទុកចុះ ព្រោះនឹងបានជួយធ្វើរាជការ”។

**ឡៅពី**ឃើញសំបុត្រដូច្នោះ ក៏មានចិត្តសោមនស្សត្រេកអរណាស់ថា៖ “ខ្ញុំភ្លេចសូន្យសោះ ទើបតែនឹងរឭកនឹកឃើញពាក្យ**ស៊ុម៉ាតេកឆោ** ជាអាចារ្យបាននិយាយទុកនឹងខ្ញុំថា **ហុកឡុង**នោះគឺ**ខុងបេង, ហាងស៊ូ**គឺ**បាំងថង** ទាំងពីរនាក់នេះ បើបានតែឈ្មោះណាមួយក៏នឹងជួយប្រាបប្រាមសត្រូវផែនដីបាន គ្រានេះ ក៏បានមកព្រមគ្នាទាំងពីរនាក់ហើយ គួរតែទំនុកបម្រុងផែនដីព្រះចៅ**ហៀនតេ** ឲ្យបានរុងរឿងតទៅ ទើបតាំង**បាំងថង**ជាទីប្រឹក្សាជាមួយគ្នានឹងខុងបេង ឲ្យជួយខំប្រឹងបង្ហាត់សេនាទាហានឲ្យចំណាន ស្ទាត់ក្នុងក្បួនពិជ័យសង្គ្រាម ព្រមទាំងកិច្ចការរាជការគ្រប់ជំពូកក្នុងស្រុកទេស ក៏ជាសិទ្ធិដល់**ខុងបេង** និង**បាំងថង**ចាត់ចែងត្រួតត្រាទាំងអស់។

ពួកអ្នកស៊ើបការណ៍ក៏នាំយកព័ត៌មានទៅឲ្យដំណឹង**ចូឆូ** ឯស្រុកហ៊ូតោថា **ឡៅពី**បាន**ខុងបេង**និង**បាំងថង**មកជាទីប្រឹក្សា ប្រើប្រាជ្ញាបញ្ចុះបញ្ចូលសេនាទាហាន និងប្រមូលផលឲ្យបានស្បៀងអាហារ នូវគ្រឿងសាស្ត្រាវុធជាច្រើនណាស់ មុខជា

នឹងរួមគំនិតគ្នាជាស្រឡះទៅខាង**ស៊ុនគួន** ហើយលើកទ័ពមកដោយអាការគុំគួននឹងធ្វើអន្តរាយលោកជាប្រាកដ។

**ចូឆូ**ឮដូច្នោះ ក៏ឲ្យប្រមូលទីប្រឹក្សានិងសេនាទាហានមកប្រជុំពិគ្រោះ ដើម្បីនឹងលើកទ័ពទៅខាងទិសទក្សិណ។

**ស៊ុនហ៊ីវ**ជម្រាប**ចូឆូ**ថា ខ្ញុំបាទយល់ថា **ជីវយី**ទើបនឹងស្លាប់ មិនទាន់មានមេកងទ័ពនិងទីប្រឹក្សាទេ គួរនឹងលើកទ័ពទៅវាយយកស្រុកកាំងតាំងគង់នឹងបានដោយស្រួល រួចសឹមលើកទៅវាយយកស្រុកកេងជីវទៀត។ **ចូឆូ**ថា យើងនឹងលើកទ័ពទៅផ្លូវក៏ឆ្ងាយខ្លាចក្រែង**ម៉ាថេង**ដឹងនឹងលើកមកវាយយកស្រុកហ៊ូតោ កាលក្រោយដែលយើងលើកទ័ពប្រាំបីសែនបីម៉ឺនទៅវាយយកស្រុកកាំងតាំងគ្រានោះ បានឮគេនិយាយថា **ម៉ាថេង**ចៅហ្វាយស្រុកសែលៀង ប្រុងនឹងលើកទ័ពមកវាយយកស្រុកហ៊ូតោ បើដូច្នោះវេលានេះយើងត្រូវប្រុងប្រយ័ត្នចាត់ចែងឲ្យនៅរក្សាស្រុកជាមាំមួនទើបបាន។

**ស៊ុនហ៊ីវ**ថា ខ្ញុំបាទយល់ឃើញថា បើបារម្ភខ្លាចដូច្នោះត្រូវតែបញ្ឆោតឲ្យមានព្រះតម្រាស់ព្រះចៅ**ហៀនតេ**ទៅដល់**ម៉ាថេង** លោកជាអ្នកទទួលព្រះតម្រាស់ តាំង**ម៉ាថេង**ឲ្យឡើងទីជានាយទាហានធំ និងឲ្យប្រាបប្រាមអាណាខេត្តខាងទិសទក្សិណ គឺច្បាំងយកស្រុក**ស៊ុនគួន** តែត្រូវហៅយកខ្លួនមកគិតរាជការសិន កាលណា**ម៉ាថេង**មកដល់ហើយ យើងត្រូវចាប់សម្លាប់ចេញ រួចសឹមលើកទ័ពទៅវាយយកស្រុកកាំងតាំងជាខាងក្រោយ បើគិតដូច្នេះហើយ ទើបអស់កិច្ចធុរៈ។ **ចូឆូ**ឮដូច្នោះក៏យល់ឃើញត្រូវ ទើបឲ្យសរសេរសំបុត្រព្រះតម្រាស់ព្រះចៅ**ហៀនតេ** ដូចពាក្យ**ស៊ុនហ៊ីវ**ថា ហើយប្រើព្រះរាជបម្រើកាន់ទៅឲ្យ**ម៉ាថេង**។

**ម៉ាថេង**ទទួលព្រះតម្រាស់ហើយ ក៏ឲ្យហៅ**ម៉ាឈៀវ**, **ម៉ាហ៊ីវ**, **ម៉ាឆៀត**ជាកូន និង**ម៉ាតាយ**ជាក្មួយមកប្រឹក្សាថា ពីដើម**តាំងស៊ិន**ទទួលព្រះតម្រាស់ព្រះចៅ**ហៀនតេ**ទៅរិះគិតគ្នានឹង**ឡៅពី**ដើម្បីនឹងកម្ចាត់**ចូឆូ**ចេញ។ **តាំងស៊ិន**ធ្វើការនោះមិនកំបាំង **ចូឆូ**ក៏ចាប់ខ្លួន**តាំងស៊ិន**សម្លាប់ចេញ យើងនិង**ឡៅពី**ក៏ដោះខ្លួនរត់រួចទៅ យើងមកនៅស្រុកសែលៀងនេះក៏ជាទីកំបាំង ហើយបានឮដំណឹងថា **ឡៅពី**ទៅវាយយក

ស្រុកកេងជីវ យើងក៏គិតចង់ទៅរកដើម្បីនឹងជួយទំនុកបម្រុង**ឡៅពី** ឥឡូវ**ចូវឆ្វ**ឲ្យមានសំបុត្រព្រះតម្រាស់ព្រះចៅ**ហៀនតេ**ឲ្យមកហៅយើង ៗនឹងគិតប្រការម្តេច?

**ម៉ាឈៀវ**ឆ្លើយថា **ចូវឆ្វ**កាន់ព្រះតម្រាស់ព្រះចៅ**ហៀនតេ**ឲ្យហៅ ត្រូវតែទៅកុំខាន បើពុំបានចូលទៅ ដូចរឹងទទឹងគង់នឹងមានទោស តែបើទៅដល់ស្រុកក្រុងហើយ ត្រូវពិនិត្យមើលកលការឲ្យស្រួលសិន បើឃើញល្អមនឹងធ្វើការបាន ក៏ត្រូវធ្វើតាមព្រះតម្រាស់ព្រះចៅ**ហៀនតេ** គ្រាដែលព្រះអង្គទ្រង់ព្រះអក្សរដោយលោហិតនោះ **ម៉ាតាយ**ជាក្មួយឆ្លើយថា **ចូវឆ្វ**ជាមនុស្សចេះរិះគិតល្អិតជ្រៅណាស់ ខ្លាចក្រែងឲ្យហៅទៅដល់ហើយនឹងធ្វើអន្តរាយដល់យើងទេដឹង? **ម៉ាឈៀវ**ថា ខ្ញុំសុំលើកទាហានទៅជាទ័ពមុខ នឹងលុកយកស្រុកហ៊ូតោតែម្តង ដើម្បីនឹងជួយគ្រប់គ្រងផែនដីនៃព្រះចៅ**ហៀនតេ** ដូចគំនិតបិតាដែលគិតទុកនោះ។

**ម៉ាថេង**ថា ចៅកុំអាលគិតវីវរឡើយ យើងនឹងទុកចៅនូវ**ហាន់ស៊ុយ**ជាសម្លាញ់យើងឲ្យនៅរក្សាស្រុកសៃលៀងចុះ ខ្លួនយើងនិង**ម៉ាហ៊ីវ**, **ម៉ាឆៀត**, **ម៉ាតាយ** នឹងលើកទាហានទៅស្រុកហ៊ូតោ បើព្រះតម្រាស់ឲ្យហៅពិតក្តី មិនពិតក្តី វានឹងធ្វើអន្តរាយយើងប្រការម្តេចក៏តាមការ តែយើងមានសេចក្តីបារម្ភក្រែងបានៅរក្សាស្រុកឯអាយ ទើប**ម៉ាថេង**បែងទាហានទាំងឡាយឲ្យទៅរក្សាស្រុកខ្លះ យកទាហានប្រាំពាន់លើកចេញទៅ ឲ្យ**ម៉ាហ៊ីវ**, **ម៉ាឆៀត** ជានាយទ័ពមុខ **ម៉ាតាយ**ជានាយទ័ពក្រោយ លើកទៅដល់ជិតស្រុកហ៊ូតោ ប្រហែលពីររយសិន (៨ គ.ម) ក៏បោះទ័ពឈប់នៅទីនោះ។

លុះ**ចូវឆ្វ** ដឹងដំណឹង ក៏បង្គាប់**អ៊ុយកុយ**ឲ្យចេញទៅជួបនឹង**ម៉ាថេង** ព្រោះ**ម៉ាថេង**លើកទាហានមកច្រើន បើនឹងចូលទៅក៏ឲ្យចូលតែខ្លួន**ម៉ាថេង**និងទាហានមានយសធំៗ ដើម្បីនឹងចូលទៅក្រាបបង្គំគាល់ព្រះចៅ**ហៀនតេ** ឯបណ្តាកូនទាហានដែលបានមកពីចម្ងាយនឿយហត់ បើខ្វះខាតដោយស្បៀងអាហារក៏ត្រូវឲ្យនៅត្រៀមការខាងក្រៅចុះ លុះថ្ងៃស្អែកនឹងយកស្បៀងអាហារទៅឲ្យ **អ៊ុយកុយ**ទទួលពាក្យ**ចូវឆ្វ**ហើយ ក៏ចេញទៅជួបនឹង**ម៉ាថេង**គំនាប់គ្នាហើយ ក៏នាំគ្នាផឹកស្រានិង

បរិភោគអាហារ ឯ**អ៊ុយកុយ**កាលផឹកស្រាស្រវឹងក៏និយាយថា បិតាខ្ញុំឈ្មោះ**អ៊ុយអួន** ទទួលអនិច្ចកម្មកាលគ្រា**លីឈុយ**, **គុយគី**លើកទ័ពមកធ្វើអន្តរាយដល់ទីព្រះរាជវាំង ព្រះចៅ**ហៀនតេ** គ្រានោះចិត្តខ្ញុំក៏ពុំមានខឹងគុំគួនអ្វីសោះ គ្រានេះក៏មកជួបប្រទះនឹងអាសត្រូវចំពោះរាជសម្បត្តិទៀត។

**ម៉ាថេង**សួរថា នរណាជាសត្រូវចំពោះរាជសម្បត្តិនោះ? **អ៊ុយកុយ**ឆ្លើយថា គឺ**ចូឆូ**នោះឯងជាសត្រូវចំពោះរាជសម្បត្តិ អ្នកមិនដឹងទេឬ? បានជាធ្វើមកសួរខ្ញុំ។ **ម៉ាថេង**គិតមន្ទិលក្នុងចិត្តថា **អ៊ុយកុយ**ជាពួក**ចូឆូ** ខ្លាចក្រែងប្រើមកបញ្ឆោតយកការណ៍ ក៏ធ្វើជាតក់ស្លុតរន្ធត់ញាប់ញ័រអស់ទាំងខ្លួន ហើយថា អ្នកកុំចរចាដូច្នេះ ចិត្ត**ចូឆូ**នេះមិនមែនដូច្នោះទេ បើដឹងដល់**ចូឆូ**ហើយ យើងក៏ត្រូវនាំគ្នាស្លាប់អសារឥតការ។ **អ៊ុយកុយ**ក៏ស្រែកគំហកឲ្យ**ម៉ាថេង**ថា អ្នកភ្លេចហើយឬ? កាលព្រះចៅហៀនតេទ្រង់ព្រះអក្សរចេញមកដោយព្រះលោហិត គ្រានោះ យើងជាខ្ញុំព្រះអង្គប្រាកដ មិនមែនជាខ្ញុំអាក្បត់**ចូឆូ**នោះទេ អ្នកកុំមន្ទិលសង្ស័យអ្វីនឹងខ្ញុំឡើយ ការទាំងនេះហើយ ខ្ញុំក៏ត្រូវជួយគិតអ្នក។ **ម៉ាថេង**ស្តាប់មាត់**អ៊ុយកុយ**ចរចាចំពោះនឹងមាត់ដូចគ្នា ក៏យល់ថា មិនមែនល្បួងបញ្ឆោត ក៏ប្រាប់កិច្ចការអាថ៌កំបាំងតាំងពីដើមនោះឲ្យ**អ៊ុយកុយ**ស្តាប់គ្រប់ប្រការ។

**អ៊ុយកុយ**ឮដូច្នោះក៏ប្រាប់ថា ឯ**ចូឆូ**ដែលឲ្យហៅអ្នកចូលទៅគាល់នោះ មិនមែនពិតត្រង់ទេ បើអ្នកចូលទៅវេលាណា គេនឹងចាប់សម្លាប់វេលានោះ អ្នកចូររិះគិតប្រយ័ត្នខ្លួនឲ្យមាំមួន។ **ម៉ាថេង**ថា គំនិត**ចូឆូ**នោះគឺគិតដូចម្តេចខ្លះ? អ្នកនៅក្នុងស្រុកនេះជាមួយគង់នឹងដឹងមិនខាន សូមឲ្យអ្នកជួយគិតចុះខ្ញុំនឹងធ្វើតាម។ **អ៊ុយកុយ**ថា ដែល**ចូឆូ**ឲ្យហៅអ្នកចូលទៅគាល់ព្រះចៅ**ហៀនតេ**នោះ អ្នកត្រូវឆ្លើយទៅវិញថា ទើបមកពីស្រុកឆ្ងាយកំពុងនឿយហត់ណាស់ សូមឲ្យបង្អង់ឈប់សិន ព្រឹកនេះ **ចូឆូ**នឹងឲ្យយកស្បៀងមកឲ្យទាហានអ្នក មុខជា**ចូឆូ**នឹងចេញមកមើលកលការខ្លួនឯង **ចូឆូ**ចេញមកហើយ ឲ្យអ្នករិះគិតចាប់ខ្លួនវាសម្លាប់ឲ្យបាន។

**ម៉ាថេង**ឮដូច្នោះ ក៏ពេញចិត្តណាស់ថា ការខាងក្នុងស្រុកឲ្យអ្នកជួយគិតកែខៃចុះ ឯការខាងក្រៅនោះខ្ញុំនឹងរិះគិតខ្លួនឯង។ និយាយគ្នាហើយ**អ៊ុយកុយ**ក៏លា**ម៉ាថេង**ទៅប្រាប់**ចូឆូ**ថា **ម៉ាថេង**ទើបនឹងមកពីស្រុកឆ្ងាយ កំពុងនឿយហត់ណាស់ ដែលនឹងឲ្យចូលមកគាល់នោះសុំឲ្យលោកបង្អង់សិន ប្រាប់ហើយ**អ៊ុយកុយ**ក៏លា**ចូឆូ**ទៅផ្ទះ ខំត្រិះរិះដែលនឹងគិតធ្វើអន្តរាយ**ចូឆូ** ក៏ខ្លាចមិនសម្រេចដូចប្រាថ្នា តាំងតែងគិតសាចុះសាឡើងយូរណាស់ ទុក្ខក៏ស្ទះនៅក្នុងដើមទ្រូង ដូចអន្លង់សំពងក្នុងឱរា។

ឯភរិយាធំឃើញ**អ៊ុយកុយ**រសាប់រសល់មិនសប្បាយ ក៏ចូលទៅលួងលោមសួរដល់ពីរបីដង **អ៊ុយកុយ**ក៏មិនប្រាប់ថាប្រការម្ដេច។ ឯនាង**លីស៊ុនអៀង**ជាភរិយាបន្ទាប់ជាប់មានប្រុសសាហាយឈ្មោះ**បៀវតេក**ជាប្អូនប្រពន្ធធំ។ **បៀវតេក**នោះចង់បាននាង**លីស៊ុនអៀង**ជាប្រពន្ធ ក៏ខំអត់ធន់នឹងរកកំហុស**អ៊ុយកុយ**យូរណាស់មកហើយ មិនសមនឹងសេចក្ដីប្រាថ្នា។

កាល**អ៊ុយកុយ**មិនសប្បាយចិត្តនោះ នាង**លីស៊ុនអៀង**ក្រឡេកឃើញមុខប្ដីដូចជាទោមនស្សខឹងក្ដៅ ក៏នាំយកហេតុនោះទៅប្រាប់**បៀវតេក**ជាសាហាយថា **អ៊ុយកុយ**ប្ដីខ្ញុំទៅធ្វើរាជការនឹង**ចូឆូ**ត្រឡប់មកផ្ទះថ្ងៃនេះ ឃើញកិរិយាដូចជាខឹងហើយចេះតែរសាប់រសល់មិនសប្បាយ មិនដឹងជាហេតុដូចម្ដេច។ **បៀវតេក**ថា បងបានឮថា **អ៊ុយកុយ**ចេញទៅជួបនឹង**ម៉ាថេង** ហើយត្រឡប់មកវិញមិនសប្បាយតែម្ដង មុខជាមានអ្វីប្លែកបានជាដូច្នេះ ប្អូនឯងចូលទៅល្បួងលួងលោមសួរឲ្យដឹងការចុះ។ នោះនាង**លីស៊ុនអៀង**ក៏ចូលទៅ។

លុះដល់ពេលយប់ **អ៊ុយកុយ**ក៏ចូលទៅប្រាស្រ័យដំណេកជាមួយនាង**លីស៊ុនអៀង** ៗក៏ធ្វើប្រតិបត្តិតាមប្រក្រតី ដោយធ្វើឧបាយនិយាយលួងលោមសួរ**អ៊ុយកុយ**ថា **ឡៅ**ពីជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ** តាំងចិត្តធ្វើរាជការទំនុកបម្រុងផែនដីដោយសុចរិត ខាង**ចូឆូ**ជាមនុស្សទុច្ចរិតអាក្រក់ នឹងធ្វើការអ្វីក៏គ្មានត្រង់នឹងផែនដីសោះ ឯខ្លួនលោកក៏ជាមនុស្សមានតម្រិះប្រាជ្ញា ហេតុអ្វីក៏មកនៅជាមួយ**ចូឆូ**ដែលជាសត្រូវនឹងរាជសម្បត្តិនោះវិញ?

**អ៊ុយកុយ**ផឹកស្រាស្រវឹងខ្លាំង មិនតាំងចិត្តនឹងពិគ្រោះឲ្យឃើញខុសត្រូវធ្ងន់ស្រាលបណ្ដាលឲ្យវង្វេងដោយមាតុគ្រាម លុះតាមកលមាយាស្រីក៏ស្រដីប្រាប់ថា ខ្លួនថៅជាស្រីស្រាលសេចក្ដីណាស់ បងជាប្រុសទើបដឹងច្បាស់ថា **ចូឆ្វូ**ជាសត្រូវរាជសម្បត្តិ បងក៏គិតនឹងធ្វើប្រទូសរ៉ាយ**ចូឆ្វូ**ជាយូរមកហើយ តែខ្លាចមិនសម្រេចសេចក្ដីប្រាថ្នា នាង**លីស៊ុនអៀង**ក៏ធ្វើជាអង្វរសួរថា គំនិតលោកនឹងគិតការនោះដូចម្ដេចទើបអាចសម្លាប់ចូឆ្វូបាន? អាណិតប្រាប់ខ្ញុំឲ្យដឹងផងចុះ ខ្ញុំជាស្រី ទោះបីមិនស្គាល់ខុសត្រូវ ក៏គង់ជួយពន្យល់ប្រុសបានខ្លះទៅដែរ។ **អ៊ុយកុយ**ឃើញថា នាង**លីស៊ុនអៀង**ចេះតែសួរក៏ពន្យល់ថា ការណ៍នេះខ្លួនបងនិង**ម៉ាថេង**បានគិតគ្នាជាស្រេចហើយ ។ក៏ពណ៌នារឿងរ៉ាវដែលគិតនឹង**ម៉ាថេង**នោះ ឲ្យនាង**លីស៊ុនអៀង**នោះស្ដាប់គ្រប់ប្រការ។ លុះ**អ៊ុយកុយ**ងងុយដោយស្រវឹងស្រាដេកលក់ នាង**លីស៊ុនអៀង**ក៏លបបើកទ្វារចេញទៅប្រាប់**បៀវតេក** តាមរឿងដែល**អ៊ុយកុយ**និយាយនោះឲ្យ**បៀវតេក**ស្ដាប់។ **បៀវតេក**ក៏ប្រញាប់ទៅប្រាប់ឲ្យ**ចូឆ្វូ**ដឹងទាំងពាក់កណ្ដាលអាធ្រាត្រ។ **ចូឆ្វូ**ក៏ឲ្យឃុំខ្លួន**បៀវតេក**ទុកក្នុងបន្ទប់មួយ ហើយឲ្យបម្រើលើកគ្នាទៅចាប់ខ្លួន**អ៊ុយកុយ**និងភរិយាបុត្រទៅដាក់គុកទាំងអស់។

គ្រានោះ **ចូឆ្វូ**ក៏ឲ្យហៅ**ថោហង**, **ខៅធូ**, **ស៊ីឡុង**, **ហែហ៊ួអៀន**មកខ្សឹបប្រាប់ព័ត៌មានដែល**បៀវតេក**ប្ដឹងឲ្យការណ៍ពី**អ៊ុយកុយ**នោះឲ្យស្ដាប់គ្រប់ប្រការ ហើយបង្គាប់ថា ព្រឹកនេះឲ្យអ្នករាល់គ្នាតែងខ្លួនឲ្យដូចយើង យកទង់ក្រហមរបស់យើងហែមុខទៅ ហើយឲ្យ**ខៅធូ**ជាប៉ែកស្ដាំ, ឲ្យ**ហែហ៊ួអៀន**ជាប៉ែកឆ្វេង **ថោហង**ជាកងហ្លួង **ស៊ីឡុង**ជាកងជូន លើកចេញទៅតាំងផ្ទៃស្នាមទ័ពក្រៅក្រុង ឲ្យធ្វើអាការបីដូចជានឹងលើកចេញទៅ។ **ម៉ាថេង**មិនទាន់ដឹងខ្លួនក៏សម្គាល់ថា យើងលើកចេញទៅ ក៏នឹងលើកទ័ពចូលមកតាមសញ្ញាគ្នានឹង**អ៊ុយកុយ** អ្នកត្រូវអុជផាវជាសញ្ញាឡើងហើយឲ្យទាហានបាញ់ធ្នូព័ទ្ធ**ម៉ាថេង** ហើយចាប់ខ្លួនឲ្យបាន។ **ថោងហ**និងទាហានទាំងពួងក៏លើកចេញទៅតាំងតាមបង្គាប់គ្រប់ទីកន្លែង។

**ម៉ាថេង** លុះព្រឹកឡើងក៏ចាត់ចែងទាហានលើកចេញចាកបន្ទាយចូលទៅជិតស្រុកហ៊ូតោ ឃើញទាហានចេញមកមានទង់ក្រហមដោតត្រៀបត្រា ក៏មានអំណរក្នុងចិត្តណាស់ សម្គាល់ថា ច្បាស់ជា**ចូឆ្វ**លើកទ័ពមកដូចពាក្យ**អ៊ុយកុយ**និយាយ **ម៉ាថេង**ក៏បរសេះលើកទាហានតម្រង់ចូលទៅ លុះទៅដល់ជិតក៏ឮស្នូរសំឡេងផាវ ហើយឃើញទាហានពួកទង់ក្រហមលើកធ្នូឡើងបាញ់ ព្រួញធ្នូក៏ធ្លាក់ចម្រុះមកត្រង់ ឃើញ**ចោហង**បំផាយសេះត្រង់ចូលមក។ **ម៉ាថេង**ភ័យណាស់បរសេះត្រឡប់រត់ទទួល**ខៅធូ, ស៊ីឡុង, ហែហ៊ូអៀន**លើកទាហានមកចោមរោមព័ទ្ធជុំវិញខ្លួន **ម៉ាថេង**និង**ម៉ាហ៊ីវ, ម៉ាអៀត**ក៏ពារទម្លាយចេញទៅបាន ទទួលព្រួញធ្នូបាញ់ទៅត្រូវទាំងបីនាយសេះ របេះធ្លាក់ពីលើសេះ ឯ**ម៉ាអៀត**នោះក៏អស់អាយុស្លាប់មួយរំពេច ទាហានក៏ស្ទុះស្រូចូលទៅ ចោមព័ទ្ធចាប់ខ្លួន**ម៉ាថេង**និង**ម៉ាហ៊ីវ**ចងបាន ហើយនាំខ្លួនចូលទៅជូន**ចូឆ្វ** ។ក៏ឲ្យយកខ្លួន**អ៊ុយកុយ**ចេញមកសួរពិចារណាឲ្យឆ្លើយតទល់សម្តីគ្នានឹង**ម៉ាថេង**នោះ **អ៊ុយកុយ**ក៏ឆ្លើយបដិសេធមិនទទួលហើយថា ខ្លួនខ្ញុំបាទនឹងបានគប់គិតគ្នានឹង**ម៉ាថេង**ប៉ងប្រាថ្នាប្រទូសរ៉ាយមហាឧបរាជក៏ទេ ហើយនិយាយតនឹង**ម៉ាថេង**ថា អ្នកកុំបារម្ភអ្វីឡើយ ព្រោះខ្លួនយើងមិនមានសេចក្តីខុសអ្វីសោះ ខណៈនោះ **ចូឆ្វ**ឲ្យនាំយកខ្លួន**បៀវតេក**ចេញមកសួរពិចារណាចំពោះមុខ**អ៊ុយកុយ**។ **បៀវតេក**ក៏និយាយនឹងពាក្យដដែល។ **ចូឆ្វ**ក៏សួរ**អ៊ុយកុយ**និង**ម៉ាថេង**តទៅ **អ៊ុយកុយ**និង**ម៉ាថេង**ក៏ទាល់សម្តីនឹង**បៀវតេក**ទាំងអស់។

**ម៉ាថេង**ខឹងណាស់ស្រែកជេរ**អ៊ុយកុយ**ថា អាមនុស្សកម្លៅធ្វើឲ្យខូចការអញអស់ទៅទោះបីខ្លួនអញនឹងស្លាប់ អញក៏មិនស្តាយជីវិត តែមកគិតតូចចិត្តថា នឹងរំលាងអាសត្រូវរាជសម្បត្តិចេញ ដើម្បីនឹងជួយទំនុកបម្រុងផែនដីឲ្យបានសុខ ក៏មិនសមប្រកបតាមគំនិតគិត។ **ចូឆ្វ**ក៏ឲ្យយកខ្លួន**ម៉ាថេង, ម៉ាហ៊ីវ** និង**អ៊ុយកុយ**ទៅប្រហារជីវិតក្នុងខណៈនោះ **ម៉ាថេង**ក៏ស្រែកជេរ**ចូឆ្វ**មិនដាច់ពីមាត់ ទាល់តែពេជ្ឈឃាតចុះដាវប្រហារជីវិតក្ស័យ។ **ចូឆ្វ**ក៏និយាយនឹង**បៀវតេក**ថា ខ្លួនអ្នកមានសេចក្តីគាប់ប្រសើរដល់យើងជាច្រើនណាស់ អ្នកចូរប្រាថ្នាចុះ បើចង់បាន

ប្រយោជន៍អ្វី យើងនឹងឲ្យបានតាមចិត្ត។ **បៀវតេក**ឆ្លើយថា ខ្ញុំបាទនឹងបានស្រឡាញ់យសបណ្ដាស័ក្តិក៏ទេ គឺវេលានេះ ខ្ញុំបាទសុំឲ្យតែបានខ្លួននាង**លីស៊ុនអៀង** ដែលជាប្រពន្ធចុង**អ៊ុយកុយ**យកមកធ្វើជាភរិយាខ្ញុំបាទ។

**ចូឆូ**ថា នាង**លីស៊ុនអៀង**នោះជាមនុស្សអាក្រក់ មិនដឹងមិនស្គាល់គុណាស្រ័យនៃស្វាមី ដែលជាបងថ្លៃអ្នកឯង ៗក៏នឹងស្លាប់ក៏ពីព្រោះមាត់វា ដែលអ្នកនឹងយកវាមកចិញ្ចឹមធ្វើជាភរិយានោះមិនគួរទេ។ **បៀវតេក**បានស្ដាប់ដូច្នោះហើយ ក៏នឹកបារម្ភខ្លាចក្រែង**ចូឆូ**នឹងសម្លាប់នាង**លីស៊ុនអៀង**អសារបង់ ទើបថ្លែងពណ៌នាសេចក្ដីដែលខ្លួន និងនាងនោះបានលបលាក់លួចសហាយនឹងគ្នាពីថ្ងៃមុនមក ហើយរិះគិតប្រើគំនិតប្រាថ្នានឹងប្រហារជីវិត**អ៊ុយកុយ**ជាបងថ្លៃចេញ ព្រោះចិត្តស្ម័គ្រស្រឡាញ់ស្រីម្នាក់នេះ ឲ្យ**ចូឆូ**ស្ដាប់គ្រប់ប្រការ។

**ចូឆូ**បានឮដូច្នោះ ក៏ខឹងក្រេវក្រោធស្រែកថា ខ្លួនឯងជាប្អូនភរិយាគេហ៊ានលបលួចសហាយស្មន់នឹងប្រពន្ធចុងរបស់បងថ្លៃ ហើយឲ្យដៃគិតរំលាងបំផ្លាញជីវិតប្ដីគេទៀត ឯងនេះពេញជាមនុស្សចោលម្សៀតចិត្តអាក្រក់ពន់ប្រមាណ គ្មានសេចក្ដីសត្យកតញ្ញូសោះ វេលានេះបើយើងមិនយកទោសឯង មនុស្សទាំងប្លួងយកតម្រាប់តាម ខូចច្បាប់ទម្លាប់ស្រុកទេសអស់។ **ចូឆូ**ថាតែប៉ុណ្ណោះក៏ប្រើទាហានឲ្យចាប់**បៀវតេក**និងស្ម័គ្របក្សពួកបងប្អូន**បៀវតេក**ទៅសម្លាប់ព្រមគ្នា ជាមួយនឹងបុត្រភរិយាបក្សពួក**អ៊ុយកុយ** ហើយ**ចូឆូ**ឲ្យប្រកាសបញ្ចុះបញ្ចូលពួកទាហាន**ម៉ាថេង**ថា **ម៉ាថេង**និង**ម៉ាហ៊ឺវ**ប្រព្រឹត្តអំពើខុស គឺមានគំនិតប្រទូសរ៉ាយនឹងមហាឧបរាជ ៗឲ្យសម្លាប់ចេញហើយ អ្នករាល់គ្នាជាសេនាទាហានមិនបានដឹងឃើញរួមគំនិតជាមួយ មិនត្រូវមានទោសអ្វីទេ បើនឹងស្ម័គ្រចូលចិត្តទៅធ្វើរាជការជាមួយនឹងមហាឧបរាជក៏ឲ្យចូលទៅចុះ មហាឧបរាជនឹងជប់លៀងតាមសមគួរ ហើយមានសំបុត្រទៅកាន់ទីទាំងពួងថា **ម៉ាថេង**ប្រែចិត្តក្បត់ផែនដី រាជការឲ្យចាប់ខ្លួនសម្លាប់ទាំងឪពុកនិងកូនអស់ហើយ នៅសល់តែ**ម៉ាតាយ**ជាក្មួយ ឲ្យជនទាំងពួងស៊ើបចាប់ខ្លួន**ម៉ាតាយ**បញ្ជូនទៅស្រុកក្រុងឲ្យបាន នឹងឲ្យបំណាច់រង្វាន់។

ខណៈនោះ **ម៉ាតាយ**បាននាំទាហានមួយពាន់លើកជាទ័ពមកជួយ**ម៉ាថេង** លុះលើកទៅដល់ស្រុកហ៊្វិតោ ប្រទះនឹងពួកទាហាន**ម៉ាថេង**ដែលរត់បែកខ្ញែកទៅជួបកណ្ដាលផ្លូវ។ ទាហានទាំងនោះក៏ពណ៌នារឿងរ៉ាវឲ្យស្ដាប់។ **ម៉ាតាយ**ឮដូច្នោះ ក៏ភ័យតក់ស្លុតក្នុងចិត្តទើបគិតក្លែងខ្លួនជាកូនឈ្មួលអ្នកលក់ទំនិញរត់គេចចេញត្រឡប់ទៅស្រុក។

# រឿង សាមកុក

អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

កណ្ឌទី ៤៩

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ចូឆូ**សម្លាប់**ម៉ាថេង** ហើយគិតលើកទ័ពទៅវាយស្រុកកាំងតាំង រហូតដល់**ចូឆូ**ច្បាំងនឹង**ម៉ាឈៀវ**មានជ័យជម្នះ ចាប់បានទាហាន**ម៉ាឈៀវ**មកជាឈ្លើយ ។)*

**ឯចូឆូ**លុះសម្លាប់**ម៉ាថេង**បានហើយ ក៏រិះគិតនឹងលើកកងទ័ពទៅច្បាំងនឹង**ស៊ុនគួន**ហើយនិង**ឡៅពី** ទទួលបម្រើទាហានដែលទៅស៊ើបស្ដាប់ការណ៍រាជការនោះត្រឡប់មកប្រាប់**ចូឆូ**ថា **ឡៅពី**រៀបចាប់ចែងទ័ពលើកទៅច្បាំងយកស្រុកសែឈួន។

**ចូឆូ**ឮដូច្នោះក៏នឹកភ័យបារម្ភណាស់ ទើបនិយាយថា បើប្រសិន**ឡៅពី**ទៅវាយបានស្រុកសែឈួនមែនហើយ ក៏គង់នឹងប្រមូលពលទាហាន និងស្បៀងអាហារបានជាច្រើន បើយើងលើកទ័ពទៅតនឹង**ឡៅពី**វេលាណា ឃើញថាជាការលំបាក។ **តាន់គុយ**ទីប្រឹក្សាឆ្លើយតបនឹង**ចូឆូ**ថា សេចក្ដីនេះ សូមកុំឲ្យមហាឧបរាជព្រួយឡើយ ខ្ញុំបាទនឹងរិះគិតជាកលឧបាយមួយយ៉ាង ឲ្យ**ស៊ុនគួន**និង**ឡៅពី**ត្រឡប់ខុសចិត្តគ្នាទៅវិញ មិនឲ្យរួមគំនិតជាមួយគ្នាបាន ដើម្បីនឹងឲ្យស្រុកទាំងពីរនេះ ជាសិទ្ធិនៅក្នុងកណ្ដាប់ដៃលោកតទៅ។

**ចូឆូ**បានឮដូច្នោះ ក៏មានអំណរណាស់ ត្រឡប់សួរថា តម្រិះអ្នកនឹងគិតកលឧបាយនោះប្រការម្ដេច? **តាន់គុយ**ឆ្លើយថា សព្វថ្ងៃនេះ**ឡៅពី**និង**ស៊ុនគួន**ជាបងប្អូនថ្លៃនឹងគ្នាចិត្តនិងគំនិតគិតរួមជាមួយគ្នា លោកនឹងរំលាងចេញដោយកម្រណាស់ គ្រានេះ**ឡៅពី**គិតនឹងលើកទ័ពទៅវាយស្រុកសែឈួនហើយ សូមឲ្យលោកកេណ្ឌកងទ័ពទៅភ្ជាប់គ្នានឹង**ទៀវលៀវ**នៅស្រុកហាប់ប៉ា លើកទៅវាយស្រុកកាំងតាំង ខាង**ស៊ុនគួន**គង់នឹងឲ្យសុំកងទ័ព**ឡៅពី**មកជួយ ឯ**ឡៅពី**កំពុងរៀបចំដំណើរទ័ពទៅវាយ

យកស្រុកសែឈ្លួន នោះនឹងមិនព្រមឲ្យកងទ័ពទៅជួយទេ យើងគង់បានស្រុកកាំងតាំងដោយងាយ បើស្រុកកាំងតាំងបានមកយើងហើយ យើងត្រូវលើកកងទ័ពត្រឡប់ទៅវាយយកស្រុកកេងជីវ និងស្រុកសែឈ្លួនទៀត ផែនដីយើងក៏នឹងបានរាបទាបជាសុខតទៅ។

**ចូឆ្វ**យល់ឃើញត្រូវ ទើបនិយាយថា កលឧបាយយ៉ាងនេះល្អណាស់ ត្រូវនឹងគំនិតដែលយើងគិតទុកគ្រប់ប្រការ។ ខណៈនោះ **ចូឆ្វ**ក៏ឲ្យកេណ្ឌកងទ័ពបានមួយសែននាក់ ហើយឲ្យលើកទៅស្រុកហាប់ប៉ា រួចបង្គាប់ថា ឲ្យ**ទៀវលៀវ**ដែលនៅរក្សាស្រុកនោះចាត់ចែងស្បៀងអាហារលើកមកបញ្ចូលជាមួយគ្នា ទៅវាយយកស្រុកកាំងតាំង យើងនឹងលើកទាហានបញ្ជូនទៅជួយទៀត នាយទ័ពនាយកងក៏លា**ចូឆ្វ**លើកទ័ពទៅដល់ស្រុកហាប់ប៉ា ក៏ចូលទៅប្រាប់**ទៀវលៀវ**តាមបណ្តាំដែល**ចូឆ្វ**បង្គាប់មកនោះគ្រប់ប្រការ។ **ទៀវលៀវ**ក៏ចាត់ចែងកេណ្ឌទាហាននិងស្បៀងអាហារត្រៀមទុកជាស្រេច ដើម្បីនឹងលើកទៅវាយស្រុកកាំងតាំង។

ខណៈនោះ បម្រើសេះក៏នាំយកសេចក្តីទៅប្រាប់**ស៊ុនគួន** ៗក៏ឲ្យហៅប្រជុំទីប្រឹក្សាមកពិគ្រោះការរាជការថា ឥឡូវ**ចូឆ្វ**ប្រើ**ទៀវលៀវ**ឲ្យធ្វើជាមេកងទ័ព នឹងលើកទៅវាយយកស្រុកយើង អ្នករាល់គ្នានឹងរិះគិតការពារប្រការម្តេច? **ទៀវជៀវ**ឆ្លើយថា សូមឲ្យលោកប្រើ**ឡោសុក**ធ្វើសំបុត្រទៅឯកេងជីវ សុំកងទ័ព**ឡៅពី**មកជួយ **ឡៅពី**ជាប្អូនថ្លៃលោកស្រាប់ហើយ **ឡោសុក**ក៏មានគុណនឹង**ឡៅពី**ដែរ មុខជា**ឡៅពី**មិនបង្អង់ខាន គង់នឹងលើកទ័ពមកជួយធ្វើការសឹក។ **ស៊ុនគួន**ឮដូច្នោះក៏យល់ឃើញត្រូវ ទើបប្រើបម្រើឲ្យទៅប្រាប់**ឡោសុក**ឯស្រុកឆសងគុន ឲ្យ**ឡោសុក**ធ្វើសំបុត្រទៅដល់**ឡៅពី**តាមដំណើរ លុះ**ឡៅពី**បានទទួលសំបុត្រដឹងសេចក្តី ក៏ឲ្យទៅអញ្ជើញ**ខុងបេង**ពីស្រុកឡាំគុនមក ហើយយកសំបុត្រ**ឡោសុក**បង្ហាញឲ្យ**ខុងបេង**មើល។

ខណៈនោះ **ខុងបេង**ក៏និយាយនឹង**ឡៅពី**ថា លោកកុំព្រួយចិត្តឡើយ ខ្ញុំនឹងគិលកលឧបាយម្យ៉ាង កុំឲ្យទាហានស្រុកយើងលើកទៅជួយ**ស៊ុនគួន** ឯទាហាន**ស៊ុនគួន**ក៏កុំឲ្យលើកទៅច្បាំងនឹង**ចូឆូ** ស្រុកកាំងតាំងក៏ឲ្យនៅបានជាសុខ មិនឲ្យ**ចូឆូ**មើលងាយយើងបាន ហើយ**ខុងបេង**ក៏បង្គាប់អ្នកកាន់សំបុត្រនោះថា អ្នកឯងចូរវិលត្រឡប់ទៅប្រាប់**ស៊ុនគួន**ចៅហ្វាយអ្នកឯងចុះថា កុំឲ្យព្រួយចិត្តឡើយ ឲ្យ**ស៊ុនគួន**និងអ្នកស្រុកកាំងតាំងដេកធ្មេចភ្នែកឲ្យលក់ជាសុខសម្រាន្តទៅចុះ បើប្រសិនជាកងទ័ព**ចូឆូ**លើកមកដល់វេលាណា ភ្នាក់ងារខ្លួនយើងនឹងចេញជាធុរៈឯង។ បម្រើស្ដាប់ឮដូច្នោះ ក៏លា**ឡៅពី**, **ខុងបេង**ត្រឡប់ទៅជួប**ស៊ុនគួន**ឯស្រុកកាំងតាំងវិញ។

ក្រោយនោះ **ឡៅពី**ក៏និយាយប្រាប់**ខុងបេង**ថា ឥឡូវឮថា**ចូឆូ**កេណ្ឌកងទ័ពមកបញ្ចូលគ្នាជាពីរមណ្ឌលចំនួនពលដល់ហាសិបម៉ឺន នឹងលើកមកវាយស្រុកកាំងតាំងដែលលោកប្រុងនឹងជួយ**ស៊ុនគួន**នោះ កលឧបាយរបស់លោកនឹងធ្វើដូចម្ដេច? **ខុងបេង**ឆ្លើយថា កាលពីដើមស្រុកដែលនៅក្រោមបង្គាប់**ចូឆូ**នោះ វានឹកញញើតថ្មីដែទាហានស្រុកសែលៀង ឥឡូវ**ចូឆូ**សម្លាប់**ម៉ាថេង**ទៅហើយ នៅតែ**មាឈៀវ**ជាកូនភ្ញុំទាហាននៅរក្សាស្រុកសែលៀង គង់ខឹងចិត្តគិតសងសឹក**ចូឆូ**វិញជាដរាប សុំឲ្យលោកមានសំបុត្រទៅដល់**ម៉ាឈៀវ**ឲ្យស្រូតរូតលើកទាហានទៅវាយស្រុកហ៊ូតោចុះ មុខជា**ចូឆូ**នឹងលើកទ័ពត្រឡប់ទៅវិញ។ **ឡៅពី**ស្ដាប់យល់ត្រូវចិត្ត ក៏គិតធ្វើសំបុត្រតាមសម្ដី**ខុងបេង**និយាយ ហើយឲ្យបម្រើដែលទុកចិត្ត កាន់សំបុត្រនោះស្រូតរូតទៅឲ្យ**ម៉ាឈៀវ**ឯស្រុកសែលៀង។

ឯ**ម៉ាឈៀវ**នោះ លុះដល់ពេលយប់ក្នុងថ្ងៃនោះ ក៏ដេកលក់ស្និទ្ធដល់ពេលអាធ្រាត្រសុបិន្តនិមិត្តឃើញថា “មានខ្លាមួយហ្វូងចូលមកព័ទ្ធខាំខ្លួន” លុះភ្ញាក់ឡើងក៏ភ័យខ្លាចណាស់ ទើបហៅទីប្រឹក្សាទាំងពួងមកជួយទំនាយសុបិន។ **បាំងតេក**ឆ្លើយ

ជម្រាបថា លក្ខណៈដែលយល់សប្តិនេះកាចណាស់ បិតាលោកដែលលើកទ័ពចូលទៅស្រុកហ៊្វូតោនោះ មុខជាមានសេចក្តីភ័យអន្តរាយប្រាកដណាស់ លុះនិយាយមិនទាន់ផុតមាត់ ទទួលឃើញ**ម៉ាតាយ**មកដល់ ថ្លែងព័ត៌មានឲ្យស្តាប់គ្រប់ប្រការហើយថា សូម្បីតែខ្លួនខ្ញុំនេះ **ចូឆ្វ**ក៏ប្រុងនឹងសម្លាប់ចោលដែរ តែដោយសារខ្ញុំក្លែងខ្លួនបន្លំធ្វើជាកូនឈ្មួញអ្នកជំនួញ វេះរត់មកទាំងយប់ថ្ងៃបានជារួចខ្លួន។

**ម៉ាឈៀវ**ឮដូច្នោះក៏ទួញយំដួលសន្លប់មួយរំពេច។ ទាហានទាំងពួងឃើញដូច្នោះក៏នាំគ្នាគ្រាប់លើក**ម៉ាឈៀវ**ឡើង។ លុះដឹងខ្លួនហើយ **ម៉ាឈៀវ**នឹកខឹងក្តៅលើសកម្លាំងតាំងតែខាំមាត់ហើយថា អញនឹងសងសឹកអា**ចូឆ្វ**ឲ្យបានវិញ។ ខណៈនោះ ទទួលបម្រើ**ឡៅពី**កាន់សំបុត្រចូលមកដល់ ហុចទៅឲ្យ**ម៉ាឈៀវ** ៗទទួលយកហើយមើលឃើញសេចក្តីថា សំបុត្រ**ឡៅពី**ឲ្យពរមកដល់**ម៉ាឈៀវ** ព្រោះ**ចូឆ្វ**ទីមហាឧបរាជនៅស្រុកហ៊្វូតោគិតធ្វើការអាក្រក់ផ្សេងៗ ទាល់តែព្រះចៅ**ហៀនតេ**បានសេចក្តីក្តៅក្រហាយខ្លាំង អំពើទាំងនេះអ្នកក៏គង់ភ្លឺយល់ច្បាស់ណាស់ហើយ មួយទៀត គឺកាលព្រះចៅ**ហៀនតេ**ទ្រង់ព្រះអក្សរដោយព្រះលោហិតឲ្យ**តាំងស៊ិន**នោះ បិតាអ្នកនិងយើងក៏បានចុះឈ្មោះព្រមគំនិតគ្នាថា នឹងធ្វើការកម្ចាត់**ចូឆ្វ**ចេញឲ្យបាន ឥឡូវយើងដឹងច្បាស់ថា បិតាអ្នកធ្វើការឲ្យធ្លោះចាញ់ឧបាយកល**ចូឆ្វ** លុះដល់ជីវិតអន្តរាយ យើងក៏នឹកស្តាយតូចចិត្តណាស់ ខ្លួនអ្នកក៏ជាជាតិទាហាន គង់នឹងមានចិត្តនោះឈឺក្តៅ ត្រូវសងសឹកឪពុកវិញ បើអ្នកនឹងលើកកងទ័ពទៅវាយយកស្រុកហ៊្វូតោវេលាណា យើងនឹងលើកទ័ពពីខាងស្រុកកេងជីវខាងនេះទៅជួយព្រួតគ្នាកម្ចាត់**ចូឆ្វ**ឲ្យបានវិញ ដើម្បីនឹងជួយបំពេញព្រះរាជហឫទ័យនៃព្រះចៅ**ហៀនតេ**ឲ្យបានសេចក្តីសុខ។

**ម៉ាឈៀវ**មើលចប់សេចក្តីសំបុត្រនោះ ក៏ឲ្យនឹកពុះពោរក្នុងចិត្តគិតក្តៅនឹង**ចូឆូ** លុះរំសាយសេចក្តីសោកវេលាណា ក៏សរសេរជាសារតបទៅ**ឡៅពី**វិញ ហើយ **ម៉ាឈៀវ**ក៏តាំងចាត់ចែងកេណ្ឌពលទាហាន ដើម្បីនឹងលើកទៅវាយស្រុកហ៊ូតោ ទទួលមានបម្រើមកជម្រាបថា **ហាន់ស៊ុយ**ឲ្យអញ្ជើញ**ម៉ាឈៀវ**ទៅជួប។ **ម៉ាឈៀវ**ក៏ចូលទៅជួបនឹង**ហាន់ស៊ុយ** ៗនិយាយប្រាប់**ម៉ាឈៀវ**ថា **ចូឆូ**ឲ្យសំបុត្រមកដល់យើងថា ឲ្យចាប់ចៅទាំងពីរនាក់បញ្ជូនចូលទៅក្រុងហ៊ូតោ **ចូឆូ**នឹងតាំងយើងឲ្យធ្វើជាចៅហ្វាយស្រុកសែលៀង។

**ម៉ាឈៀវ**ឮដូច្នោះ ក៏ក្រាបចុះគំនាប់ហើយនិយាយជម្រាបថា លោកនិងបិតាខ្ញុំបាទគឺជាមិត្តសម្លាញ់នឹងគ្នាស្និទ្ធស្នាលណាស់ ឥឡូវ**ចូឆូ**សម្លាប់បិតាខ្ញុំបាទទៅហើយ រឿងទាំងនេះសូមឲ្យលោកឈ្វេងយល់ទៅដល់បិតាខ្ញុំបាទផងចុះ។ **ហាន់ស៊ុយ**ឆ្លើយថា បិតាចៅនិងយើងបានស្រឡាញ់រាប់អានគ្នាជាប្រាកដណាស់ ដែល**ចូឆូ**សម្លាប់បិតាចៅទៅហើយនោះ យើងក៏មានចិត្តទោមនស្សពន់ប្រមាណ បើចៅនឹងលើកទ័ពទៅវាយស្រុកហ៊ូតោសងសឹក**ចូឆូ**គ្រាណា យើងក៏ត្រូវទៅជាមួយផង។

**ម៉ាឈៀវ**ឮដូច្នោះ ក៏គោរពដោយសេចក្តីត្រេកអរខ្លាំងណាស់ **ហាន់ស៊ុយ**ក៏ឲ្យយកខ្លួនទាហាន**ចូឆូ**ដែលកាន់សំបុត្រទៅនោះ ទៅប្រហារជីវិតនៅមុខ**ម៉ាឈៀវ** ហើយ**ម៉ាឈៀវ**និង**ហាន់ស៊ុយ**ក៏រៀបចាត់ចែងទាហាន ចាត់ឲ្យ**ហៅឈួន**, **ធៀងិន**, **លីខាំ**, **ទៀវហេង**, **លៀងហ៊ីង**, **សេងងី**, **ប៉ែអន**, **អៀវឈីវ** ទាំងប្រាំបីនាយនេះ នាំទាហានទៅជាមួយនឹង**ហាន់ស៊ុយ**មួយកង លុះបានឫក្សពារពេលាល្អ **ម៉ាឈៀវ**និង**ហាន់ស៊ុយ**ក៏លើកទ័ពចេញទៅក្រុងហ៊ូតោ។

ខណៈកាលលើកទ័ពទៅដល់គយស្រុកទៀងអាន់ **ចុងហ៊ីវ**ចៅហ្វាយស្រុកក៏ឲ្យបម្រើសេះកាន់សំបុត្រប្ដឹងចូលទៅដល់**ចូឆូ** ហើយលើកទាហានចេញមកវាំងខាំង

ទ័ព លុះ**ម៉ាតាយ**លើកទាហានប្រាំពាន់ជាកងមុខទៅដល់ប្រទល់គ្នា **ចុងហ៊ីវ**ក៏បំផាយសេះចូលទៅតយុទ្ធនឹង**ម៉ាតាយ**បានមួយភ្លែង **ចុងហ៊ីវ**ទ្រនឹង**ម៉ាតាយ**ពុំបាន ក៏ញាក់បំផាយសេះនាំទាហានរត់ចូលទៅក្នុងស្រុកវិញ បង្គាប់ទាហានឲ្យត្រួតត្រាយាមល្បាតតាមសើនបន្ទាយជុំវិញមាំមួន។ **ម៉ាឈៀវ, ហាន់ស៊ុយ**លើកទ័ពទៅដល់ក៏ដេញឲ្យចូលព័ទ្ធជុំវិញស្រុកទៀងអាន់គម្រប់ដប់ថ្ងៃ គ្មានឃើញឈ្មោះណាចេញមកតយុទ្ធគ្នាសោះ លុះលើកទាហានសង្គ្រុញចូលទៅវាយទម្លាយ ក៏ឃើញ**ចុងហ៊ីវ**ចាត់ការយាមល្បាតមាំមួនណាស់។

**បាំងតេក**ក៏និយាយនឹង**ម៉ាឈៀវ**ថា ស្រុកទៀងអាន់នេះជាមណ្ឌលធំ កំពែងបន្ទាយជុំវិញក៏មាំមួន ព្រោះជាទីក្រុងដែលព្រះចៅ**ហៀនតេ**បានរៀបចំទុកមក យើងនឹងមកព័ទ្ធទុកស្ងៀមដូច្នេះ ក៏មិនជាការមានប្រយោជន៍ នាំឲ្យតែព្រួយនឿយទាហាន បើប្រសិនជា**ចូឆូ**លើកកងទ័ពមកជួយទាន់ បានវាយខ្ទប់ពីក្រោមកជាន់ទៀត យើងក៏គង់នឹងលំបាកថ្កោះការ ខ្ញុំបាទនឹងគិតកលឧបាយមួយឲ្យបានស្រុកទៀងអាន់ដោយងាយ ព្រោះពេលនេះប្រជារាស្ត្រនៅស្រុកទៀងអាន់កំពុងដាច់ស្បៀងអាហារណាស់ សូមឲ្យលោកបន្ថយរំសាយទ័ពទៅបង្កប់ឲ្យឆ្ងាយពីស្រុក ដើម្បីនឹងឲ្យអ្នកស្រុកនេះចេញទៅរកស្បៀងអាហារ ខ្ញុំបាទនឹងបន្លំចូលទៅក្នុងស្រុកឲ្យបាន ហើយនឹងដុតភ្លើងជាសញ្ញាចាំបើកទ្វារទទួលលោកឲ្យចូលទៅ។ **ម៉ាឈៀវ**ឮដូច្នោះក៏ពេញចិត្តណាស់ លុះដល់ពេលយប់ ក៏ឲ្យយកទង់លើកឡើងប្រាប់ទាហានឲ្យសម្គាល់ថា ត្រូវថយទ័ពចេញទៅបោះនៅពីចម្ងាយវិញ តាមគំនិត**បាំងតេក**។

វេលានោះ បណ្ដាមនុស្សម្នាក្នុងស្រុកទៀងអាន់ ក៏សឹងតែដាច់ផុតស្បៀងអាហារដាច់ទាំងទឹកនិងអុសភ្លើងខ្លាំងណាស់ ព្រោះក្នុងនាទីស្រុកទៀងអាន់នោះជាទីស្ងួតក្រៀម ទោះបីជីកអណ្ដូងឲ្យជ្រៅយ៉ាងណា ក៏គ្មានទឹកចេញសោះ ប៉ុន្តែនៅក្នុង

ចិត្តថា **ចូឆូ**គង់នឹងលើកទ័ពមកជួយ បានជាព្រងើយកន្តើយគ្រាន់តែការពារពីក្នុង លុះព្រឹកព្រហាមឃើញកងទ័ព**ម៉ាឈៀវ**លើកថយចេញទៅវិញ ក៏មានសេចក្តីត្រេកអរវាល់គ្នា នៅតែ**ចុងហ៊ីវ**ម្នាក់មានសេចក្តីសង្ស័យក្រែងជាកលសឹក ទើបប្រើបម្រើឲ្យចេញទៅលបមើល ក៏មិនឃើញមានកងទ័ពតាំងជាក្បួន **ចុងហ៊ីវ**ក៏ឲ្យបើកទ្វារស្រុកបញ្ចេញមនុស្សម្នាក្នុងស្រុកនោះ ឲ្យទៅរកស្បៀងអាហារប្រហែលប្រាំថ្ងៃ។ ខណៈនោះ**បាំងតេង** និងទាហានដែលស្និទ្ធទុកចិត្តក៏បន្លំជាមនុស្សរែកអុសចូលទៅក្នុងស្រុកទៀងអាន់ កាលបើ**ម៉ាឈៀវ**បានដឹងហើយ ក៏ប្រមូលពលលើកត្រឡប់ទៅព័ទ្ធស្រុកនោះជុំវិញដូចថ្ងៃមុន **ចុងហ៊ីវ**ឃើញដូច្នោះ ក៏បង្គាប់ឲ្យបិទទ្វារស្រុកជាប់មាំមួន ហើយចាត់ការយាមល្បាតទាំងថ្ងៃយប់។

ឯ**បាំងតេក** ដែលបានចូលទៅនៅក្នុងកំពែង លុះដល់ពេលយាមបីយប់ ក៏យកភ្លើងអុជឲ្យឆេះឡើងក្នុងស្រុកខាងទិសឯលិច។ ឈ្មោះ**ចុងជិន**ជាប្អូន**ចុងហ៊ីវ** ជាអ្នកត្រួតត្រាទាហានខាងទិសនោះ លុះឃើញភ្លើងឆេះសន្ធោសន្ធៅឡើង ក៏ភ័យខ្លាំងណាស់ ឡើងសេះបំផាយចូលទៅនឹងលត់ភ្លើង។ **បាំងតេក**ក្រឡេកឃើញក៏បរសេះចេញទៅស្ទាក់ពីមុខចុងជិន ហើយស្រែកថា យើងឈ្មោះ**បាំងតេក** ចូលមកនៅក្នុងស្រុកនេះហើយ អ្នកឯងដឹងឬទេ? **ចុងជិន**ទើបតែបានស្តាប់មិនទាន់ទទួលអាវុធ **បាំងតេក**ក៏ដកដាវកាប់**ចុងជិន**ធ្លាក់ពីលើសេះស្លាប់។ ឯពួកទាហានដែលយាមល្បាតទាំងប៉ុន្មានក៏សឹងតែបាក់បែកខ្ចាត់ខ្ចាយទៅទាំងអស់។ **បាំងតេក**ក៏ចាច់សោរបើកទ្វារស្រុកចេញទៅទទួល**ម៉ាឈៀវ**ឲ្យចូលទៅក្នុងស្រុក។

ឯ**ចុងហ៊ីវ** ដែលនាំទាហានទៅនៅរក្សាទ្វារខាងទិសឯកើតនោះ លុះឃើញភ្លើងឆេះសន្ធោឡើង ឃើញទាហានបែកខ្វែកគ្នាពពាក់ពពូនដូច្នោះ ក៏ដឹងថា **ម៉ាឈៀវ** និង**ហាន់ស៊ុយ**ចូលស្រុកបាន មានសេចក្តីភ័យខ្លាំងណាស់ នាំទាហានរត់ចេញទៅ

តាំងនៅទីតុងគួន ហើយប្រើបម្រើស្រូតរូតទៅប្តឹង**ចូឆ្វ**។ ឯ**ម៉ាឈៀវ** និង**ហាន់ស៊ុយ**វាយយកបានស្រុកទៀងអាន់ហើយនឹងលើកកងទ័ពមកវាយស្រុកហ៊ូតោទៀត ឯ**ចុងហ៊ីវ**ចៅហ្វាយស្រុកទៀងអាន់ក៏បែកទ័ពត្រឡប់ទៅនៅគយតុងគួន។

**ចូឆ្វ**ក៏និយាយថា ពីដើមយើងនឹងគិតលើកទ័ពហ្លួងទៅវាយយកស្រុកកាំងតាំង ឥឡូវ**ម៉ាឈៀវ**ធ្វើបង្អាប់លើកទ័ពត្រឡប់ប្រុងនឹងវាយយកស្រុកយើងដូច្នេះ ត្រូវតែយើងនឹងត្រិះរិះកម្ចាត់**ម៉ាឈៀវ**ចេញជាមុន លុះថាហើយក៏ឲ្យហៅខ្លួន**ចោហាង**ជាប្អូន និង**ស៊ីឡុង**មកបង្គាប់ថា ចៅឯងចូរនាំពលទាហានមួយម៉ឺនទៅជួយ**ចុងហ៊ីវ** ដើម្បីនឹងការពារគយតុងគួនឲ្យមាំមួន បើឃើញកងទ័ព**ម៉ាឈៀវ**លើកមកដល់ ត្រូវឲ្យព្រួតគ្នារក្សាបន្ទាយឲ្យមាំមួន កុំឲ្យអន្តរាយក្នុងរវាងដប់ថ្ងៃ បើបន្ទាយតុងគួននោះខូចនឹង**ម៉ាឈៀវ**ក្នុងរវាងនេះ យើងនឹងយកទោសដល់ខ្លួន បើហួសដប់ថ្ងៃហើយខូចក៏វាហីទៅចុះ។ **ចោហាង** និង**ស៊ីឡុង**ក៏ទទួលបង្គាប់ រួចលើកទ័ពចេញទៅបន្ទាយតុងគួន។

ក្រោយនោះ**ចោយិន**និយាយជម្រាប**ចូឆ្វ**ថា **ចោហាង**នោះនៅក្មេងសេចក្តីណាស់ ចិត្តវាក៏ជាមនុស្សរឹងរូសមិនសូវមានពិគ្រោះហេតុការណ៍ធ្ងន់ឬស្រាល ដែលលោកនឹងប្រើឲ្យទៅរក្សាបន្ទាយតុងគួននោះ ខ្ញុំបាទឃើញនឹងមានសេចក្តីអន្តរាយជាប្រាកដ។ **ចូឆ្វ**យល់ឃើញត្រូវផង ទើបចាត់ប្រើ**ចោយិន**ឲ្យលើកទាហានតាម**ចោហាង**ទៅ ហើយ**ចូឆ្វ**ក៏លើកទ័ពធំតាមទៅជាខាងក្រោយ។

ឯ**ម៉ាឈៀវ**នោះ លុះលើកកងទ័ពទៅដល់ទល់នឹងបន្ទាយតុងគួន ក៏ឲ្យរេហ៍ពលវាយគ្នាព័ទ្ធជុំវិញបន្ទាយ នោះ**ចោហាង**និង**ស៊ីឡុង**, **ចុងហ៊ីវ**ក៏ចាត់ទាហានឲ្យយាមល្បាតតាមសើន និងទ្វារបន្ទាយរាយព័ទ្ធជុំវិញ មិនបានចេញតតាំងច្បាំងគ្នា ឯ**ម៉ាឈៀវ** ក៏ឲ្យទាហានចូលទៅស្រែកជេរប្រមាថ**ចូឆ្វ**ជាពាក្យអាស្រូវភាសផ្សេងៗ

ហើយរំលើកដៀលដល់ពូជត្រកូល។ **ចោហាង**ឮដូច្នោះក៏ខឹងខ្លាំងណាស់ គិតនឹងចេញទៅតយុទ្ធគ្នានឹង**ម៉ាឈៀវ**។ **ស៊ីឡុង**ក៏ហាមឃាត់ថា ដែល**ម៉ាឈៀវ**ប្រើទាហានឲ្យមកជេរប្រមាថយ៉ាងនេះ ប្រាថ្នានឹងឲ្យយើងខឹងចិត្តឈឺក្ដៅ ត្រូវតែអ្នកខំអត់សង្កត់ចិត្តទៅសិនចុះ ទោះបីយ៉ាងណាក៏កុំត្រូវចេញទៅតយុទ្ធគ្នាឡើយ ត្រូវតែភារង់បង្អង់ចាំទម្រាំទ័ពធំលើកមកដល់ មហាឧបរាជនឹងគិតដោយកលឧបាយប្រការម្ដេចសឹមយើងធ្វើតាម។ **ចោហាង**ក៏ឃើញត្រូវផង។ យប់ថ្ងៃមិនដាច់ **ចោហាង**ខឹងខ្លាំងណាស់ ក៏បរពលចេញមកតច្បាំង **ស៊ីឡុង**ហាមឃាត់ថា មហាឧបរាជបង្គាប់ផ្ដាំជាដាច់ខាតថា ឲ្យយើងគិតរក្សាតែបន្ទាយកុំឲ្យអន្តរាយក្នុងរវាងដប់ថ្ងៃ ឥឡូវបានប្រាំបួនថ្ងៃហើយ អ្នកត្រូវតែខំអត់ធន់ឲ្យបានគ្រប់ដប់ថ្ងៃចុះ។ **ចោហាង**ស្ដាប់ហើយនឹកបារម្ភចិត្ត**ស៊ីឡុង**ក៏នៅស្ងៀម។ **ស៊ីឡុង**បម្រុងចាត់ចែងស្បៀងអាហារនឹងចែកទាហាន។ កាល**ស៊ីឡុង**ទៅហើយ **ចោហាង**ក៏ឡើងលើសើនបន្ទាយ ឃើញទាហាន**ម៉ាឈៀវ**នៅវាយគ្នា ខ្លះដេកខ្លះអង្គុយមិនមែនជាក្បួនទ័ព **ចោហាង**ក៏នាំទាហានបីពាន់បើកទ្វារចេញទៅខាងក្រៅ ទាហាន**ម៉ាឈៀវ**ដែលនៅវាយគ្នានោះក៏រត់ព្រាត់ព្រាយ **ចោហាង**ក៏បំផាយសេះដេញតាមទៅ **ស៊ីឡុង**ដឹងដូច្នោះភ័យណាស់ស្រែកហៅឲ្យ**ចោហាង**ឈប់ ត្រឡប់វិញ ទទួល**ម៉ាឈៀវ**លើកទាហានចេញមកស្ទាក់ពីមុខ **ចោហាង**ក៏បំផាយសេះវេះគេចនឹងចូលបន្ទាយ ទទួលប្រទះនឹង**ម៉ាតាយ**លើកទាហានស្ទាក់ពីក្រោយ ហើយព័ទ្ធជុំវិញខ្លួន**ចោហាង** និង**ស៊ីឡុង** ៗលើសកម្លាំងណាស់ នឹងទ្រាំតពុំឈ្នះ ក៏ទម្លាយចោលបន្ទាយ**តុងគួន** នាំទាហានរត់យកតែខ្លួនចេញទៅ។ **បាំងតេក**ក៏បំផាយសេះស្ទុះតាមទៅទាល់តែផុតភាគបន្ទាយតុងគួន ប្រទះនឹង**ចោយិន**លើកទ័ពមកជួយ**ចោហាង**, **ស៊ីឡុង**។ **ម៉ាឈៀវ**ឃើញដូច្នោះ ក៏បរពលចូលទៅជួយ**បាំងតេក** ហើយត្រឡប់នាំយកខ្លួន**បាំងតេក**ចូលទៅនៅក្នុងបន្ទាយតុងគួន។

ខណៈនោះ**ចោហង**, **ស៊ីឡុង** និង**ចោយិន**, **ចុងហ៊ីវ** ក៏នាំទាហានលើកត្រឡប់ទៅក្រោយអស់រវាងមួយថ្ងៃ ទទួលប្រទះនឹងកងទ័ព**ចូឆូ** ។ក៏សួរសាកយកសេចក្ដីដល់**ចោងហង**ថា កាលយើងចាត់ប្រើខ្លួនឲ្យលើកទ័ពមកនោះ យើងក៏បានផ្ដាំកំជាប់ទុកថា ឲ្យខំតាំងរក្សាបន្ទាយតុងគួនទុកឲ្យមាំមួន កុំឲ្យធ្ដោះការក្នុងពេលយប់ថ្ងៃ ហេតុអ្វីក៏ខ្លួនរត់ចោលបន្ទាយបណ្ដោយឲ្យសត្រូវយកបាន? **ចោហង**ឆ្លើយថា កាលខ្ញុំបាទទៅនៅរក្សាបន្ទាយនោះ ក៏បានចាត់ការប្រុងប្រៀបប្រយ័ត្នឲ្យយាមល្បាតលាតក្រវែល មិនដែលប្រមាថឲ្យឃ្លាងឃ្លាតពីប្រកាសមហាឧបរាជសោះ តែព្រោះ**ម៉ាឈៀវ**ឲ្យទាហានមកស្រែកជេរ រំលើកដល់ត្រកូលមហាឧបរាជជារាល់ពេលទាំងយប់ថ្ងៃ ខ្ញុំបាទក៏នឹកខឹងណាស់ ខំមានះអត់សង្កត់ចិត្ត តែអត់ទ្រាំពុំបាន ទើបលើកទាហានចេញទៅតច្បាំងគ្នានឹង**ម៉ាឈៀវ** ដែលខ្ញុំបាទមើលងាយប្រមាថឲ្យកើតធ្ដោះការយ៉ាងដូច្នេះ ទោសខ្ញុំបាទក៏ត្រូវខុសណាស់ហើយ តាមតែមហាឧបរាជនឹងប្រោសចុះ។

**ចូឆូ**ឮដូច្នោះ ក៏ថា **ចោហង**នៅក្មេងសេចក្ដីខ្លីគំនិត យើងក៏មិនបានទុកចិត្តជាប្រាកដណាស់ ទើបប្រើខ្លួនជាមនុស្សចាស់ឲ្យមកជួយ ដើម្បីនឹងចាំជួយដាស់តឿនរំឭកស្មារតីឲ្យធ្វើការអ្វីៗ គប្បីឲ្យដឹងខុសនិងត្រូវ ឥឡូវគួរហើយឬ? ដែលខ្លួនធ្វើឲ្យខូចការរបស់យើងយ៉ាងនេះ? **ស៊ីឡុង**ឆ្លើយថា កាល**ម៉ាឈៀវ**ប្រើទាហានមកជេរដៀមដាមនោះ **ចោហង**ចេះតែប្រឡោតខឹងប្រុងតែនឹងចេញច្បាំង ខ្ញុំបាទក៏ចេះតែឃាត់ខាំងរាំងរាជាច្រើនវេលាមកហើយ កាល**ចោហង**ចេញទៅតយុទ្ធនឹង**ម៉ាឈៀវ**នោះ ទទួលខ្ញុំបាទមិននៅជិត ចេញទៅពិនិត្យចែកស្បៀងអាហារឲ្យបណ្ដាពួកទាហាន លុះដឹងថា **ចោហង**ចេញទៅក៏មានចិត្តភិតភ័យណាស់ ក្រែង**ចោហង**នឹង

ថ្លោះការដល់**ម៉ាឈៀវ** ខ្ញុំបាទក៏លើកទាហានទន្ទ្រានតាមទៅជួយ កុំឲ្យថ្លោះការក្នុងខណៈនោះ។

**ចូឆ្វូ**ឮដូច្នោះខឹងណាស់ បង្គាប់ឲ្យចាប់ខ្លួន**ចោហង**ទៅសម្លាប់ ពួកនាហ្មឺនក្នុងកងទ័ពក៏ប្រញាប់ទៅជម្រាប**ចូឆ្វូ**ថា វេលានេះយើងកំពុងធ្វើការសង្គ្រាមនឹង**ម៉ាឈៀវ** ជាសឹកធំ គួរតែរក្សាឫក្សជោគជាមង្គលឧត្តម ដែលមហាឧបរាជនឹងបង្ខំឲ្យសម្លាប់ប្អូនចេញនោះមិនគួរសោះ សូមឲ្យអនុគ្រោះលើកទោសម្តងចុះ។ **ចូឆ្វូ**យល់ឃើញគួរដូច្នោះ ក៏ឲ្យឃុំខ្លួន**ចោហង**ទុក ហើយក៏ស្រូតលើកទ័ពតម្រង់ទៅបន្ទាយតុងគួន លុះទៅជិតព្រំបន្ទាយចម្ងាយផ្លូវម្ភៃសិន (៨០០ម) **ចោយិន**ក៏ជម្រាប**ចូឆ្វូ**ថា បើយើងនឹងលើកទាហានពុះពារទម្លាយបន្ទាយចូលទៅក្នុងគ្រាឥឡូវនេះ គង់**ម៉ាឈៀវ**នឹងប្រើកលឧបាយបញ្ឆោតដោយប្រការម្តេចក៏យើងពុំអាចដឹង គួរតែបង្អង់កងទ័ពឈប់នៅទីនេះស្តាប់ការណ៍សិន សឹមលើកចូលទៅវាយយកបន្ទាយតុងគួនវិញនឹងបានដោយងាយ។ **ចូឆ្វូ**ក៏យល់តាម ទើបឲ្យបញ្ឈប់ទ័ពតាំងបន្ទាយខ្ចាប់នៅទីនោះបីអន្លើ ឲ្យ**ចោយិន**នៅរក្សាបន្ទាយខាងស្តាំ ឲ្យ**ហែហ៊ួអៀន**នៅរក្សាបន្ទាយខាងឆ្វេង ឯខ្លួន**ចូឆ្វូ**នៅបន្ទាយកណ្តាល ហើយសម្រាំងរើសយកតែទាហានដែលមានថ្វីដៃ ដើម្បីនឹងពុះទម្លាយវាយយកបន្ទាយតុងគួនឲ្យបាន។

**ម៉ាឈៀវ**ឃើញ**ចូឆ្វូ**លើកមកតាំងបន្ទាយនៅជិតដូច្នោះ ក៏នាំទាហានចេញពីក្នុងបន្ទាយទៅតទល់នឹង**ចូឆ្វូ**។ **ម៉ាឈៀវ**បរសេះស្ទុះទៅឈរមុខទ័ព **ចូឆ្វូ**ក៏ឡើងសេះមកបញ្ឈប់នៅមុខបន្ទាយ ក្រឡេកឃើញ**ម៉ាឈៀវ**ពាក់គ្រោះប្រាក់ពាក់មួកស ជិះសេះកាន់លំពែងឈរមុខទាហាន មានរូបយ៉ាងសម្បើម ស្មាគាងរាងចង្កេះមូល មុខស ពុកមាត់ក្រហម សមតួជាទាហានឯក ហើយឃើញ**បាំងតេក**ជិះសេះនៅខាងស្តាំ **ម៉ាតាយ**នៅខាងឆ្វេង **ចូឆ្វូ**នឹកក្នុងចិត្តថា **ម៉ាឈៀវ**នេះមិនបង់ជាតិ ដែលកើតមកធ្វើ

ទាហាន នឹងចូលតយុទ្ធសង្គ្រាមក៏មានស្វាហាប់ចំណាប់ណាស់។ **ចូឆ្វូ**ក៏បរសេះចូលទៅរហ័ស លុះដល់ជិតហើយក៏ស្រែកឲ្យ**ម៉ាឈៀវ**ថា ខ្លួនអ្នកជាមនុស្សមានពូជត្រកូលខ្ពស់ ឈ្មោះថាមន្ត្រីខ្ញុំរាជការ ហេតុម្ដេចក៏លើកពលយោធាមកជាក្បួនក្បត់ផែនដីដូច្នេះ?

**ម៉ាឈៀវ**ឮដូច្នោះខឹងណាស់ ខាំមាត់គ្រឹតធ្មេញហើយស្រែកជេរទៅ**ចូឆ្វូ**ថា អាចោរសត្រូវរាជសម្បត្តិ អាឯងជាតួក្បត់ផែនដីមានសេចក្ដីប្រព្រឹត្តអាក្រក់ណាស់ ធ្វើឲ្យព្រះចៅ**ហៀនតេ**ជាម្ចាស់មានព្រះទ័យមិនសប្បាយសោះ ទោសអាឯងខុសជាទម្ងន់ គួរតែនឹងកាប់ចិញ្ច្រាំសាច់ឲ្យល្អិតល្អន់ដូចប្រអួល ទើបគួរនឹងទោសកំហុស ហេតុអ្វីអាឯងគិតខុសមកសម្លាប់អាពុកអញ។ អញមានសេចក្ដីខឹងខ្លាំងណាស់ អញមកនេះប្រាថ្នានឹងចាប់អាឯងវះពន្លះសាច់ហុតឈាមទាំងរស់ឲ្យបាន ថាហើយក៏បរសេះចូលតម្រង់ទៅនឹងចាប់ខ្លួន**ចូឆ្វូ**។ **អ៊ីគឹម**ឃើញដូច្នោះក៏ញាក់សេះស្ទុះមកតទល់នឹង**ម៉ាឈៀវ**បានម្ភៃភ្លែង។ **អ៊ីគឹម**អស់កម្លាំងប្រឹងតពុំបានក៏ទាញសេះវេះត្រឡប់រត់ទៅក្រោយ **លីកង**ក៏ស្ទុះបណ្ដោយមកតនឹង**ម៉ាឈៀវ**បានប្រាំបួនភ្លែង **ម៉ាឈៀវ**លើកលំពែងចាក់ត្រូវ**លីកង**ធ្លាក់ពីលើសេះស្លាប់។ **ម៉ាឈៀវ**ក៏បរពលចូលខ្ទាប់ តាំងតែប្រកាប់ជាប់ដៃគ្នានឹងទ័ព**ចូឆ្វូ** ទាហាន**ចូឆ្វូ**ស៊ូពុំបានក៏បែកធ្លាយបាក់ទាំងទ័ពសន្ធាប់សន្ធឹកណាស់ **ម៉ាឈៀវ**ក៏ដេញទាហានឲ្យចូលរហ័សសង្កុញទៅទៀត **ម៉ាឈៀវ**ស្រែកឲ្យចាប់ខ្លួន**ចូឆ្វូ**ឲ្យបាន។ **ចូឆ្វូ**ឮដូច្នោះភ័យខ្លាំងណាស់ដោះក្រោះចេញពីខ្លួន ហើយបំផាយសេះស្ទុះចេញទៅជាមួយនឹងកូនទាហាន។ ពួកទាហាន**ម៉ាឈៀវ**ស្រែកថាអាចោរពុកចង្កាវែងនោះហើយឈ្មោះ**ចូឆ្វូ** ឲ្យចាប់វាឲ្យបាន។

**ចូឆ្វូ**ក៏យកគ្របីកាត់ពុកមាត់ពុកចង្កាអស់ ឮទាហាន**ម៉ាឈៀវ**ស្រែកថា **ចូឆ្វូ**កាត់ពុកមាត់ពុកចង្កាអស់ហើយ ឲ្យចាប់ខ្លួនអាពុកមាត់ខ្លីឲ្យបាន។ **ចូឆ្វូ**ក៏យកព្រៃ

កន្ទុយទង់រុំចង្កាហើយបំផាយសេះចេញទៅ។ **ម៉ាឈៀវ**បំផាយសេះតាម **ចូឆ្វ**ក្រឡេកមកឃើញ**ម៉ាឈៀវ**តាមពីក្រោយភ័យណាស់ ភ្ញាត់ធ្លាក់ពីលើសេះរត់ចូលទៅអែបផ្ទាប់គល់ឈើមួយ។ **ម៉ាឈៀវ**ក៏បង្ខំសេះស្ទុះចូលទៅជិតលើកលំពែងពួយទៅ មិនត្រូវ**ចូឆ្វ**ក៏ត្រូវដើមឈើជាប់លំពែង **ចូឆ្វ**ក៏គេចស្ទុះរត់រួចពីទីនោះចូលទៅក្នុងព្រៃ។ **ម៉ាឈៀវ**ស្ទុះទៅដកយកលំពែងបាន ហើយដេញតាម**ចូឆ្វ**ទៅទៀតជិតនឹងទាន់ទទួល **ចោហង**បរសេះមកពាំង ក៏តាំងតែប្រយុទ្ធគ្នានឹង**ម៉ាឈៀវ**បានប្រាំរយភ្លែង **ម៉ាអៀន**ឃើញ**ចោហង**ទន់កម្លាំងខ្លាំងណាស់ ក្រែងថ្លោះការនឹង**ម៉ាឈៀវ**ក៏បរសេះចូលទៅជួយ។ **ម៉ាឈៀវ**ក៏ដេញហួសផុតពួកទាហានទៅតែម្នាក់ឯង មិនទុកចិត្តក៏ញាក់សេះវិលថយមកក្រោយវិញចូលបន្ទាយតុងគួន។ **ចូឆ្វ**ក៏ត្រឡប់ចូលបន្ទាយ តាំងកំជាប់ពលទាហានឲ្យយាមល្បាតប្រយ័ត្នការជាមាំមួន មិនបានចេញតនឹង **ម៉ាឈៀវ** ហើយក៏លើកសេចក្តីគាប់ប្រសើរដល់ចោហងឲ្យបានបំណាច់រង្វាន់ជាច្រើន។

ឯ**ម៉ាឈៀវ**ក៏ចាត់ការប្រុងប្រៀបទាហាន ដើម្បីនឹងចេញទៅវាយយកបន្ទាយ**ចូឆ្វ**ទៀត តែឃើញថា**ចូឆ្វ**ប្រយ័ត្នការមាំមួនមិនបានចេញត **ម៉ាឈៀវ**ក៏ឲ្យផ្លាស់ប្តូរទាហានទៅស្រែកជេរបញ្ឈឺចិត្ត**ចូឆ្វ**នៅមុខបន្ទាយ ទាំងយប់ទាំងថ្ងៃមិនដាច់ ទាហាន**ចូឆ្វ**ឮដូច្នោះខឹងណាស់ គិតគ្នានឹងលើកចេញមកតយុទ្ធនឹង**ម៉ាឈៀវ**។

**ចូឆ្វ**និយាយយកចិត្តទាហានទាំងពួងថា ដែល**ម៉ាឈៀវ**ឲ្យមកជេរបញ្ឈឺចិត្តដូច្នេះ ប្រាថ្នានឹងឲ្យយើងក្តៅទ្រាំនៅស្ងៀមមិនបាន បើយើងនឹងលើកទាហានចេញទៅតវេលានេះ ក៏ដូចជាចាញ់ប្រាជ្ញា**ម៉ាឈៀវ** អ្នកទាំងពួងចូរជួយគ្នាគិតតែរក្សាបន្ទាយកុំឲ្យអន្តរាយសិនចុះ ការដែលនឹងគិតយកជ័យជម្នះនោះ ជាភ្នាក់ងារលើយើង បើអ្នកឯណាមិនស្តាប់យើង ខំតែលើកគ្នាចេញទៅតនឹង**ម៉ាឈៀវ** យើងនឹងកាត់ក្បាលចេញ។

ទាហានទាំងពួងឮដូច្នោះ ក៏នាំគ្នាថយចេញទៅ ហើយនិយាយគ្នាថា ពីដើមមហាឧបរាជនឹងចេញធ្វើការរណរង្គសង្គ្រាមក៏អង់អាចមិនចេះខ្លាចសោះ មានតែចេញទៅមុខបង្អស់ ដូចជាគ្មានញញើតអ្នកឯណា វេលានេះទើបឃើញថាមហាឧបរាជខ្លាចថ្វីដៃ**ម៉ាឈៀវ** សូម្បី**ម៉ាឈៀវ**ឱ្យមនុស្សមកស្រែកជេរប្រមាថដល់មុខបន្ទាយក៏នៅស្ងៀមបាន។ កន្លងមកបានបីថ្ងៃ ទាហានចេញទៅស៊ើបការណ៍វិលមកជម្រាប**ចូឆ្វូ**ថា ឥឡូវមានទាហាន**ម៉ាឈៀវ**លើកមកថែមទៀតពីរម៉ឺន។ ចូឆ្វូឮដូច្នោះក៏គិតថា ពីស្រុកសៃលៀងនឹងមកដល់បន្ទាយគួនតុងនេះ គឺជាផ្លូវឆ្ងាយដាច់ស្រយាលណាស់ **ម៉ាឈៀវ**មានកម្លាំងខ្លាំងពូកែមែន តែនៅក្មេងសេចក្ដីខ្លីគំនិតប្រាជ្ញាមិនធ្លាប់កាន់ការធំសោះ ទាំងមិនទាន់ចំណានចេះផ្លាស់ប្ដូរយកចិត្តទាហានទាំងពួង យូរទៅស្បៀងអាហារក៏គង់នឹងដាច់ចុះ មុខជាទាហានក្នុងចំណុះនឹងប្រែចិត្តចេញពុំខាន យើងក៏នឹងបានធ្វើការពេញដៃ។ **ចូឆ្វូ**និយាយនឹងទាហានទាំងពួងថា ដែលទាហាន**ម៉ាឈៀវ**បញ្ជូនមកទៀតពីរម៉ឺននោះ យើងមានអំណរណាស់ នឹងគិតយកជ័យជម្នះឱ្យបាន។

មានមួយថ្ងៃនោះ ពេលព្រឹក មានបម្រើមកប្រាប់**ចូឆ្វូ**ថា ទាហាន**ម៉ាឈៀវ**បញ្ជូនមកទៀតច្រើនណាស់ **ចូឆ្វូ**ឮដូច្នោះក៏អស់សំណើចហើយថា ការសង្គ្រាមគ្រានេះយើងមុខជាយកជ័យជម្នះឱ្យបាន ហើយក៏ឱ្យតែងតុលៀងអាហារបណ្ដាសេនាទាហានខុំរាជការទាំងពួង ពេលកំពុងសេពសុរានោះ ពួកទាហានក៏នាំគ្នាពិគ្រោះដល់ការសង្គ្រាមដែល**ចូឆ្វូ**ញញើតខ្លាច**ម៉ាឈៀវ**ហើយក៏នាំគ្នាញញឹម **ចូឆ្វូ**ក្លែងសួរសង្កិនប្រាជ្ញានិងចង់ច្បាស់ចិត្តនិងគំនិតសេនាទាហានទាំងពួងថា អ្នកទាំងពួងញញឹមឡកឱ្យយើងឬអ្វី? ប្រហែលជាអ្នករាល់គ្នាសម្គាល់ថា យើងនឹងចាញ់ថ្វីដៃ**ម៉ាឈៀវ**អស់

គំនិតហើយឬ? តើសេចក្ដីគិតនៃអ្នកទាំងពួងនឹងរិះគិតដូចម្ដេច? ដែលនឹងយកជ័យជម្នះបាន ក៏ចូរប្រាប់មកឲ្យយើងដឹងចុះ។

**ស៊ីឡុង**ឆ្លើយថា ដែលមហាឧបរាជនៅរក្សាបន្ទាយនេះឲ្យខ្ជាប់មាំមួននោះ ក៏ជាការប្រពៃណាស់ ឥឡូវ**ម៉ាឈៀវ**ក៏តាំងនៅក្នុងបន្ទាយតុងគួន មានចិត្តកំរើបគ្មានសេចក្ដីរវាំងការពារផ្លូវក្រោយទេ សូមឲ្យមហាឧបរាជចាត់ទាហានឲ្យលើកទ័ពទៅចាំស្ទាក់ស្បៀង វាយខ្ទប់ពីក្រោយមកវិញ ដើម្បីឲ្យ**ម៉ាឈៀវ**វង្វេងស្ងប់ខាងក្រោយ ហើយសឹមយើងលើកទ័ពខ្ទប់មវាយយកបន្ទាយតុងគួនវិញ គង់នឹងបានដោយងាយ។ **ចូឆ្វូ**ឮដូច្នោះក៏ក្លែងឆ្លើយតបទៅ**ស៊ីឡុង**វិញ ដើម្បីមិនឲ្យមនុស្សទាំងពួងមើលងាយប្រាជ្ញាថាយល់តាមគំនិត ថាគំនិតអ្នកឯងដែលនិយាយនេះ ត្រូវគំនិតខ្ញុំដែរ តែថាមិនទាន់ជ្រៅប៉ុន្មាន គំនិតយើងយល់ជ្រៅជាងនេះ យើងត្រូវប្រើឲ្យអ្នកឯងនិង**ជូឡេង**លើកពលបួនពាន់លបចេញទៅ បើឃើញព្រៃ និងភ្នំឯណាជាផ្លូវមានទំនងស្រួល ក៏ត្រូវឲ្យពួនបង្កប់នៅទីនោះ យើងនឹងលើកពលទៅតាមចាំស្ទាក់មុខទ័ពទឹក ហើយនឹងវាមកវាយបន្ទាយតុងគួនវិញ ខាងអ្នកឯងត្រូវវាយខ្ទប់ចូលមកពីម្ខាង។ **ស៊ីឡុង** និង**ជូឡេង**ទទួលប្រសាសន៍ហើយលា**ចូឆ្វូ**លើកទាហានចេញទៅ។ **ចូឆ្វូ**ក៏ប្រើ**ចោយិន**ឃុំទាហាននៅរក្សាបន្ទាយ ហើយក៏នាំ**ចោហាង**លើកទាហានព័ទ្ធទៅតាំងតទូកចម្បាំងនៅមាត់កំពង់ស្ទឹងហ៊ុយហោខាទិសឯកើតបន្ទាយតុងគួន។

ឯ**ម៉ាឈៀវ** កាលបើដឹងការណ៍ដូច្នោះក៏និយាយនឹង**ហាន់ស៊ុយ**នូវទាហានទាំងពួងថា ឥឡូវ**ចូឆ្វូ**លើកទ័ពទៅតាំងនៅមាត់កំពង់ ប្រាថ្នានឹងចាំវាយទ័ពទឹករបស់យើង បើយើងលើកទ័ពឆ្លងទៅត្រើយម្ខាងចាំស្ទាក់ផ្លូវស្បៀងឲ្យបាន គង់តែ**ចូឆ្វូ**នឹងចាញ់ប្រៀបយើងប្រាកដ។ **ហាន់ស៊ុយ**ឆ្លើយថា ដែលនឹងលើកទ័ពទៅស្កាត់ផ្លូវស្បៀងនោះ ឃើញមិនស្រួល ព្រោះជាទីកណ្ដាលកងទ័ព**ចូឆ្វូ** ត្រូវយើងរង់ចាំឲ្យ**ចូឆ្វូ**ឆ្លងមកត្រើយ

ខាងនេះកាលណា សឹមចៅលើកទ័ពទៅខ្ទប់ពីក្រោយ យើងនឹងឃុំពលទល់ពីមុខ មុខជា**ចូឆ្វូ**នឹងបែកខ្ញែកមិនខាន។ **ម៉ាឈៀវ**ឮដូច្នោះក៏គិតឃើញត្រូវផង ទើបឲ្យទាហានទៅស៊ើបការណ៍ខាងកងទ័ព**ចូឆ្វូ**ថា នឹងចូលវាយយកបន្ទាយតុងគួនវេលាណា។

ឯ**ចូឆ្វូ** លុះតទូកចម្បាំងរួចហើយ ក៏ចាត់ចែងទាហានចុះទូកចម្បាំងជាបីកងលើកឆ្លងចេញទៅ។ បម្រើដែលចេញទៅស៊ើបល្បាត ក៏នាំយកសេចក្ដីមកប្រាប់ **ម៉ាឈៀវ** ៗក៏ចាត់ចែងទាហានឲ្យចេញទៅពួនបង្កប់ស្កាត់តាមរយៈផ្លូវ លុះកងទ័ព**ចូឆ្វូ**ឆ្លងដល់ត្រើយ **ចូឆ្វូ**និងទាហានមួយពាន់ក៏ឡើងគោក ហើយរៀបតាំងបន្ទាយនៅទីនោះ **ម៉ាឈៀវ**ក៏ចុះទូកចម្បាំងព័ទ្ធស្កាត់ពីក្រោយចូលទៅ ទាហាន**ចូឆ្វូ**ទាំងអស់ដែលនៅមិនទាន់ឆ្លងដល់ត្រើយក៏បែកខ្ចាត់ខ្ចាយអស់ ពួកដែលនៅលើគោកក៏រត់ចុះទូក **ចូឆ្វូ**មិនបានដឹងថាសត្រូវនឹងមកផ្លូវលើនិងផ្លូវក្រោមប្រការម្ដេច ក៏កាន់គ្រប៊ីលើកឡើងឃាត់ ប្រាថ្នានឹងយកចិត្តទាហានទាំងពួងថា កុំឲ្យភ្ញាក់ផ្អើលជ្រួលច្របល់អ្វី យើងនៅនេះហើយនឹងខ្លាចអ្វី។

**ម៉ាឈៀវ**ឃើញ**ចូឆ្វូ**អង្គុយបង្គាប់ ប្រើទាហានឲ្យធ្វើបន្ទាយនៅមាត់ច្រាំង ក៏អែបទូកទៅខាងឡើងគោក ហើយជិះសេះដេញកាប់ពួកកងទ័ព**ចូឆ្វូ**។ ទាហានទាំងនោះក៏រត់ប្រពូនប្រពាក់ស្រែកថា **ម៉ាឈៀវ**មកហើយ **ខៅធូ**ឃើញ**ម៉ាឈៀវ**ដេញកាប់ទាហានចូលមកជិតនៅប្រមាណហាសិបព្យាម (១០០ម) នឹងដល់ខ្លួន**ចូឆ្វូ**ក៏ភ័យស្លុតចិត្ត ស្ទុះចូលទៅរាយកខ្លួន**ចូឆ្វូ**ចុះទូក ដៃស្ដាំកាន់កន្ទាយខ្លា ដៃឆ្វេងច្រានទូកចេញពីច្រាំង ទាហានទាំពួងក៏ភ័យស្លុតទាំងអស់គ្នា រត់ចុះទៅចាប់គែមទូក**ចូឆ្វូ**ទុកហើយស្រែកថា មហាឧបរាជជួយយកជីវិតខ្ញុំផង។

**ខៅធូ**ឃើញ**ម៉ាឈៀវ**ស្ទុះជិតចូលមក កន្ត្រាក់គ្រប៊ីកាប់ពួកទាហាននោះ ខ្លះដាច់ដៃខ្លះដាច់ជើង ហើយថយទូកចេញពីច្រាំងទៅកណ្ដាលស្ទឹង ឆ្ងាយប្រហែលបីព្យាម (៦ម) ទទួល**ម៉ាឈៀវ**ស្ទុះមកដល់ច្រាំង **ចូឆ្វ**ឃើញដូច្នោះភ័យខ្លាំងណាស់ ញ័រអស់ទាំងខ្លួន ស្ទុះទៅអោប**ខៅធូ** ៗក៏ស្រូតចែវទូកទៅ **ម៉ាឈៀវ**ក៏ឲ្យយកធ្នូបាញ់ចម្រុះតម្រង់ទៅបីដូចគ្រាប់ភ្លៀង **ខៅធូ**ខ្លាចព្រួញធ្នូនឹងត្រូវ**ចូឆ្វ** ក៏យកកែបសេះគ្របលើខ្លួន**ចូឆ្វ** ហើយយកគ្រប៊ីគ្រវីការពារព្រួញធ្នូជុំខ្លួន បង្ខំឲ្យចែវទូកតម្រង់ទៅស្រុកអ៊ុយឡាំ។ ខណៈនោះចៅហ្វាយស្រុកអ៊ុយឡាំក៏ចេញមកទទួល**ចូឆ្វ**ឡើងទៅ ទទួល**ម៉ាឈៀវ**ចុះទូកចម្បាំងតាមទៅដល់ស្រុកអ៊ុយឡាំ លើកទាហានឡើងគោកនឹងចូលទៅវាយដណ្ដើមយកខ្លួន**ចូឆ្វ**។ **តេងហ៊ុយ**ចៅហ្វាយស្រុកអ៊ុយឡាំឃើញដូច្នោះក៏គិតថា ទាហាន**ម៉ាឈៀវ**លើកមកពីស្រុកសៃលៀងក៏យូរណាស់ហើយ គង់នឹងអស់ស្បៀងអាហារជាប្រាកដ ចាំអញគិតឧបាយកលធ្វើឲ្យកងទ័ពម៉ាឈៀវវ្វញរាដើម្បីឲ្យ**ចូឆ្វ**រត់រួច ទើបបើកទ្វារដេញហ្វូងគោក្របីឲ្យចេញពីស្រុកជាច្រើន នោះទាហាន**ម៉ាឈៀវ**ក៏នាំគ្នាប់កាប់គោក្របីសម្លាប់ស៊ីជាអាហារ មិនបាននឹងគិតលើកតាម**ចូឆ្វ**ទៅទៀត។

ឯ**ចូឆ្វ**លុះទៅដល់បន្ទាយអ៊ុយហោ ឃើញដែកចុងព្រួញជាប់នឹងក្រោះ**ខៅធូ**ជាច្រើនក៏និយាយថា គ្រានេះបើយើងកុំបាន**ខៅធូ** កាលណាឡើយនឹងគង់ជីវិតរួចរស់មកដល់ទីនេះ។ ទាហានទាំងពួងឮ**ចូឆ្វ**ថាដូច្នោះ ក៏នាំគ្នាក្រាបចុះទៀបបាតជើង**ចូឆ្វ** ៗក៏សើចថា យើងធ្វើសឹកគ្រានេះ មិនគួរនឹងចាញ់ប្រៀបអាចោរកូនក្មេងសោះ បើកុំតែបាន**ខៅធូ**ជួយកែខៃ យើងក៏មិនរួចជីវិតរមកឡើយ។ **ខៅធូ**ឮដូច្នោះក៏ថា កាលខ្ញុំបាទនឹងលោកឡើងគោកបាន ហើយ**ម៉ាឈៀវ**លើកទាហានតាមមក **តេងហ៊ុយ**ធ្វើ

កលឧបាយបើកលែងហ្វូងគោក្របី ឲ្យចេញទៅទល់នឹងទ័ព**ម៉ាឈៀវ**លើកតាមមិនទាន់។

ទទួល**តេងហ៊ុយ**មកដល់ **ចូឆូ**ក៏និយាយនឹង**តេងហ៊ុយ**ថា អ្នកបានជួយរិះគិតកែខៃដើម្បីឲ្យយើងរួចពីចំណោមទ័ព**ម៉ាឈៀវ**គ្រានេះ អ្នកក៏មានឧបការៈនឹងយើងច្រើនណាស់ ហើយក៏តាំង**តេងហ៊ុយ**ជាទីទៀនគុយហៅហ៊ុយ ប្រែថា នាហ្មឺនស្និទ្ធសម្រាប់ប្រឹក្សាការរាជការ។ **តេងហ៊ុយ**ក៏ជម្រាបចូឆូថា ឥឡូវ**ម៉ាឈៀវ**មានចិត្តកំរើបលើកត្រឡប់ទ័ពទៅវិញហើយ ព្រឹកនេះមុខជានឹងលើកទ័ពមកធ្វើការទៀត មហាឧបរាជត្រូវគិតធ្វើកលឧបាយទុកសងសឹកទៅវិញចុះ។

**ចូឆូ**ថា អ្នកកុំវិតក្កឡើយ ឯការត្រង់នេះយើងក៏បានរិះគិតទុកជាស្រេចហើយ **ចូឆូ**ឲ្យប្រមូលទាហានជីកដីធ្វើស្នាមភ្លោះជុំវិញបន្ទាយ ក្រៅបន្ទាយឲ្យជីកជម្រៅពីរព្យាម ឲ្យដោតចម្រូងក្នុងគូ លើមាត់គូឲ្យយកឈើមករាយជារនូត ហើយឲ្យយកដីគ្របលុបមិនឲ្យឃើញស្នាម ប្រាថ្នានឹងបញ្ឆោតឲ្យទាហាន**ម៉ាឈៀវ**ធ្លាក់ចុះក្នុងគូនោះ ហើយឲ្យទាហានក្នុងបន្ទាយដោតទង់ត្រៀមគ្រឿងសាស្ត្រាវុធទុកឲ្យព្រម។

កាល**ម៉ាឈៀវ**ត្រឡប់ទៅដល់បន្ទាយហើយ ក៏និយាយប្រាប់**ហាន់ស៊ុយ**ថា ខ្ញុំបាទទៅធ្វើការគ្រានេះមានជ័យជម្នះ ហៀបតែនឹងចាប់ខ្លួន**ចូឆូ**បាន តែមានទាហានម្នាក់រូបរាងយ៉ាងស្វាហាប់ អាចពបីយកខ្លួន**ចូឆូ**ចុះទូករត់រួចទៅបាន។ **ហាន់ស៊ុយ**ថា ទាហាន**ចូឆូ**ដែលមានថ្វីដៃខ្លាំងពូកែមានពីរនាក់ **ទៀវអ៊ុយ**និង**ខៅធូ**។ ឥឡូវ**ទៀនអ៊ុយ**ស្លាប់ទៅហើយ ដែលដោះធុរៈ**ចូឆូ**គ្រានេះក៏គឺ**ខៅធូ**នោះឯង។ ឯ**ខៅធូ**នោះជាមនុស្សមានកម្លាំងនិងថ្វីដៃពូកែជាងទាហានទាំងពួង ប្រៀបបីដូចខ្លាសាហាវ បើចៅបានទៅប្រទះនឹងវាតច្បាំងគ្នា កុំគប្បីធ្វេសប្រហែស ចូររវាំងការពារខ្លួនឲ្យមាំមួន។

**ម៉ាឈៀវ**ថា **ខៅធូ**ម្នាក់នោះខ្ញុំបាទបានឮល្បីឈ្មោះមកយូរហើយ ទើបនឹងបានឃើញរូបក្នុងគ្រានេះ។

**ហាន់ស៊ុយ**ថា ឥឡូវ**ចូឆូ**រត់ឆ្លងត្រើយទៅនៅក្នុងបន្ទាយអ៊ុយហោហើយ ខ្ញុំគិតថានឹងលើកទ័ពទៅច្បាំងកុំឲ្យវាតាំងខ្លួនជាមុនបាន បើបង្អង់ឲ្យយូរឲ្យ**ចូឆូ**តាំងបន្ទាយជាមាំបានហើយ មុខជាយើងនឹងធ្វើការលំបាក ចៅនៅឯក្រោយចូររវាំងរក្សាបន្ទាយនិងផ្លូវក្រោយឲ្យមាំមួន ខ្លាច**ចូឆូ**នឹងលើកទាហានព័ទ្ធមកកាត់ស្បៀងរបស់យើង។ **ម៉ាឈៀវ**បានស្តាប់ដូច្នោះ ក៏យល់ឃើញត្រូវ ទើបឆ្លើយថា គំនិតដែលបិតាគិតនេះប្រពៃណាស់ នឹងលើកទៅក៏ទៅចុះ អំពីបន្ទាយនិងផ្លូវខាងក្រោយនោះ ជាភ្នាក់ងារខ្ញុំបាទនឹងរក្សារការពារមិនឲ្យអន្តរាយ ប្រសិនបើ**ចូឆូ**នឹងលើកឆ្លងមកត្រើយខាងនេះ ខ្ញុំបាទនឹងលើកទាហានទៅស្កាត់រាំងមិនឲ្យវាឆ្លងមកបាន។ ហើយ**ម៉ាឈៀវ**ក៏ចាត់ឲ្យ**បាំងតេក** ឃុំទាហានប្រាំម៉ឺនជាទ័ពមុខទៅជាមួយនឹង**ហាន់ស៊ុយ**ៗក៏លើកទ័ពឆ្លងទៅបន្ទាយអ៊ុយហោ។

**ចូឆូ**ដឹងថា កងទ័ព**ម៉ាឈៀវ**លើកមកដូច្នោះ ក៏ចាត់ឲ្យមនុស្សចាស់ៗចេញរក្សាស្នាមភ្លោះនៅក្រៅបន្ទាយ ក៏លើកទ័ពចូលទៅវាយ ទាហានដែលរក្សាស្នាមភ្លោះនៅនោះ ក៏ធ្វើជាថយរត់ឲ្យដេញឆ្លងគូចូលមកឲ្យបាន ហើយបង្គាប់ទាហានធូឲ្យត្រៀមខ្លួននៅក្នុងបន្ទាយ។

លុះ**ហាន់ស៊ុយ**លើកទ័ពទៅដល់ **បាំងតេង**ឃើញទាហាន**ចូឆូ**រក្សាបន្ទាយនោះស្តើងស្តួចណាស់ ក៏លើកទ័ពចូលទៅវាយ ទាហានដែលរក្សាស្នាមភ្លោះនៅនោះ ក៏ធ្វើជាថយរត់ឲ្យដេញ **បាំងតេក**និងទាហានឃើញបានការ ក៏ដេញសង្កុញចូលទៅធ្លាក់ចុះក្នុងគូ។ **ចូឆូ**ឲ្យ**ចោហង**លើកទាហានព័ទ្ធដេញកាប់សម្លាប់ទាហាន**បាំងតេក**ស្លាប់ក្នុងគូប្រហែលម្ភៃប្លាយ ស្លាប់ទាំង**ទៀវហ្វ៊ូ**, **ថេនងិន**ជានាយទាហាន ឯខ្លួន

**បាំងតេក**ពាក់ក្រោះដែកទើបមិនអន្តរាយ លោតឡើងលើមាត់គូបាន ឃើញ**ចោរអេង**ជិះសេះកាន់លំពែង **បាំងតេក**ក៏ស្ទុះតម្រង់ទៅយកដាវកាប់**ចោរអេង**ធ្លាក់ពីលើសេះស្លាប់ ហើយក៏លោតឡើងខ្នងសេះនាំ**ហាន់ស៊ុយ**និងទាហានទាំងពួងកាប់ទម្លាយចេញពីក្នុងចំណោមទ័ពត្រឡប់ទៅបន្ទាយតុងគួនវិញ **ចូឆ្វ**ក៏លើកទ័ពដេញតាមទៅ។

ឯ**ម៉ាឈៀវ**ចាំមើលផ្លូវ**ហាន់ស៊ុយ**ឃើញយូរហួសកំណត់ ខ្លាចក្រែង**ហាន់ស៊ុយ**ថ្លោះការក៏លើកទាហានឆ្លងទៅតាម លុះទៅដល់មាត់ស្ទឹងឃើញ**ចូឆ្វ**ដេញ**ហាន់ស៊ុយ**មកក៏លើកទាហានចូលទៅជួយនាំយកខ្លួន**ហាន់ស៊ុយ**និង**បាំងតេក** ចុះទូកឆ្លងមកបន្ទាយតុងគួន។ **ម៉ាឈៀវ**និយាយនឹង**ហាន់ស៊ុយ**ថា **ចូឆ្វ**មានប្រាជ្ញាជ្រៅទូលាយណាស់ បើនឹងស្ងៀមទុកឲ្យយូរទៅឃើញថានឹងធ្វើការលំបាក ត្រូវតែយើងលើកទាហានយ៉ាងប្រញាប់ ទៅប្លន់បន្ទាយ**ចូឆ្វ**ឲ្យបានក្នុងយប់នេះទើបត្រូវ។ **ហាន់ស៊ុយ**ក៏យល់ផង ទើបរៀបចាត់ចែងទាហានឲ្យ**ម៉ាឈៀវ**ឃុំនាំទាហានជាទ័ពមុខ **បាំងតេក**និង**ម៉ាតាយ**ជាខាងក្រោយ ខ្លួន**ហាន់ស៊ុយ**ឃុំទាហានប្រាំកងជាសារវ័ត្រមើលខុសត្រូវ ស្រូតលើកឆ្លងទៅត្រើយនាយទាំងកណ្ដាលថ្ងៃ លុះដល់ច្រាំងហើយក៏ឲ្យទាហានឡើងបង្កប់ពួនព្រមគ្នាទៅក្នុងព្រៃ ចាំដល់ពេលយប់នឹងលើកចូលទៅប្លន់បន្ទាយ**ចូឆ្វ**។

ឯ**ចូឆ្វ**កាលបើមានជ័យជម្នះលើ**ហាន់ស៊ុយ**ហើយ ក៏លើកទ័ពត្រឡប់ទៅបន្ទាយហើយហៅ**ខៅធូ**មកបង្គាប់ថា **ម៉ាឈៀវ**វាមកធ្វើអង់អាចប៉ានច្បាំងនឹងយើងវេលានេះព្រោះវាមិនឲ្យយើងតាំងខ្លួនជាប់ ក្នុងថ្ងៃនេះវាចាញ់ប្រៀបយើងហើយ គង់វានឹងមានចិត្តឈឺក្ដៅ វិលមកប្លន់បន្ទាយយើងវិញក្នុងពេលយប់នេះមិនខាន ខ្លួនអ្នកឯងត្រូវចាត់ចែងទាហានចេញទៅពួនបង្កប់រាយគ្នាខាងក្រៅបន្ទាយ បើដល់ពេលយប់ហើយ **ម៉ាឈៀវ**លើកមកប្លន់បន្ទាយ យើងត្រូវអុជផាវជាសញ្ញាឡើង ហើយឲ្យ

ទាហានដែលបង្កប់នោះ ចេញមកព័ទ្ធខ្ទប់ប្រសព្វគ្នាពីមុខពីក្រោយចូលមក គង់តែយើងនឹងមានជ័យជម្នះចាប់យកខ្លួន**ម៉ាឈៀវ**ឲ្យបានជាប្រាកដ។ **ខៅធូ**ទទួលបង្គាប់ ហើយក៏ចេញទៅចាត់ចែងការទុកព្រមតាម**ចូឆ្វូ**បង្គាប់នោះគ្រប់ប្រការ។

លុះដល់ពេលយប់ក្នុងថ្ងៃនោះ **ម៉ាឈៀវ**ក៏ចាត់ប្រើ**សេងងី**និងទាហានបីពាន់ លបចូលទៅល្បាតស៊ើបការណ៍ឯបន្ទាយ**ចូឆ្វូ** តើនឹងត្រួតត្រៀមបម្រុងការទុកដូចម្តេចខ្លះ។ ឯ**ម៉ាឈៀវ** និង**បាំងតេក**ក៏លើកទាហានទៅជាក្រោយនោះ **សេងងី**និងទាហានបីពាន់ បានទៅដល់បន្ទាយ**ចូឆ្វូ**ហើយ ក៏ឃើញស្ងាត់ច្រៀបមិនឃើញទាហានត្រៀមបម្រុងការដូចធម្មតា ក៏មានអំណរណាស់ ទើបនាំទាហានសេះសាមសិបឆ្លងស្នាមភ្លោះចូលទៅ។ **ចូឆ្វូ**ឃើញដូច្នោះក៏ឲ្យអុជផាវជាសញ្ញាឡើង នោះពួកទាហានដែលបង្កប់ក្រៅបន្ទាយ ក៏ស្ទុះស្រចេញមកពីក្នុងព្រៃជុំវិញបន្ទាយ **ម៉ាអៀន**ក៏ឡើងសេះកាន់លំពែងចាក់**សេងងី**ធ្លាក់ពីលើសេះស្លាប់ ហើយក៏ដេញកាប់ទាហាន**សេងងី**បែកខ្ចាត់ខ្ចាយជាជ្រួលច្របល់ **ម៉ាឈៀវ**និង**បាំងតេក**ដែលលើកតាមទៅពីក្រោយដឹងដូច្នោះ ក៏រំសាយញែកគ្នាជាបីកង តាំងតែកាប់ពុះពារទម្លាយទាហាន**ចូឆ្វូ**ចូលទៅជួយគ្នា នោះបណ្តាទាហានកងទ័ពទាំងសងខាងក៏ប្រឡូកកាប់ជាប់ដៃគ្នាទៅវិញទៅមក ទាំងសងខាងក៏ស្មើកម្លាំងគ្នាហើយថយរាចូលបន្ទាយវិញ។

**ម៉ាឈៀវ**ចាត់ទាហានឲ្យចេញទៅប្លន់បន្ទាយ**ចូឆ្វូ**តែរាល់ថ្ងៃ **ចូឆ្វូ**ក៏ចាត់ការត្រួតត្រាបន្ទាយដែលតាំងនៅក្បែរស្ទឹងអ៊ុយហោនោះមាំមួនណាស់ ហើយឲ្យធ្វើស្ពានឆ្លងស្ទឹងនោះនឹងបានទៅមកជួយគ្នាដល់បន្ទាយ**ចោយិន** ឯ**ម៉ាឈៀវ**ដឹងការណ៍ដូច្នោះ ក៏បង្គាប់ទាហានឲ្យមានភ្លើងគប់គ្រប់គ្នា រហូតដល់ទៅដល់ទាហាន**ហាន់ស៊ុយ** ហើយលើកចូលវាយបន្ទាយ**ចូឆ្វូ**យកភ្លើងដុតបន្ទាយនោះឆេះគ្រប់ទិស កងទ័ព**ចូឆ្វូ**តទល់ពុំឈ្នះ ក៏បែកបាក់ព្រាត់ព្រាយរត់ចេញអស់ពីក្នុងបន្ទាយទៅទិសផ្សេងៗ។

**ម៉ាឈៀវ**, **ហាន់ស៊ុយ**ក៏ចាត់ទាហានឲ្យកធ្វើជាបន្ទាយយ៉ាងមាំ ត្រង់ទីបន្ទាយចាស់**ចូឆ្វូ**នោះ **ចូឆ្វូ**បែកទ័ពថយទៅពីនោះចម្ងាយប្រហែលហាសិបសិន (២គ.ម) ឃើញ**ម៉ាឈៀវ**ឲ្យតាំងបន្ទាយត្រង់ទីចាស់របស់ខ្លួនដូច្នោះ លុះនឹងតាំងបន្ទាយទទួលរងក៏មិនទាន់ការ ទើបឲ្យទាហានជីកដីយកមកបូកជាប់គ្នាជាដុំៗ ហើយរៀបឡើងជាស្នាមភ្លើងនៅក្នុងទីនោះ។

មានបម្រើសេះចូលទៅជម្រាប**ម៉ាឈៀវ**ថា បានឃើញ**ចូឆ្វូ**ឲ្យរៀបធ្វើស្នាមភ្លោះ **ម៉ាឈៀវ**បានឮដូច្នោះ ក៏ឃុំនាំទាហានទៅដល់មុខស្នាមភ្លោះបន្ទាយ**ចូឆ្វូ** ៗដឹងដូច្នោះ ក៏ឡើងសេះចេញទៅឈរនៅមុខបន្ទាយជាមួយនឹង**ខៅធូ** ហើយស្រែកប្រាប់ទៅទាហាន**ម៉ាឈៀវ**ថា ឲ្យប្រាប់នាយឯងថា យើងចេញមកចាំនៅទីនេះតែម្នាក់ឯងទេ ឲ្យ**ម៉ាឈៀវ**ចេញមកយើងនឹងចរចាផង **ម៉ាឈៀវ**បានឮ**ចូឆ្វូ**ស្រែកមកដូច្នោះ ក៏បរសេះចេញមកឈរនៅត្រង់មុខ**ចូឆ្វូ** ៗក៏ស្រែកថា អ្នកឯងឃើញថ្វីដៃយើងឬទេ? អ្នកឯងគិតថាដុតបន្ទាយយើងចេញមុខជារកបន្ទាយនៅទៀតគ្មានទេឬ? យើងគ្រាន់តែធ្វើមួយស្របក់ក៏កើតជាបន្ទាយបានដូចទេពតាមកនិម្មិតឲ្យ អ្នកឯងនឹងតស៊ូនោះកាលណានឹងមានជ័យជម្នះយើងបាន ត្រូវគំនាប់ចុះចាញ់ឲ្យហើយទៅវិញជាជាង។

**ម៉ាឈៀវ**ឈ្មួលក្នុងចិត្តខ្លាំងណាស់ ក៏បរសេះសម្រុកចូលទៅនឹងចាប់យកខ្លួន**ចូឆ្វូ** ទទួលក្រឡេកឃើញ**ខៅធូ**កាន់លំពែងសម្លក់ភ្នែកក្រឡោតនៅពីក្រោយ**ចូឆ្វូ** ក៏នឹកខ្លាចទាញសេះឈប់គិតថា ទាហាននេះហើយឬដែលឈ្មោះថា**ខៅធូ**នោះ ឮល្បីថ្វីដៃខ្លាំងពូកែណាស់ ឬក៏មិនមែនទេឬ? ទើបស្រែកសួរថា ទាហានខ្លារបស់លោកឈ្មោះអ្វី? នៅទីឯណាខ្លះ? **ខៅធូ**ឮដូច្នោះក៏បរសេះចេញមកខាងមុខហើយស្រែកថា ខ្លួនយើងនេះហើយជាទាហានខ្លាឈ្មោះ**ខៅធូ** អ្នកឯងនឹងចង់ធ្វើយើងយ៉ាងម៉េច?

**ម៉ាឈៀវ**ក្រឡេកឃើញរូប**ខៅធូ**បែបទ្រនង់អង់អាច គួរឲ្យញញើតខ្លាចមែន ក៏មិនបានតបថាប្រការម្ដេច ទាញសេះត្រឡប់ចូលបន្ទាយ។

**ចូឆ្វ**ក៏ត្រឡប់ចូលបន្ទាយ ហើយនិយាយនឹង**ខៅធូ**ថា **ម៉ាឈៀវ**នេះដឹងថាអ្នកជាទាហានខ្លា បានជាខ្លាចដៃអ្នក។ **ខៅធូ**ឆ្លើយថា ព្រឹកស្អែកនេះខ្ញុំបាទនឹងសុំយកអាសាចេញទៅតយុទ្ធគ្នានឹង**ម៉ាឈៀវ** ហើយនឹងចាប់យកខ្លួន**ម៉ាឈៀវ**ឲ្យបាន។ **ចូឆ្វ**ឆ្លើយថា ឯ**ម៉ាឈៀវ**នោះគេខ្លាំងពូកែណាស់ដែរ អ្នកកុំអាលមើលងាយប្រមាថឡើយ។ **ខៅធូ**ថា បើខ្ញុំបាទចាប់ខ្លួន**ម៉ាឈៀវ**មិនបានទេ ស៊ូតែស្លាប់កណ្ដាលរណរង្គសង្គ្រាម ហើយ**ខៅធូ**ក៏ឲ្យបម្រើកាន់សំបុត្រទៅដល់**ម៉ាឈៀវ**ទាំងកណ្ដាលយប់នោះថា ព្រឹកនេះឲ្យ**ម៉ាឈៀវ**ចេញមកច្បាំងនឹងយើងកុំខាន។ **ម៉ាឈៀវ**ឃើញសំបុត្រខឹងខ្លាំងណាស់ និយាយថា **ខៅធូ**នេះចរចាព្រហើនមើលងាយយើងពេកណាស់ ថ្វីដៃវាយ៉ាងណាទៅ វេលាព្រឹកនេះយើងនឹងលើកទាហានចេញទៅចាប់ខ្លួនវាឲ្យត្រាតែបាន។

លុះដល់ពេលព្រឹក **ខៅធូ** និង**ម៉ាឈៀវ**ក៏លើកទាហានចេញពីបន្ទាយរៀងខ្លួនកាលចេញទៅប្រទះមុខគ្នាហើយ **ម៉ាឈៀវ**ក៏បរសេះទៅបញ្ឈរពីមុខទាហានគ្រីលំពែងហើយស្រែកថា នរណាជាទាហានខ្លានោះ ឲ្យចេញខ្លួនមកល្បងថ្វីដៃគ្នា **ចូឆ្វ**បញ្ឈរសេះនៅមុខទាហាននិយាយថា **ម៉ាឈៀវ**នេះមានកម្លាំងច្រើនណាស់ប្រហែលគ្នានឹង**លីប៉ោ**។ **ចូឆ្វ**និយាយមិនទាន់ផុតមាត់ **ខៅធូ**ក៏បរសេះចូលទៅតយុទ្ធនឹង**ម៉ាឈៀវ** ៗនិង**ខៅធូ**តយុទ្ធគ្នាបានមួយរយភ្លែង មិនបានទន់ថយជាងគ្នាទាំងសងខាង តែសេះអស់កម្លាំង នាំគ្នាថយសម្រាកក្រោយទាហានហើយផ្លាស់យកសេះថ្មីនាំគ្នាចេញតយុទ្ធម្ដងទៀតបានដប់ភ្លែង។

កាល**ខៅធូ**ទៅច្បាំងនឹង**ម៉ាឈៀវ**ជាលើកទីពីរនោះ មានទោសោបណ្ដាលឡើងពេញខ្លួន ដោះក្រោះចេញអស់ពីខ្លួនប្រយុទ្ធគ្នា ពួកទាហានទាំងសងខាងឃើញនាយមានកម្លាំងស្មើគ្នា មិនមានទន់ខ្សោយជាងគ្នាដូច្នោះ ក៏នាំគ្នាស្រែកហ៊ោកញ្ជ្រៀវអឹងកងទាំងសងខាង ឯ**ម៉ាឈៀវ**និង**ខៅធូ**តស៊ូគ្នាទៀតបានសាមសិបភ្លែង **ខៅធូ**មានកំហឹងពេញកម្លាំងលើកដាវឡើងកាប់សំដៅខ្លួន**ម៉ាឈៀវ** ៗគេចខុសគាត់ទាត់ដោយចុងលំពែង ហើយចាក់តម្រង់ដើមទ្រូង**ខៅធូ** ៗចោលដាវចេញពីដៃចាប់កន្ត្រាក់យកលំពែងពី**ម៉ាឈៀវ** ៗនិង**ខៅធូ**ក៏ដណ្ដើមលំពែងគ្នាទាល់តែបាក់ជាពីរកំណាត់ ក៏វាយគ្នាជាប់ទៅវិញទៅមកលើខ្នងសេះ។ **ចូឆូ**ឃើញដូច្នោះខ្លាចក្រែង**ខៅធូ**ថ្លោះការនឹង**ម៉ាឈៀវ** ក៏ប្រើ**ម៉ាអៀន, ចោហង** ពីរនាយជិះសេះចូលទៅជួយ**ខៅធូ**។

**បាំងតេក**និង**ម៉ាតាយ**ឃើញដូច្នោះ ក៏បរសេះចូលទៅជួយ**ម៉ាឈៀវ** ទាហានទាំងសងខាងនេះក៏ប្រឡូកជាច្រឡំបល់ទៅវិញទៅមក ពួកទាហាន**ម៉ាឈៀវ** បាញ់ត្រូវខ្លួន**ខៅធូ**ជាប់ព្រួញពីរផ្លែ ទាហាន**ចូឆូ**ឃើញដូច្នោះក៏បាក់ទ័ពត្រឡប់ចូលបន្ទាយ **ម៉ាឈៀវ**បានការក៏បរពលចូលប្រកាប់ប្រចាក់ទៅក្បែរបន្ទាយ។ **ចូឆូ**ឲ្យបិទទ្វារបន្ទាយជិតមិនឲ្យចេញច្បាំង តាំងតែចាត់ការយាមល្បាតជាមាំមួន។ **ម៉ាឈៀវ**ក៏លើកទាហានចូលបន្ទាយវិញ ហើយនិយាយនឹង**ហាន់ស៊ុយ**ថា តាំងពីបានធ្វើការច្បាំងគ្នាមកដល់ថ្ងៃនេះ មិនដែលឃើញនរណាចូលច្បាំងចេញកម្លាំងទោសោ ទ្រនង់អង់អាចដូចជា**ខៅធូ**នេះគ្មាន កិរិយាវាដូចខ្លា សមដូចពាក្យដែលឮនោះមែន។

ខណៈនោះ **ចូឆូ**ឃើញថា **ម៉ាឈៀវ**ខ្លាំងពូកែណាស់ ទើបប្រើ**ស៊ីឡុង** និង**ជូឡេង**ឃុំទាហានលើកទៅតាំងបន្ទាយនៅត្រើយទិសខាងលិច ជាទ័ពសន្ទប់**ម៉ាឈៀវ**ទុក បើឡើងឈរនៅលើទីដ៏ខ្ពស់ ក្រឡេកទៅឃើញ**ម៉ាឈៀវ** និងទាហានសេះនៅមុខបន្ទាយប្រមាណបីរយ ទើបដោះមួកពីក្បាលបោះចោលទៅហើយថា **ម៉ាឈៀវ**នេះ

បើវាមិនស្តាប់នឹងដៃយើងទេ អំណើះតទៅមុខគង់វាធ្វើអន្តរាយដល់យើងវិញជាមិនខាន សពយើងនេះមិនដឹងជាកំណត់ថានឹងធ្លាក់ទៅនៅត្រង់ទីណា **ហែហ៊្សអៀន**បានឮ**ចូឆ្វ**ថាដូច្នោះ ក៏នឹកខឹងណាស់ឆ្លើយថា ខ្ញុំបាទនឹងអាសាចេញកម្ចាត់**ម៉ាឈៀវ**ចេញឲ្យបាន។ **ចូឆ្វ**ឃាត់ដូចម្តេចក៏មិនស្តាប់ ស្រាប់តែឡើងជិះសេះឃុំនាំទាហានចេញពីបន្ទាយទៅ។ **ចូឆ្វ**ឃើញ**ហែហ៊្សអៀន**កំពុងខឹងណាស់ ក្រែងថ្លោះការនឹង**ម៉ាឈៀវ** ក៏លើកទាហានតាមទៅពីក្រោយ។ **ម៉ាឈៀវ**ឃើញ**ហែហ៊្សអៀន**លើកទាហានចេញមកដូច្នោះ ក៏បរសេះចូលទៅនឹងតស៊ូគ្នានឹង**ហែហ៊្សអៀន** ទទួលក្រឡេកទៅឃើញកងទ័ពហ្លួងដោតមកជាសម្គាល់ ក៏ដឹងថា**ចូឆ្វ**ជាកងជូនលើកតាមមកទៀត។ **ម៉ាឈៀវ**ក៏មិនបានចូលតច្បាំងនឹង**ហែហ៊្សអៀន** ក៏លើកទាហានបរសេះគេចតម្រង់ទៅប៉ងនឹងចាប់ខ្លួន**ចូឆ្វ**វិញ។

**ចូឆ្វ**ក្រឡេកឃើញដូច្នោះ ក៏ភ័យស្លុតស្មារតី ទាញបង្ហៀរសេះរត់ត្រឡប់ទៅក្រោយ ទាហានទាំងពួងក៏បែកបាក់ព្រាត់ព្រាយគ្នា **ម៉ាឈៀវ**ឃើញបានការក៏ដេញទាហានចូលប្រកាប់ពីក្រោយ ស្រាប់តែមានទាហានម្នាក់មកប្រាប់ថា ឥឡូវ**ចូឆ្វ**ឲ្យទាហានលើកទៅតាំងបន្ទាយចាំខ្ទប់ពីក្រោយនៅត្រើយខាងលិច។ **ម៉ាឈៀវ**ឮដូច្នោះនឹងដេញឲ្យជ្រុលហួសទៅមិនបាន រវាំងក្រោយក៏ឲ្យនឹកក្រែងខ្លាច ទើបប្រមូលទាហានត្រឡប់ចូលបន្ទាយវិញ ហើយប្រឹក្សានឹង**ហាន់ស៊ុយ**ថា ឥឡូវ**ចូឆ្វ**ឲ្យទាហានលើកឆ្លងទៅត្រើយម្ខាង តាំងបន្ទាយសម្រាប់ចាំខ្ទប់ទ័ពយើង ៗនឹងច្បាំងទាំងសងខាងក៏ឃើញថាលើសកម្លាំងណាស់នឹងច្បាំងម្តេចបាន នឹងគិតកែខៃប្រការម្តេចឲ្យស្រួល។ **លីខាំ**ទាហាន**ហាន់ស៊ុយ**ឆ្លើយថា ដែល**ចូឆ្វ**ធ្វើអាការៈគ្រានេះឃើញសម្បើមខ្លាំងណាស់ សូមឲ្យលោកគិតរកឧបាយជាមេត្រីនឹងគ្នាវិញ កុំធ្វើសង្គ្រាមតទៅឡើយ

នាំគ្នាលើកត្រឡប់ទៅសិន បើហួសទេសកាលរងាវេលាណា សឹមគិតធ្វើការតទៅទៀត។

**ហាន់ស៊ុយ**ឮដូច្នោះ ក៏និយាយនឹង**ម៉ាឈៀវ**ថា ពាក្យដែល**លីខាំ**និយាយនេះក៏ឃើញថាជាការគួរស្តាប់ណាស់ ល្មមអ្នកនឹងអនុកូលតាមចុះ **ម៉ាឈៀវ**ក៏នៅស្ងៀម **អៀវឈីវ**, **ហៅឈួន**ទាហាន**ហាន់ស៊ុយ**ឆ្លើយថា ដែល**លីខាំ**និយាយនេះគួរណាស់ សូមឲ្យលោកធ្វើតាមចុះ **ហាន់ស៊ុយ**ក៏តែងជាសំបុត្រហើយឲ្យ**អៀវឈីវ**កាន់ចូលទៅក្នុងបន្ទាយ**ចូឆូ** សេចក្ដីថា យើងទាំងសងខាងនឹងច្បាំងគ្នាដូច្នេះមិនគួរទេ ព្រោះពេលនេះជាទេសកាលរងាណាស់ យើងទាំងសងខាងចូលជាមេត្រីនឹងគ្នា លើកទ័ពត្រឡប់ទៅវិញចុះ។

**ចូឆូ**ឃើញសេចក្ដីក្នុងសំបុត្រដូច្នោះ ក៏និយាយនឹង**អៀវឈីវ**ថា អ្នកចូរត្រឡប់ទៅបន្ទាយប្រាប់នាយរបស់អ្នកចុះថា ព្រឹកស្អែកយើងនឹងតបសំបុត្រទៅវិញ**អៀវឈីវ**ក៏លា**ចូឆូ**ទៅ។ ទីប្រឹក្សាទាំងពួងក៏សួរ**ចូឆូ**ថា ដែលមហាឧបរាជនឹងតបសំបុត្រទៅវិញនោះនឹងនិយាយដូចម្ដេច? **ចូឆូ**ឆ្លើយថា ដែលយើងនិយាយនេះ ជាឧបាយក្លែងទទួលពាក្យតែមាត់ក្រៅទេ។ លុះព្រឹកឡើងទើបប្រើបម្រើកាន់សំបុត្រចូលទៅក្នុងបន្ទាយ**ហាន់ស៊ុយ** សេចក្ដីថា ដែលអ្នកនិងយើងមិនបានធ្វើសង្គ្រាមនឹងគ្នាតទៅនោះ យើងក៏ត្រូវចិត្តណាស់ វេលានេះយើងនឹងរៀបលើកទ័ពត្រឡប់ទៅវិញជាឆាប់ពុំទាន់ត្រូវបង្អង់បន្តិចទៅសិន រួច**ចូឆូ**ក៏ប្រើមនុស្សឲ្យធ្វើស្ពានបែបដូចជានឹងនាំពលឆ្លងទៅ ប្រាថ្នានឹងឲ្យ**ម៉ាឈៀវ**និង**ហាន់ស៊ុយ**ជឿចិត្ត។

ឯ**ម៉ាឈៀវ** លុះឃើញសេចក្ដីសំបុត្រដូច្នោះ ក៏និយាយនឹង**ហាន់ស៊ុយ**ថា ដែល**ចូឆូ**ឲ្យមានសំបុត្រទទួលពាក្យដូច្នោះក៏មែនហើយ តែថាយើងនឹងជឿទុកចិត្តជាប្រាកដមិនបាន ក្រែងវាបញ្ឆោតយើង សូមលោកចាត់ការឲ្យត្រៀមពលយោធាទុក

សម្រាប់តទល់នឹងទ័ពមុខ**ចូឆ្ន** ខ្ញុំបាទនឹងចាត់ចែងទាហានទុកទទួលទ័ពបញ្ចោតខ្នប់ពីក្រោយ។ **ហាន់ស៊ុយ**យល់ឃើញត្រូវ ក៏ត្រួតត្រៀមពលទាហានទាំងពួងតាមពាក្យ **ម៉ាឈៀវ**។

**ចូឆ្ន**ដឹងថា **ហាន់ស៊ុយ**រក្សានាទីខាងគយមុខ **ចូឆ្ន**អរណាស់និយាយថា ត្រូវនឹងឧបាយយើង ការណ៍របស់យើងនឹងសម្រេចជាប្រាកដ លុះព្រឹកឡើង**ចូឆ្ន**ក៏ឃុំទាហានចេញទៅក្រៅបន្ទាយ ខាងទាហាន**ហាន់ស៊ុយ**ឃើញ**ចូឆ្ន**លើកចេញមកក៏គិតថា **ចូឆ្ន**នឹងលើកទ័ពទៅ មិនធ្លាប់ឃើញរូប**ចូឆ្ន** ពួកទាហានទាំងអស់នោះក៏ប្រជ្រៀតគ្នាចេញទៅមើលក្រៅបន្ទាយ ស្រែកប្រាប់គ្នាថា មកមើល**ចូឆ្ន**រើយគ្នាយើង។ **ចូឆ្ន**បរសេះទៅមុខទាហាន ហើយស្រែកថា អញមានភ្នែកពីរ មាត់មួយ ច្រមុះមួយ ដូចខ្លួនរាល់គ្នាដូច្នោះដែរ មិនមែនមាត់ពីរភ្នែកបួនទេ តែថាប្លែកបន្តិចដោយមានអំណាចច្រើន គឺជាមនុស្សដែលមានប្រាជ្ញា និងសេចក្ដីគិត នរណាចង់មកមើលក៏មើលចុះ។ ទាហាន**ហាន់ស៊ុយ**ឮដូច្នោះក៏ភិតភ័យឈរមើលភ្លេចខ្លួន ទើប**ចូឆ្ន**ប្រើទាហានឲ្យទៅប្រាប់**ហាន់ស៊ុយ**ថា មហាឧបរាជឲ្យអញ្ជើញអ្នកចេញទៅសន្ទនាគ្នា។

**ហាន់ស៊ុយ**ឮដូច្នោះក៏បរសេះចេញមកក្រៅបន្ទាយ **ចូឆ្ន**ឃើញ**ហាន់ស៊ុយ**ចេញមកក៏ដោះក្រោះចេញ ពាក់តែអាវតាមធម្មតាបរសេះចូលទៅទឹមគ្នានឹងសេះ**ហាន់ស៊ុយ**តែមួយនឹងមួយ ក៏គំនាប់គ្នាទៅវិញទៅមក **ចូឆ្ន**និយាយថា ខ្លួនអ្នកនិងខ្ញុំក៏មិនមែនដទៃ បិតារបស់អ្នកខ្ញុំក៏បានគំនាប់រាប់អានជាមា ខ្លួនយើងទាំងពីរកាលនៅពីកំឡោះក៏ជានាហ្មឺនធ្វើរាជការជាមួយគ្នា ជាមនុស្សត្រូវអធ្យាស្រ័យគ្នា ឥឡូវយើងបែកចាកគ្នាមកយូរហើយ ទើបនឹងប្រទះគ្នាគ្រានេះ អាយុអ្នកបានប៉ុន្មានហើយ? **ហាន់ស៊ុយ**ឆ្លើយថា អាយុខ្ញុំបានសែសិបឆ្នាំហើយ។

**ចូឆ្វ**ក៏ធ្វើជាយកដៃអង្អែលទ្រូងហើយថា យើងធ្វើរាជការជាមួយគ្នាក្នុងស្រុកក្រុងភ្លាមៗសោះ លោតែឃ្លាតចាកគ្នាមកដូច្នេះ ដូចជាមិនបានយូរប៉ុន្មានអាយុកន្លងទៅដល់ប៉ុណ្ណោះហើយ កាលណាស្រុកយើងនឹងរាបទាបជាប្រក្រតី យើងទាំងពីរនឹងបាននៅជាសុខជាមួយគ្នាទៀត។ **ហាន់ស៊ុយ**និង**ចូឆ្វ**និយាយគ្នាក្នុងថ្ងៃនោះ នឹងបានប្រារព្ធពីកិច្ចការសង្គ្រាមក៏ទេសោះ អ្នកទាំងពីរក៏នាំគ្នាសើចរួសរាយជាមួយគ្នា លុះដល់រសៀលម៉ោងមួយហើយក៏គំនាប់លាគ្នា។ ទាហានម្នាក់ក៏ចូលទៅប្រាប់**ម៉ាឈៀវ**ថា ឥឡូវ**ហាន់ស៊ុយ**ចេញទៅនិយាយនឹង**ចូឆ្វ**យូរណាស់ នឹងនិយាយពីកិច្ចការអ្វីក៏មិនយល់ច្បាស់។

**ម៉ាឈៀវ** ឮដូច្នោះក៏ទៅសួរ**ហាន់ស៊ុយ**ថា លោកចេញទៅនិយាយអ្វីនឹង**ចូឆ្វ**កណ្ដាលទីសង្គ្រាមក្នុងថ្ងៃនេះ? **ហាន់ស៊ុយ**ឆ្លើយថា និយាយរំឭកដល់រឿងពីដើមដែលធ្លាប់ជួបធ្វើរាជការជាមួយគ្នា។ **ម៉ាឈៀវ**សួរថា លោកមិនបានចរចាដោយកិច្ចការសង្គ្រាមទេឬ? **ហាន់ស៊ុយ**ថា **ចូឆ្វ**មិនបានចរចាទេ ខ្ញុំឯងក៏មិនបាននិយាយដែរ។ **ម៉ាឈៀវ**មានសេចក្ដីសង្ស័យនៅតែស្ងៀម មិនបាននិយាយថាប្រការម្ដេច ក៏ត្រឡប់ទៅវិញ។

កាល**ចូឆ្វ**ត្រឡប់ទៅដល់បន្ទាយ ក៏សួរ**កាសៀង**ថា ពីព្រឹកមិញយើងចេញទៅនិយាយការនឹង**ហាន់ស៊ុយ**នោះ អ្នកដឹងយល់ឡែបខាយរបស់យើងប្រការម្ដេចខ្លះឬទេ? **កាសៀង**ថា ឡែបខាយលោកដែលចេញទៅនិយាយនឹង**ហាន់ស៊ុយ**នោះ ជាសេចក្ដីសំខាន់ល្អណាស់ តែថា**ម៉ាឈៀវ**និង**ហាន់ស៊ុយ**នៅមិនទាន់មានសេចក្ដីសង្ស័យអ្វីនឹងគ្នាទេ ខ្ញុំបាទគិតថា បើជាធ្វើកលមួយយ៉ាងទៀត ប្រហែលជាកើតសង្ស័យនឹងគ្នាមិនខាន។

**ចូឆ្វ**សួរថា គំនិតរបស់អ្នកឯងនឹងគិតធ្វើប្រការម្តេច? **កាសៀង**ថា ខ្ញុំបាទគិតនឹងឲ្យយកក្រដាសទទេច្រកក្នុងស្រោម ហើយសរសេរការខ្ចងជាអក្សរបែបលុបកុំឲ្យមើលឃើញតួងអក្សរច្បាស់ ឲ្យបម្រើម្នាក់កាន់យកទៅឲ្យ**ហាន់ស៊ុយ** ហើយឲ្យធ្វើជាថា នេះជាសំបុត្រជាការសម្ងាត់ បើ**ម៉ាឈៀវ**ដឹងគង់នឹងទៅមើល កាលណាហែកស្រោមយកមក ឃើញតែក្រដាសទទេក៏គង់នឹងសង្ស័យថា **ហាន់ស៊ុយ**លាក់សំបុត្រនោះ ហើយយកតែស្រោមនិងក្រដាសទទេមកក្លែងឲ្យមើល មុខជា**ម៉ាឈៀវ**និង**ហាន់ស៊ុយ**គង់នឹងមន្ទិលចិត្តគិតសង្ស័យនឹងគ្នាមិនខាន រួចអំពីនោះ សឹមយើងគិតប្រើមនុស្ស ឲ្យទៅចរចាបញ្ចុះបញ្ចូលយកខ្លួន**ហាន់ស៊ុយ**មកទុកជាពួកយើងវិញ មុខជានឹងកម្ចាត់**ម៉ាឈៀវ**បានដោយងាយ។

**ចូឆ្វ**ស្តាប់យល់ត្រូវណាស់ ក៏យកក្រដាសមកច្រកស្រោម ហើយការខ្ចងតាមសម្តី**កាសៀង** ឲ្យបម្រើម្នាក់កាន់យកទៅឲ្យ**ហាន់ស៊ុយ**ក្នុងបន្ទាយ។ លុះ**ម៉ាឈៀវ**ដឹងទើបទៅសួរ**ហាន់ស៊ុយ**ថា **ចូឆ្វ**ឲ្យសំបុត្រមកនិយាយការអ្វីខ្លះ? **ហាន់ស៊ុយ**ក៏ហុចសំបុត្រនោះទៅឲ្យ**ម៉ាឈៀវ**មើល។ **ម៉ាឈៀវ**ហែកស្រោមឃើញតែក្រដាសទទេគ្មានអក្សរ ក៏សួរថា ហេតុម្តេចបានជាគ្មានអក្សរ លោកយកសំបុត្រទៅលាក់ទុកឯណា? **ហាន់ស៊ុយ**ឆ្លើយប្រាប់ថា សំបុត្រ**ចូឆ្វ**ឲ្យមកយ៉ាងនោះឯង យើងមិនទាន់ហែកស្រោមមើល ទទួលអ្នកមកដល់ ដែលមិនមានអក្សរយ៉ាងនេះប្រហែល**ចូឆ្វ**ច្រឡំចោលសំបុត្រនោះទុកឯណា ហើយយកក្រដាសទទេដាក់ជាជំនួសមកវិញ។

**ម៉ាឈៀវ**ថា លោកនិយាយយ៉ាងនេះ ខ្ញុំមិនឃើញសមសេចក្តីសោះ ព្រោះ**ចូឆ្វ**ជាមនុស្សមានតម្រិះប្រាជ្ញាមាំមួនណាស់ ដែលនឹងភ្លេចសំបុត្រនោះមិនមែនទេ ប្រហែលលោកចូលគំនិតទៅខាង**ចូឆ្វ**គិតនឹងប្រទូសរ៉ាយខ្ញុំវិញទេដឹង បានជាឲ្យសំបុត្រសម្ងាត់ទៅមករកគ្នាមិនឲ្យខ្ញុំឃើញផង ហើយក្លែងយកក្រដាសទទេមកឲ្យខ្ញុំ

មើល។ **ហាន់ស៊ុយ**ថា យើងមានសេចក្ដីត្រង់សុចរិតណាស់ បើអ្នកនៅឆ្ងល់សង្ស័យនឹងយើងដូច្នេះ ពេលព្រឹកស្អែកយើងនឹងចេញទៅនិយាយនឹង**ចូឆ្ងូ** ឲ្យអ្នកចាំមើលចុះនឹងឃើញពិរុទ្ធយ៉ាងម្ដេច ឲ្យយកលំពែងចាក់យើងឲ្យធ្លាក់ពីលើសេះស្លាប់ចុះ។ **ម៉ាឈៀវ**ថា បើលោកសត្យត្រង់ធ្វើបានដូចថាមែន ខ្ញុំក៏អស់សង្ស័យ។

លុះពេលព្រឹកឡើង **ហាន់ស៊ុយ**ក៏នាំ**ហៅឈួន, លីខាំ, លៀងហេង, ម៉ាអ៊ួន, អៀវឈីវ** មានទាហានប្រាំនាក់នេះចេញពីបន្ទាយ **ហាន់ស៊ុយ**ប្រើទាហានចូលទៅហៅ**ចូឆ្ងូ**ដល់មុខបន្ទាយថា **ហាន់ស៊ុយ**ឲ្យអញ្ជើញលោកទៅចរចាគ្នានៅទីកណ្ដាលប្រជុំជន។ **ចូឆ្ងូ**ឮដូច្នោះ ក៏ឲ្យ**ចោហង**នាំទាហានសេះសាមសិបចេញទៅគំនាប់ហើយប្រាប់ថា មហាឧបរាជឲ្យកំជាប់លោកថា សំបុត្រដែលឲ្យមកនោះ កុំឲ្យលោកបង្ហាញនរណាឲ្យដឹងខ្ចរខ្ចាយទៅឡើយក្រែងខូចការណ៍ដែលគិត។ **ចោហង**ប្រាប់ដូច្នោះហើយ ក៏ត្រឡប់ចូលទៅក្នុងបន្ទាយវិញ។ **ម៉ាឈៀវ**ឮដូច្នោះក៏ច្រឡោតខឹង ទើបបរសេះវាំលំពែងចេញទៅនឹងចាក់**ហាន់ស៊ុយ**។ ទាហាន**ហាន់ស៊ុយ**ជួយការពារបាន ហើយនាំ**ហាន់ស៊ុយ**រត់ចូលបន្ទាយ។ **ហាន់ស៊ុយ**ក៏ស្រែកឲ្យ**ម៉ាឈៀវ**ថាក្មួយអើយអ្នកកុំបីឆ្ងល់សង្ស័យ ដែលយើងនឹងគិតប្រទូសរ៉ាយនឹងអ្នកនោះមិនមែនទេ។ **ម៉ាឈៀវ**ខឹងខ្លាំងណាស់មិនបានជឿសោះ ក៏បរសេះតម្រង់ចូលទៅក្នុងបន្ទាយ។

ឯ**ហាន់ស៊ុយ** ក៏ប្រឹក្សានឹងបណ្ដាពួកទាហានទាំងប្រាំនាក់ថា ឥឡូវនេះ**ម៉ាឈៀវ**មានសេចក្ដីសន្និះសង្ស័យថា យើងត្រឡប់ចូលទៅខាង**ចូឆ្ងូ** តើយើងនឹងគិតប្រការម្ដេចទើបបានឲ្យគេអស់សង្ស័យ? **អៀវឈីវ**ឆ្លើយថា ធម្មតាជាមនុស្សមិនបានគិតខ្លាចអ្នកធំ ព្រហើនកាន់ខ្លួនព្រោះមានថ្វីដៃ ប្រមាថមើលងាយលោកណាស់ បើនឹងធ្វើការតទៅកាលណាឡើយនឹងឈ្នះ**ចូឆ្ងូ** ត្រូវការអ្វីដែលលោកនឹងទៅចំណុះកូនក្មេង យើងនឹងត្រឡប់ចូលទៅខាង**ចូឆ្ងូ**វិញល្អជាង ទោះបីយ៉ាងណាក៏គង់នឹងទំនុក

បម្រុងលោកឲ្យឡើងយសសក្តាបណ្តាស័ក្តិទៅខាងមុខ។ **ហាន់ស៊ុយ**ថា ខ្លួនយើងនិង**ម៉ាថេង**អាពុក**ម៉ាឈៀវ**ជាមិត្តសម្លាញ់នឹងគ្នាមកពីដើម ដែលនឹងចោលសេចក្តីសត្យសុចរិត ត្រឡប់ចូលទៅខាង**ចូឆ្វូ**មកធ្វើប្រទូសរ៉ាយ**ម៉ាឈៀវ**ជាកូនរបស់មិត្តសម្លាញ់វិញនោះមិនគួរសោះ។ **អៀវឈីវ**ថា លោកខ្លាចក្រែងខូចសេចក្តីសត្យដូច្នោះក៏គួរហើយ តែថាគ្រានេះនឹងកើតចលាចលដល់ខ្លួនហើយ នឹងមិនធ្វើក៏ត្រូវតែធ្វើ។

**ហាន់ស៊ុយ**យល់ឃើញត្រូវផង ទើបនិយាយថា បើដូច្នោះនរណានឹងអាចនាំយកសេចក្តីនេះទៅពន្យល់**ចូឆ្វូ**ឲ្យដឹងបាន? **អៀវឈីវ**ឆ្លើយថា ខ្ញុំបាទនឹងសុំអាសាទៅផង។ **ហាន់ស៊ុយ**ក៏តែងសំបុត្រមួយច្បាប់ថា “ខ្ញុំបាទ**ហាន់ស៊ុយ** សុំគំនាប់មកដល់មហាឧបរាជ ព្រោះខ្ញុំបាទបានប្រមាថលើកទាហានជាក្បួនទ័ពមកតច្បាំងនឹងលោកនោះព្រោះគិតស្រាលសេចក្តី មិនបានពិនិត្យពិចារណាឲ្យឃើញខុសត្រូវ ឥឡូវខ្ញុំបាទឃើញទោសខ្លួនហើយ ក៏លះបង់មិនគិតនឹងធ្វើសេចក្តីប្រទូសរ៉ាយដល់លោកតទៅទៀត ទើបចូលមកសូមលន់តួទោស សូមគំនាប់លោកតាមប្រពៃណី សូមឲ្យលោកអត់ឱននូវទោសឲ្យខ្ញុំបាទចុះ” លុះតែងសំបុត្ររួចហើយ ក៏ឲ្យ**អៀវឈីវ**កាន់យកទៅជូន**ចូឆ្វូ** ៗដឹងក្នុងសំបុត្រដូច្នោះ ក៏សោមនស្សត្រេកអរណាស់ថា **ហាន់ស៊ុយ**មានសេចក្តីភក្តីដល់យើងហើយ បើសម្រេចហើយយើងនឹងតាំងឲ្យធ្វើជាចៅហ្វាយស្រុក**សែលៀង** ខ្លួនអ្នកឯងនឹងធ្វើជាបាឡាត់ ពួកទាហានជាកំជាប់មកយើងនឹងតាំងជប់លៀងតាមតូច ធំ អ្នកឯងត្រូវវិលត្រឡប់ទៅប្រាប់**ហាន់ស៊ុយ**ចុះថា ពេលយប់នេះឲ្យដុតភ្លើងឲ្យឆេះឡើងក្នុងបន្ទាយ**ម៉ាឈៀវ** យើងនឹងចូលទៅចាប់យកខ្លួន**ម៉ាឈៀវ**ឲ្យបាន។ **អៀវឈីវ**គំនាប់**ចូឆ្វូ**ហើយក៏លាថយមកវិញ ប្រាប់ព័ត៌មាននោះឲ្យ**ហាន់ស៊ុយ**ស្តាប់គ្រប់ប្រការ។

**ហាន់ស៊ុយ**ឮដូច្នោះក៏មានអំណរណាស់ ឲ្យទាហានជញ្ជូនអុសមកគរទុកក្រោយបន្ទាយជាច្រើន ហើយទើបប្រឹក្សានឹងនាយទាហានទាំងប្រាំនាក់ថា ពេលយប់នេះ យើងឲ្យរៀបតុលៀងអាហារ ឲ្យអញ្ជើញ**ម៉ាឈៀវ**មកបរិភោគ បើបានឱកាសស្រួលហើយនឹងចាប់ខ្លួនសម្លាប់ចេញ។ ខណៈកាលកំពុងប្រឹក្សាគ្នានោះ មានទាហាន**ម៉ាឈៀវ**ដឹងតម្រុយថា **ហាន់ស៊ុយ**គិតនឹងប្រទូសរ៉ាយ**ម៉ាឈៀវ** ទាហាននោះក៏នាំយករឿងទៅប្រាប់**ម៉ាឈៀវ** ៗដឹងដូច្នោះក៏ស្រូតមកប្រញាប់ ឲ្យ**បាំងតេក**, **ម៉ាតាយ**ឃុំទាហានសាមសិបនាក់តាមការពារអន្តរាយពីក្រោយ ហើយក៏ដើរចូលទៅក្នុងបន្ទាយ ឃើញ**ហាន់ស៊ុយ**កំពុងនិយាយប្រឹក្សាគ្នាជាមួយនឹងនាយទាហានប្រាំនាក់ បានឮចុងសម្តីថា ត្រូវប្រញាប់ធ្វើការនោះកុំបង្អង់ទុកឲ្យយូរឡើយ **ម៉ាឈៀវ**ក៏ដើរស្រូតជើងចូលទៅស្រែកជេរថា ម៉ែអាសត្រូវ វាគិតធ្វើអញហើយតើ។ នាយទាហាន**ហាន់ស៊ុយ**ទាំងប្រាំនាក់ឮដូច្នោះ ក៏ស្លុតស្លាំងកាំងនឹងនៅទីនោះ។ **ម៉ាឈៀវ**ក៏ហូតគ្រប៊ីកាប់**ហាន់ស៊ុយ** ៗលើកជើងរងត្រូវជើងដាច់ធ្លាក់ចុះ។ ទាហាន**ហាន់ស៊ុយ**ទាំងប្រាំនាក់ក៏ហូតគ្រប៊ីរាល់គ្នា រត់ចូលមកតស៊ូនឹង**ម៉ាឈៀវ** ៗក៏ថយចេញទៅក្រៅបន្ទាយ នាយទាហានប្រាំនាក់ក៏ដេញតាមទៅ។ **ម៉ាឈៀវ**ទទួលតនឹងគ្រប៊ីកាប់ត្រូវ**ម៉ាអ៊្សួន**ដួលចុះ ហើយចាក់ត្រូវ**លៀងហេង**នឹងគ្រប៊ីស្លាប់មួយរំពេច **ហៅឈ្វួន**, **លីខាំ**, **អៀវឈីវ**ទាំងបីនាក់ឃើញដូច្នោះ នឹងតស៊ូជាមួយ**ម៉ាឈៀវ**ពុំបានក៏នាំគ្នារត់។ **ម៉ាឈៀវ**ក៏ត្រឡប់ដេញចូលទៅនឹងសម្លាប់**ហាន់ស៊ុយ**ចេញ ទទួលពួកទាហាននាំយកខ្លួន**ហាន់ស៊ុយ**រត់រួចទៅបាន ហើយលបដុតភ្លើងឆេះឡើងខាងក្រោយបន្ទាយ។ ទាហាន**ម៉ាឈៀវ** និងទាហាន**ហាន់ស៊ុយ** ក៏ចូលប្រកាប់ប្រចាក់គ្នាជាជ្រួលច្របល់ពេញទាំងបន្ទាយនិងក្រៅបន្ទាយ។

**បាំងតេកនិងម៉ាតាយ** ក៏លើកទាហានតាមទៅទាន់**ម៉ាឈៀវ** ចូលជួយគ្នាតស៊ូទម្លាយចេញពីក្នុងបន្ទាយមកវិញ ប្រទះនឹងពួកទាហាន**ចូឆ្វ**លើកមកព័ទ្ធថែមទៀត ក៏ចូលប្រឡូកគ្នាជាបួនផ្ទែកសន្ធឹកសន្ធាប់ណាស់ មិនបានដឹងថាពួកឯងពួកគេ **បាំងតេកនិងម៉ាតាយ**ក៏បែកព្រាត់ពី**ម៉ាឈៀវ** ៗឃើញលើសកម្លាំងក៏ឡើងសេះនាំទាហានមួយរយនាក់វាយទម្លាយរត់ឆ្លងដល់កណ្ដាលស្ពាន ទទួលភ្លឺស្វាងឡើងឃើញ**លីខាំ**លើកទាហានដេញតាមពីក្រោយ **ម៉ាឈៀវ**ក៏បរសេះវាមកតនឹង**លីខាំ** ៗឃើញកម្លាំងខ្លួននឹងតដោយ**ម៉ាឈៀវ**ពុំបាន ក៏ញាក់សេះវេះរត់ថយទៅក្រោយ **ម៉ាឈៀវ**ក៏ដេញជិតពីក្រោយតាមទៅ។

**អ៊ីគឹម**ក៏លើកទាហានដេញតាម**ម៉ាឈៀវ**ទៅទៀត ហើយបាញ់នឹងធ្នូពីក្រោយ **ម៉ាឈៀវ**ឮសូរព្រួញរត់ពីក្រោយក៏ក្រាបចុះ ព្រួញនោះហួសទៅត្រូវ**លីខាំ**ធ្លាក់ពីលើសេះស្លាប់។ **ម៉ាឈៀវ**ឃើញដូច្នោះ ក៏ញាក់សេះវិលត្រឡប់ទៅតនឹង**អ៊ីគឹម** ៗក៏ញាក់សេះវេះរត់ទៅ **ម៉ាឈៀវ**លើកពលត្រឡប់ទៅឈរកណ្ដាលស្ពានវិញ ទាហាន**ចូឆ្វ**ក៏លើកទៅស្កាត់នៅខាងដើមស្ពាន និងចុងស្ពានទាំងសងខាង ចេះតែបាញ់ព្រួញធ្នូចម្រុះចូលទៅទាំងសងខាង **ម៉ាឈៀវ**យកលំពែងគ្រវីទាត់ព្រួញខ្ទាតធ្លាក់ទៅក្នុងទឹកទាំងអស់ គ្មានពាល់ត្រូវដល់ខ្លួនសោះ ហើយដេញទាហានឲ្យចូលប្រកាប់កងទ័ព**ចូឆ្វ**នឹងឲ្យផ្ដាយខាងដើមស្ពាន ទាហានមានតិចណាស់វាយទម្លាយចេញមិនបាន លើសកម្លាំងក៏ត្រឡប់ថយក្រោយ ម៉ាឈៀវខឹងញ័រអស់ទាំងខ្លួនក៏ស្រែកដោយសំឡេងខ្លាំង ហើយបំផាយសេះទម្លាយចេញទៅតែម្នាក់ឯង ទាហាន**ចូឆ្វ**ក៏បើកផ្លូវឲ្យ **ម៉ាឈៀវ**ក៏ត្រឡប់វិលចូលទៅកណ្ដាលហ្វូងទាហាន ៗក៏បាញ់នឹងធ្នូត្រូវ**ម៉ាឈៀវ**ធ្លាក់ចុះ ទាហាន**ចូឆ្វ**ក៏ស្ទុះស្រចូលទៅនឹងចាប់ខ្លួន ទទួល**បាំងតេកនិងម៉ាតាយ**លើកពលវាយទម្លាយចូលមកទាន់ ក៏ជួយតស៊ូគ្នាចលាចល ហើយរាំងរាយកខ្លួន**ម៉ាឈៀវ**បាន

ទាហានម្នាក់ហោតចុះពីលើខ្នងសេះ ឲ្យ**ម៉ាឈៀវ**ឡើងជិះលើខ្លួន ហើយវាយទម្លាយចេញពីក្នុងចំណោមទៅបាន។

ឯ**ចូឆូ**ដឹងថា **ម៉ាឈៀវ**រត់ទៅបានដូច្នោះ ក៏ឲ្យប្រកាសដល់ពួកទាហានទាំងពួងឲ្យស្រូតលើកគ្នាតាមទាំងយប់ថ្ងៃ បើនរណាយកក្បាលម៉ាឈៀវបានមកឲ្យយើង ៗនឹងឲ្យបំណាច់រង្វាន់មាសមួយពាន់ប្រាក់មួយពាន់ បើចាប់ទាំងរស់បាននឹងតាំងឲ្យធ្វើជានាហ្មឺនធំ។ បណ្ដាពួកទាហានដែលចង់បានគុណបំណាច់ ក៏នាំគ្នាស្រូតតាមទៅ។ **ម៉ាឈៀវ**រត់ទៅគ្រានោះ មានពួកទាហានតិចណាស់ គឺមានតែ**បាំងតេក១, ម៉ាតាយ១** និងកូនទាហានប្រមាណសាមសិបនាក់ នឹងរេរានៅតស៊ូនឹងទ័ព**ចូឆូ**ពុំបាន ក៏ខំតែស្រូតរូតរត់ទៅខាងទិសឯត្បូងស្រុកសែលៀង។

**ចូឆូ**លើកទ័ពជូនតាមទៅជាក្រោយ ដឹងថា**ម៉ាឈៀវ**រត់រហូតរួចទៅ តាមមិនទាន់ ហើយក៏លើកទ័ពវិលមកស្រុកទៀងអាន់វិញ ឈប់សម្រាកទាហាននៅរក្សារបួសជើង**ហាន់ស៊ុយ**ឲ្យជា ហើយ**ចូឆូ**ឃើញថាជាមនុស្សពិការនឹងធ្វើសង្គ្រាមតទៅទៀតពុំបាន ក៏តាំងឲ្យធ្វើជាចៅហ្វាយស្រុកសែលៀង ឲ្យ**ហៅឈ្នួន**និង**អៀវឈើវ**ជាបាឡាត់សម្រាប់ឃុំនាំទាហានទៅល្បាតតាមមាត់ស្ទឹងអ៊ុយហោ ដើម្បីការពារកងទ័ព**ម៉ាឈៀវ** ឯបណ្ដាទាហានក្រៅពីនោះ ក៏តាំងជាហ្មឺនធំតូច តាមគុណបំណាច់តិចច្រើន។

ខណៈនោះ **អៀវហ្វ៊ី**ជាទាហានរង**អៀវឈើវ**ក៏និយាយថា មហាឧបរាជនឹងលើកទ័ពទៅឥឡូវនេះ ក្នុងស្រុកទៀងអាន់នោះនឹងរកនរណាជាធំនឹងរក្សាត្រួតត្រាគ្មាន ខ្ញុំបាទឃើញថា **ម៉ាឈៀវ**បែកទ័ពទៅគ្រានេះ គង់នឹងមានសេចក្ដីព្យាបាទជាប់ក្នុងចិត្ត មុខជានឹងគិតសងសឹកវិញ ហើយក្រែង**ម៉ាឈៀវ**នឹងបញ្ចុះបញ្ចូលពលទាហានបានច្រើន នឹងលើកមកធ្វើអន្តរាយជាក្រោយក៏នឹងថ្លោះការ សូមឲ្យលោក

ចាត់ការរើសមនុស្សឲ្យឆ្លៀវឆ្លាតមានគំនិតមារយាទ ឲ្យល្អមទុកចិត្តបាននៅរក្សាស្រុកទៀងអាន់ ដើម្បីការពារនឹង**ម៉ាឈៀវ** បើ**ម៉ាឈៀវ**លើកទ័ពមក នឹងបានជួយគ្នាតយុទ្ធឲ្យបាន។ **ចូឆ្វ**ឆ្លើយថា ការនេះកុំបីអ្នកព្រួយបារម្ភ យើងបានគិតបម្រុងទុកជាស្រេចហើយ **អៀវហ្វ៊ី**ឮដូច្នោះក៏គំនាប់លា**ចូឆ្វ**ទៅស្រុកសែលៀងជាមួយនឹង**ហាន់ស៊ុយ**។

កាល**ហាន់ស៊ុយ**លើកទ័ពទៅហើយ ទាហានទាំងពួងក៏និយាយនឹង**ចូឆ្វ**ថា យើងខ្ញុំមានសេចក្ដីសង្ស័យណាស់ ព្រោះកាលដើម**ម៉ាឈៀវ**លើកទ័ពមកវាយបន្ទាយតុងគួននោះ ហេតុម្ដេចមហាឧបរាជមិនឲ្យលើកទ័ពទៅតាំងទ័ពពីក្រោយ**ហាន់ស៊ុយ**ទុក បើលោកទៅព័ទ្ធពីក្រោយ មិនមានជ័យជម្នះឆាប់ឬ? មហាឧបរាជមកតាំងទទួល**ម៉ាឈៀវ**នៅបន្ទាយតុងគួននេះ ទាល់តែជាប់ដៃគ្នាជាយូរណាស់ ហើយទើបឲ្យលើកទៅចាំព័ទ្ធខ្ទប់ខាងត្រើយទិសឯកើតជាក្រោយវិញ តើដោយហេតុប្រការអ្វី?

**ចូឆ្វ**ថា កលនេះឈ្មោះវន្ទះបាញ់ មិនទាន់យកដៃបិទត្រចៀក អ្នករាល់គ្នាមិនទាន់យល់ទេ ខណៈកាល**ម៉ាឈៀវ**លើកទ័ពមកនេះ យើងមិនបានឲ្យលើកទៅព័ទ្ធពីក្រោយទុក ព្រោះយើងឃើញទាហាន**ម៉ាឈៀវ**លើកមកមិនទាន់អស់រលីង លុះនឹងបង្ខំឲ្យស្រូតរូតទៅព័ទ្ធពីក្រោយភ្លាមៗ បើទាហាន**ម៉ាឈៀវ**លើកមកជាក្រោយក៏នឹងសល់នៅនឹងត្រូវតតាំងច្បាំងគ្នាជាពីរផ្នែក ឃើញនឹងរាមុខរាក្រោយយកជ័យជម្នះមិនបាន ហេតុនេះបានជាយើងក្លែងទៅទទួលតគ្នាឲ្យយូរ ប្រាថ្នានឹងឲ្យទាហាន**ម៉ាឈៀវ**មកឲ្យអស់ លុះក្រោយសឹមយើងឲ្យ**ស៊ីឡាង** និង**ជូឡេង**នាំទាហានលើកឆ្លងទៅត្រើយម្ខាង តាំងព័ទ្ធខ្ទប់ទុកឲ្យត្រូវតាមកលឧបាយ ត្រូវធ្វើការសង្គ្រាមតែមួយមុខមិនព្រួយធុរៈរវល់ទៅទ័ពឯណាដទៃក៏បានជ័យជម្នះដោយកម្លាំងនិងថ្វីដៃទាហានទាំងពួងយ៉ាងស្រួល។

បណ្ដាសេនាទាហានទាំងអស់បានស្ដាប់ដូច្នោះក៏យល់ឃើញផង ទើបសួរថា កាលលោកតាំងនៅទីនោះ មានមនុស្សយកសេចក្ដីមកប្រាប់ថា ទាហាន**ម៉ាឈៀវ**លើកមកទៀតពីរ-បីពាន់ មហាឧបរាជមានសេចក្ដីត្រេកអរត្រឡប់ជាអស់សំណើចនោះ ដោយឃើញហេតុយ៉ាងម្ដេច? **ចូឆ្ងូ**ប្រាប់ថា កងទ័ពបណ្ដាខេត្តទាំងនោះលើកមកអស់រលីងហើយទើបមានចិត្តត្រេកអរ ព្រោះឃើញថាទាហានទាំងពួងនោះសុទ្ធតែនៅស្រុកទីទៃពីគ្នា មិនរៀបរយគ្នានឹងធ្វើការជាចិត្តមួយ ទោះនឹងមកច្រើនយ៉ាងណាក៏ដូចតិច ឃើញថាគង់នឹងចាញ់ថ្វីដៃទាហានយើងជាប្រាកដ បានជាយើងសើច បើអ្នកមានសតិបញ្ញាតិច នឹងធ្វើសង្គ្រាមតនឹង**ម៉ាឈៀវ**ត្រឹមខួបឆ្នាំមួយយ៉ាងរហ័ស ដែលនឹងឲ្យបានជ័យជម្នះ ដល់បណ្ដាទាហានគ្រប់ខេត្តដូចយ៉ាងធ្វើនេះកម្រក្រៃក្រៃណាស់។

បណ្ដាសេនាទាហានបានស្ដាប់ហើយ ក៏នាំគ្នាឱនគំនាប់ហើយសរសើរថា មហាឧបរាជនេះពេញជាមានតម្រិះប្រាជ្ញាដ៏សុខុម ប្រកបដោយអានុភាពបីដូចទេពតា។ **ចូឆ្ងូ**ឆ្លើយឡើងថា យើងមានជ័យជម្នះគ្រានេះ ក៏អាស្រ័យដោយកម្លាំងនិងថ្វីដៃអ្នករាល់គ្នា ហើយក៏ឲ្យបំណាច់រង្វាន់ទាហានធំតូចតាមសមគួរ ហើយប្រគល់ទាហានរបស់**ម៉ាឈៀវ**ដែលចាប់បានមកជាឈ្លើយនោះ ឲ្យ**ហែហ្ល៊ួអៀន**ឃុំយកទុករក្សាស្រុកទៀងអាន់ ឲ្យ**ទៀវគី**ចៅហ្វាយស្រុកកេងទៀវជាមួយរាជការផង **ចូឆ្ងូ**ចាត់ចែងទាហាននិងរៀបស្រុកភូមិស្រេចហើយ ក៏ឲ្យលើកកងទ័ពត្រឡប់ចូលទៅស្រុកក្រុង។

# **រឿង សាមកុក**

**អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង**

**កណ្ឌទី ៥០**

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ចូឆូ**ឈ្នះទ័ព**ម៉ាឈៀវ** ៗរត់រួចទៅ **ចូឆូ**លើកទ័ពចូលទៅក្រុងវិញ ព្រះចៅ**ហៀនតេ**យាងចេញទៅទទួលដល់ក្រៅក្រុង រហូតដល់**ឡៅពី**លើកទ័ពទៅច្បាំងនឹង**ឡៅជៀង**ចៅហ្វាយស្រុកសែឈួន ។)*

**ឯព្រះចៅហៀនតេ**ជ្រាបថា **ចូឆូ**មានជ័យជម្នះសង្គ្រាម**ម៉ាឈៀវ**ហើយលើកទ័ពត្រឡប់មកវិញ ក៏ទ្រង់មានព្រះរាជហឫទ័យសោមនស្ស ស្ដេចទ្រង់គង់រាជរថចេញទៅទទួលទ័ព**ចូឆូ**ដល់ក្រៅទីក្រុង ហើយមានតម្រាស់នឹង**ចូឆូ**ថា អំណើះពីនេះទៅ បើមិនមានតម្រាស់ឲ្យហៅ កុំឲ្យចូលគាល់ដូចជានាហ្មឺនធម្មតានោះឡើយ បើយើងមានការឲ្យហៅចូលគាល់ ក៏ត្រូវឲ្យសៀតគ្រប៊ីចូលគាល់ជាដរាប ហើយកុំបាច់ឲ្យក្រាបថ្វាយបង្គំជាដាច់ខាត។

**ចូឆូ**បានឮព្រះតម្រាស់ផ្ទាល់ដូច្នោះ ក៏មានចិត្តកំរើបជាទំហំក្រៃលែងលើសពីដើម កិត្តសព្ទក៏ឮរន្ទឺខ្ចរខ្ចាយទៅដល់**ទៀវឡូ**ចៅហ្វាយស្រុកហាន់តុង។ ឯ**ទៀវឡូ**នោះជាក្មួយ**ទៀវឡេង** ៗនោះជាពីដើមជាពួកស្រុកសែឈួន ទៅស្វែងរៀនវិជ្ជានេះនៅតំបន់ភ្នំបេងសាន់ លុះរៀនវិជ្ជាការបានចំណានហើយ ក៏មកនៅស្រុកហាន់តុង អាណាប្រជានុរាស្ត្រចំណុះស្រុកនោះបើនរណាឈឺថ្កាត់ដោយជំងឺអ្វីៗ ក៏យកជាធុរៈ បើនឹងរក្សារោគអ្នកឯណាជា ក៏មិនបានយកវត្ថុអ្វី ឲ្យយកតែស្រូវប្រាំថាំង ទៅគំនាប់បូជាគ្រូ លុះ**ទៀវឡេង**ស្លាប់ **ទៀវឡូ**ជាក្មួយក៏បានរៀនវិជ្ជាការនោះធ្វើតាមប្រពៃណីតមក អាណាប្រជានុរាស្ត្រទាំងពួងក៏រាប់អានស្រឡាញ់ តាំងនៅក្នុងឱវាទបង្គាប់បញ្ជាគ្រប់ប្រការ សន្មតិឲ្យជាអ្នកធំ **ទៀវឡូ**ក៏ប្រដៅមនុស្សទាំងពួងឲ្យធ្វើ

តាមឱវាទ តាំងនៅដោយប្រក្រតីមិនបានបៀតបៀនគ្នា បើអ្នកឯណាធ្វើខុសដល់បីដងក៏មិនបានយកទោស អាណាប្រជានុរាស្ត្រទាំងពួងក៏នៅជាសុខក្សេមក្សាន្តគ្រប់ភូមិលំនៅ បណ្តាស្រុកគ្រាមនិគមដែលត្រូវឡើងស្រុកហាន់តុង នោះក៏កោតខ្លាចអំណាច**ទៀវឡូ**ទាំងអស់ ឯចៅហ្វាយស្រុកហាន់តុងនោះសោត ក៏កោតខ្លាចគំនាប់គោរព**ទៀវឡូ**។

ខណៈនោះ**ទៀវឡូ**ដឹងដំណឹងថា **ចូឆូ**មានជ័យជម្នះ**ម៉ាឈៀវ**ហើយមានចិត្តកំរើបធំលើសឡើង ក៏នឹកបារម្ភខ្លាចក្រែង**ចូឆូ**នឹងលើកទ័ពមកធ្វើអន្តរាយដល់ស្រុកហាន់តុង ទើប**ទៀវឡូ**ប្រមូលមនុស្សចាស់ទុំមកប្រឹក្សាថា ឥឡូវនេះ**ចូឆូ**ដើរប្រាបប្រាមគ្រប់អាណាខេត្តទាំងពួង ក៏ចុះចូលជាច្រើនណាស់ហើយ ដូច**ម៉ាថេង**ចៅហ្វាយស្រុកសែលៀងនោះសោត **ចូឆូ**ក៏សម្លាប់ចេញបាន **ម៉ាឈៀវ**ជាកូនទៀតក៏បែកចាញ់ទ័ព**ចូឆូ** គិតការជាធំទូលាយលើសអំពីដើម បើនឹងលើកទាហានមកវាយស្រុកហាន់តុង កាលណាមុខជាអាណាប្រជានុរាស្ត្រទាំងពួងនឹងបានសេចក្តីក្តៅក្រហាយខ្លាំង គួរតែយើងនឹងតាំងខ្លួនឡើងជាម្ចាស់ ឈ្មោះព្រះចៅ**ហាន់ឡេងអង** នឹងបញ្ចុះបញ្ចូលទាហានឲ្យបានច្រើន ហើយនឹងធ្វើការតស៊ូនឹង**ចូឆូ** ការពារស្រុកទុកមិនឲ្យជាអន្តរាយរក្សាអាណាប្រជានុរាស្ត្រឲ្យនៅជាសុខតទៅ អ្នកទាំងពួងរាល់គ្នានឹងយល់ឃើញប្រការម្តេច?

**យៀមផៅ**ឆ្លើយថា លោកគិតនេះគួរណាស់ ព្រោះស្រុកហាន់តុងមានមនុស្សច្រើននៅក្នុងឱវាទលោកចំនួនដប់ម៉ឺន ចំណីអាហារក៏បរិបូរទាំងអស់ តែថានៅមិនទាន់ស្មើនឹង**ចូឆូ**នៅឡើយ ឯ**ម៉ាឈៀវ**ដែលបែកទ័ពពី**ចូឆូ**មកឥឡូវនេះ ក៏គង់នឹងមកប្រាស្រ័យនៅនឹងយើង ទោះយ៉ាងណាក៏គង់តែ**ចូឆូ**នោះ នឹងលើកទ័ពតាមមកដល់ស្រុកយើងជាប្រាកដ ដែលយើងនឹងគិតធ្វើការតយុទ្ធនឹង**ចូឆូ**នោះ គួរតែនឹងទៅវាយ

យកស្រុកសែឈ្នួនទាំងសែសិបខេត្តឲ្យបានសិន ទើបកម្លាំងយើងនឹងបានច្រើន ព្រោះ**ឡៅជៀង**ចៅហ្វាយស្រុកអេកជីវ ដែលជាធំក្នុងស្រុកសែឈ្នួននោះក៏ជាមនុស្សលោភណាស់ មុខជានឹងវាយបាយដោយងាយ បើបានសម្រេចហើយ លោកនឹងតាំងខ្លួនជាអម្ចាស់ទើបស្រួល។ **ទៀវឡូ**បានស្តាប់ដូច្នោះក៏យល់ត្រូវផង ទើបឲ្យរកខ្លួន**ទៀវអ្ហួយ**មកប្រឹក្សា ដើម្បីនឹងលើកទ័ពទៅវាយស្រុកសែឈ្នួន។

**ឡៅជៀង**ចៅហ្វាយស្រុកអេកជីវ និង**ទៀវឡូ**នោះជាមនុស្សហរិគ្គាមកពីដើម ព្រោះ**ឡៅអៀវ**ជាអាពុក**ឡៅជៀង**អនិច្ចកម្មទៅ **ឡៅជៀង**ក៏បានឡើងជាចៅហ្វាយស្រុកជំនួសអាពុក ចាប់យកម្តាយ**ទៀវឡូ**ទៅសម្លាប់ ខ្លាច**ទៀវឡូ**នឹងលើកទ័ពមកធ្វើអន្តរាយ ទើបតាំងឲ្យ**បាំងឃី**ជាចៅហ្វាយស្រុកប៉ាសេ ប្រាថ្នានឹងឲ្យចាំរាំងទ័ព **ទៀវឡូ** លុះ**បាំងឃី**ដឹងដំណឹងថា **ទៀវឡូ**រិះគិតប្រមូលជាកងទ័ពនឹងលើកមកវាយយកសែឈ្នួនដូច្នោះ ក៏ឲ្យបម្រើសេះស្រួតនាំដំណឹងនោះទៅប្រាប់**ឡៅជៀង** ៗដឹងរឿងដូច្នោះក៏ភ័យណាស់ ទើបឲ្យហៅបណ្តានាហ្មឺនធំតូចទាំងពួងមកប្រឹក្សា។

**ទៀវសុង** ទីប្រឹក្សាឆ្លើយថា ដែល**ទៀវឡូ**នឹងលើកទ័ពមកធ្វើអន្តរាយដល់ស្រុកសែឈ្នួននោះលោកកុំព្រួយឡើយ ខ្ញុំបាទសុំយកតែអណ្តាតបីធ្នាប់នេះជាអាសាទៅតនឹង**ទៀវឡូ**មិនឲ្យលើកមកធ្វើអន្តរាយបាន។ **ឡៅជៀង**បានស្តាប់ក៏ក្រឡេកមើល**ទៀវសុង**ឃើញរូបរាងទាបកន្ទិល ក្បាលត្រមោងដូចផ្លែញៅ ច្រមុះក្រពិត រូបមិនសមជាអ្នកចេះនិយាយ ក៏មិនបាននឹងជឿ ទើបសួរថាអ្នកនឹងគិតទៅនិយាយយ៉ាងម្តេច ចូរថាឲ្យយើងស្តាប់សិន។

**ទៀវសុង**ឆ្លើយថា ខ្ញុំបាទដឹងថា**ចូឆ្វូ**នេះជាអ្នកមានអំណាចដើរប្រាបប្រាមខណ្ឌសេមាឲ្យនៅក្នុងអំណាចខ្លួនទាំងអស់ សូម្បី**អ៊្វនសៀវ, អ៊្វនសុត** សោតក៏**ចូឆ្វូ**កម្ចាត់ចេញអស់ហើយ ឥឡូវ**ម៉ាឈៀវ**ជាកូន**ម៉ាថេង**សោតក៏ចាញ់ប្រៀប**ចូឆ្វូ**បែក

ទ័ពរត់មកទៀត **ចូឆ្វ**មានទាហានច្រើនណាស់ សុំឲ្យគាត់តែងគ្រឿងបណ្ណាការទៅសុំចុះចូលគំនាប់**ចូឆ្វ** ខ្ញុំបាទនឹងសុំយកអាសាកាន់សំបុត្រទៅនិយាយឲ្យ**ចូឆ្វ**លើកទ័ពមកវាយស្រុកហាន់តុង បើស្រុកហាន់តុងកើតសឹកជាប់ដៃគ្នាហើយ ក៏មុខជាមិនលើកទ័ពមកធ្វើអន្តរាយស្រុកយើងទេ។ **ឡៅជៀង**ស្តាប់ឃើញត្រូវក៏មានសេចក្តីត្រេកអរ ទើបចាត់ចែងគ្រឿងបណ្ណាការ និងសំបុត្រមួយច្បាប់ឲ្យ**ទៀវសុង** ៗក៏លបគូរផែនដីស្រុកសៃឈួនគ្រប់រយៈទាំងអស់ហើយ ក៏នាំចូលទៅក្រុងហ៊ូតោឆ្លងកាត់ស្រុកកេងជីវទៅ។

ខណៈនោះ **ខុងបេង**ដឹងថា **ឡៅជៀង**ប្រើឲ្យ**ទៀវសុង**នាំគ្រឿងបណ្ណាការចូលទៅគំនាប់**ចូឆ្វ** ក៏ចាត់ប្រើមនុស្សឲ្យតាមស៊ើបស្តាប់ការណ៍រាជការមើលក្នុងស្រុកហ៊ូតោ លុះ**ទៀវសុង**ទៅដល់ស្រុកហ៊ូតោហើយ នឹងចូលទៅគំនាប់**ចូឆ្វ**មិនបាន ព្រោះ**ចូឆ្វ**មិនបានចេញនិយាយការរាជការ នៅរង់ចាំដល់បីថ្ងៃ ទើបឲ្យមនុស្សបម្រើចូលទៅតាមដំណើរសេចក្តីដល់**ចូឆ្វ** ៗក៏ឲ្យហៅខ្លួន**ទៀវសុង**ចូលទៅខាងក្នុង **ទៀវសុង**គំនាប់ហើយក៏ជូនសំបុត្រនិងគ្រឿងបណ្ណាការឲ្យ**ចូឆ្វ**។

**ចូឆ្វ**ដឹងក្នុងសំបុត្រនោះហើយក៏សួរ**ទៀវសុង**ថា **ឡៅជៀង**ជានាយអ្នកឯងនោះ ច្រើនឆ្នាំហើយមិនដែលជូនគ្រឿងបណ្ណាការមកគំនាប់តាមទំនៀមទម្លាប់ប្រវេណីសោះ ព្រោះហេតុអ្វីបានជាធ្វើដូច្នេះ? **ទៀវសុង**ជម្រាបថា ស្រុកសៃឈួននោះ ជាស្រុកដាច់ស្រយាលឆ្ងាយអាល័យកម្រដែលនឹងទៅមកពេកណាស់ មួយយ៉ាងទៀតអាណាខេត្តទាំងពួងក៏សុទ្ធតែកើតចម្រូងចម្រាសរាបទាបជាប្រក្រតី មានសេចក្តីខ្លាចបារម្ភក្រែងចោរកំណាច នឹងលើកគ្នាប្លន់ដណ្តើមយកគ្រឿងបណ្ណាការកណ្តាលផ្លូវ បានជាមិនអាចនឹងនាំមកបាន។ **ចូឆ្វ**ក៏ស្រែកគំហកថា អញដើរប្រាប

ប្រាមអាណាខេត្តទាំងពួងរាបទាបជាសុខក្សេមក្សានអស់ហើយ ចោរឯណាដែលនៅមានទៀតសោត?

**ទៀវសុង**ឆ្លើយថា ទិសឯត្បូងនោះ**ស៊ុនគួន**ជាសត្រូវរបស់លោកក៏នៅមាន ទិសខាងលិចក៏គឺ**ឡៅពី** ទិសខាងជើងគឺ**ទៀវឡូ** បើសត្រូវរបស់លោកនៅមានជុំខ្លួនដូច្នេះ ទីឯណាដែលលោកថាប្រាបប្រាមរាបទាបហើយនោះ? **ចូឆូ**បានឮដូច្នោះក៏ខឹងណាស់ ពិនិត្យមើលរូបរាង**ទៀវសុង**ឃើញលក្ខណៈទាបថោកមិនគាប់អធ្យាស្រ័យសោះ ក៏ក្រោកចូលទៅក្នុងបាត់។ ទីប្រឹក្សាទាំងពួងក៏នាំគ្នានិយាយនឹង**ទៀវសុង**ថា អ្នកនេះគ្មានអធ្យាស្រ័យសោះ ហ៊ានមកនិយាយផ្ទុញផ្ទាល់មហាឧរាជដូច្នេះហើយឬ នេះហាក់តែអ្នកឯងបាននាំបណ្ណាការមកថ្វាយពីចម្ងាយ បានជាមហាឧបរាជមិនយកទោស ត្រូវអ្នកឯងចេញទៅឲ្យឆាប់ៗចុះ កុំបីនៅឲ្យយូរឡើយ។

**ទៀវសុង**ឆ្លើយថា ខ្លួនខ្ញុំនេះជាអ្នកស្រុកសែឈួននឹងនិយាយអ្វីៗក៏ទៅតាមត្រង់ មិនបានយកសេចក្ដីវៀចមកចរចាប្រចុបប្រចែងដូចមនុស្សឯទៀតទេ។ **អៀវស៊ីវ**ឮដូច្នោះក៏ស្រែកគំហកថា ខ្លួនជាអ្នកស្រុកសែឈួនចរចាសុទ្ធតែត្រឹមត្រង់ យើងពួកស្រុកក្រុងនេះ អ្នកឯងឃើញនរណាជាអ្នកនិយាយប្រចុបប្រចែងសោត? **ទៀវសុង**ងាកមុខមកមើល**អៀវស៊ីវ**ឃើញរូបរាងស្អាតបាត បែបជាអ្នកមានវោហារចេះចរចា ក៏ភ្លយសួរទៅថា អ្នកនេះឈ្មោះអ្វី មហាឧបរាជតាំងឲ្យធ្វើនាហ្មឺននិយាយការខាងអ្វី? **អៀវស៊ីវ**ឆ្លើយតបថា យើងឈ្មោះ**អៀវស៊ីវ**ជាពួករក្សាឃ្លាំងមហាឧបរាជ។

**ទៀវសុង**ដឹងថា **អៀវស៊ីវ**ជាមនុស្សមានសតិបញ្ញាក៏សន្ទនាប្រាស្រ័យដោយសុភាព **អៀវស៊ីវ**ឃើញ**ទៀវស៊ីង**ប្រកបដោយអធ្យាស្រ័យស្រួលបួលហើយ ក៏នាំទៅឯផ្ទះហើយចាត់ចែងឲ្យអង្គុយទីសមគួររួចហើយសួរថា ស្រុកសែឈួននោះផ្លូវឆ្ងាយ

ដាច់អាល័យណាស់ អ្នកខស្សាហ៍មកដល់ស្រុកក្រុងនេះបាន។ **ទៀវសុង**ថាខ្លួនជាបាវព្រាវគេហើយ បើនាយចៅហ្វាយប្រើក៏ត្រូវតែទៅ ទោះបីផ្លូវដែលទៅនោះ លុយទឹកភក់ល្បាប់ ឬលុយភ្លើងក៏ត្រូវតែទៅឲ្យបាន។ **អៀវស៊ីវ**ថាស្រុកសែឈ្នួននោះ ភូមិឋានជាបែបយ៉ាងម៉េច?

**ទៀវស៊ុង**ថា ឯស្រុកសែឈ្នួននោះ មានភូមិឋានធំទូលាយស្រណុកសប្បាយណាស់ ពីដើមគេហៅថាស្រុកអេកជីវ ទិសឯត្បូងនោះមានស្ទឹងគិមកាំងឃាំងម្ខាង ទិសឯជើងមានគយកៀមកុក ផ្លូវដែលនឹងទៅមកក៏ចង្អៀតពិបាកណាស់ ហើយស្រុកនោះមានបរិមណ្ឌលចំនួនបីពាន់សិន (១២០គ.ម) មានរយៈភូមិល្មមមាន់រងាវឮដល់គ្នា ទាំងស្រូវអង្ករចំណីត្រីសាច់ក៏បរិបូរជាទីស្រួលសប្បាយជាជាងស្រុកដទៃ។ **អៀវស៊ីវ**សួរថា បណ្ដាភ្នាក់ងារខ្ញុំរាជការក្នុងស្រុកសែឈ្នួននោះ មានអ្នកណាមានសតិបញ្ញាដែលនឹងគិតការពារទំនុកបំរុងអស់អាណាប្រជានុរាស្ត្រ ដោយការផ្លាស់ប្ដូរឲ្យកើតសុខសម្រាន្តមានខ្លះដែរឬទេ? **ទៀវសុង**ថា មនុស្សដែលមានសតិបញ្ញានិងសេនាទាហានដែលមានថ្វីដៃខ្លាំងពូកែនោះមានច្រើន មិនដឹងដែលនឹងពណ៌នាជូនអ្នកស្ដាប់បានទេ។

**អៀវស៊ីវ**សួរថា នាហ្មឺនដែលមានសតិបញ្ញាដូចពាក្យអ្នកថានោះមានប្រហែលប៉ុន្មាននាក់? **ទៀវសុង**ឆ្លើយថា នាហ្មឺនដែលមានសិតបញ្ញាពិស្ដារជ្រៅទូលាយ និងប្រកបទៅដោយសេចក្ដីសត្យសុចរិតប្រាកដនោះប្រហែលមួយពាន់នាក់ តែដែលមានប្រាជ្ញាជាប្រមាណដូចយ៉ាងខ្លួនខ្ញុំនេះ សូម្បីនឹងយករទេះទៅផ្ទុកក៏មិនអស់។ **អៀវស៊ីវ**ថា ឥឡូវនេះខ្លួនអ្នកជាហ្មឺនក្នុងក្រសួងអ្វី? **ទៀវសុង**ឆ្លើយថា ខ្ញុំបាទជាភ្នាក់ងារគ្រាន់តែទីប្រឹក្សាយ៉ាងតូចទេ មិនសមគួរដែលជានាហ្មឺនដូចគេទាំងពួងឡើយ ចុះខ្លួនអ្នកតើជាទីអ្វី? **អៀវស៊ីវ**ថា យើងជានាហ្មឺនសម្រាប់កាន់បញ្ជីរបស់

ទ្រព្យមហាឧបរាជ ត្រូវត្រួតត្រាឲ្យដឹងរបស់ខ្វះខាតចូលចេញទាំងពួង។ **ទៀវសុង**ថា ខ្ញុំបាទបានឮគេនិយាយថា ខ្លួនអ្នកនេះជាមនុស្សមានសតិបញ្ញាណាស់ ហេតុម្ដេចមកធ្វើត្រឹមភ្នាក់ងារក្រៅតំណែងដូច្នេះ បើនឹងឧស្សាហ៍ធ្វើរាជការក្នុងព្រះចៅ**ហៀនតេ**ផ្ទាល់ឲ្យជាមន្ត្រីធំ នឹងបានជួយទំនុកបម្រុងផែនដី ដើម្បីឲ្យព្រះចៅ**ហៀនតេ**សប្បាយព្រះទ័យផង មិនបានឬ?

**អៀវស៊ីវ**ឮដូច្នោះ ក៏ខំអត់សង្កត់ទុកក្នុងចិត្តហើយថា ដែលខ្លួនខ្ញុំមកនៅធ្វើការក្នុងបង្កាប់មហាឧបរាជ គ្រាន់តែជាភ្នាក់ងារក្រៅតំណែងនោះក៏មែន តែថាបណ្ដាជនានុជនក៏បានកោតក្រែងរអែងខ្លាចនឹងរាប់អានស្រឡាញ់ច្រើន ព្រោះមហាឧបរាជបានជឿទុកចិត្តជាប្រាកដ ប្រគល់របស់ទ្រព្យទាំងពួងឲ្យខ្ញុំទុកដាក់ថែរក្សា ហើយក៏មានសេចក្ដីអាសូរករុណាជាច្រើន បានរំឮកប្រដៅឲ្យដឹងកិច្ចការទាំងពួងជានិច្ច គុណឧបការៈរបស់មហាឧបរាជនោះនឹងរកទីប្រមាណជាទីបំផុតមិនបានឡើយ បានជាខ្ញុំជាប់ចិត្តគិតភក្ដីទ្រាំនៅបម្រើ។ **ទៀវសុង**អស់សំណើចហើយថា ខ្ញុំបាទក៏ដឹងអស់ហើយ គឺមហាឧបរាជនេះនឹងបានដឹងស្គាល់របស់អ្វីឲ្យជាប្រាកដនោះគ្មាន ទោះបីនឹងចេះសំបុត្រឬវិជ្ជាការសិល្បសាស្ត្រក្នុងបែបទាហានក៏គ្រាន់តែជាប្រមាណ នឹងយកវិជ្ជាអ្វីមករំឮកប្រដៅអ្នក ៗទើបមករាប់បុណ្យលើកយកគុណឧបការៈនៃមហាឧបរាជនោះ ព្រោះសព្វថ្ងៃនេះហាក់តែមានវាសនាពីអតីតជាតិជួយឧបត្ថម្ភគាំទ្រ ទើបបានតាំងខ្លួនជាធំប៉ុណ្ណោះបាន។

**អៀវស៊ីវ**ថា ខ្លួនអ្នកនៅស្រុកក្រៅឆ្ងាយណាស់ មិនបានដឹងច្បាស់ថា មហាឧបរាជនេះមានវិជ្ជាការនិងកលឧបាយប្រាយប្រាជ្ញាជ្រៅទូលាយសោះ ហេតុអ្វីក៏អាចប៉ានថាដូច្នោះ ឯមហាឧបរាជនោះ គឺជាមនុស្សចេះដឹងណាស់ បើអ្នកចង់ដឹងច្បាស់ជាមែនឬមិនមែនយើងនឹងយកសំបុត្រដែលមហាឧបរាជតែងទុកថ្មី ឈ្មោះថា

**បាំងតេក**មកឲ្យមើល ហើយចាប់យកសំបុត្រនោះមកឲ្យ**ទៀវសុង** ។ក៏យកមកមើលឃើញមានសេចក្ដីដប់បីខ ពណ៌នាពីការរណរង្គសង្គ្រាម ឲ្យតាំងបន្ទាយនិងចាត់ចែងរៀបពលទាហានទ័ពទឹក ទ័ពគោកតាមរបៀបក្បួន លុះមើលចប់ក៏សួរថា សំបុត្រនេះមហាឧបរាជយកយ៉ាងទំនៀមពីណាមកសរសេរទុកទេឬ? **អៀវស៊ីវ**ថា មហាឧបរាជតែងឯងបញ្ចេញពាក្យបុរាណជាទំនៀមទុក ប្រាថ្នានឹងឲ្យជាប់ជាច្បាប់តទៅខាងមុខ ហេតុម្ដេចបានជាអ្នកមកថាជាពាក្យមើលងាយប្រមាទ ថាមហាឧបរាជមានសតិបញ្ញាតិច បើប្រាជ្ញាមិនមាននឹងតែងសេចក្ដីសំបុត្រនេះទុកបានឬ?

**ទៀវសុង**អស់សំណើចហើយថា សំបុត្របែបនេះកូនក្មេងតូចៗនៅក្នុងស្រុកសែឈួនវាសូត្រលេងទូទៅពេញក្នុងស្រុក គឺជាពាក្យបុរាណមានអ្នកប្រាជ្ញគេរចនាទុកពីដើមទេ ហេតុម្ដេចអ្នកមកថា មហាឧបរាជតែងខ្លួនឯងសោត? គឺរើសយកពាក្យចាស់មកថាកុហកភរ ដែលនឹងជឿនោះ ក៏យ៉ាងបែបអ្នកឯងវង្វេងស្ដាប់រាប់ថាល្អ។ **អៀវស៊ីវ**ថា សំបុត្រនេះមហាឧបរាជតែងទុកដើម្បីនឹងឲ្យឃើញប្រាកដរហូតទៅ គ្រាតែអស់ផែនដី មនុស្សទាំងប្រុសទាំងស្រីក៏បានដឹងគ្រប់គ្នា ហេតុម្ដេចអ្នកមកថាពាក្យនេះជាពាក្យសម្រាប់សូត្រលេងទៅវិញ? មិនសមគួរនឹងយកពាក្យនេះមកក្លែងប្រមាថមើលងាយមហាឧបរាជដូច្នេះសោះ។ **ទៀវសុង**ថា បើអ្នកមិនជឿពាក្យខ្ញុំថា អ្នកបិទសំបុត្រនេះទុកទៅចុះ ខ្ញុំនឹងសូត្រឲ្យស្ដាប់តែមាត់ទទេ ហើយ**ទៀវសុង**ក៏ស្វាធ្យាយដោយបញ្ញាវាងវៃដែលចាំបាន ត្រូវឃ្លាគ្រប់អក្សរដែលតែងក្នុងសំបុត្រនោះ គ្មានវិបល្លាសក្នុងឯណានីមួយឡើយ។

**អៀវស៊ីវ**ឮដូច្នោះក៏ដឹងថា **ទៀវសុង**ឆ្លាតចាំមែន ទើបថាអ្នកនេះមានប្រាជ្ញាឆ្លៀវឆ្លាតមែន បានមើលសំបុត្ររបស់យើងតែមួយចប់ក៏ចាំបានគ្មានភ្លេចសោះ នឹងរកអ្នកឯណាឲ្យស្មើនឹងអ្នកកម្រណាស់។ **ទៀវសុង**គំនាប់**អៀវស៊ីវ**ហើយថា អ្នកចូរ

នៅឲ្យសុខសម្រាន្តចុះ យើងសុំលាវិលទៅស្រុកវិញហើយ។ **អៀវស៊ីវ**ថា អ្នកកុំអាល រួសរាន់ប្រញាប់វិលទៅស្រុក ចូរបង្អង់នៅសិន យើងនឹងចូលទៅជម្រាបមហាឧបរាជឲ្យនាំអ្នកចូលទៅក្រាបបង្គំគាល់ព្រះចៅ**ហៀនតេ**ឲ្យបានជ្រាប។ **ទៀវសុង**មានសេចក្ដីត្រេកអរទទួលពាក្យហើយ ក៏គំនាប់លាទៅទីសំណាក់។

**អៀវស៊ីវ**ក៏ចូលទៅជម្រាប**ចូឆូ**មហាឧបរាជថា ហេតុអ្វីអម្បាញ់មិញនេះបានជាមហាឧបរាជខឹងនឹង**ទៀវសុង**ជាខ្លាំង? **ចូឆូ**ថា វាចរចាព្រហើនមើលងាយមិនមានកោតក្រែងយើង បានជាយើងខឹង។ **អៀវស៊ីវ**ថា កាលគ្រា**យីអេង**ហេតុម្ដេចលោកចេះអត់បាន? តែត្រឹម**ទៀវសុង**ប៉ុណ្ណោះគួរឬលោកអត់មិនបាន? **ចូឆូ**ថា ឯ **យីអេង**នោះជាមនុស្សមានសតិបញ្ញាប្រាកដណាស់ បានជាយើងទ្រាំអត់សង្កត់ចិត្តព្រោះខ្លាចសេចក្ដីគរហានិន្ទា ឯ**ទៀវសុង**នេះ វាជាមនុស្សរូបអាក្រក់គ្មានសតិបញ្ញាសោះ នឹងអត់ឲ្យវាបានប្រយោជន៍អ្វី? **អៀវស៊ីវ**ថា មហាឧបរាជកុំអាលប្រមាថ **ទៀវសុង**នោះ ខ្ញុំបាទឃើញថាជាមនុស្សមានសតិបញ្ញាឆ្លាតណាស់ អម្បាញ់មិញនេះខ្ញុំបាទបានយកសំបុត្រដែលលោកតែងទុកនោះឲ្យ**ទៀវសុង**មើលតែមួយចប់ ក៏ចាំបានទាំងអស់ ជាមនុស្សឆ្លៀវឆ្លាតណាស់ ហើយថា សំបុត្រនេះជាពាក្យបុរាណ កូនក្មេងក្នុងស្រុកសែឈ្លួនសូត្រលេងគ្រប់ផ្ទះ។ **ចូឆូ**ឮដូច្នោះខឹងណាស់ថា ពាក្យនេះអង្គឹមនុស្សពីដើមនឹងមកប្រាប់យើងក៏ទេ បើយើងតែងសំបុត្រនេះក៏ត្រូវគ្នានឹងពាក្យបុរាណ ហើយក៏នឹងយកទុកជាប្រយោជន៍អ្វី? ទើបឲ្យយកសំបុត្រនោះមកហែក ចោលដាក់ក្នុងភ្លើងឆេះអស់ទៅ។

**អៀវស៊ីវ**ថា ឯ**ទៀវសុង**នោះជាមនុស្សស្រុកក្រៅ សូមឲ្យមហាឧបរាជនាំចូលទៅគាល់ព្រះចៅ**ហៀនតេ** ឲ្យបានឃើញក្នុងរាជឋានដ៏ប្រកបទៅដោយរបៀបដ៏រុងរឿង ដើម្បីកុំឲ្យសត្រូវមើលងាយ មានតែសេចក្ដីកោតក្រែងអានុភាពរបស់

លោក។ **ចូឆ្វ**ថា **ទៀវសុង**ជាពួកស្រុកក្រៅ នឹងត្រូវការអ្វីនាំចូលទៅគាល់នោះ បើដូច្នោះពេលព្រឹកស្អែកយើងនឹងនាំទាហានចូលទៅហាត់នៅទីស្នាក់កណ្ដាលវាល ឲ្យអ្នកនាំ**ទៀវសុង**ទៅមើលឲ្យឃើញរបៀបថ្វីដៃរបស់យើងចុះ ដើម្បីនឹងបាននាំយកទៅផ្សាយក្នុងស្រុកសែឈួនឲ្យបានប្រាកដល្បីឮតទៅ ហើយយើងនឹងលើកទាហានទៅវាយស្រុកកាំងតាំង បើបានសមប្រកបតាមគំនិតដែលគិតទុកហើយ ក៏ទៅវាយយកស្រុកសែឈួនទៀត។

**អៀវស៊ីវ**ទទួលពាក្យ**ចូឆ្វ**ហើយ ក៏គំនាប់លាចេញទៅលំនៅវិញ។ លុះព្រឹកឡើង**អៀវស៊ីវ**ក៏នាំ**ទៀវសុង**ចេញទៅមើលពួកទាហានហាត់ភ្លេងអាវុធ។ ខណៈនោះ**ចូឆ្វ**ក៏ជ្រើសរើសរកទាហានដែលមានថ្វីដៃ ហៅថាទាហានខ្លាឲ្យចេញទៅចំនួនប្រាំម៉ឺននាក់ សុទ្ធតែតែងតួពាក់អាវពាក់ក្រោះជិះសេះកាន់ដាវលំពែងមានឆ្វេងស្ដាំតាមក្បួន ចូលប្រយុទ្ធហាត់ដៃជាពន្លឹកសន្ធឹកសន្ធាប់។

**ចូឆ្វ**ឃើញ**ទៀវសុង**ងាកមុខមើលទាហានទាំងពួង ក៏ឲ្យហៅចូលទៅជិតហើយសួរថា ទាហានក្នុងស្រុកសែឈួនដូចទាហានរបស់យើងដែរឬទេ? **ទៀវសុង**ជម្រាបតបថា ឯស្រុកសែឈួននោះ នឹងបានបង្ហាត់មនុស្សឲ្យចុះរបៀបជាទាហានដើម្បីនឹងលើកទៅសង្កត់សង្កិនយកស្រុកណាក៏ទេ ខ្ញុំបាទមិនធ្លាប់ឃើញ ឯប្រពៃណីស្រុកសែឈួននោះបើនឹងប្រាបប្រាមសឹកសត្រូវដែលបង្កើតឡើង ជាចម្រូងចម្រាសនោះ ត្រូវរម្ងាប់ដោយយកពាក្យសត្យសុចរិត ជាគោលចារឹកទៅរម្ងាប់។

**ចូឆ្វ**ឮដូច្នោះក៏ខឹងណាស់ថា ក្នុងខេត្តខណ្ឌសីមានេះ យើងសម្លឹងមើលមិនឃើញមាននរណាមានទាហានច្រើនដូចយើង បណ្ដាអាណាខេត្តទាំងពួងដែលនឹងរឹងទទឹងមិនចំណុះចុះចូលមកគំនាប់ដល់យើងទេ ក៏ឧបមានដូចដុំស្មៅ បើយើងនឹងលើកទាហានទៅអន្លើឯណា ក៏នឹងជាន់សង្កត់ឲ្យល្អិតខ្ទេចខ្ទីរជាផង់ធូលី នរណាក៏

មិនអាចតស៊ូជាមួយយើងបាន បើនឹងវាយយកស្រុកណាក៏បានស្រុកនោះ អ្នកឯងដឹងឬទេ? **ទៀវសុង**ឆ្លើយថា ដែលមហាឧបរាជនឹងលើកកងទ័ពទៅប្រាបប្រាមស្រុកណានៅទិសឯណា ក៏មានល្បីគេនិយាយរន្ទឺឮទាំងផែនដីថា លោកមានវិជ្ជាចំណានក្នុងការសង្គ្រាមណាស់ ដូចកាលគ្រាស្រុកបាក់អៀងចម្បាំង**លីប៉ោ** ស្រុកអួនសៀចម្បាំង**ទៀវស៊ីវ** ស្រុកកាំងតាំងចម្បាំង**ជីវយី** តំបន់ភូយ៉ុងប្រទះគ្នានឹង**គួនអ៊ូ** គយតុងងួនកាត់ពុកមាត់ពុកចង្កា ដោះក្រើសចោល គ្រាមួយជាប្អូនគ្រាមកហើយ ខ្ញុំបាទក៏ដឹងថា នឹងរកអ្នកឯណាស្មើនឹងលោកគ្មាន។

**ចូឆូ**ឮដូច្នោះក៏ខឹងច្រឡោតខ្លាំងណាស់ ស្រែកជេរថា អាចោរឥតពូជឥតត្រកូល វាហ៊ានមករំលើកចរចាមើលងាយអញដូច្នេះ វាគ្មានកោតក្រែងអញបន្តិចសោះ ហើយបង្គាប់ឲ្យទាហានយកខ្លួន**ទៀវសុង**ទៅសម្លាប់។ **អៀវស៊ីវ**គំនាប់ហើយឃាត់ថា ដែល**ទៀវសុង**ចរចាជាពាក្យមាក់ងាយប្រមាទដល់មហាឧបរាជ ហើយនឹងឲ្យយកខ្លួនទៅសម្លាប់នោះក៏គួរហើយ តែថា**ទៀវសុង**ជាភ្ញៀវមកពីក្រៅ បើលោកមិនអត់ទោសនឹងសម្លាប់ចេញហើយកិត្តិស័ព្ទនោះក៏នឹងល្បីឮទៅគ្រប់ស្រុក បើមានអ្នកឯណានឹងចង់មករកលោក ក៏ឲ្យនឹករង្កៀសខ្លាចពុំអាចមកបាន។

**ចូឆូ**ឮដូច្នោះក៏យល់ឃើញផង តែទោសនោះនៅមិនរសាយ ទើបបង្គាប់ទាហានឲ្យយកដំបងដេញវាយ**ទៀវសុង**រត់ចេញទៅ។ **ទៀវសុង**ក៏រត់ចេញទៅផុតហើយចាត់ចែងនឹងរៀបដំណើរទៅវិញ ក៏ស្រូតចេញទៅជាប្រញាប់ទាំងយប់ថ្ងៃ ហើយគិតថា ខ្លួនអញប៉ងនឹងយកស្រុកសែឈួនទៅឲ្យ**ចូឆូ** គួរឬវាមកធ្វើអាក្រក់នឹងអញវិញដូច្នោះ កាលអញនឹងមកនោះបាននិយាយទុកនឹង**ឡៅជៀង**ជាខធំ គ្រានេះក៏មិនសមដូចពាក្យថា នឹងត្រឡប់ទៅវិញទទេមិនបានការ មនុស្សទាំងពួងនឹងគរហានិន្ទាសើចចំអកលេងឲ្យឈឺចិត្ត បើគិតខុសក្ដី ត្រូវក្ដី ត្រូវតែអញចូលទៅរក**ឡៅពីង**

ស្រុកកេងជីវចុះ ដើម្បីនឹងស្តាប់មើលឡែបខាយ**ឡៅពី** តើនឹងជាមនុស្សល្អឬអាក្រក់ប្រការម្តេច នឹងបានគិតប្រែប្រួលតទៅទៀត។ **ទៀវសុង**ពិចារណាគិតដូច្នេះហើយក៏បរសេះនាំទាហានស្រួតតម្រង់ទៅស្រុកកេងជីវ ទទួល**ខុងបេង**ដឹងដំណឹងក៏ប្រើ**ជូឡុង**នាំទាហានប្រាំរយចេញទៅទទួល លុះ**ជូឡុង**ចេញទៅប្រទះក៏បង្អោនខ្លួនគំនាប់ហើយសួរថា អ្នកនេះឬឈ្មោះ**ទៀវសុង**នៅស្រុកសែឈ្មន? **ទៀវសុង**ក៏គំនាប់គួរសមមកវិញហើយសួរថា អ្នកនេះឈ្មោះ**ជូឡុង**នោះឬ? **ជូឡុង**ក៏ឆ្លើយទទួលថា ខ្ញុំនេះហើយឈ្មោះ**ជូឡុង** ទាំងសងខាងក៏នាំគ្នាចុះពីលើសេះ។

**ជូឡុង**និយាយថា **ឡៅពី**ជានាយខ្ញុំដឹងដំណឹងថា អ្នកឧស្សាហ៍មកពីស្រុកឆ្ងាយ មុខជាអ្នកទាំងអស់គ្នាបានសេចក្តីនឿយហត់លំបាកណាស់ ទើបប្រើខ្ញុំឲ្យនាំរបស់សម្រាប់បរិភោគយកមកបម្រុងទទួលអ្នក ហើយសុំឲ្យឈប់ស្នាក់សម្រាកកម្លាំងបរិភោគអាហារនេះឲ្យរួចដោយស្រួលសប្បាយ ហើយសឹមចូលទៅ។ **ទៀវសុង**ដូច្នោះ ក៏គ្រេកអរណាស់ឈប់សម្រាកនៅទីនោះ។ **ជូឡុង**ក៏ឲ្យទាហានរៀបតុលៀងអាហារតាមប្រពៃណី។ **ទៀវសុង**មកគំរិះក្នុងចិត្តថា **ឡៅពី**នេះជាមនុស្សមានអធ្យាស្រ័យរាក់ទាក់រាប់អានអ្នកមានសតិបញ្ញាពិតដូចពាក្យគេថាមែន។ លុះបរិភោគរួចហើយ **ជូឡុង**ក៏នាំ**ទៀវសុង**ចូលទៅដល់ទីសំណាក់សម្រាប់ភ្ញៀវ។ **គួនអ៊ូ**នាំទាហានមួយរយនាក់មកចាំទទួល លុះឃើញ**ទៀវសុង**ចូលទៅដល់ក៏ឲ្យវាយគងស្គរនិងឃ្មោះទទួល ហើយចូលទៅគំនាប់ថា **ឡៅពី**បងខ្ញុំដឹងថាអ្នកមកពីស្រុកឆ្ងាយ ទើបប្រើខ្ញុំចេញមកចាត់ចែងទីសំណាក់ឲ្យនៅតាមសប្បាយ។ **ទៀវសុង**ក៏ឈប់នៅទីនោះមួយយប់។

លុះព្រឹកឡើង **គួនអ៊ូ** និង**ជូឡុង**ក៏នាំ**ទៀវសុង**ទៅតាមផ្លូវ ចម្ងាយផ្លូវប្រហែលហាសិបសិន (២ គ.ម) ទៀត ក៏ប្រទះនឹង**ឡៅពី**ហើយនិង**ខុងបេង**, **បាំងថង** លើក

ទាហានចេញមកទទួលគំនាប់**ទៀវសុង**ហើយថា ពីដើមក៏បានឮគេសរសើរដល់អ្នកជារឿយថាមានតម្រិះប្រាជ្ញាច្រើន លុះនឹងទៅសន្ទនាដោយមេត្រីដើម្បីឲ្យស្គាល់រាប់អានក៏ពុំបាន ព្រោះផ្លូវទៅមកឆ្ងាយដាច់អាល័យ អ្នកបានមកដល់ទីនេះ ក៏ជាបុញ្ញាលាភរបស់យើងច្រើនណាស់ សូមអញ្ជើញអ្នកចូលទៅក្នុងស្រុកកេងជីវសិន ដើម្បីនឹងបានសន្ទនាជាបដិសណ្ឋារៈ ព្រោះត្រូវនឹងប្រាថ្នា ឧបមាដូចអ្នកបានទឹកមកឲ្យផឹកនៅវេលាដែលកំពុងស្រេកឲ្យបាត់ក្រវល់ក្រវាយ **ឡៅពី**និយាយហើយក៏នាំ**ទៀវសុង**ចូលទៅក្នុងស្រុកកេងជីវ ហើយចាត់ចែងទីដ៏សមគួរឲ្យ**ទៀវសុង**អង្គុយ រួចរៀបតុលៀងអាហារបរិភោគជាមួយ និយាយលេងតាមប្រក្រតី។

**ទៀវសុង**ឮ**ឡៅពី**ប្រារព្ធតែអំពីសេចក្តីដទៃ មិនបាននិយាយដល់កិច្ចការស្រុកទេសដូច្នោះក៏ក្លែងសួរថា លោកមកនៅជាធំក្នុងស្រុកកេងជីវនេះ មានអាណាខេត្តឡើងជាចំណុះប៉ុន្មានខេត្ត? **ខុងបេង**ក៏ជែងឆ្លើយឡើងថា ស្រុកកេងជីវនេះ នាយយើងខ្ចី**ស៊ុនគួន**ចៅហ្វាយស្រុកកាំងតាំងនៅជាបណ្តោះអាសន្នទេ មិនមែនជាកម្មសិទ្ធិចំពោះខ្លួនកាលណា ព្រោះនាយយើងជាប្អូនថ្លៃ**ស៊ុនគួន** គេទាល់ហើយក៏ឲ្យនៅទៅ សព្វថ្ងៃនេះក៏ចេះតែមកតឿនទារយកវិញ នាំឲ្យរំខានក្នុងចិត្តមិនដឹងដែលនឹងប្រែប្រួលយ៉ាងណាឡើយ។ **ទៀវសុង**ថា ស្រុកកាំងតាំងនោះមានអាណាខេត្តឡើង ខេត្តឯកដល់ប្រាំមួយមណ្ឌល ខេត្តត្រីមានដល់ប៉ែតសិបមួយតំបន់ សារពើចំណីអាហារក៏បរិបូរគ្រប់ប្រការ ទាំងមនុស្សចំណុះស្រុកក៏ច្រើន នៅមិនទាន់ពេញចិត្តទៀតឬ តែស្រុកកេងជីវប៉ុណ្ណោះនៅតាមតឿនទារទៀត។ **បាំងថង**ថា នាយយើងនេះជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ**ប្រាកដ តែត្រឹមស្រុកមួយក៏រកនៅមិនបាននឹងតាំងខ្លួនក៏មិនបាន ត្រឡប់ទៅខ្ចីស្រុកគេនៅ ឲ្យសត្រូវបង្គាប់ប្រើដូច្នោះមិនគួរសោះឡើយ។

**ឡៅពី**ថា អ្នកទាំងពីរកុំនិយាយឡើយ វាសនារបស់ខ្ញុំហើយ តាមតែបុណ្យចុះ តែប៉ុណ្ណោះក៏ល្មមសុខហើយ ខ្ញុំមិនគិតនឹងប្រុងធ្វើធំឲ្យលើសវាសនាទេ។ **ទៀវសុង**ថា ខ្លួនលោកក៏ជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ** មនុស្សទាំងពួងក៏សរសើរ ទាំងមានសេចក្ដីស្រឡាញ់ក៏ច្រើន កុំបាច់តែនឹងដណ្ដើមយកស្រុកកេងជីវប៉ុណ្ណោះឡើយ សូម្បីវាសនាលោកនឹងទទួលតាំងខ្លួនជាជំនួសព្រះចៅ**ហៀនតេ**ផង ក៏គ្មាននរណានឹងគរហានិន្ទាថាម្ដេចបាន។ **ឡៅពី**លើកដៃឡើងគំនាប់ហើយហាមឃាត់ថា ចូរឲ្យអ្នកមានសេចក្ដីអាណិតខ្ញុំចុះ កុំថាដូច្នេះទៀតឡើយ លើសវាសនាណាស់មិនគួរសមទេ។ **ឡៅពី**ក្លែងនាំនិយាយតែពីសេចក្ដីដទៃដល់បីថ្ងៃហើយ **ទៀវសុង**គំនាប់លានឹងទៅស្រុកសៃឈ្វនវិញ **ឡៅពី**ក៏នាំទាហានចេញជូនដំណើរទៅដល់ក្រៅស្រុក ហើយក៏ឲ្យរៀបតុលៀងអាហារ។

**ឡៅពី**និយាយថា អ្នកមកដល់ស្រុកកេងជីវនេះ ខ្ញុំបានឃាត់អ្នកឲ្យនៅលេងដល់បីថ្ងៃ បានសន្ទនាគ្នាក៏បានសេចក្ដីសប្បាយ ឥឡូវអ្នកចរចាលាកលាយើងទៅហើយ កាលណាឡើយនឹងបានជួបឃើញមុខគ្នាទៀត ថាហើយ**ឡៅពី**ក៏យំខ្សឹកខ្សួល **ទៀវសុង**ឃើញដូច្នោះក៏ឲ្យនឹកអាណិតអានាថ**ឡៅពី**ពន់ប្រមាណ ទើបនិយាយថា ខ្លួនខ្ញុំសព្វថ្ងៃនេះក៏គិតថានឹងចង់មកនៅជាមួយនឹងលោក ឲ្យលោកប្រើប្រាស់ តែថានៅមិនទាន់មានឱកាសត្រូវកលការ មួយយ៉ាងទៀត បើលោកនឹងតាំងនៅក្នុងស្រុកកេងជីវនេះ ក៏ឃើញថាមិនជាទីមាំមួនបានឡើយ ព្រោះខាងលិច ឯកើតនោះ**ស៊ុនគួន**ក៏ជាសត្រូវម្ខាង ខាងទិសឯជើងសោត **ចូឆូ**ក៏ប៉ងតែនឹងមកញាំញី កាលណាឡើយលោកនឹងបានសេចក្ដីសុខក្សេមក្សាន ឧបមាដូចលោកបានមកនៅកណ្ដាលភ្នក់ភ្លើង។ **ឡៅពី**ថា យើងក៏ដឹងខ្លួនថា ដែលនៅក្នុងស្រុកកេងជីវនេះអស់មានសេចក្ដីសប្បាយហើយ តែថាទាល់គំនិតហើយក៏មិនដឹងធ្វើម្ដេច សព្វថ្ងៃខំសម្លឹងមើលក៏មិន

ឃើញមានទីកន្លែងឯណា គួរនឹងយកទីអាស្រ័យបាន។ **ទៀវសុង**ថា ឯស្រុកសែឈ្នួននោះ ភូមិឋានក៏ធំទូលាយមនុស្សម្នាក៏ច្រើន ស្រូវអង្ករចំណីត្រីសាច់ក៏បរិបូរ អ្នកដែលមានសតិបញ្ញាទាំងពួង ក៏រាប់អានស្រឡាញ់លោកដោយឮថាជាអ្នកមានអធ្យាស្រ័យមេត្រីរាប់អានដោយស្មោះត្រង់ បើនឹងលើកទ័ពទៅវាយយកស្រុកសែឈ្នួននោះ តែចង្អុលដៃមួយទៅក៏គង់បានដោយងាយ មិនព្រួយលំបាកដល់សេនាទាហានទាំងពួង មុខជានឹងតាំងនៅជាសុខក្នុងស្រុកនោះបាន។

**ឡៅពី**ថា **ឡៅជៀង**ចៅហ្វាយស្រុកសែឈ្នួននោះ ក៏ជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ**ដូចខ្លួនខ្ញុំ ហើយក៏បានទំនុកបម្រុងអាណាប្រជានុរាស្ត្រមកពីដើម អ្នកដទៃក៏នឹងអាចទៅធ្វើអន្តរាយបាន។ **ទៀវសុង**ថា លោកមានប្រសាសន៍នោះក៏គួរមែន ខ្ញុំបាទក៏មិនមែនជាមនុស្សលក់ម្ចាស់ទេ តែថាបានមកជួបប្រទះនឹងលោក ហើយក៏មានសេចក្ដីអាណិតស្រឡាញ់លោកណាស់ ទើបនាំព័ត៌មាននេះដោយការរាក់ជ្រៅឲ្យលោកជ្រាប ព្រោះ**ឡៅជៀង**នោះជាមនុស្សលោភឥតខ្មាស សូម្បីជាពូជព្រះរាជវង្សក៏មែន តែមិនមានសតិបញ្ញាសោះ ទាំងមិនចេះចិញ្ចឹមមនុស្សអ្នកមានតម្រិះប្រាជ្ញា មួយទៀត**ទៀវឡូ**នៅខាងជើងក៏ប៉ងតែនឹងមកធ្វើអន្តរាយ មនុស្សទាំងឡាយក៏ជ្រួលជ្រើមប្រុងតែនឹងប្រែគំនិតទៅដោយខ្លួនៗ បើយ៉ាងដូចលោកដូច្នេះ លើកទ័ពទៅមុខជាអ្នកស្រុកនោះនឹងមានសេចក្ដីត្រេកអរ ខូចជានឹងគង់ចូលមកខាងលោកជាច្រើន តែខ្ញុំបាទមកគ្រានេះ គឺប្រាថ្នានឹងយកស្រុកសែឈ្នួនទៅឲ្យ**ចូឆ្វ** តែឃើញ**ចូឆ្វ**អាស្រូតរាជសម្បត្តិនោះ ព្រហើនក្អេងក្អាង កាន់ខ្លួនថាល្អលើសគេ លុបលាងមនុស្សដែលមានសតិបញ្ញាចេញអស់ នោះខ្ញុំបាទនឹងលើកស្រុកឲ្យទៅក៏មិនជាការមានប្រយោជន៍ បានជាខ្ញុំបាទគេចមករកលោក ប្រាថ្នានឹងជម្រាបសេចក្ដីទាំងនេះ សុំឲ្យលោករិះគិតតែខែមើលតាមយោបល់ចុះ បើបានស្រុកសែឈ្នួនហើយ ក៏នឹងបានគិត

រកឧបាយតទៅទៀត មុខជានឹងបានជាធំដូចសេចក្តីប្រាថ្នា បើលោកពេញចិត្តត្រូវការនឹងយកស្រុកសែឈ្នួនជាប្រាកដកាលណា ខ្ញុំបាទនឹងទទួលធុរៈចាត់ការខាងក្នុងមិនឲ្យមានទាក់ទាម តែឥឡូវនេះនៅមិនទាន់ដឹងជាចិត្តលោកនឹងចង់គិតការប្រការម្តេច។

**ឡៅពី**ថា អ្នកនិយាយមកនេះក៏ជាទីពេញចិត្តខ្ញុំណាស់ តែថាខ្ញុំទាល់គំនិតព្រោះដ្បិត**ឡៅជៀង**ជាសែជាមួយគ្នា បើនឹងលើកពលយោធាទៅវាយយកតែម្តងមនុស្សទាំងពួងនឹងមិននាំគ្នាគរហានិន្ទាទេឬ? **ទៀវសុង**ថា ធម្មតាកើតមកជាប្រុសកាលនឹងចង់ប្រាថ្នាធ្វើធំនោះ លុះក្រឡេកទៅឃើញទីចន្លោះឱកាសល្អហើយ ក៏ត្រូវតែធ្វើតាម ការដែលរេរាចិត្តគិតមិនដាច់ស្រេចព្រោះដូច្នេះដូច្នោះ ចេះតែខ្លាចគេនិន្ទាយូរទៅបើមានប្រយោជន៍នោះទៅគេឯណា យើងក៏ត្រូវអសារសោះទទេ លុះនឹងគិតកែធ្វើជាក្រោយក៏មានតែសេចក្តីលំបាក។ **ឡៅពី**ថា អ្នកមានចិត្តមេត្តាពន្យល់យើងសព្វគ្រប់ដូច្នេះជាគុណអនេកណាស់ តែថាស្រុកសែឈ្នួននេះយើងក៏ដឹងហើយ ជាផ្លូវដាច់ស្រយាលឆ្លងជ្រោះជ្រលងដងស្ទឹងនិងភ្នំខ្ពស់ទាបជាច្រើនអន្លើ នឹងដើរទៅមកក៏លំបាកណាស់ សេះឬលាជាពាហនៈ នឹងទៅមកក៏កម្រ បើនឹងគិតធ្វើការនោះតើនឹងត្រូវកែប្រែប្រការដូចម្តេចទើបស្រួល? **ទៀវសុង**ក៏លូកតាមចន្លោះទ្រូងក្នុងអាវទាញយកផែនទីស្រុកសែឈ្នួនជូនទៅ**ឡៅពី**ហើយថា លោកមិនចូលចិត្តផ្លូវដែលនឹងទៅមកក្នុងតំបន់ស្រុកសែឈ្នួននោះ ក៏ចូរពិគ្រោះមើលតាមផែនទីនេះចុះ ទោះនឹងមានកំពង់ទឹកនិងច្រកភ្នំ ហើយនឹងកន្លែងដែលមានត្រីសាច់សម្រាប់ជាអាហារបរិភោគនៅត្រង់អន្លើឯណា នឹងដាច់ស្បៀងអាហារឬមានបរិបូរប្រការម្តេច ក៏មានស្រេចសព្វគ្រប់នៅក្នុងផែនទីនេះទាំងអស់ ហើយក្នុងស្រុកសែឈ្នួននោះ ភឿនសម្លាញ់របស់ខ្ញុំបាទមានពីរនាក់ ម្នាក់ឈ្មោះ**ហ្លួតចេង** ម្នាក់ឈ្មោះ**បេងតាត់**ទាំងពីរ

នាក់នេះក៏ជាទីទុកចិត្តបាន ខ្ញុំបាទនឹងទៅនិយាយក៏គង់មិនទទឹងទាស់ទែង បើ**ហ្លួតចេង, បេងតាត់**មកដល់លោកហើយ ក៏ចូលប្រឹក្សាពិគ្រោះគ្នាចុះ កុំគិតសង្ស័យអ្វីឡើយ។ **ឡៅពី**លើកដៃឡើងគំនាប់ ហើយថា ដែលអ្នកបានប្រាប់ពន្យល់ក្នុងកលកិច្ចការណែនាំឲ្យខ្ញុំបានដឹងដូច្នេះ គុណអ្នកមិនមានទីបំផុត បើសម្រេចរាជការកាលណា ខ្ញុំនឹងសងគុណអ្នកឲ្យដល់ខ្នាត។ **ទៀវសុង**ថា ខ្លួនខ្ញុំបាទនេះមានសេចក្ដីប្រាថ្នានឹងរកចៅហ្វាយនាយមានសេចក្ដីល្អ មានចិត្តសុចរិតដឹងអធ្យាស្រ័យក៏បានដូចចិត្តហើយ ទោះបីខ្ញុំបាទនឹងដឹងយល់ការអ្វីជាការកំបាំងក៏មិនគួរនឹងលាក់ទុក ត្រូវតែជម្រាបឲ្យអស់ ដែលនឹងតាំងចិត្តឲ្យលោកតបស្នងសងគុណវិញនោះគ្មានសោះឡើយ លុះនិយាយហើយក៏គំនាប់លាចេញទៅ។ **ខុងបេង**ក៏ប្រើ**គួនអ៊ូ**នាំទាហានជូនដំណើរទៅ ចម្ងាយផ្លូវមួយរយសិន (៤គ.ម) ហើយក៏ត្រឡប់វិលមកវិញ។

លុះ**ទៀវសុង**ទៅដល់ស្រុកសែឈ្នួនហើយ ក៏គេចចូលទៅរក**ហ្លួតចេង**ជាភឿនសម្លាញ់ស្និទ្ធនឹងគ្នាមកពីដើម ហើយក៏ពណ៌នារឿងរ៉ាវឲ្យស្ដាប់តាមសេចក្ដីដែល**ចូឆ្វ**ធ្វើអាក្រក់មាក់ងាយគ្រប់ប្រការ ហើយថា ឯចិត្ត**ចូឆ្វ**នោះ បើយើងរាល់គ្នានឹងចង់ទៅធ្វើខ្លួនឲ្យបានសេចក្ដីសុខសម្រាន្តនោះ គង់តែនឹងមានសេចក្ដីទុក្ខទៅវិញ មិនគួរនឹងគិតយកស្រុកសែឈ្នួនទៅឲ្យសោះឡើយ ឥឡូវខ្ញុំលើកស្រុកនេះទៅឲ្យ**ឡៅពី**ទៅហើយ ទើបត្រឡប់មកឲ្យដំណឹងអ្នក តើនឹងយល់ឃើញប្រការម្ដេច?

**ហ្លួតចេង**ឮដូច្នោះក៏មានចិត្តត្រេកអរណាស់ថា ពីដើមខ្ញុំក៏គិតថានឹងយកខ្លួនទៅចូលជ្រកកោនពឹងបុណ្យ**ឡៅពី**ដែរ ព្រោះឃើញថា**ឡៅជៀង**នេះជាមនុស្សមិនកើតជាការអ្វីសោះ ឥឡូវអ្នកស្ម័គ្រទៅនៅនឹង**ឡៅពី**លើកយកស្រុកសែឈ្នួនទៅឲ្យហើយ ក៏ដូចជាគំនិតរបស់ខ្ញុំដែលគិតទុកដែរ យើងនឹងរង្កៀសគ្នាថ្វី ទទួល**បេងតាត់**ចូលមកដល់ក៏សួរថា អ្នកទាំងពីរនិយាយគ្នានេះ ខ្ញុំស្ដាប់យល់ចិត្តអស់ហើយ

ប្រហែលជាលើកយកស្រុកសែឈ្មួនទៅឲ្យអ្នកដទៃហើយ។ **ទៀវសុង**ថា អ្នកថានេះត្រូវណាស់ គឺត្រូវនឹងចិត្តយើងទាំងពីរនាក់ តែថាអ្នកមានប្រាជ្ញាចូរទាយទៅមើលថាយើងនឹងលើកឲ្យអ្នកឯណា? **បេងតាត់**ថា ស្រុកសែឈ្មួននេះដែលនឹងលើកឲ្យអ្នកដទៃនោះ យើងសម្លឹងមើលហើយ មិនមានឃើញសមគួរដល់អ្នកឯណាសោះ ឃើញសមគួរតែនឹងលើកឲ្យ**ឡៅពី**មួយទើបត្រូវ។ **ទៀវសុង, ហួតចេង, បេងតាត់** បីនាក់នេះក៏ទះដៃឡើងសើចព្រមគ្នា ហើយនិយាគ្នាតទៅទៀត **ទៀវសុង**ថា យើងទាំងបីយល់ឃើញដូចគ្នា ហើយកុំបង្អង់ឡើយ ព្រឹកនេះខ្ញុំនឹងចូលទៅរក**ឡៅជៀង**នឹងនិយាយឲ្យ**ឡៅជៀង**ប្រើឲ្យអ្នកទាំងពីរទៅរក**ឡៅពី**ឯស្រុកកេងជីវ។ **ហួតចេង, បេងតាត់**ក៏ទទួលពាក្យ**ទៀវសុង**។ **ទៀវសុង**ក៏ចូលទៅរក**ឡៅជៀង** ៗសួរថា អ្នកទៅស្រុកក្រុងបានខរាជការមកប្រការម្តេចខ្លះ?

**ទៀវសុង**ជម្រាបថា ខ្ញុំបាទបានទៅដល់ស្រុកក្រុងនោះ ប្រាថ្នានឹងការពារមិនឲ្យមានភ័យអន្តរាយដល់ស្រុកយើង ក៏មិនសមតាមសេចក្តីពិត ព្រោះ**ចូឆ្វ**ជាសត្រូវរាជសម្បត្តិ មានចិត្តនោះអាក្រក់ណាស់ ឯសេចក្តីអាក្រក់របស់**ចូឆ្វ**នោះនឹងពណ៌នាមិនអស់ឡើយ ឥឡូវមានចិត្តកំរើបគិតនឹងប៉ងធ្វើអន្តរាយដល់ស្រុកយើងទៀត។ **ឡៅជៀង**ថា បើដូច្នោះយើងនឹងគិតប្រការម្តេចឲ្យបានស្រួល។ **ទៀវសុង**ថា ខ្ញុំបាទគិតឃើញថា **ឡៅពី**និងលោកជាសែជាមួយគ្នា ខណៈកាល**ជីវឃី**ដុតទ័ព**ចូឆ្វ**អស់ពលប៉ែតសិបបីម៉ឺននៅមាត់ពាមស្រុកកាំងតាំងនោះ **ឡៅពី**ក៏ជួយធ្វើការទាល់តែសម្រេច **ចូឆ្វ**ខ្លាចប្រាជ្ញានិងគំនិត**ឡៅពី**ជាដរាប តែកាលណាចេញឈ្មោះ**ឡៅពី**ក៏ដូចដេញព្រលឹងអស់ពីខ្លួន នឹងញញើតអ្វីយ៉ាង**ទៀវឡូ**ប៉ុណ្ណោះ វាក៏គង់កោតខ្លាច**ឡៅពី**ណាស់ សុំឲ្យលោករិះគិតចងមេត្រីនឹង**ឡៅពី**តាមប្រពៃណីទៅចុះ ដើម្បីនឹងបានជួយការពារស្រុកយើង **ទៀវឡូ**នឹងមិនអាចមកបៀតបៀនបាន។ **ឡៅជៀង**ថា ដែលអ្នកនិយាយ

នេះពេញជាត្រូវចិត្តយើងណាស់ ព្រោះយើងបានគិតបំណងទៅចងមេត្រីនឹង**ឡៅពី**ជាយូរមកហើយ ឥឡូវអ្នកថាមកត្រូវនឹងចិត្តយើង តែលំបាកគិតនឹងប្រើឲ្យអ្នកឯណាទៅជាបម្រើបាន។

**ទៀវសុង**ថា ដែលនឹងឲ្យកាន់សំបុត្រទៅដល់**ឡៅពី**នោះឃើញមានតែមនុស្សពីរនាក់គឺ**ហ្លួតចេង**និង**បេងតាត់** ទើបគួរនឹងប្រើឲ្យបានការរាជការជាប្រាកដ។ **ឡៅជៀង**ស្តាប់យល់ត្រូវនឹងចិត្ត ទើបប្រើឲ្យទៅហៅ**ហ្លួតចេង**និង**បេងតាត់** ៗចូលមកដល់ហើយក៏ប្រាប់សេចក្តីឲ្យដឹងគ្រប់ប្រការ ទើបឲ្យតែងសំបុត្រជាសេចក្តីថា "ខ្ញុំបាទ**ឡៅជៀង**ជាប្អូន សូមគំនាប់មកដល់**ឡៅពី**ជាបង ព្រោះសព្វថ្ងៃនេះ ខ្ញុំបាទមានចិត្តនឹករឭកដល់បងណាស់ តែថាជាផ្លូវដាច់ស្រយាលឆ្ងាយអាល័យ កម្រដែលនឹងទៅមកបានតាមស្រួល លុះនឹងចាត់ចែងរបស់នាំមកគំនាប់តាមប្រពៃណីក៏មិនទាន់ការ ដែលមិនសមគួរដោយប្រការឯណា ក៏សូមឲ្យបងអត់ទោសប្អូនទៅចុះ ឥឡូវនេះ**ទៀវឡូ**វាគិតការធំក្រៃលែង ប៉ងនឹងមកធ្វើអន្តរាយដល់ខេត្តដែនរបស់ខ្ញុំបាទ ៗក៏សម្លឹងរកទីពឹងពុំបាន តាមចិត្តគិតប្រាថ្នានឹងពឹងពាក់អាស្រ័យតែបងមួយ ដោយបុរាណនិយាយទុកមកថា ដប់អ្នកដទៃមិនស្មើនឹងសែជាមួយគ្នាតែម្នាក់ ហេតុនេះ សូមឲ្យបងអនុគ្រោះជួយដោះទុក្ខធុរៈខ្ញុំបាទ កុំឲ្យមានសេចក្តីអាប់យសដោយ**ទៀវឡូ**នោះឡើយ"។ លុះតែងសំបុត្រស្រេចហើយ ក៏ប្រគល់ឲ្យ**ហ្លួតចេង**កាន់ទៅដល់**ឡៅពី** ឲ្យ**បេងតាត់**នាំទាហានប្រាំពាន់លើកចេញទៅនៅពាក់កណ្តាលផ្លូវចាំទទួល**ឡៅពី** បើ**ឡៅពី**មកដល់កាលណា ក៏ឲ្យអញ្ជើញចូលមកក្នុងស្រុកសែឈ្មួន។

ខណៈនោះ**អ៊ុយគួន**ទីប្រឹក្សានៅស្រុកសែឡុង ដឹងថា**ឡៅជៀង**នឹងប្រើ**ហ្លួតចេង**កាន់សំបុត្រទៅគំនាប់អញ្ជើញ**ឡៅពី**ដូច្នោះ ទើបរត់រលះរលាំងចូលមកហើយស្រែកថា ហេតុម្តេចលោកមកជឿពាក្យសម្តី**ទៀវសុង** នឹងប្រុងលើកយក

ស្រុកសៃឈ្លួនទាំងដប់មណ្ឌលទៅឲ្យអ្នកដទៃវិញដូច្នេះ? **ទៀវសុង**បានឮក៏ភ័យណាស់ អង្គុយស្ងាំងកាំង។ **ឡៅជៀង**ឆ្លើយថា ហេតុម្តេចបានជាអ្នកមកថាដូច្នេះ? អ្នកឯងមិនដឹងឬ **ឡៅពី**នោះជាសែជាមួយនឹងយើង? ដែលនឹងឲ្យទៅអញ្ជើញមកទាំងនេះ ក៏ប្រាថ្នានឹងឲ្យជួយការពារស្រុកដើម្បីឲ្យនៅជាសុខតទៅប៉ុណ្ណោះ អ្នកឯងយល់ថា ខុស ឬត្រូវប្រការម្តេចបានជាថាដូច្នេះ?

**អ៊ុយគួន**ថា លោកមានប្រសាសន៍នោះត្រូវហើយ ព្រោះ**ឡៅពី**និងលោកជាសែជាមួយគ្នា តែថា**ឡៅពី**មានប្រាជ្ញាមានគំនិតឡៃបខាយច្រើនណាស់ ប្រៀបដូចខ្លាកញ្ចាស់ចាំសីល រឹតតែធ្វើចិត្តនោះទោរទន់សុភាពរាបសាទាបក្រុបកដោយអធ្យាស្រ័យ ឲ្យមនុស្សដទៃស្រឡាញ់រាប់អានទូទៅ ឃើញកិរិយាក្រៅក៏សំដៅថាល្អ ឯចិត្តនោះមិនមែនបរិសុទ្ធទេ ប្រការមួយទៀត **ឡៅពី**នោះក៏មាន**ខុងបេង** និង**ប៉ាំងថង**ជាទីប្រឹក្សាមាំណាស់ ទាំង**គួនអ៊ូ, តៀវហ៊ុយ, អ៊ុយអៀន, ហងតុង** សឹងជាសេនាដៃឯកចម្លែកខ្លាំងពូកែទៀត ដែលលោកនឹងឲ្យទៅអញ្ជើញ**ឡៅពី**យកមកទុកក្នុងស្រុកសៃឈ្លួននេះ កាលណា**ឡៅពី**នឹងដាក់ខ្លួនឲ្យតូច ដូចគេយករាជសីហ៍មកទុកក្នុងផ្ទះនឹងបានឬ? មួយទៀតស្រុកសៃឈ្លួននេះ បើនឹងមានចៅហ្វាយស្រុកពីរនាក់ ក៏ដូចជាដំរីធ្លាក់ចុះប្រេងក្នុងរោងជាមួយគ្នានឹងនៅម្តេចបាន ខ្ញុំស្មានថាប្រហែល**ទៀវសុង**នេះបានវេះចូលទៅស្រុកកេងជីវ និយាយឲ្យកតិកាសញ្ញានឹង**ឡៅពី** ទើបច្រឡើសមកលួងបញ្ឆោតលោកឲ្យយល់តាម ដើម្បីនឹងចង់បង្ខូចស្រុកលើកទុកឲ្យអ្នកដទៃ សូមឲ្យលោករៀសរើចាប់ខ្លួន**ទៀវសុង**សម្លាប់ចេញទើបគួរសម ឯស្រុកសៃឈ្លួននេះប្រៀបបីដូចភ្នំដ៏ធំនៅនឹងមាំណាស់ លោកកុំអាលច្រឡាសច្រឡោតឆោតតាមសម្តីគេញុះញង់នោះឡើយ គ្មាននរណាឯងហើយនឹងមកធ្វើ

អន្តរាយបានទេ ត្រូវយើងរិះគិតគ្នេរប្រមូលពលរេហ៍ឲ្យបានច្រើន ហើយលើកទៅកម្ចាត់**ឡៅពី**ចេញទើបបាន។

**ឡៅជៀង**ឆ្លើយថា អ្នកនិយាយនេះគួរហើយ តែបើ**ចូឆ្វ** និង**ទៀវឡូ**លើកទ័ពមកធ្វើអន្តរាយយើងវិញ តើអ្នកនឹងត្រូវរិះគិតប្រការម្ដេចទៅវិញ? **អ៊ុយគួន**ថា ដែលនឹងការពារ**ចូឆ្វ**និង**ទៀវឡូ**នោះ មិនជាការក្រប៉ុន្មានទេ បើ**ចូឆ្វ**និង**ទៀវឡូ**លើកមកយើងនឹងរៀបចំទាហានលើកទៅរកក្សាគយដើមផ្លូវការពារទុកឲ្យមាំ កុំឲ្យចូលមកបាន គង់នឹងទ្រាន់ចិត្តលើកត្រឡប់ទៅឯង ស្រុកសៃឈួនក៏នឹងនៅជាសុខតទៅ។

**ឡៅជៀង**ឮដូច្នោះឆ្លើយថា ធម្មតាសឹកលើកមកដល់ប្រទល់ព្រំស្រុកជិតនឹងលុកយកបានហើយ នឹងថយត្រឡប់ទៅវិញនោះក៏មិនដែលឮមាន ដូចភ្លើងឆេះរាលដាលដល់រោមចិញ្ចើមហើយ នឹងមិនក្ដៅដល់ភ្នែកទេឬ? បើនឹងលត់ចេញនឹងស្ងៀមនៅ ឲ្យភ្លើងនោះរលត់ឯងទៅវិញបានឬ? ពាក្យនេះយើងមិនយកជាត្រូវទេ អ្នកថយចេញទៅចុះ។ **អងលុយ**ឃើញដូច្នោះក៏ឃាត់ថា លោកមកជឿស្ដាប់ពាក្យ**ទៀវសុង**នោះ បីដូចជាយកភ័យមកដាក់ខ្លួន។

**ឡៅជៀង**ថា ដែលយើងនឹងឲ្យទៅអញ្ជើញ**ឡៅពី**មកគ្រានេះ ក៏ប្រាថ្នានឹងឲ្យជួយរក្សាស្រុកទេស ហេតុអ្វីអ្នកមកថាមានភ័យដល់ខ្លួន។ **អងលុយ**ថា **ទៀវឡូ**នេះ ទោះបីជាសត្រូវនឹងលោក ក៏បីដូចជាកមរមាស់ ដែលកើតនៅក្រោយខាងក្រៅ បើនឹងយកក្រចកកេះចេញទៅក៏គង់ជាបាត់ទៅវិញ ឯ**ឡៅពី**នឹងចូលមកតាំងខ្លួននៅក្នុងស្រុកនោះ បីដូចកើតបូសជាប់នៅក្នុងថ្លើមកណ្ដាលដើមទ្រូង កម្រដែលនឹងយោងផ្គុំឲ្យជាបាន ព្រោះ**ឡៅពី**ជាមនុស្សអកតញ្ញូនឹងគុណអ្នកឯណា **ចូឆ្វ**យកទៅចិញ្ចឹមរក្សាក៏ត្រឡប់ធ្វើកាចអាចប្រទូសរ៉ាយគេវិញ។ កាលទៅនៅនឹង**ស៊ុនគួន**សោត ក៏បញ្ឆោតយកស្រុកកេងជីវនៅទាល់តែរហូត គឺមិនជាមនុស្សទៀងត្រង់នឹងអ្នកឯណា ដែល

លោកនឹងទុកចិត្ត**ឡៅពី**ទទួលយកមកទុករក្សាក្នុងស្រុកនេះ មុខជានឹងកើតអន្តរាយជាប្រាកដ។

**ឡៅជៀង**ឮដូច្នោះក៏គំហកស្រែកឲ្យ**អងលុយ**ថា **ឡៅពី**ជាសែជាមួយនឹងយើង កាលណានឹងគិតធ្វើកាចដល់យើងជាបងប្អូន អ្នកឯងនិយាយនេះមិនគួរសោះ ក៏បង្គាប់ទាហានឲ្យចាប់ខ្លួន**អងលុយ**និង**អ៊ុយគួន**នាំចេញទៅ ហើយប្រញាប់ឲ្យ**ហួតចេង**ស្រូតកាន់សំបុត្រនោះ លុះ**ហួតចេង**ទៅដល់ស្រុកកេងជីវហើយ ក៏ចូលទៅគំនាប់**ឡៅពី**រួចជូនសំបុត្រឲ្យមើល **ឡៅពី**ដឹងសេចក្តីក្នុងសំបុត្រហើយ ក៏មានអំណរសាទរណាស់ បង្គាប់ឲ្យរៀបតុលៀងអាហារតាមប្រពៃណី។

ខណៈកាលកំពុងសេពសុរានោះ **ឡៅពី**ក៏និយាយថា **ទៀវសុង**ប្រាប់ខ្ញុំថាឈ្មោះអ្នកជាមនុស្សមានសតិបញ្ញាទាំងចិត្តក៏ល្អសុចរិត ខ្ញុំក៏មានសេចក្តីត្រេកអរណាស់ ឥឡូវនេះអ្នកមកដល់បានឃើញមុខសន្ទនាគ្នាក៏ជាបុញ្ញលាភប្រពៃណាស់។ **ហួតចេង**ថា ខ្ញុំបាទចេញនាមដល់លោក ខ្ញុំបាទក៏មានអំណរ ដែលបានមកក្នុងគ្រានេះប្រាថ្នានឹងចង់ដឹងថា**ទៀវសុង**មកចរចានឹងលោកនោះ លោកនៅមានសេចក្តីវិតក្កនៅឡើយឬម្តេច?

**ឡៅពី**ថា ខ្ញុំសព្វថ្ងៃនេះក៏ជាមនុស្សអភ័ព្វណាស់ ផែនដីទាំងមូលធំណាស់ តែនឹងរកទីលំនៅៗឲ្យបានច្បាស់លាស់ជារបស់ខ្លួនមិនបាន ត្រូវខ្ចីស្រុកគេនៅជាប្រធានទម្រាំគិតអានបានមិនដឹងជាថ្ងៃណា គិតទៅគួរឲ្យឈឺផ្សាក្នុងចិត្តពន់ប្រមាណសូម្បីតែបក្សាបក្សីវាក៏គង់មានឈើជាទ្រនំខ្ពស់ កើតមកជាមនុស្សមិនមានទីលំនៅហើយ ក៏គួរឲ្យសង្វេគវេទនា ដែល**ទៀវសុង**មកនិយាយថាឲ្យដឹងនោះ ខ្ញុំក៏អរណាស់ដែរ តែថាទាល់គំនិតព្រោះដ្បិត**ឡៅជៀង**ជាសែជាមួយ មិនដឹងជាធ្វើដូចម្តេច។ **ហួតចេង**ថា ស្រុកសែឈ្នួននោះភូមិដ្ឋានក៏មាំមួន បរិបូរដោយស្បៀងអាហារ

ជាទីឧត្តមជាងស្រុកដទៃ បើអ្នកឯណាមិនមានប្រាជ្ញាស្មារតីហើយ ទៅតាំងខ្លួននៅជាធំក្នុងស្រុកនោះ ក៏គង់ធ្លោះត្រឡប់ទៅជារបស់អ្នកដទៃ ឥឡូវ**ឡៅជៀង**ឲ្យមានសំបុត្រមកដល់លោក ក៏ដូចជាលើកស្រុកនោះមកជូនហើយ គឺជាវាសនារបស់លោកប្រាកដ លោកត្រូវកំណត់គិតយកចុះ កុំបីបោះបង់ចោលស្រុកសែឈ្នួននោះឡើយ ដែលលោកនឹងគិតធ្វើការតទៅខាងមុខ ខ្ញុំបាទនឹងជួយទំនុកបម្រុងឲ្យបានសម្រេចតាមសេចក្តីប្រាថ្នា ទោះបីជីវិតខ្ញុំបាទនឹងស្លាប់អសារក៏មិនសោកស្តាយ។ **ឡៅពី**ក៏លើកដៃឡើងគំនាប់ហើយថា ខ្ញុំមានអំណរគុណនឹងអ្នកច្រើនណាស់។

លុះសេពសុរាហើយ **ខុងបេង**ក៏ចាត់ចែងទីសំណាក់ឲ្យ**ហ្លួតចេង**នៅអាស្រ័យតាមសមគួរ។ **បាំងថង**ឃើញ**ឡៅពី**អង្គុយជ្រប់សញ្ជប់នៅដូច្នោះ ក៏ចូលមកនិយាយថា ឯធម្មតាអ្នកមានសតិបញ្ញានោះ បើនឹងគិតធ្វើការអ្វី ទោះនឹងពេញចិត្តក្តី មិនពេញចិត្តក្តី ក៏ត្រូវតែនិយាយឲ្យលេចឮច្បាស់ឡើង ដែលនឹងមកសញ្ជប់សញ្ជឹងរារែកចិត្ត ក៏ហាក់បីដូចមនុស្សគ្មានតម្រិះប្រាជ្ញា ដូចយ៉ាងលោកជាមនុស្សមានសតិបញ្ញានឹងមកអង្គុយកើតទុក្ខថយមុខថយក្រោយនៅដូច្នេះមិនគួរសោះ។ **ឡៅពី**ថា អ្នកនិយាយមកនោះក៏ត្រូវហើយ តែថា ខ្ញុំមកពិគ្រោះមើលឃើញមិនដឹងបើនឹងគិតយ៉ាងណា សតិបញ្ញារបស់អ្នកនឹងយល់ឃើញប្រការម្តេច?

**បាំងថង**ថា ឯស្រុកកេងជីវនេះ ខាងទិសឯកើតមាន**ស៊ុនគួន** ជាទោសសត្រូវនៅខាងនោះ ខាងទិសឯជើងមាន**ចូឆូ**ជាបច្ចាមិត្ត គិតតែនឹងបៀតបៀនរាល់ថ្ងៃ សព្វថ្ងៃនេះដូចជាគេនៅក្នុងកណ្តាលគំនរភ្លើងដែលឆេះរាលចូលមក ព្រោះសត្រូវនៅសៀតស៊កជុំវិញខ្លួន ឯស្រុកសែឈ្នួននោះមានមនុស្សក៏នៅច្រើនកុះករ ទ្រព្យសម្បត្តិក៏បរិបូរ ព្រមទាំងចំណីត្រីសាច់មិនចេះខ្វះខាត បើសង្ខាតទៅយកស្រុកនោះបាន ក៏នឹងមានតែសេចក្តីសុខសប្បាយ ឥឡូវ**ទៀវសុង**និង**ហ្លួតចេង**ទាំងពីរនាក់ចូលមក

ពិភាក្សាដល់លោកថានឹងទំនុកបម្រុង ដូចទេព្ដាមកចង្អុលកំណាប់ទ្រព្យមាសឲ្យហើយ ម្ដេចឡើយលោកមកមានវិតក្កអង្គុយសញ្ជប់សញ្ជឹងដូច្នេះ?

**ឡៅពី**ថា ដែលខ្ញុំមានសេចក្ដីវិតក្កនេះ ព្រោះឃើញថា **ចូឆ្ង**នឹងខ្ញុំធ្វើការសព្វថ្ងៃនេះដូចទឹកនិងភ្លើង គឺ**ចូឆ្ង**ជាភ្លើង រមែងធ្វើឲ្យអាណាប្រជានុរាស្ត្របានសេចក្ដីក្ដៅក្រហាយ ព្រោះចិត្តវាជាមនុស្សតែងប្រទូស្តគេឲ្យវិនាស ហើយនឹងលើកតម្កើងខ្លួនឲ្យជាធំពេញពាសក្នុងអាណាចក្រមណ្ឌល ឯខ្លួនខ្ញុំដូចទឹកត្រជាក់ជាអ្នកយោគយល់អាណិតគេ បើនឹងធ្វើការអ្វីក៏រមែងតាំងចិត្តគិតគ្នេរឲ្យបានចម្រើនប្រយោជន៍ស្រុកនិងគិតឲ្យបានសុខអាណាប្រជានុរាស្ត្រទាំងឡាយទាំងពួង តេជៈផល ដែលចិត្តជាសត្យសុចរិតដូច្នេះ ទើបមកបណ្ដាលឲ្យមានតម្រិះចេះតាំងខ្លួនបានដល់ត្រឹមណេះហើយ បើនឹងលះបង់សេចក្ដីសត្យដែលប្រព្រឹត្តមកជាទម្លាប់ ដោយឃើញទ្រព្យហើយនឹងលះបង់សេចក្ដីសត្យ កាត់យកតាមចិត្តលោភខុសពីផ្លូវយុត្តិធម៌នោះនឹងធ្វើមិនបាន។

**បាំងថង**ថា ដែលលោកបានតាំងនៅក្នុងសេចក្ដីសត្យនោះ ក៏ជាទីទេវតាមនុស្សស្រុះស្រួលពោលសរសើរលោកណាស់ហើយ តែថាផែនដីសព្វថ្ងៃនេះមិនបានជាប្រក្រតីសោះ ចេះតែកើតកលិយុគផ្សេងៗ មនុស្សទាំងចាស់ទាំងក្មេងកាន់អាវុធរក្សាខ្លួនមិនមានផុតពីដៃ បើលោកនឹងយកចិត្តទៅកែខែក៏ឃើញថាមិនបានធម្មតាភ័យមកដល់ខ្លួនប្រាណហើយ ត្រូវតែគិតការពារឲ្យរួចខ្លួនសិន ទើបទុកថាជាអ្នកមានប្រាជ្ញា ដូចជាស្រុកសែឈ្នួននោះ គួរតែត្រូវបានខ្ចីគេជាទីអាស្រ័យទម្រាំអស់ភ័យអន្តរាយ បើផែនដីបានសុខសប្បាយរាបទាបវេលាណា សឹមគិតស្នងគុណវេលានោះតាមសមគួរ ឲ្យអស់សេចក្ដីគរហានិន្ទានឹងមិនល្អឬ? បើលោកមិនគិតយកស្រុកសែឈ្នួនវេលានេះទេ អំណឹះតទៅ មុខជាស្រុកនោះក៏នឹងត្រឡប់ទៅជារបស់អ្នកដទៃ

ទៀត បើនឹងខំផ្ចៀតធ្វើការជាក្រោយ ក៏មិនឲ្យមានសម្រេចសេចក្ដីប្រាថ្នា នាំតែព្រួយ ការខាតតម្រិះប្រាជ្ញាអ្នកដែលប្រុងនឹងជួយឧបត្ថម្ភក៏ទទេទៅ។

**ឡៅពី**ឮដូច្នោះទ្រង់យល់ត្រូវផង ទើបឆ្លើយថា ពាក្យដែលអ្នករំឭកស្មារតីខ្ញុំនោះ គួរតែនឹងមានចារឹកទុកក្នុងផែនមាស ដើម្បីប្រដៅចិត្តព្រឹកល្ងាច ហើយក៏ឲ្យអញ្ជើញ**ខុងបេង**ចូលមប្រឹក្សា ដែលនឹងចាត់ការកេណ្ឌទាហានលើកកងទ័ពចេញទៅស្រុកសៃឈួន។ **ខុងបេង**ថា ស្រុកកេងជីវសំខាន់ណាស់ នឹងលើកទាហានទៅឥឡូវនេះ ហើយនឹងទុកចិត្តការដែលនៅឯក្រោយពុំបាន ត្រូវតែកេណ្ឌមនុស្សទុកឲ្យនៅរក្សាផង។ **ឡៅពី**ថា លោកថានេះគួរណាស់ បើដូច្នោះខ្លួនខ្ញុំនិង**បាំងថង**, **អ៊ុយអៀន**, **ហាងតុង** នឹងលើកទាហានទៅស្រុកសៃឈួនចុះ ខ្លួនលោកនិង**គួនអ៊ូ**, **តៀវហ៊ុយ**, **ជូឡុង**នៅរក្សាស្រុកកេងជីវឯណោះ។ **ខុងបេង**ក៏ទទួលពាក្យ ហើយឲ្យ**គួនអ៊ូ**ទៅនៅស្រុកសុងយ៉ុង **តៀវហ៊ុយ**ជាកងក្រវែលរក្សាស្រុកទាំងបួនអន្លើ ដែលវាយបានថ្មី ឲ្យ**ជូឡុង**ទៅនៅរក្សាស្រុកកាំងឡេង។

**ឡៅពី**ក៏តាំងឲ្យ**ហាងតុង**ជានាយទ័ពមុខ តាំងឲ្យ**អ៊ុយអៀន**ជានាយកងក្រោយ នាំទាហានប្រាំម៉ឺនត្រៀមទុកស្រេច ទម្រាំបានជោគឫក្សល្អនឹងលើកចេញទៅស្រុកសៃឈួន។ ខណៈនោះ **លៀវហ្វ៊ួ**ដែលជានាយចោរព្រៃនៅភ្នំមុខគយស្រុកហ្វ៊ូតោ ក៏លើកពួកគៀនចូលមកនៅនឹង**ឡៅពី** ៗក៏ចាត់ឲ្យទៅរក្សាស្រុកសុងយ៉ងជាមួយនឹង**គួនអ៊ូ** លុះបានជោគឫក្សល្អហើយ **ឡៅពី**ក៏ឲ្យលើកកងទ័ពចេញទៅតាមផ្លូវចម្ងាយប្រហែលពីរពាន់សិន (៨០គ.ម) ទទួលជួបនឹង**បេងតាត់** នាំទាហានចេញមកគំនាប់ ហើយជម្រាបថា ឥឡូវ**ឡៅជៀង**នាយខ្ញុំប្របាទឲ្យលើកទាហានចេញមកទទួលលោក **ឡៅពី**ក៏មានចិត្តត្រេកអរណាស់ ប្រើបម្រើកាន់សំបុត្រស្រូតចូលទៅប្ដឹងដល់**ឡៅជៀង**ឲ្យដឹងការណ៍ជាមុន។

**ឡៅជៀង**ដឹងដំណឹងហើយ ក៏ឲ្យមានសំបុត្រទៅដល់អាណាខេត្តទាំងពួង ដែលត្រូវឡើង បង្គាប់តាមរយៈផ្លូវថា បើ**ឡៅពី**មកដល់តំបន់ណាត្រូវទទួលចាត់ការតាមគួរសម កុំឲ្យធ្វេសប្រហែសឲ្យអត់ស្បៀងអាហារ ទម្រាំតែកាលណាបានទៅដល់ស្រុកសែឈួន ហើយក៏ឲ្យចាត់ទាហានបីម៉ឺន និងរថសម្រាប់ជិះមានសប្បធន់បាំងនិងគ្រឿងហែហើយនិងបណ្ណាការគ្រឿងមាសប្រាក់ទាំងពួងជាច្រើន នឹងចេញទៅទទួល**ឡៅពី**នៅតំបន់ប៉ោយសៀ។ **អ៊ុយគួន**ឃើញ**ឡៅជៀង**ចាត់ចែងទាហាន នឹងចេញទៅទទួល**ឡៅពី**ដូច្នោះ ក៏ចូលទៅនិយាយថា ខ្លួនខ្ញុំបាទមកធ្វើរាជការនៅនឹងលោកៗក៏បានទំនុកបម្រុងឲ្យស៊ីបៀវត្សគ្រប់ឆ្នាំមកយូរហើយ នៅមិនបានធ្វើសេចក្ដីគាប់ប្រសើរអ្វីស្នងគុណលោកឡើយ ឥឡូវលោកនឹងចេញទៅទទួល**ឡៅពី**នោះ ខ្ញុំបាទយល់ឃើញថាមិនត្រូវ នឹងសុំឃាត់លោកឲ្យបង្អង់ឈប់សិន ដែលលោកនឹងចេញទៅឥឡូវនេះ មុខជានឹងបង់ដោយកលឧបាយ**ឡៅពី**ជាប្រាកដ សូមឲ្យលោករំពឹងមើលឲ្យមាំទាំសិន។

**ទៀវសុង**ថា ដែល**អ៊ុយគួន**មកឃាត់ហាមលោក ជាការទទឹងនឹងដំណើរអ្នកធំ ដូច្នេះខ្ញុំបាទនឹងបានឃើញជាប្រយោជន៍អ្វីក៏ទេសោះ គឺជាមនុស្សឫស្យា មានតែនឹងឲ្យលោកកាត់មេត្រីបងប្អូនឲ្យដាច់ពីគ្នា ប្រាថ្នានឹងឲ្យជាចម្រូងចម្រាសទៅទៀត។ **ឡៅជៀង**ក៏ស្រែកគំហកបណ្ដេញ**អ៊ុយគួន**ថា អ្នកឯងកុំមកនិយាយសម្ដីច្រំដែលដូច្នេះឡើយ យើងគិតឃើញជាប្រយោជន៍ស្រួលបួលហើយ យើងមិនត្រូវជឿស្ដាប់អ្នកឯងទេ។ **អ៊ុយគួន**ក៏មានសេចក្ដីតូចចិត្តណាស់ ហើយយកមុខបោកទង្គិចទៅលើថ្មទាល់តែហៀរហូរឈាមចេញពេញអស់ទាំងខ្លួន ហើយខាំជាយអាវ**ឡៅជៀង**ទុកមិនឲ្យចេញទៅ។ **ឡៅជៀង**ខឹងខ្លាំងណាស់ក៏កន្ត្រាក់ជាយអាវមកវិញ

**អ៊ុយគួន**ក៏មិនព្រមលែងទាល់តែបាក់ធ្មេញរបូតចេញពីរដុំ។ **ឡៅជៀង**ក៏ឲ្យទាហាននាំយកខ្លួន**អ៊ុយគួន**ចេញទៅក្រៅ **អ៊ុយគួន**ក៏ស្រែកយំត្រឡប់ទៅផ្ទះ។

**លីអ៊ីន**ឃើញដូច្នោះក៏ចូលមកស្រែកថា លោកមិនព្រមជឿស្ដាប់ពាក្យ**អ៊ុយគួន**ឃាត់ហាមដូច្នេះ នឹងខំតែចេញទៅទទួល**ឡៅពី**នោះ ក៏ដូចជាទៅរកទីស្លាប់ ដែលនឹងទទួល**ឡៅពី**ឲ្យចូលមកក្នុងស្រុកសៃឈ្វននេះ ក៏ដូចជាទៅទទួលខ្លាឲ្យចូលមកនៅក្នុងភូមិ។ **ឡៅជៀង**ថា ឯ**ឡៅពី**នោះជាសែជាមួយនឹងយើង ដែលថាគេនឹងមកគិតកាចនោះក៏ខុសទេ ពាក្យរបស់អ្នកឯងយើងមិនចង់ឮសោះ ហើយក៏ឲ្យទាហានបណ្ដេញចេញទៅ។ **ទៀវសុង**និយាយនឹង**ឡៅជៀង**ថា ពួកនាហ្មឺនអស់នេះបង់កម្លាំងដែលលោកនឹងទំនុកបម្រុងឲ្យស៊ីបៀវត្សឥតប្រយោជន៍សោះ គ្មានសេចក្ដីកតញ្ញូនឹងលោកទេ មានប្រាថ្នាតែនឹងយកសេចក្ដីសុខចំពោះខ្លួន ហើយនឹងបម្រុងចិញ្ចឹមភរិយាបុត្រប៉ុណ្ណោះ គ្មានសេចក្ដីសប្បុរសស្មោះត្រង់នឹងលោក ប្រហែលនឹងគិតធ្វើប្រទូសរ៉ាយដល់លោកទេដឹង បើយ៉ាងដូច្នេះ**ឡៅពី**ចូលមក ក៏មានតែសេចក្ដីទទឹងទាស់ទែង មិនឲ្យធ្វើការបានស្រួល ទើបមានចិត្តឫស្យាក្លែងធ្វើដូច្នេះ ដើម្បីមិនឲ្យ**ឡៅពី**ចូលមកបាន។ **ឡៅជៀង**ថា ដែលសម្ដីអ្នកថាដូច្នេះជាប្រយោជន៍ដល់ខ្ញុំពិតៗ មិនបង់កម្លាំងដែលខ្ញុំរាប់អានស្រឡាញ់។

លុះដល់ពេលព្រឹក **ឡៅជៀង**និងទាហានចេញទៅទទួល**ឡៅពី** ទទួលមានទាហានម្នាក់ចូលមកប្ដឹងថា ឥឡូវ**អងលុយ**យកពួរចងទម្លាក់ខ្លួននៅត្រង់ស៊ុំទ្វារស្រុក ដៃមួយកាន់សំបុត្រ ដៃមួយកាន់គ្រប៊ីស្រែកថា សំបុត្រនេះយើងប្ដឹងចៅហ្វាយនាយ បើស្ដាប់យើងក៏ហើយទៅ បើមិនស្ដាប់ យើងនឹងយកគ្រប៊ីនេះកាត់ពួរឲ្យធ្លាក់បែកក្បាលស្លាប់នៅទីនេះចុះ។ **ឡៅជៀង**ឮដូច្នោះក៏ប្រើឲ្យមនុស្សទៅយកសំបុត្រនោះមកមើលឃើញសេចក្ដីថា៖ “ខ្ញុំបាទ**អងលុយ**សុំគំនាប់ទុកឲ្យលោកជ្រាប ព្រោះ

ខ្ញុំបាទបានឮបូរាណពោលតគ្នាមកថា ថ្នាំល្អស៊ីទៅជូរចត់ក្នុងមាត់ តែថាប្រយោជន៍ដល់មនុស្សឈឺ មនុស្សត្រង់និយាយមិនពីរោះ ដល់ត្រចៀក តែជាប្រយោជន៍ដល់កាលខាងមុខ ដែលលោកមិនស្តាប់ពាក្យខ្ញុំបាទ នឹងចេញទៅទទួល**ឡៅពី**ឯស្រុកប៉ោយសៀនោះ ខ្ញុំបាទយល់ឃើញថា កាលទៅមានផ្លូវទៅស្រួល តែដែលត្រឡប់មកវិញមុខជាគ្មានផ្លូវមកស្រួលទេ ឲ្យលោកពិគ្រោះមើលឲ្យល្អសិន បើលោកស្តាប់ពាក្យខ្ញុំបាទ ចូរលោកឲ្យចាប់ខ្លួន**ទៀវសុង**កាត់ក្បាលចេញ ហើយស្កាត់**ឡៅពី**កុំឲ្យចូលមកក្នុងស្រុកសែឈ្នួនបាន ខ្លួនលោកក៏នឹងបានគ្រងសម្បត្តិជាសុខតទៅ បណ្តាអាណាប្រជានុរាស្ត្រទាំងពួងក៏នឹងមិនមានសេចក្តីក្តៅក្រហាយឡើយ។

**ឡៅជៀង**ឃើញសំបុត្រដូច្នោះហើយក៏ខឹងណាស់ថា **ឡៅពី**ជាមនុស្សមានសតិបញ្ញាយើងនិងគេក៏ស្រឡាញ់គ្នាស្មើនឹងបងប្អូនបង្កើតពោះមួយនឹងគ្នា គ្មានចិត្តរង្កៀសអ្វីនឹងគ្នាសោះ ហេតុម្តេចមនុស្សពួកនេះវាក្លែងមកនិយាយទទឹងទាស់ខ្លាំងម្ល៉េះ។ វាគិតនឹងឲ្យយើងនិង**ឡៅពី**ទៅជាសត្រូវនឹងគ្នាឬ? **អងលុយ**បានឮដូច្នោះក៏រឹតតែតូចចិត្តពេកណាស់ ស្រែកឡើងដោយសំឡេងខ្លាំង ហើយយកគ្រប៊ីកាត់ពួរនោះដាច់ធ្លាក់មកបាក់កស្លាប់មួយរំពេច។ **ឡៅជៀង**ក៏ចាត់ទាហានបីម៉ឺនយកព្រៃយ៉ាងល្អផ្ទុកពេញបីរទេះ នឹងរបស់មាសប្រាក់ស្បៀងអាហារជាច្រើនលើកចេញចាកស្រុកស្រួតទៅចាំទទួល**ឡៅពី**ស្រុកប៉ោយសៀ។

ឯ**ឡៅពី**លើកពលមកដល់ព្រំដែនស្រុកសែឈ្នួន បញ្ជាទាហានទាំងពួងមិនឲ្យបៀតបៀន ធ្វើទុក្ខបុកម្នេញអាណាប្រជានុរាស្ត្រតាមរយៈខេត្តក្បែរផ្លូវនោះ បណ្តារាស្ត្រក៏មានសេចក្តីត្រេកអរ **ឡៅពី**ទៅដល់ព្រំដែនខេត្តណា រាស្ត្រក្នុងខេត្តនោះក៏ប្រមូលគ្នាចេញមកគំនាប់**ឡៅពី** ៗក៏និយាយសាកសួរសុខទុក្ខតាមសុភាព។ **ហ្ហួតចេង**ក៏និយាយនឹង**បាំងថង**ថា **ទៀវសុង**ឲ្យនាំសំបុត្រស្ងាត់មកដល់ខ្ញុំបាទថា

**ឡៅជៀង**នឹងលើកទាហានមកទទួលនាយរបស់អ្នកឯស្រុកប៉ោយសៀ ឃើញបានការស្រួលហើយ ចូររិះគិតសម្លាប់**ឡៅជៀង**ចេញពីដើមដៃកុំឱ្យគិតកែខ្លួនបាន។ **បាំងថង**ថា សេចក្តីនេះអ្នកកុំអាលនិយាយឱ្យបែកធ្លាយសេចក្តីឡើយ ក្រែងកិត្តិស័ព្ទនោះនឹងខ្ចរខ្ចាយទៅ ត្រូវធ្វើឱ្យ**ឡៅជៀង**និង**ឡៅពី**នាយយើងទៅមករកគ្នាជាមេត្រីសិន រួចសន្សឹមធ្វើការនោះជាក្រោយ។ **ហួតចេង**ក៏យល់ឃើញត្រូវផង ឯស្រុកសែឈួននិងស្រុកប៉ោយសៀនោះ រយៈផ្លូវចម្ងាយពីគ្នាប្រាំមួយរយសិន (២៤គ.ម) លុះ**ឡៅជៀង**ទៅដល់ស្រុកប៉ោយសៀវហើយ ក៏រៀបទាហានចេញទៅទទួល**ឡៅពី** ៗក៏ឱ្យទាហានទាំងពួងឈប់តាំងបន្ទាយនៅខាងក្រៅស្រុក ហើយក៏ចូលទៅរក**ឡៅជៀង** អ្នកទាំងពីរក៏គំនាប់គ្នាតាមប្រពៃណីបងប្អូន ហើយនិយាយប្រាស្រ័យគ្នាពីសេចក្តីសុខទុក្ខអំពីដើមរហូតមកឱ្យស្តាប់គ្រប់ប្រការ ហើយក៏យំ **ឡៅជៀង**ក៏ឱ្យរៀបតុលៀងអាហារស្រេច ក៏ឱ្យអញ្ជើញ**ឡៅពី**បរិភោគសេពសុរាជាមួយគ្នាជាសប្បាយ លុះដល់ពេលព្រលប់**ឡៅពី**ក៏គំនាប់លា**ឡៅជៀង**ទៅឯបន្ទាយវិញ។

**ឡៅជៀង**ក៏និយាយនឹងបណ្តានាហ្មឺនខ្ញុំរាជការទាំងពួងថា **អងលុយ** និង **អ៊ុយគួន**ពីរនាក់នេះ មិនមានប្រាជ្ញាអ្វីសោះ ខ្ញុំគិតទៅក៏អស់សំណើចណាស់ គួរឬមកសង្ស័យថា**ឡៅពី**មិនជាមនុស្សសុចរិតត្រង់នឹងបងប្អូននោះ មិនគួរសោះឡើយ យើងឃើញ**ឡៅពី**ហើយថ្ងៃនេះ ពិគ្រោះមើលឫក្សពារកិរិយាស្គាល់ថាជាមនុស្សត្រង់ ដឹងអធ្យាស្រ័យស្រឡាញ់បងប្អូនពិតណាស់ បើយើងបាន**ឡៅពី**បងយើងមកទុកជួយទំនុកបម្រុងផែនដី ជាទីការពារភ័យន្តរាយពីខាងក្រៅហើយ កាលណាឡើយនឹងកោតញញើតដល់**ចូឆ្វ**និង**ទៀវឡូ**នោះ ខ្លួនខ្ញុំនេះក៏ខុសណាស់ ដែលនឹងមិនបានរឭកនឹកដល់បងប្អូនរបស់ខ្លួនពីថ្ងៃមុន។ លុះតែ**ទៀវសុង**មកប្រាប់ទើបគិតឃើញ សេចក្តីគាប់ប្រសើររបស់**ទៀវសុង**មានលើយើងច្រើនណាស់ និយាយហើយក៏ដោះអាវចេញ

ពីខ្លួន ឲ្យបម្រើយកទៅឲ្យ**ទៀវសុង**ឯស្រុកសែឈ្នួនឲ្យទាំងមាសប្រាំរយដំឡឹងទៀត។

ខណៈនោះ **ឡៅកុយ, ឡេងប៉ៅ, ទៀវយិន, តេងហៀន** និងទីប្រឹក្សាទាំងពួងខាងទាហាន នាំគ្នានិយាយនឹង**ឡៅជៀង**ថា លោកកុំអាលត្រេកអរចូលទៅជិត**ឡៅពី**ពេក ព្រោះ**ឡៅពី**នោះធ្វើកិរិយារួសរាយ និយាយសម្ដីពីរោះទន់សុភាពក៏មែន តែថាជាមនុស្សប្រាជ្ញាមានមាយាទយ៉ាងល្អិត ចិត្តនោះក៏រឹងរូសដូចដែក ឬពេជ្រមើលមិនលេចដូចសម្ដីទេ សុំកុំឲ្យលោកប្រមាថ ចូររិះគិតរវាំងខ្លួនឲ្យមាំ។ **ឡៅជៀង**អស់សំណើចហើយថា អ្នកទាំងអស់នេះបបួលគ្នាមកសង្ស័យទទេៗ មិនគួរការសោះ ព្រោះ**ឡៅពី**បងយើងនោះ មិនមែនជាមនុស្សចិត្តពីរ។ ទីប្រឹក្សាទាំងនោះឮហើយ ក៏នាំគ្នាដកដង្ហើមធំ ហើយថយចេញទៅ។

កាល**ឡៅពី**វិលត្រឡប់ទៅបន្ទាយវិញ **ប៉ាំងថង**ក៏ចូលទៅសួរថា ថ្ងៃនេះលោកទៅពិសាលៀងនឹង**ឡៅជៀង**នោះ ឃើញឡៃបខាយជាប្រការម្ដេចខ្លះ? **ឡៅពី**ក៏ប្រាប់ថា **ឡៅជៀង**នោះជាមនុស្សសុចរិតត្រង់ប្រាកដណាស់។ **ប៉ាំងថង**ថា ឯ**ឡៅជៀង**នោះជាមនុស្សត្រឹមត្រូវក៏មែន តែថាបណ្ដានាហ្មឺនទីប្រឹក្សាទាំងពួងសុទ្ធតែជាមនុស្សរបឹងរឹងរូសមិនមែនចុះចិត្តប្រាកដទេ បើលោកនឹងដំអក់ទុកឲ្យយូរទៅនឹងខូចការអសារឥតប្រយោជន៍ ខ្ញុំបាទគិតថា សូមឲ្យលោកហៅរក**ឡៅជៀង**មកលៀងអាហារឯបន្ទាយយើង។ ត្រូវប្រើទាហានឲ្យចាប់សម្លាប់ចោលចេញ ហើយសឹមលើកចូលទៅស្រុកសែឈ្នួន ស្រួលជាជាងមិនបាច់ហូតគ្រប៊ីឲ្យចេញពីស្រោម មិនបាច់យឺតធ្នូដាក់ព្រួញឲ្យខូចដាច់ប្រឡោះមិនស្រួលឬ?

**ឡៅពី**ថា អ្នកគិតដូច្នេះ ខ្ញុំមិនពេញចិត្តសោះ ព្រោះ**ឡៅជៀង**នេះជាសែជាមួយនឹងខ្ញុំ ហើយគេក៏មានចិត្តល្អត្រង់នឹងខ្ញុំមែនៗ យើងមកឥឡូវនេះសោត ក៏

ប្រាថ្នានឹងតាំងខ្លួនដោយសុចរិតប្រពៃដើម្បីឱ្យគេសរសើរ កាលមានដំណើរលើកមកដល់ក៏គួរឱ្យមនុស្សទាំងពួងឃើញចិត្តយើងជាល្អ និងសេចក្តីមេត្រី គួរឬមិនទាន់បានប៉ុន្មាន ក៏ទៅធ្វើអន្តរាយដល់**ឡៅជៀង**តែម្តងដូច្នេះ មិនជាទីគរហានិន្ទាដល់មនុស្ស និងទេវតា លោកតិះដៀលទេឬ? ដែលនឹងធ្វើឱ្យខូចសេចក្តីសត្យខុសអំពីប្រពៃណីនោះនឹងធ្វើមិនបាន។

**បាំងថង**ថា ដែលខ្ញុំបាទថាទាំងនេះ នឹងជាសេចក្តីគិតរបស់ខ្ញុំបាទ គឺ**ទៀវសុង**ឱ្យមានសំបុត្រមកដល់**ហ្លួតចេង**ឱ្យគិតធ្វើការកម្ចាត់**ឡៅជៀង**ចេញ **ហ្លួតចេង**ក៏យកសំបុត្រនោះមកបង្ហាញខ្ញុំបាទ ៗក៏ជម្រាបលោកតាមការ។ ទទួលនិយាយគ្នាមិនទាន់ផុតមាត់ **ហ្លួតចេង**ចូលមកដល់ហើយថា ដែលខ្ញុំបាទឱ្យធ្វើការនោះ មិនមែនជាផ្លូវប្រយោជន៍ដល់ខ្លួនខ្ញុំបាទទេ ប្រាថ្នានឹងឱ្យជាគុណដល់លោកទេតើ ការនេះ មិនមែនជាខុសអំពីប្រពៃណីនោះឡើយ គឺត្រូវហើយនឹងប្រពៃណីពីដើម។

**ឡៅពី**ថា **ឡៅជៀង**នេះសែជាមួយគ្នានឹងយើង ដែលនឹងធ្វើអន្តរាយនោះមិនគួរសោះឡើយ។ **ហ្លួតចេង**ថា បើលោកមិនធ្វើតាមពាក្យខ្ញុំបាទទេ មុខជានឹងខូចការជាប្រាកដ ព្រោះ**ឡៅជៀង**និង**ទៀវឡូ**ជាគូសត្រូវគ្នា បើ**ទៀវឡូ**លើកមកវាយស្រុកសែឈ្លួនបានក្នុងគ្រានេះ លោកមកពីផ្លូវឆ្ងាយនឹងមិនបង់កម្លាំង ដែលពួកទាហានមកលំបាកនឿយហត់ទេឬ? ប្រការមួយទៀត នឹងចាំគិតអែអង់ឱ្យនៅយូរថ្ងៃយប់ទៅទៀតប្រយោជន៍អ្វី បើមានមនុស្សនាំសម្តីទៅញុះញង់**ឡៅជៀង**ឱ្យប្រទូសរ៉ាយនឹងលោកវិញក៏សឹងបាន លោកក៏នឹងមានតែសេចក្តីរវល់ខាតការទទេទៅ ឥឡូវមនុស្សទាំងពួងក៏មានសេចក្តីត្រេកអរស្រឡាញ់លោកច្រើនណាស់ លោកចូររហ័សគិតការនេះឱ្យបានទាន់**ឡៅជៀង**មិនទាន់ដឹងដាន ត្រូវតែសម្លាប់ចេញទៅ ហើយយក

ស្រុកសែឈ្លួនជាទីតាំងឲ្យបានមុនសិន ដែលនឹងគិតធ្វើការធំទៅខាងមុខនោះក៏នឹងបានស្រួល។ **ឡៅពី**ក៏មិនព្រម តាំងតែនិយាយគ្នាមិនដាច់ស្រេចដូច្នេះជាច្រើនគ្រា។

លុះពេលព្រឹកឡើង **ឡៅពី**ក៏ចូលទៅបរិភោគអាហារឯបន្ទាយ**ឡៅជៀង**ទៀត អ្នកទាំងពីរសេពសុរានិយាយគ្នាជាប្រក្រតីតាមប្រពៃណីបងប្អូន ទើប**បាំងថង**ខ្សឹបប្រាប់**ហួតចេង**ថា ការក៏ប្រទល់តួដល់ប៉ុណ្ណេះហើយ នាយយើងនៅកាន់តែសេចក្តីសត្យត្រង់ មិនព្រមធ្វើតាមពាក្យយើងសោះដូច្នេះ ការនេះមុខជានឹងខូចអសារឥតការ ទោះនាយនឹងកាន់សេចក្តីសត្យក៏តាមអធ្យាស្រ័យទៅចុះ យើងត្រូវតែរិះគិតធ្វើឯងទៅ ទើបបង្គាប់**អ៊ុយអៀន**ថា ឥឡូវ**ឡៅជៀង**សេពសុរាស្រវឹងមិនដឹងខ្លួន បានការហើយ អ្នកចូលទៅសម្លាប់ចេញចុះ។ **អ៊ុយអៀន**ក៏ហួតគ្រប៊ីដើរចូលទៅចំពោះមុខតុលៀងអាហារហើយថា ខ្ញុំបាទនឹងសុំរាំគ្រប៊ីជូនលោកទាំងពីរមើលលេងឲ្យសប្បាយភ្នែក។ **បាំងថង**ក៏ស្រែកឡើងថា បើដូច្នោះល្អហើយ ទាហានទាំងពួងចូរថយចុះមកខាងជាន់ក្រោម ឲ្យ**អ៊ុយអៀន**រាំក្រប៊ីមើលលេង នោះ**អ៊ុយអៀន**ក៏រាំគ្រប៊ីនៅមុខតុ។ ទាហាន**ឡៅជៀង**ឃើញ**អ៊ុយអៀន**រាំគ្រប៊ី និងពួកទាហានក្រៅពីនោះ ក៏កាន់គ្រឿងសាស្ត្រាវុធ នាំគ្នាក្រឡេកមើលទៅ**ឡៅជៀង**ឃើញសំកុកនៅ ក៏ភ្លឹកក្នុងចិត្ត **ទៀវឃីម**ក៏ហួតគ្រប៊ីចេញមកហើយថា ដែលរាំគ្រប៊ីគ្មានគូនោះមិនល្អទេ ខ្ញុំបាទនឹងសុំរាំគ្រប៊ីតតួជូនអស់លោកមើល ថាហើយក៏ក្រោកឡើងរាំតទល់គ្នានឹង**អ៊ុយអៀន** ៗរាំហើយសម្លឹងចោលកន្ទាយភ្នែកមើល**ឡៅហាង** ៗក៏ចេញរាំគ្រប៊ីមួយទៀត។ **ឡៅគុយ, ឡេងប៉ៅ, តេងហៀន** ជាទាហាន**ឡៅជៀង**ឃើញដូច្នោះក៏ដកគ្រប៊ីចេញហើយស្រែកថា ខ្ញុំនឹងសុំរាំឲ្យអស់លោកទាំងពីរសើចលេងតាមសប្បាយខ្លះ ទាំងពីរនាក់ក៏រាំគ្រប៊ីចូលជាពួកនឹងគ្នា។

**ឡៅពី**ឃើញទាហានទាំងពួងរាំគ្របីដូច្នោះក៏ភ័យណាស់ ទើបទាញគ្របីអំពីដៃទាហានដែលនៅឈរឈិតខាងនោះ ក្រោកចេញទៅឈរនៅមុខតុហើយថា ខ្លួនយើងបងប្អូនមកជួបគ្នាមានសេចក្តីសប្បាយស៊ីបាយផឹកស្រាជាមួយគ្នាតាមប្រវេណីគួរឬអ្នកទាំងពួងមកមានសេចក្តីសង្ស័យដូច្នេះមិនគួរសោះ មិនមែននឹងដូចពីគ្រាព្រះចៅ**ហាន់កោចៅ**និងព្រះចៅ**ឈរប៉ាអង**សោយសុរាជាមួយគ្នាក្នុងបន្ទាយង៉ាក់ប៊ុនគួននោះទេ ចូរឲ្យចោលគ្របីចេញឲ្យអស់ពីដៃទាំងអស់គ្នា បើនរណាមិនទម្លាក់គ្របីចេញនឹងត្រូវកាត់ក្បាលឥឡូវនេះ។

**ឡៅជៀង**ស្រែកគំហកឲ្យទាហានទាំងពួងថា យើងបងប្អូនស្រឡាញ់គ្នាដោយសុចរិត ហេតុម្តេចអ្នកទាំងពួងមកធ្វើឲ្យជ្រួលច្របល់ដូច្នេះ ត្រូវការអ្វីក៏កាន់គ្របីមកចូលក្នុងទីប្រជុំ? ចូរថយចេញទៅឲ្យឆាប់។ ទាហានទាំងនោះខ្លាច**ឡៅជៀង**ក៏ថយចេញទៅអស់ ទើប**ឡៅពី**ហៅទាហាន**ឡៅជៀង**ដែលជានាយធំនោះឲ្យឡើងមកថ្នាក់លើដែលបរិភោគអាហារ ហើយឲ្យស្រាផឹកគ្រប់គ្នា ហើយនិយាយថា ខ្លួនយើងទាំងពីរជាបងប្អូននឹងគ្នា ដែលយើងមកគ្រានេះប្រាថ្នានឹងជួយការពារស្រុកទេស ឲ្យបាននៅជាសុខសប្បាយតទៅ ដែលយើងនឹងគិតជាចិត្តពីរនោះគ្មានទេ អ្នករាល់គ្នាកុំបីឆ្ងល់សង្ស័យអ្វីឡើយ។ ទាហានពួកនោះ លុះឮ**ឡៅពី**ថាដូច្នោះក៏ត្រេកអរសាទរ លើកដៃឡើងគំនាប់ហើយថយចុះមកវិញ។

**ឡៅជៀង**ឮ**ឡៅពី**និយាយដូច្នោះក៏ចាប់ដៃហើយថា បងនេះស្រឡាញ់ខ្ញុំណាស់ហើយ សុចរិតពិតមែនៗ ខ្ញុំក៏គ្មានមន្ទិលសង្ស័យអ្វីទេ នឹងសុំស្នងគុណបងតទៅរហូតដល់ស្លាប់។ **ឡៅពី** និង**ឡៅជៀង**ក៏មានសេចក្តីស្មោះសរនឹងគ្នាទៅវិញទៅមក លុះសេពសុរាហើយក៏នៅអង្គុយនិយាយគ្នាទាល់តែដល់ពេលព្រលប់ កាល**ឡៅពី**ត្រឡប់ទៅបន្ទាយវិញក៏និយាយនឹង**បាំងថង**ថា អ្នកនេះមិនមានសេចក្តីពិនិត្យពិច័យ

អ្វីសោះ ដែលអ្នកធ្វើទាំងនេះនឹងឲ្យមនុស្សគរហានិន្ទាដល់យើងបាន ពីថ្ងៃនេះតទៅមុខ ចូរកុំគិតធ្វើដូច្នោះទៀតឡើយ។ **បាំងថង**ក៏គំនាប់លាចេញទៅកាន់ទីកន្លែង។

ឯ**ឡៅកុយ, ឡេងប៉ៅ, តេងហៀន** ក៏និយាយនឹង**ឡៅជៀង**ថា ថ្ងៃនេះលោកពិសាសុរាជាមួយនឹង**ឡៅពី**ឃើញឡែបខាយម្ដេចខ្លះ សូមឲ្យលោកឆាប់វិលទៅស្រុកវិញ កុំនៅឲ្យយឺតយូរតទៅឡើយ បើលោកមិនត្រឡប់ទៅជាប្រញាប់ទេ នឹងមានសេចក្ដីភ័យអន្តរាយជាប្រាកដ។ **ឡៅជៀង**ថា **ឡៅពី**បងយើងនោះមានចិត្តសុចរិតត្រង់ណាស់ បានប្រទះឃើញនឹងភ្នែកជាប្រាកដហើយ ដែលនឹងគិតជាមិត្តទ្រុស្តនឹងយើងដូចអ្នកទាំងពួងសម្គាល់នោះក៏ខុសទៅ អ្នកកុំបីសង្ស័យអ្វីឡើយ។ **ឡៅកុយ, ឡេងប៉ៅ, តេងហៀន**ថា ឯចិត្ត**ឡៅពី**នោះជាមនុស្សត្រង់សុចរិតពិតមែនហើយ ប៉ុន្តែបណ្ដាទាហានសុទ្ធតែមានចិត្តគិតបំណងប៉ងនឹងធ្វើអាក្រក់ជាដរាប ទោះបីយ៉ាងណាវាក៏គង់ចាក់រុកឲ្យដណ្ដើមយកស្រុកសែឈួនឲ្យបានទៅ**ឡៅពី**ពុំខាន។ វារិះគិតអានប្រុងតែនឹងយកប្រយោជន៍ដាក់ខ្លួនប៉ុណ្ណោះ។ **ឡៅជៀង**ក៏មិនបានជឿស្ដាប់ ទើបអញ្ជើញ**ឡៅពី**ឲ្យមកបរិភោគអាហារជាមួយគ្នា ក្នុងស្រុកប៉ោយសៀវរាល់ថ្ងៃ។

ខណៈនោះ មានបម្រើសេះមកប្រាប់ថា ឥឡូវ**ទៀវឡូ**នឹងលើកទ័ពមកវាយយកបន្ទាយហៃបាំងគួន **ឡៅជៀង**ក៏ចូលទៅរក**ឡៅពី**ឲ្យជួយប្រឹក្សា ហើយក៏និយាយអង្វរលន់តួឲ្យ**ឡៅពី**លើកទាហានទៅការពារនឹង**ទៀវឡូ**។ **ឡៅពី**ទទួលពាក្យហើយក៏លើកទាហានចេញទៅតាំងបន្ទាយនៅហៃបាំងគួន ទាហានទាំងពួងក៏និយាយនឹង**ឡៅជៀង**ថា ឥឡូវ**ឡៅពី**លើកទៅទទួលតទ័ព**ទៀវឡូ**ហើយ សុំកុំឲ្យលោកទុកចិត្ត**ឡៅពី**ក្រែងត្រឡប់គិតប្រទូសរ៉ាយថយក្រោយមកធ្វើអន្តរាយលោកវិញ ត្រូវលោកចាត់ចែងឲ្យដាក់គយល្បាតតាមផ្លូវដែលត្រូវទៅមកឲ្យមាំមួន ដើម្បីនឹងបម្រុងការពារខ្លួនលោកវិញ។ **ឡៅជៀង**ក៏មិនស្ដាប់ លុះទីប្រឹក្សាទាំងនោះចូលមកព្រួត

និយាយជាច្រើនដងទៀត ទើប**ឡៅជៀង**យល់ឃើញផង ទើបតាំងរៀបចាត់ចែងទាហានឲ្យ**អៀវហ៊្វយ, កោផាយ** ពីរនាក់ឃុំនាំទាហានចេញទៅរក្សាបន្ទាយប៉ោយស៊ីគួន ប្រាថ្នានឹងការពារ**ឡៅពី** ហើយក៏លើកទ័ពត្រឡប់ទៅស្រុកសែឈួនវិញ។ ឯ**ឡៅពី**នោះ លុះលើកទ័ពទៅដល់បន្ទាយហែបាំងគួនហើយ ក៏បង្គាប់ទាហានទាំងពួងមិនឲ្យធ្វើអន្តរាយដល់ពួកជនានុជនក្នុងស្រុក ប្រាថ្នានឹងឲ្យឮកិត្តិស័ព្ទរន្ទឺតទៅ ដើម្បីនឹងយកចិត្តអាណាប្រជានុរាស្ត្រឲ្យមានមេត្រីភក្តីស្រឡាញ់។

# **រឿង សាមកុក**

**អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង**

**កណ្ឌទី ៥១**

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ស៊ុនគួន**ដឹងដំណឹងថា **ឡៅពី**លើកទ័ពទៅស្រុកសែឈួន **ស៊ុនគួន**ប្រើឧបាយឲ្យសំបុត្រទៅហៅនាង**ស៊ុនហ៊ូយិន**ឯស្រុកកេងជីវ រហូតទៅដល់**ឡៅពី**ចាប់**កោផាយ** និង**អៀវហួត**សម្លាប់ ហើយវាយយកបន្ទាយប៉ោយស៊ីគួន។)*

**ឯស៊ុនគួន**ដឹងថា **ឡៅពី**លើកទ័ពទៅស្រុកសែឈួន ក៏ឲ្យហៅនាម៉ឺនទាំងពួងចូលទៅប្រឹក្សា **កោះយ៉ុង**និយាយថា ដែល**ឡៅពី**លើកទ័ពទៅស្រុកសែឈួនគ្រានេះ ក៏ជាផ្លូវឆ្ងាយដាច់អាល័យ បានសេចក្ដីស្រួលដល់កលការសឹករបស់យើង។ សុំឲ្យលោកលើកទ័ពទៅស្កាត់ស្ទាក់ផ្លូវស្រុកសែឈួន កុំឲ្យ**ឡៅពី**វិលត្រឡប់មកវិញបាន ហើយត្រូវលើកទ័ពមួយប៉ែកទៅវាយយកស្រុកកេងជីវ មុខជានឹងបានដោយងាយ។ **ស៊ុនគួន**ថា អ្នកគិតការនេះត្រូវណាស់។ ទទួលនាង**ង៉ំកុកថៃ**ដើរចេញមកដល់ក្រោយឆាក ឮសម្ដីច្បាស់ក៏ស្រែកថា នរណាគិតការដូច្នេះ ប្រាថ្នានឹងឲ្យ**ឡៅពី**សម្លាប់កូនអញចេញឬ? គួរតែឲ្យកាត់ក្បាលចេញ ហើយក៏ដើរស្រាលជើងចេញមកក្រៅឆាកនិយាយនឹង**ស៊ុនគួន**ថា ប្អូនស្រីចៅតែមួយ ម្ដាយខំពពោះរក្សាមក ថ្នមបីដូចដួងជីវិតមាតា វេលានេះបានជាលើកឲ្យជាភរិយា**ឡៅពី**ហើយ ចៅនឹងមកជឿកាន់យកពាក្យមនុស្សដែលញុះញង់នឹងសម្លាប់ប្អូនឯងឬ? ខ្លួនចៅក៏មានសម្បត្តិរបស់បងជាធំនៅក្នុងស្រុកកាំងតាំង មានទាំងខេត្តឡើងដល់ប៉ែតសិបមួយតំបន់ ម្ដេចនៅមិនទាន់ឆ្អែតចិត្តឬ? ទើបចង់ឲ្យទៅយកស្រុកកេងជីវដែលជាសម្បត្តិអ្នកដទៃទៀត?

**ស៊ុនគួន**បានឮមាតាថា ក៏ឱនគំនាប់ទទួលពាក្យថា ខ្ញុំបាទខុសហើយសូមមាតាអត់ទោសចុះ ហើយក៏បណ្ដេញទីប្រឹក្សាទាំងពួងចេញទៅអស់។ នាង**ង៉ំកុកថៃ**ក៏ត្រឡប់ចូលទៅវិញ។ **ស៊ុនគួន**អង្គុយនៅតែម្នាក់ឯងរំពឹងគិតថា គ្រានេះបើមិនបានស្រុកកេងជីវហើយ កាលណាឡើយទៅមុខទៀតនឹងគិតបាន។ ទទួល**ទៀវចៀវ**ចូល

មកដល់ហើយសួរថា ហេតុអ្វីថ្ងៃនេះលោកអង្គុយជាទុក្ខមុខមិនសប្បាយ? **ស៊ុនគួន**ថា ដែលខ្ញុំជាទុក្ខនៅដូច្នេះ ព្រោះគិតដល់សេចក្តីដែលនិយាយគ្នាអម្បាញ់មិញនោះ។

**ទៀវចៀវ**ថា នឹងជាទុក្ខថ្វីដោយសេចក្តីប៉ុណ្ណេះ ងាយមិនក្រប៉ុន្មានទេ សូមឲ្យលោកមានសំបុត្រផ្ញើទៅដល់នាង**ស៊ុនហ៊ូយិន**ប្អូនលោក ជាសេចក្តីសម្ងាត់ថា ឥឡូវមាតាឈឺធ្ងន់ មានចិត្តគិតដល់នាងណាស់ នឹងសុំឃើញមុខតែម្តង បើយ៉ាងម្តេចឲ្យខំរិះគិតឲ្យបានមកដោយឆាប់ប្រញាប់ទាំងយប់ថ្ងៃកុំឲ្យខាន ហើយឲ្យនាំយក**អាតៅ**ជាបុត្រ**ឡៅពី**មកជាមួយផង **ឡៅពី**មានបុត្រតែមួយក៏គង់នឹងស្តុតចិត្តអាណិតអាល័យ ដើម្បីត្រូវយកស្រុកកេងជីវមកប្តូរយកកូនទៅទើបបាន កាលណា**ឡៅពី**នឹងឈប់ខានចោលកូន? បើ**ឡៅពី**ដាច់អាល័យសោះសូន្យហើយ យើងក៏ត្រូវលើកទ័ពទៅច្បាំងយកស្រុកកេងជីវតែម្តង មុខជាគ្មានទំនងនឹងទទឹងរឹងបានទេ។

**ស៊ុនគួន**ថា អ្នកគិតនេះត្រូវណាស់ ទើបឲ្យតែងសំបុត្រស្ងាត់មួយច្បាប់តាមពាក្យ**ទៀវចៀវ** ហើយប្រើ**ជីវសៀន**ដែលជាមនុស្សស្និទ្ធ ធ្លាប់ប្រើប្រាស់ខាងក្នុងមកពីដើមនោះឲ្យលបចុះទូកទៅស្រុកកេងជីវមិនឲ្យមាតាដឹង លុះ**ជីវសៀន**ទៅដល់ស្រុកកេងជីវហើយ ក៏ចូលទៅគំនាប់នាង**ស៊ុនហ៊ូយិន** ហើយយកសំបុត្រនោះឲ្យនាង**ស៊ុនហ៊ូយិន**មើល។ នាងក៏មើលដឹងតាមសេចក្តីហើយសម្គាល់ថាមែន មានសេចក្តីសៅសោកណាស់ ទើបសួរថា មាតាដែលឈឺនោះជាប្រការម្តេច? **ជីវសៀន**ថា មាតាលោកឈឺធ្ងន់ណាស់ ហើយបើមិនបានឃើញមុខលោក ក៏មុខជានឹងស្លាប់ ហើយផ្តាំថា នឹងសូមឃើញមុខ**អាតៅ**ជាចៅប្រុសផង។ នាង**ស៊ុនហ៊ូយិន**ថា ឥឡូវ**ឡៅពី**ក៏មិននៅផង ដែលយើងនឹងទៅនោះត្រូវចាំឲ្យដំណឹង**ខុងបេង**ដឹងផង។

**ជីវសៀន**ថា មាតាលោកឈឺធ្ងន់ ត្រូវតែស្រូតទៅឲ្យទាន់ដង្ហើម នឹងចាំឲ្យដំណឹង**ខុងបេង**នោះ បើ**ខុងបេង**ថា ចាំផ្ញើដំណឹងទៅឲ្យ**ឡៅពី**ជ្រាបសិនទើបបាន **ឡៅពី**ក៏ទៅផ្លូវឆ្ងាយ ទម្រាំសំបុត្រទៅដល់ហើយចាំតបមក នឹងមិនរឹតតែយូរណាស់ទៅទេឬ? កាលណានឹងទាន់ដង្ហើមមាតាលោក ក៏នឹងខូចការទៅ នាង**ស៊ុនហ៊ូយិន**មានសេចក្តីអាណិតស្រឡាញ់មាតាពន់ប្រមាណណាស់ បីដូចភ្លើងដុតក្នុងដើមទ្រូង

ត្រូវនឹងចង់ទៅឃើញមាតាដោយប្រញាប់ប្រញាល់ណាស់ ក៏រៀបចាត់ចែងរបស់ប្រើប្រាស់នឹងខ្លួនប្រាណ ហើយឲ្យស្រីបម្រើសាមសិបនាក់កាន់គ្រឿងអាវុធគ្រប់ដៃ ហើយស្រេច ក៏ពយក**អាតៅ**ឡើងរថបរចេញចាកស្រុកកេងជីវ លុះទៅដល់កំពង់ចតទូក **ជីវសៀន**ក៏អញ្ជើញឲ្យនាងចុះទូក។

ខណៈនោះ**ជូឡុង**ដឹងថា នាង**ស៊ុនហ៊ូយិន**ចេញដំណើរទៅស្រុកកាំងតាំង ហើយ ក៏ឃុំទាហានបួននាក់ស្រូតតាមទៅទាន់ ហើយកំពុងតែយកយុថ្កានឹងចេញទូក **ជូឡុង**ក៏ស្រែកហៅថា កុំអាលចេញទូកទៅ ឈប់មួយរំពេចសិន យើងនឹងសុំនិយាយការនឹងនាង**ស៊ុនហ៊ូយិន**បន្តិច។ **ជីវសៀន**ក៏ស្រែកថា ឯងនេះជាអ្វីទើបមកឃាត់នាយថៅហ្វាយទុកដូច្នេះ មិនមានកោតក្រែង។ ហើយក៏ឲ្យទាហានចាប់គ្រឿងសាស្ត្រាវុធគ្រប់ដៃ ទើបឲ្យថយទូកចេញទៅ។ **ជូឡុង**ក៏បំផាយសេះស្រូតតាមទៅដល់មាត់ច្រាំងហើយថា អ្នកនឹងអញ្ជើញទៅក៏ទៅចុះ តែថាខ្ញុំបាទជម្រាបបន្តិចសិន។ **ជីវសៀន**ក៏មិនព្រមឲ្យឈប់ បង្ខំឲ្យទាហានស្រូតចែវទូកចេញទៅ។ **ជូឡុង**ក៏បង្ខំបំបោលសេះទៅតាមមាត់ច្រាំងចម្ងាយផ្លូវប្រហែលមួយរយសិន (៤ គ.ម) ទទួលឃើញទូកត្រីមួយចតនៅក្បែរមាត់ច្រាំង **ជូឡុង**ក៏លោតចុះពីលើខ្នងសេះ ហៅទាហានឲ្យចុះចែវទូកតាម**ជីវសៀន**។ **ជូឡុង** កាន់លំពែងឈរកណ្ដាលទូកបង្ខំឲ្យចែវតាមទៅ។ **ជីវសៀន**ក៏ឲ្យទាហានយឹតធ្នូបាញ់ **ជូឡុង**ទាត់ព្រួញដោយអាវុធ មិនបានត្រូវដល់ខ្លួនសោះ លុះចែវទៅជិតទូក**ជីវសៀន** ៗក៏ឲ្យយកលំពែងចាក់ **ជូឡុង**ក៏យកគ្រប៊ីចាក់ទល់គ្នានឹងលំពែងជុំខ្លួនឲ្យទាហានសង្កុញចូលទៅ ហើយលោតឡើងលើទូកបាន ទាហាន**ជីវសៀន**ទាំងអស់គ្នាក៏ខ្លាច**ជូឡុង**ប្រុងតែគេចយកខ្លួន **ជូឡុង**ក៏ស្ទុះចូលទៅក្នុងទូកកឹង ឃើញនាង**ស៊ុនហ៊ូយិន**ព**អាតៅ**អង្គុយនៅទីនោះ ក៏យកគ្រប៊ីច្រកក្នុងស្រោមហើយគំនាប់ជម្រាបថា អ្នកនឹងអញ្ជើញទៅណា? ហេតុម្ដេចមិនបានប្រាប់**ខុងបេង**ឲ្យដឹងសិន?

នាង**ស៊ុនហ៊ូយិន**ប្រាប់ថា មាតាខ្ញុំឈឺធ្ងន់ណាស់ បានជាស្រូតប្រញាប់មិនទាន់នឹងប្រាប់**ខុងបេង**ផង។ **ជូឡុង**ថា ដែលអ្នកនឹងទៅសួរមាតាក៏គួរហើយ តែត្រូវការអ្វី

យក**អាតៅ**ទៅផង? នាង**ស៊ុនហ៊ូយិន**ថា **អាតៅ**បុត្រ**ឡៅពី**ក៏បីដូចជាបុត្ររបស់ខ្ញុំដែរ បើខ្លួនមិននៅ ត្រូវតែយកវាទៅផង នឹងចោលទុកក្នុងស្រុកក៏មិនគួរ មិនមាននរណានឹងថែរក្សា នៅវេលាដែលវាឃើថ្កាត់ បានជាខ្ញុំយកជាប់នឹងខ្លួនទៅ។ **ជូឡុង**ថា **ឡៅពី**ចៅហ្វាយខ្ញុំបាទមានបុត្រតែមួយដែលជាសាលោហិតក្នុងទ្រូង ស្រឡាញ់ដូចដួងចិត្ត កាលគ្រានៅវាលទៀងបាន់ចៅ ខ្ញុំបាទឧស្សាហ៍កាប់ឆ្ការពលមួយរយម៉ឺនមិនមានស្ដាយជីវិត ក៏ព្រោះប្រាថ្នា**អាតៅ**ជាកែវភ្នែករបស់**ឡៅពី** បើខ្លួនខ្ញុំបាទនឹងសម្លាប់កណ្ដាលរណរង្គកងទ័ព**ចូឆូ**ក៏មិនសូវស្ដាយ គួរឬអ្នកមកនាំយក**អាតៅ**ទៅឲ្យឃ្លាតចាក**ឡៅពី**ជាបិតា?

នាង**ស៊ុនហ៊ូយិន**ថា ខ្លួនឯងគ្រាន់តែជានាយទាហាន គួរឬហ៊ានមកកន្លងបង្គាប់ការក្នុងលំនៅនាយចៅហ្វាយដូច្នេះ ទុកជាកោងព្រហើនណាស់ ត្រូវថយចេញទៅឲ្យឆាប់ ហើយក៏ឲ្យស្រីបម្រើចូលទៅរូសកន្ត្រាក់អាវឲ្យចេញទៅ **ជូឡុង**ក៏ច្រានស្រីបម្រើទាំងអស់នោះដួលត្រឡប់ត្រឡិនអស់ហើយថា ម៉េចអ្នកនឹងដណ្ដើមយក**អាតៅ**ទៅឲ្យបានឬ? ទោះជីវិតខ្ញុំបាទនឹងស្លាប់នៅទីនេះក៏តាមការចុះ ខ្ញុំបាទមិនព្រមឲ្យអ្នកយក**អាតៅ**ទៅទេ។ ថាហើយក៏ចូលទៅដណ្ដើមយក**អាតៅ**របូតពីដៃនាង**ស៊ុនហ៊ូយិន** នាំចេញមកឈរនៅមុខទូក មិនដឹងនឹងគិតដូចម្ដេចនឹងឡើងលើគោកបាន ក្រឡេករកទូកតូចពួកទាហាន**ជីវសៀន**ក៏ច្រានចេញតាមមិនទាន់ **ជូឡុង**ក៏ទាល់គំនិត លុះនឹងធ្វើចលាចលកាប់សម្លាប់គ្នាជ្រួលច្របល់ឡើងក៏មិនគួរ ព្រោះនាង**ស៊ុនហ៊ូយិន**នៅក្នុងទូកនោះផង ស្រីបម្រើទាំងពួងព្រួតចូលគ្នាដណ្ដើមយក**អាតៅ**ក៏មិនបាន ព្រោះ**ជូឡុង**កាន់គ្រប៊ីនៅជាប់នឹងដៃ។

ឯ**ជីវសៀន**ក៏ច្រាស់ច្រាល់នៅក្នុងទូក បង្ខំឲ្យទាហានចែវទៅ ទទួល**តៀវហ៊ុយ**ទៅក្រវែលយាមល្បាតតាមផ្លូវ ដឹងដំណឹងក៏ស្រូតតាមទៅមើល។ **ជូឡុង**ក្រឡេកឃើញទូក**តៀវហ៊ុយ**ដោតទង់បញ្ឈរបញ្ចុះទាហានព្រម ស្រូតចែវស្ទាក់ពីមុខចូលមក មិនទាន់ដឹងថា**តៀវហ៊ុយ**ក៏នឹកភ័យណាស់ គិតថា**ស៊ុនគួន**ក្លែងធ្វើកលនឹងសម្លាប់ខ្លួនចេញ លុះបានឮ**តៀវហ៊ុយ**ក៏ស្រែកមកថា អ្នកនឹងទៅក៏ទៅចុះ ចូរយក

**អាតៅ**ជាក្អួយយើងទុក។ **ជូឡុង**អរណាស់ **តៀវហ៊ុយ**ចូលមកជិតក៏ហុចលំពែងទៅឲ្យ**ជូឡុង**ចាប់ **ជូឡុង**លោតចុះមកក្នុងទូក**តៀវហ៊ុយ**បាន **ជីវសៀន**ឃើញដូច្នោះ ក៏កន្ត្រាក់ក្របីចេញនឹងកាប់**តៀវហ៊ុយ** ៗក៏លើកលំពែងចាក់ត្រូវ**ជីវសៀន**ដួលចុះ ហើយស្ទុះទៅកាត់ក្បាលបោះទៅក្នុងល្វែងទូកត្រូវនាង**ស៊ុនហ៊ូយិន** ៗក៏ភ័យណាស់ ទើបនិយាយថា ហេតុម្តេច**តៀវហ៊ុយ**បានជាមកធ្វើផ្តេសផ្តាស់ឲ្យយើងដូច្នេះ? **តៀវហ៊ុយ**ថា អ្នកជាបងថ្លៃខ្ញុំបាទ បើមិនស្រឡាញ់បងខ្ញុំបាទដោយសុចរិត គិតរត់ចោលទៅស្រុកវិញ មិនបានអាលោះអាល័យទេ គួរតែខ្ញុំបាទនឹងធ្វើអាក្រក់ដល់អ្នកឲ្យលើសអ្នកដទៃទៅទៀត។

នាង**ស៊ុនហ៊ូយិន**ថា វេលានេះមាតាខ្ញុំឈឺធ្ងន់ណាស់ បានជាខ្ញុំស្រូតទៅប្រញាប់ បើនឹងចាំប្រាប់បងអ្នកឲ្យដឹងសិន មិនរឹតតែយូរវេលាកាលណានឹងទៅទាន់ដង្ហើមមាតា? អ្នកទាំងពីរនឹងឃាត់ឃាំងមិនឲ្យខ្ញុំទៅ ខ្ញុំក៏ត្រូវតែលោតទឹកឲ្យស្លាប់ឥឡូវនេះ។ **តៀវហ៊ុយ**ឮដូច្នោះក៏ពិគ្រោះនឹង**ជូឡុង**ថា បើយើងនឹងឃាត់ឃាំងទុក ក៏ដូចយើងក្លែងឲ្យនាង**ស៊ុនហ៊ូយិន**ស្លាប់ ព្រោះមាតាឈឺធ្ងន់ណាស់ ជាប្រពៃណីម្តាយនិងកូនរបស់គេ មិនគួរនឹងឃាត់ឃាំងឡើយ គួរហើយតែយើងយក**អាតៅ**ទុកចុះ ទោះបីនាង**ស៊ុនហ៊ូយិន**នឹងទៅក៏តាមអធ្យាស្រ័យចុះ។ លុះគិតគ្នាហើយក៏និយាយនឹងនាង**ស៊ុនហ៊ូយិន**ថា **ឡៅពី**បងខ្ញុំបាទក៏ត្រូវជាមាព្រះចៅ**ហៀនតេ** ដែលអ្នកបានមកនៅនឹងបងខ្ញុំបាទ ៗក៏មានចិត្តអាណិតស្រឡាញ់មិនសូវឲ្យមានសេចក្តីខ្មាសពេក ទោះបីខ្លួនអ្នកនឹងទៅក៏ត្រូវនឹករឭក អាល័យសេចក្តីកម្សត់កម្រពីដើមផង ធម្មតាភរិយានិងស្វាមីដែលមេត្រីនឹងគ្នាជាល្អនោះ គេមិនត្រូវបោះបង់ឲ្យខុសប្រពៃណីលោកទេ អ្នកអញ្ជើញទៅត្រូវគិតត្រឡប់មកវិញកុំខាន។ ថាហើយក៏ព**អាតៅ**ចុះទូកជាមួយនឹង**ជូឡុង**វិលមកវិញ។ ឯនាង**ស៊ុនហ៊ូយិន**ក៏បង្គំឲ្យទាហានដប់នាក់ស្រូតថែវទូកទាំងយប់ថ្ងៃ ទៅស្រុកកាំងតាំង។

**ខុងបេង**ដឹងដំណឹងថា នាង**ស៊ុនហ៊ូយិន**រត់ទៅដូច្នោះ ក៏លើកទាហានចុះស្រូតតាមជួបនឹង**ជូឡុង**, **តៀវហ៊ុយ**កណ្តាលផ្លូវ បាន**អាតៅ**មកវិញក៏ពេញអំណរក្នុងចិត្ត

ណាស់ ទាំងបីនាយក៏នាំគ្នាត្រឡប់មកស្រុកវិញ។ **ខុងបេង**ក៏ចាត់ឲ្យបម្រើនាំសំបុត្រទៅប្ដឹងដល់**ឡៅពី**ឯស្រុកសែឈួន សេចក្ដីថា ឥឡូវនាង**ស៊ុនហ៊ូយិន**រត់ត្រឡប់ទៅស្រុកកាំងតាំងវិញហើយ។

ឯនាង**ស៊ុនហ៊ូយិន**នោះ លុះទៅដល់ស្រុកកាំងតាំងក៏ដឹងសេចក្ដីដល់**ស៊ុនគួន**គ្រប់ប្រការ។ **ស៊ុនគួន**លុះដឹងថា **តៀវហ៊ុយ**និង**ជូឡុង**ដេញដណ្ដើមយក**អាតៅ**ទៅវិញ ហើយសម្លាប់**ជីវសៀន**ស្លាប់ ក៏មានសេចក្ដីខឹងខ្លាំងណាស់ ថាឥឡូវប្អូនយើងត្រឡប់មកវិញហើយ ឯ**ឡៅពី**និងយើងក៏ដាច់ចាកប្រពៃណីដែលចងគ្នាជាសាលោហិតតទៅ យើងនឹងលើកទាហានទៅវាយយកស្រុកកេងជីវវិញឲ្យបាន ទើបឲ្យហៅនាហ្មឺនទាំងពួងចូលមកប្រឹក្សា ហើយក៏ឲ្យកេណ្ឌទ័ពដែលនឹងលើកទៅ ទទួលបម្រើសេះមកប្រាប់ថា ឥឡូវ**ចូឆូ**លើកកងទ័ពមកវាយយកស្រុកកាំងតាំង ហើយ។ **ស៊ុនគួន**ក៏ឲ្យឈប់កងទ័ពទុក ហើយប្រឹក្សានឹងបណ្ដានាហ្មឺនទាំងពួង ដើម្បីគិតតស៊ូជាមួយ**ចូឆូ**។

ខណៈនោះ មាននាហ្មឺនចូលមកប្ដឹងថា ដែល**ទៀវហៀន**ឈឺទៅរក្សាខ្លួននៅឯស្រុកនោះ ដល់នូវសេចក្ដីស្លាប់ហើយ ធ្វើសំបុត្រមកជូនមួយច្បាប់។ **ស៊ុនគួន**ទទួលយកសំបុត្រនោះមកមើលឃើញសេចក្ដីថា លោកនឹងនៅក្នុងស្រុកកាំងតាំងមិនគួរទេ គួរឲ្យលើកទៅតាំងនៅក្នុងស្រុកបោះឡេងឃើញថា មានភូមិឋានធំទូលាយ និងជាទីតាំងខ្លួនជាធំតទៅបាន។ **ស៊ុនគួន**ឃើញសំបុត្រហើយក៏អង្គុយយំសោកាល័យ ហើយនិយាយនឹងនាហ្មឺនទាំងពួងថា **ទៀវហៀន**នេះមានសេចក្ដីស្រឡាញ់ខ្ញុំដោយសុចរិតលុះនឹងស្លាប់ហើយក៏នៅធ្វើសំបុត្រទុកឲ្យខ្ញុំទៀត ដើម្បីនឹងឲ្យជាប្រយោជន៍ទៅខាងមុខ គួរតែយើងនឹងទទួលធ្វើតាមនោះ **ស៊ុនគួន**ក៏តាំងឲ្យកេណ្ឌមនុស្សទៅធ្វើការរៀបចំទីកន្លែងឯស្រុកបោះឡេង។ ខណៈនោះ **លីបង**ក៏ចូលមកនិយាយនឹង**ស៊ុនគួន**ថា ឥឡូវ**ចូឆូ**លើកកងទ័ពមកការក៏កាន់តែទាល់ដល់ខ្លួន និងទីខេត្តខណ្ឌជិតណាស់មកហើយ សូមលោកចាត់ទាហានឲ្យស្រួតជីកស្នាមភ្លោះរាំងខាំងកងទ័ព**ចូឆូ**នៅ

មាត់ពាមយីស៊ូ។ **ស៊ុនគួន**យល់ឃើញត្រូវផង ទើបឲ្យកេណ្ឌទាហានបីម៉ឺន ទៅធ្វើការទាំងថ្ងៃយប់ឲ្យហើយដោយស្រេចរហ័ស។

**ទីរចៀវ**ជាទីប្រឹក្សាខាង**ចូឆ្វូ**ក៏ចូលទៅនិយាយនឹង**ចូឆ្វូ**ថា បណ្ដានាហ្មឺនទាំងពួងដែលជាខ្ញុំរាជការក្នុងព្រះចៅ**ហៀនតេ**នោះ នរណានឹងមានសេចក្ដីគាប់ប្រសើរដូចមហាឧបរាជនេះគ្មានសោះ គ្រានេះលោកប្រកបដោយសេចក្ដីឧស្សាហ៍ហាលខ្យល់ហាលថ្ងៃលើកទ័ពទៅបង្ក្រាបបច្ចាមិត្តក្នុងព្រះរាជាណាចក្រឲ្យរាបទាប ដើម្បីនឹងទំនុកបម្រុងផែនដីព្រះចៅ**ហៀនតេ**ឲ្យនៅជាសុខក្សេមក្សាន្ត អាណាប្រជានុរាស្ត្រទាំងពួងក៏មានសេចក្ដីត្រេកអរណាស់ ផែនដីព្រះចៅ**ហៀនតេ**ក៏ត្រឡប់បរិបូរចម្រើនជាប្រក្រតីឡើងវិញ សេចក្ដីគាប់ប្រសើររបស់លោកក្នុងគ្រានេះ ក៏រឹតតែវិសេសខ្ពង់ខ្ពស់ជាងសេចក្ដីគាប់ប្រសើររបស់**លីអង** ដែលជាឧបរាជរបស់ព្រះចៅ**ជិនប៊ុនអង**ទៀត ដែលលោកនឹងតាំងនៅក្នុងទីមហាឧបរាជប៉ុណ្ណោះមិនគួរសមទេ សុំឲ្យលឿនទីឡើងជា**អ៊ុយកុង** គឺប្រកបដោយយសប្រាំបួនប្រការទៀត ទើបនឹងសមតាមកិត្តិគុណដែលគាប់ប្រសើររបស់លោក។

ឯយសប្រាំបួនប្រការនោះគឺ

- ប្រការ១. ត្រូវជិះរថចូលគាល់ទឹមសេះប្រាំបី
- ប្រការ២. ត្រូវតែងខ្លួនមានតួយ៉ាងដូចព្រះរាជបុត្រហ្លួងឯក
- ប្រការ៣. ឲ្យមានតន្ត្រីត្រែស័ង្ខប្រគុំតាមយាមព្រឹកល្ងាច
- ប្រការ៤. ទីនៅឲ្យលាបដោយជាតិហិង្គុលយ៉ាងដំណាក់រាជបុត្រហ្លួង
- ប្រការ៥. ឲ្យមានផ្ទៃព្រះរោងជាទីចេញនិយាយរាជការដល់នាហ្មឺនទាំងពួង
- ប្រការ៦. ឲ្យមានពួកទាហានបីរយរក្សាព្រះអង្គ
- ប្រការ៧. ឲ្យហែហមដោយក្បួនយ៉ាងស្ដេចមានព្រះពាស (ពាសនេះប្រហែលពាក្យទេដឹង ដែលមានន័យថា តូរ្យតន្ត្រី)
- ប្រការ៨. ឲ្យមានទាហានកាន់ធ្នូសែងក្រៅក្នុងឆ្វេងស្ដាំដោយខ្នាត

- ប្រការ៩. នឹងទៅទីណាកន្លែងណាឲ្យមានចៅភ្នាក់ងារទ្រទើងធូបហែចេញទៅខាងមុខយ៉ាងហែស្តេច។

**ស៊ុនហុក**ថា ដែល**ទីវចៀវ**និយាយនេះ ខ្ញុំបាទមិនយល់ឃើញផងទេ ឯមហាឧបរាជនឹងធ្វើតាមនោះមិនសមគួរឡើយ ព្រោះពីដើមមហាឧបរាជបញ្ចុះបញ្ចូលប្រៀនប្រដៅបង្ហាត់សេនាទាហានទាំងពួង តាំងចិត្តនឹងស្នងព្រះគុណព្រះមហាក្សត្រឲ្យបានផែនដីជាសុខដោយសុចរិត ព្រោះថាជាខ្ញុំផែនដីរបស់លោកហើយ ទោះបីជាមានសេចក្ដីគាប់ប្រសើរដល់យ៉ាងណាក្ដី ក៏គួរនឹងត្រៀមខ្លួនគោរពតាមទម្លាប់ប្រពៃណីខ្ញុំនិងម្ចាស់។

**ចូឆ្វូ**ឮដូច្នោះក៏នឹកខឹងខ្លាំងណាស់មុខមាំនៅ។ **ទីវចៀវ**ថា ការនឹងធ្វើហើយមានអ្នកមកទទឹងទាស់ដូច្នេះ នឹងជឿស្ដាប់ពុំបាន ទើបតែងរឿងរ៉ាវក្រាបបង្គំទូលព្រះចៅ**ហៀនតេ** សុំឲ្យ**ចូឆ្វូ**ឡើងជាទី**អ៊ុយកុង** ព្រះចៅ**ហៀនតេ**ក៏ទ្រង់ព្រះរាជទានឲ្យតាមសុំ។ **ស៊ុនហុក**ដឹងដូច្នោះ ក៏ដកដង្ហើមធំហើយថា មិនដឹងជាការនេះដល់ម្ល៉េះទៅហើយ សេចក្ដីនេះក៏ដឹងទៅដល់**ចូឆ្វូ** ៗក៏មានសេចក្ដីតូចចិត្តថា **ស៊ុនហុក**នោះគ្មានចិត្តនឹងចង់ជួយឲ្យយើងបានជាធំសោះ ខណៈនោះព្រះចៅ**ហៀនតេ**សោយរាជ្យសម្បត្តិបានដប់ប្រាំពីរឆ្នាំ (ព្រះពុទ្ធសករាជ៧៤៩) ជាទេសកាលខែកត្តិក **ចូឆ្វូ**ក៏លើកកងទ័ពទៅវាយស្រុកកាំងតាំង ព្រះចៅ**ហៀនតេ**ត្រាស់បង្គាប់ឲ្យយក**ស៊ុនហុក**ទៅក្នុងកងទ័ពផង។

**ស៊ុនហុក**ដឹងថា **ចូឆ្វូ**មានសេចក្ដីខឹងនឹងខ្លួន ក៏នឹកខ្លាចថាឈឺទៅមិនរួច។ **ចូឆ្វូ**ក៏ឲ្យយកថាសទទេមានគម្របបិទបោះត្រាប្រចាំ មើលដូចជាមានដាក់របស់ស៊ីនៅក្នុងនោះ ហើយប្រើមនុស្សឲ្យយកទៅជូន**ស៊ុនហុក** មានសរសេរជាអក្សរថា កុំឲ្យនរណាបើក។ លុះ**ស៊ុនហុក**បើកមើលក៏ឃើញតែថាសទទេ ក៏ចូលចិត្តថា **ចូឆ្វូ**នឹងគិតប្រទូសរាយដល់ខ្លួន ក៏មានសេចក្ដីទោមនស្សលេបថ្នាំពិសស្លាប់ កាល**ស៊ុនហុក**អនិច្ចកម្មនោះអាយុបាន៥៥ឆ្នាំ។ **ស៊ុនហ៊ុន**ជាកូនក៏ទៅជម្រាប**ចូឆ្វូ** ៗមានសេចក្ដីស្ដាយណាស់ ក៏ឲ្យប្រាក់កាសទៅតែងការសព ហើយ**ចូឆ្វូ**ក៏លើកកងទ័ពទៅតាំងនៅ

ដែនស្រុកឃីស៊្វ ហើយប្រើ**ចោហាង**ឃុំទាហានបីម៉ឺន លើកទៅល្បាតលាតក្រវែលស្ដាប់មើលកិច្ចការទាំងពួង ក៏ត្រឡប់មកប្រាប់**ចូវឆ្វ**វិញថា នៅជាយទន្លេនោះ ឃើញមានទង់ដោតហែគ្នាទៅជាច្រើន តែមិនបានឃើញមនុស្សតាំងនៅត្រង់ណា។ **ចូវឆ្វ**ក៏មានសេចក្ដីសង្ស័យមិនទុកចិត្តដល់រាជការ ក៏ឲ្យលើកទាហានស្រួតទៅតាំងនៅតំបន់ជាប់ពាមឃីស៊្វ ហើយឃុំនាំទាហានឯកប្រមាណមួយរយប្លាយ ឡើងទៅមើលលើកំពូលភ្នំ ឃើញទូកចម្បាំងកងទ័ព**ស៊ុនគួន**មកតាំងនៅខាងត្បើយម្ខាង ឯ**ស៊ុនគួន**នោះតែងខ្លួនបាំងសប្បធន់ខៀវ មានទាហានចោមរោមឆ្វេងស្ដាំដោយក្បួន។ **ចូវឆ្វ**ថា នរណាមានកូនដូច**ស៊ុនគួន**នេះ ក៏គួររាប់អានថាល្អណាស់ ដែលមានកូនដូច**ឡៅចុង**នោះ ក៏ដូចជាគ្មានទទេមិនជាប្រយោជន៍។

**ចូវឆ្វ**ថាមិនទាន់ផុតមាត់ ទទួលទាហាន**ស៊ុនគួន**ដែលពួននៅក្នុងស្នាមភ្លោះនោះបានការ ក៏ស្រែកហ៊ោលើកខ្នប់ពីក្រោយ**ចូវឆ្វ**ឡើងទៅ **ស៊ុនគួន**ក៏ដេញទាហានចែវទូកចូលទៅស្កាត់ផ្លូវតាមមាត់ព្រែក។

**ចូវឆ្វ**ឃើញដូច្នោះភ័យណាស់ ស្រែកឲ្យទាហានចូលច្បាំងទម្លាយចេញមក **ខៅធូ**ក៏ចាំការពារមិនឲ្យអន្តរាយនាំ**ចូវឆ្វ**ចូលបន្ទាយ ខណៈនោះ**ចូវឆ្វ**ក៏ឲ្យបំណាច់រង្វាន់**ខៅធូ**ជាច្រើន លុះវេលាប្រហែលយាមពីរ **ស៊ុនគួន**ក៏ឲ្យទាហានចូលរណ្ដំវាយទម្លាយបន្ទាយ**ចូវឆ្វ** ដុតភ្លើងឆេះឡើងកាច់ចូលបន្ទាយបាន ទើបកាប់ទាហាន**ចូវឆ្វ**ស្លាប់វិនាសជាច្រើន **ចូវឆ្វ**ក៏បែកថយទៅតាំងនៅផ្លូវប្រមាណប្រាំរយសិន (២០គ.ម) **ធៀយ៉ុក**ជម្រាប**ចូវឆ្វ**ថា ពីដើមមហាឧបរាជនឹងលើកទ័ពទៅវាយតំបន់ទីណា នឹងចាំទៅចាំមកបីដូចជាគ្រានេះគ្មាន រមែងបង្ខំទាហានឲ្យស្រូតរូតទៅយ៉ាងរហ័សណាស់ សត្រូវមិនទាន់ដឹងខ្លួននឹងចាត់ចែងការពារខ្លួនបាន ក៏មានជ័យជម្នះសត្រូវដោយងាយ គ្រានេះមហាឧបរាជលើកកងទ័ពមកបណ្ដែតបណ្ដោយឲ្យយឺតយូរណាស់ ដូចជាមិនខំឲ្យបានការ បានជា**ស៊ុនគួន**ដឹងខ្លួនរៀបចាត់ចែងការពារជាមាំមួន បានជាយកជ័យជម្នះមិនបាន ត្រឡប់ជាចាញ់ប្រៀបគេទៅវិញ ដែលមហាឧបរាជនឹងគិតធ្វើការតទៅ តែបើយ៉ាងដូច្នេះឃើញថាមិនបានឡើយ សុំឲ្យលោកលើកទ័ព

ត្រឡប់ចូលក្រុងវិញចុះ ដើម្បីប្រោះព្រំទាហានឲ្យមានចិត្តក្លាហាន សឹមលើកមកធ្វើការជាថ្មីតទៅទៀត នឹងបានជាការមាំមួនមិនសៀបប្រៀបដូច្នេះ។ **ចូឆ្វ**ក៏មិនតបថាម្ដេច។ **ផៀយ៉ុក**ក៏ត្រឡប់ទៅវិញ។ **ចូឆ្វ**ដេកលក់នៅក្នុងថ្ងៃនោះ យល់សប្ដិឃើញថាបានឮសំឡេងរលកក្នុងផ្ទៃមហាសមុទ្របោកបក់គឹកកង បីដូចសំឡេងមនុស្សអឺងកងទូទៅ ក៏ក្រោកចេញទៅមើលឃើញព្រះអាទិត្យមួយដួងផុសរះឡើង ពីកណ្ដាលផ្ទៃសមុទ្រ មានរស្មីដ៏បរិសុទ្ធថ្លា ហើយឃើញព្រះអាទិត្យប្រាកដនៅលើអាកាសពីរដួងនិងព្រះអាទិត្យដែលផុសពីផ្ទៃមហាសមុទ្រនោះ ទៅធ្លាក់ចុះនៅមុខបន្ទាយ **ចូឆ្វ**ក៏ភ័យភ្ញាក់ឡើង ទទួលមានមនុស្សចូលទៅជម្រាបថា វេលាថ្ងៃត្រង់ហើយ **ចូឆ្វ**គិតថាយល់សប្ដិនេះនឹងជាប្រការម្ដេច ទើបចាត់ចែងទាហានសេះហាសិបចេញទៅមើលមុខបន្ទាយ។ ទទួលក្រឡេកឃើញ**ស៊ុនគួន**បាំងសប្បធន់មាសតែងខ្លួនពាក់ក្រោះមាស លើកទាហានមកតាមលើកំពូលភ្នំ។ **ស៊ុនគួន**ក៏ក្រឡេកទៅឃើញ**ចូឆ្វ** ទើបឲ្យបញ្ឈប់ទាហាននៅទីនោះ ហើយក៏យកសែ៊ចង្អុលទៅត្រង់**ចូឆ្វ**ថាមហាឧបរាជជាធំនៅក្នុងស្រុកក្រុង ប្រកបដោយយសស្រីង្គារបរិវារជាច្រើន មានសេចក្ដីសុខបីដូចទៅនៅក្នុងវិមានទិព្វហើយ គួរឬនៅមិនទាន់ពេញចិត្តឆ្អែតចិត្ត លុះដោយអំណាចនៃសេចក្ដីលោភទុច្ចរិត មិនបានពិគ្រោះពិចារណាដោយបញ្ញាជាធម៌ លើកទាហានមកពេញទូទារ ដើម្បីតែនឹងបៀតបៀន ធ្វើឲ្យគេវិនាសដោយពលាការរបស់ខ្លួនមិនសមគួរឡើយ។

**ចូឆ្វ**តបថា ដែលយើងលើកទ័ពមកទាំងនេះ មិនមែននឹងមានសេចក្ដីប្រាថ្នាទ្រព្យសម្បត្តិក៏ទេ តែព្រោះថាខ្លួនអ្នកនៅក្នុងដែនដីនៃព្រះចៅ**ហៀនតេ**ជាអម្ចាស់ ហើយមិនមានសេចក្ដីកតញ្ញូនឹងស្ដេចជាម្ចាស់ ត្រឡប់ក្រឡាស់មិនចំណុះចុះចូលតាមរាជប្រវេណី ហេតុនេះទើបព្រះចៅ**ហៀនតេ**ត្រាស់ប្រើឲ្យយើងលើកទ័ពមកបង្ក្រាបពួកបច្ចាមិត្ត ដើម្បីនឹងចាប់យកទៅប្រហារជីវិតតាមទោសានុទោស។ **ស៊ុនគួន**សើចហើយថា មហាឧបរាជចរចានេះដូចជាមិនមានសេចក្ដីគិតខ្មាសសោះ ព្រោះខ្លួនយើងនៅក្នុងដែនដីព្រះចៅ**ហៀនតេ**ប្រាកដ យើងក៏មិនមែនជាក្បត់អកតញ្ញូ

សោះឡើយ ពាក្យដែលយើងឮមកហើយថា រូបដែលជាក្បត់នឹងព្រះចៅ**ហៀនតេ**នោះ ចំពោះលើខ្លួនអ្នកឯងទេតើ ដែលកន្លងព្រះមហាក្សត្រគិតតែនឹងចង់បំបាត់ស្ដេចគេចដណ្ដើមរាជសម្បត្តិដើម្បីខ្លួន បានជាយើងមានសេចក្ដីកតញ្ញូឈឺជួសផែនដី គិតធ្វើការនេះដើម្បីតែកម្ចាត់សត្រូវផែនដីឲ្យអស់ចេញ។

**ចូឆ្វូ**ឮដូច្នោះ ក៏ស្ទុះច្រឡោតដោយអំណាចសេចក្ដីក្រេវក្រោធពន់ប្រមាណ ទើបស្រែកប្រកាសថា ទាហានណានឹងអាចទទួលយកអាសាចាប់**ស៊ុនគួន**ឲ្យយើងបាន ថាមិនទាន់ផុតមាត់ក៏ស្រាប់តែឮសំឡេងផាវអុជឡើង លើកំពូលភ្នំ **ចូឆ្វូ**ក្រឡេកទៅឃើញ**ជីវថាយ, ហាន់តុង**លើកទាហានបាញ់ធ្នូចម្រុះមកតាមច្រកផ្លូវខាងឆ្វេង ឃើញ**តាន់ប៊ូ, ភូជៀង**លើកទាហានចូលខ្ទប់មកពីខាងស្ដាំ បាញ់ធ្នូចម្រុះមកចំទ័ព**ចូឆ្វូ**ព្រួញក៏ធ្លាក់មកបីដូចគ្រាប់ភ្លៀង **ចូឆ្វូ**ភ័យណាស់ក៏ដោះថយមកក្រោយ។ **ជីវថាយ, តាន់ប៊ូ, ភូជៀង**ឃើញបានការក៏បរពលចូលប្រកាប់។

**ខៅធូ**ឃើញដូច្នោះ ក៏ស្ទុះចេញប្រញាប់ព្រមទាំងទាហានខ្លាជាច្រើន ចូលទៅជួយ**ចូឆ្វូ** បានតយុទ្ធគ្នាជាជ្រួលច្របល់ទៅមក កងទ័ព**ស៊ុនគួន**ក៏ថយទៅ **ចូឆ្វូ**ក៏ត្រឡប់ចូលបន្ទាយហើយគិតថា **ស៊ុនគួន**នេះមានសេចក្ដីអង់អាចណាស់ ដោយហេតុវាសនាល្អ ប្រហែលដូចយើងដល់សប្តិឃើញព្រះអាទិត្យធ្លាក់ចុះពីលើកំពូលភ្នំ គឺ**ស៊ុនគួន**នេះទេដឹង បើតាមសង្កេតក៏ឃើញថាអំណើះទៅមុខ **ស៊ុនគួន**ចង់បានជាម្ចាស់កុកមួយមិនខាន។ កងទ័ព**ចូឆ្វូ**និងកងទ័ព**ស៊ុនគួន**តាំងតែច្បាំងនៅទីនោះប្រហែលមួយខែប្លាយមិនចាញ់មិនឈ្នះ លុះកន្លងចូលឆ្នាំថ្មីជាទេសកាលភ្លៀងខ្លាំងណាស់ ទាហានទាំងសងខាងធ្វើសង្គ្រាមនឹងគ្នាជាលំបាកណាស់ **ស៊ុនគួន**ក៏ប្រើបម្រើឲ្យនាំសំបុត្រទៅដល់**ចូឆ្វូ** សេចក្ដីថា ខ្លួនយើងនិងមហាឧបរាជ ក៏សុទ្ធតែជាខ្ញុំព្រះចៅ**ហៀនតេ**ដូចគ្នា ព្រះចៅ**ហៀនតេ**តាំងឲ្យអ្នកធ្វើសេនាបតីធំ គួរតែអ្នកជួយទំនុកបម្រុងផែនដី ដើម្បីឲ្យអាណាប្រជានុរាស្ត្រនៅជាសុខ ដែលនឹងត្រឡប់លើកកងទ័ពមកធ្វើទុក្ខបុកម្នេញ ឲ្យអាណាខេត្តនីមួយៗព្រួយលំបាកដូច្នេះ ក៏ឃើញថាជាការខុសនឹងរាជប្រពៃណី មិនសមគួរក្នុងទីសេនាបតីធំនោះឡើយ ប្រការមួយ កាលនេះ

ជារដូវភ្លៀង បណ្ដាពលយោធាក៏មានសេចក្ដីវេទនាណាស់ គួរតែរសាយកងទ័ពត្រឡប់សងខាងទៅវិញ បើបង្ខំធ្វើការនេះតទៅទៀត ក្រែងនឹងមានភ័យដល់ខ្លួន។

**ចូឆូ**ឃើញសេចក្ដីសំបុត្រដូច្នោះ ក៏អស់សំណើចហើយថា **ស៊ុនគួន**នេះមានសេចក្ដីគារវៈដល់យើងជាអ្នកធំសមគួរណាស់ ហើយក៏ឲ្យបំណាច់រង្វាន់អ្នកកាន់សំបុត្រឲ្យត្រឡប់ទៅប្រាប់**ស៊ុនគួន**វិញ រួច**ចូឆូ**ក៏លើកទ័ពត្រឡប់ចូលទៅស្រុកហ៊ូតោ ឯ**ស៊ុនគួន**ក៏លើកទ័ពត្រឡប់ទៅខេត្តវិញ គឺស្រុកបោះឡេង ទើបប្រមូលមុខមន្ត្រីខ្ញុំរាជការចូលមកប្រឹក្សាថា វេលានេះ **ចូឆូ**ក៏លើកទ័ពត្រឡប់ទៅស្រុកវិញហើយ ឯ**ឡៅពី**ក៏នៅមិនទាន់ត្រឡប់មកពីស្រុកសែឈួន គឺនៅតាំងទ័ពក្នុងតំបន់ដែនហែបាំងគួន បើដូច្នោះយើងត្រូវលើកទ័ពទៅវាយយកស្រុកកេងជីវតែម្ដង តើអស់លោកនឹងយល់ឃើញប្រការម្ដេច?

**ទៀវចៀវ**ឆ្លើយថា ដែលនឹងលើកកងទ័ពទៅវាយស្រុកកេងជីវគ្រានេះ សុំឲ្យឈប់សិនទៅចុះ ព្រោះខ្លាចក្រែង**ចូឆូ**ដឹង នឹងត្រឡប់លើកទ័ពមកធ្វើអន្តរាយដល់ស្រុកយើង។ ខ្ញុំបាទគិតឃើញថា សូមឲ្យលោកមានសំបុត្រទៅដល់**ឡៅជៀង**ចៅហ្វាយស្រុកសែឈួនថា ឥឡូវ**ឡៅពី**មិនបានទៀងត្រង់នឹងអ្នកទេ ត្រឡប់ចូលទៅខាង**ទៀវឡូ**ជាចិត្តមួយនឹងគ្នាទៅហើយ គិតនឹងវិលមកធ្វើអន្តរាយដល់អ្នកវិញ ដើម្បីឲ្យ**ឡៅជៀង**មានសេចក្ដីសង្ស័យនឹង**ឡៅពី** ហើយមានសំបុត្រទៅដល់**ទៀវឡូ**ទៀត សេចក្ដីថា ស្រុកកេងជីវនោះ **ឡៅពី**មិនបាននៅទេ សូមលើកទាហានទៅវាយយកចុះ មុខជានឹងបានដោយស្រួល។

បើ**ឡៅជៀង**និង**ទៀវឡូ**បានដឹងដូច្នេះហើយ ក៏នឹងប្រមូលកងទ័ពកម្រើកឡើង មុខជា**ឡៅពី** និង**ទៀវឡូ**, **ឡៅជៀង**ទៅជាច្បាំងគ្នាជាប់ដៃទៅវិញទៅមក ឯក្រោយនោះ សឹមយើងលើកកងទ័ពទៅវាយយកស្រុកកេងជីវឲ្យបានដោយងាយ ទោះបី**ឡៅពី**នឹងដឹងក៏ត្រឡប់វិលមករក្សាស្រុកមិនទាន់ មុខជានឹងរាមុខរាក្រោយឲ្យជាកង្វល់នៅទីនោះ។ **ស៊ុនគួន**ស្ដាប់ក៏យល់ត្រូវ ទើបតែងសំបុត្រពីរច្បាប់តាមពាក្យ**ទៀវចៀវ**ថាគ្រប់ប្រការ ហើយប្រើបម្រើកាន់ទៅឲ្យ**ឡៅជៀង** និង**ទៀវឡូ**។

ឯ**ឡៅពី**បោះទ័ពនៅបន្ទាយហែបាំងគួន មានចិត្តរួសរាយរាក់ទាក់នឹងអាណាប្រជានុរាស្ត្រណាស់ ពួកបណ្ដារាស្ត្រក៏ស្មោះសរគ្រេកអរស្រឡាញ់ជាច្រើន លុះឃើញសំបុត្រដែល**ខុងបេង**ឲ្យទៅដល់ថា នាង**ស៊ុនហ៊ូយិន**ត្រឡប់ទៅស្រុកកាំងតាំង លុះដឹងថា**ចូឆូ**លើកទ័ពទៅច្បាំងនឹង**ស៊ុនគួន**នៅតំបន់យីស៊ូ **ឡៅពី**ក៏ប្រឹក្សានឹង**បាំងថង**ថា ឥឡូវ**ចូឆូ**និង**ស៊ុនគួន**ច្បាំងជាប់ដៃគ្នាហើយ បើ**ចូឆូ**មានជ័យជម្នះកាលណា ក៏នឹងលើកទៅវាយស្រុកកេងជីវទៀត ឬបើ**ស៊ុនគួន**មានជ័យជម្នះវិញ ក៏នឹងលើកទៅវាយយកស្រុកកេងជីវដែរ តើអ្នកនឹងគិតឃើញប្រការម្ដេច?

**បាំងថង**ថា ដែលលោកនឹងត្រឡប់ទៅការពារស្រុកឯនាយនោះ គួរតែធ្វើសំបុត្រប្រាប់ទៅ**ឡៅជៀង**ថា ឥឡូវ**ចូឆូ**លើកទ័ពទៅវាយស្រុកកាំងតាំង **ស៊ុនគួន**ឲ្យមានសំបុត្រមកសុំកងទ័ពស្រុកកេងជីវទៅជួយ ដោយខ្លួនយើងនិង**ស៊ុនគួន**ក៏ជាបងប្អូននឹងគ្នា នឹងមិនទៅជួយក៏មិនត្រូវ យើងនឹងសុំទាហានអ្នកបីម៉ឺន និងស្បៀងដប់ម៉ឺនថាំង ហើយនិងកងទ័ពត្រឡប់ទៅជួយ**ស៊ុនគួន** ដើម្បីនឹងកម្ចាត់**ចូឆូ**ចេញឲ្យបានសិន ប្រសិនបើ**ទៀវឡូ**នឹងលើកទ័ពមកធ្វើអន្តរាយដល់អ្នក ក៏នឹងខ្លាចអ្វី**ទៀវឡូ**នោះ ព្រោះសុទ្ធតែមនុស្សអ្នកលើល្វីល្វើដូចគ្នា បើយើងលើកទៅកម្ចាត់**ចូឆូ**ស្រេចហើយ ក៏នឹងលើកត្រឡប់កមជួយ**ទៀវឡូ**វិញ។ បើ**ឡៅជៀង**ឲ្យពលទាហាន និងស្បៀងអាហារកាលណា យើងក៏មានកម្លាំងក្លាឡើងទៀត នឹងរិះគិតប្រែប្រួលប្រការម្ដេចក៏សឹងតែបាន។ **ឡៅពី**យល់ឃើញត្រូវ ក៏តែងសំបុត្រប្រើបម្រើឲ្យកាន់ទៅឲ្យ**ឡៅជៀង**។

លុះអ្នកកាន់សំបុត្រនោះទៅដល់គយ **អៀវហ៊្វយ**ក៏ឲ្យ**កោផាយ**នៅរក្សាគយ ឯខ្លួនក៏ឃុំនាំអ្នកកាន់សំបុត្រនោះចូលទៅជូន**ឡៅជៀង** ៗក៏សួរថា យើងឲ្យអ្នកនៅរក្សាគយ មិនបានឲ្យរកហេតុអ្វីចូលមកនោះក៏ទេ **អៀវហ៊្វយ**ថា ដែលខ្ញុំបាទមកនោះព្រោះ**ឡៅពី**ឲ្យមានសំបុត្រមកដល់លោក ខ្ញុំបាទនឹងបណ្ដោយឲ្យតែអ្នកកាន់សំបុត្រចូលមក ដោយអំពើខ្លួនឯងក៏មិនបាន ព្រោះ**ឡៅពី**ជាមនុស្សមានប្រាជ្ញាចេះគិតកលឧបាយផ្អែមក្រៅល្វីងក្នុងដែលនឹងសុំស្បៀងអាហារនិងយោធាទាហាននោះ សុំកុំឲ្យ

លោកព្រមឱ្យឡើយ បើ**ឡៅពី**បានមនុស្សនិងស្បៀងអាហារជាកម្លាំងច្រើនហើយ ក៏ដូចជាយកអុសទៅឱ្យភ្លើង **ឡៅជៀង**ថា **ឡៅពី**ជាបងប្អូនរបស់យើង ហើយក៏មានសេចក្ដីទៀងត្រង់ បើមិនឱ្យតាមប្រាថ្នាមិនបានឬ?

**ឡៅប៉ា**ថា **ឡៅពី**នេះជាមនុស្សគ្មានកតញ្ញូសោះ ដែលលោកមកទុកក្នុងស្រុកសែឈ្លួននោះ បីដូចជាយកខ្លាមកចិញ្ចឹមទុកក្នុងភូមិ ហើយមកថែមឱ្យមនុស្ស និងស្បៀងជាកម្លាំងទៀត ក៏រឹតតែឱ្យមានកម្លាំងកំរើបច្រើនឡើង យូរទៅក៏នឹងពិតដូចពាក្យដែល**អៀវហ្វៀយ**ថានោះប្រាកដ។ **ឡៅជៀង**បានឮទីប្រឹក្សាទាំងពួងនាំទទឹងដូច្នោះ ក៏ឱ្យឆ្ងល់ក្នុងចិត្តណាស់ ទើបចាត់ឱ្យទាហានតែពួកអាយុច្រើនៗចំនួនបួនពាន់ និងស្រូវមួយម៉ឺនថាំងប្រគល់ឱ្យអ្នកកាន់សំបុត្រ ហើយក៏ចាត់ឱ្យមនុស្សនាំទៅប្រគល់ដល់**ឡៅពី** ហើយ**ឡៅជៀង**ក៏កំជាប់**អៀវហ្វៀយ**ឱ្យរក្សាគយល្បាតលាតក្រវែលឱ្យមាំមួនជាងពីដើម។

លុះអ្នកកាន់សំបុត្រនោះត្រឡប់វិលទៅវិញ ក៏ចូលទៅជម្រាប**ឡៅពី** ។ខឹងណាស់ក្រោកឈរឡើងជេរថា ចោលម្សៀតមកជួយការពាររក្សាស្រុកឱ្យគង់ល្អ យើងគ្រាន់តែសុំមនុស្សនិងស្បៀងអាហារគួរឬឱ្យយើងតែប៉ុណ្ណេះ យើងធ្វើការតទៅក៏បង់កម្លាំងទទេ។ **ឡៅពី**ក៏យកសំបុត្រនោះហែកឈ្លីចោលបង់ បម្រើដែលនាំស្បៀង និងពលមកដល់ឃើញ**ឡៅពី**ខឹងខ្លាំងដូច្នោះក៏ភ័យណាស់ ទាំងអស់គ្នាក៏រត់វិលត្រឡប់ទៅស្រុកសែឈ្លួនវិញគ្មានសល់។

**បាំងថង**ជម្រាប**ឡៅពី**ថា ពីថ្ងៃមុនលោកធ្វើចិត្តសុភាពគ្មានសេចក្ដីអ្វីជាអាក្រក់មនុស្សក្នុងស្រុកដឹងទូទៅ ឥឡូវលោកមកខឹងបោះបោកដូច្នេះ ថែមទាំងហែកសំបុត្រចោលហើយពោលពាក្យមិនពីរោះទៅវិញ មនុស្សទាំងពួងក៏នឹងដឹងទូទៅ មិនបង់ប្រយោជន៍ដែលធ្វើល្អមកនោះជាអសារឥតប្រយោជន៍ទេឬ? **ឡៅពី**ថា អ្នកនិយាយនោះត្រូវណាស់ ដែលខ្ញុំបានប្រមាថភ្លាត់ភ្លាំងទៅហើយដូច្នេះ នឹងធ្វើប្រការ

ម្ដេចឲ្យល្អឡើងវិញបាន? **បាំងថង**ថា ឥឡូវលោកបានជាធ្វើឲ្យទាស់ខុសទៅហើយ នឹងត្រឡប់ធ្វើល្អតទៅមុខទៀត សេចក្ដីរង្គៀសនោះក៏មិនសាបសូន្យ បើបានជាធ្វើខុសដល់ប៉ុណ្ណោះទៅហើយ នឹងស្ងៀមនៅក៏ពុំបាន សុំឲ្យលោកចាត់ទាហានដែលមានថ្វីដៃស្ទាត់ ត្រូវទៅលបចោមវាយយកស្រុកសែឈ្លួនឲ្យបាន ប្រការមួយ បើមិនដូច្នោះ ឲ្យលោកលើកកងទ័ពធ្វើជាប្រុងនឹងត្រឡប់វិលទៅស្រុកកេងជីវវិញ អាក្រក់ល្អ គង់តែ**អៀវហ៊្វួយ, កោផាយ**ដែលរក្សាគយនោះនឹងសម្គាល់ថាលោកនឹងទៅមែន នឹងជូនទៅ យើងនឹងចាប់យកខ្លួនទៅសម្លាប់ចេញ ដណ្ដើយយកគយនោះឲ្យបាន ហើយសឹមលើកទៅវាយយកស្រុកសែឈ្លួនប្រការមួយ បើមិនដូច្នេះទេ សុំឲ្យលោកលើកទាហានទៅនៅស្រុកប៉ាកតេសៀសិន រួចសឹមយើងលបរត់ទៅស្រុកកេងជីវ ដើម្បីនឹងចាត់ចែងពលទាហានឲ្យព្រម ហើយសឹមលើកមកវាយយកស្រុកសែឈ្លួនជាក្រោយឲ្យបាន។ ឯកលទាំបីប្រការនេះ លោកនឹងឃើញប្រការឯណាល្អ ក៏តាមអធ្យាស្រ័យលោកចុះ ដែលលោកនឹងស្ងៀមនៅមិនគិតធ្វើការតទៅនោះ យូរទៅភ័យនឹងមានមកដល់ខ្លួនលោកជាប្រាកដ។

**ឡៅពី**ថា គំនិតដែលអ្នកគិតនេះល្អណាស់ តែថាកលជាបឋមនោះ ឃើញដូចជាស្ដែងពេកណាស់ កលទីបីនោះក៏ដូចជានឿយរវល់ណាស់ កលដែលជាគម្រប់ពីរនោះល្មមជាប្រមាណ ឃើញបានការខាងយើង **ឡៅពី**ក៏ឲ្យមានសំបុត្រទៅដល់**ឡៅជៀង** សេចក្ដីថា ឥឡូវ**ចូឆ្វ**លើកកងទ័ពមកធ្វើអន្តរាយស្រុកកេងជីវហើយ **ខុងបេង**មានសំបុត្រមកដល់ខ្ញុំឲ្យស្រូតប្រញាប់លើកកងទ័ពទៅវិញ បើនឹងបង្អង់នៅឲ្យយូរក៏ពុំបាន ខ្ញុំនឹងសុំលាអ្នកទៅរក្សាស្រុកសិន ដែលខ្ញុំមិនបានចូលមកគំនាប់តាមប្រពៃណីនោះ ព្រោះជាការតក់ក្រហល់ពេកណាស់ សុំឲ្យអ្នកអត់ទោសចុះ។

ខណៈនោះ**ទៀវសុង**ដឹងថា **ឡៅពី**ឲ្យមានសំបុត្រចូលមកលា**ឡៅជៀង**ត្រឡប់ចូលទៅស្រុកកេងជីវវិញ មិនដឹងថាជាកលឧបាយសម្គាល់ថាមែន ក៏សរសេរសំបុត្រមួយច្បាប់ប្រុងនឹងប្រើបម្រើឲ្យកាន់យកទៅឲ្យ**ឡៅពី** លុះច្រកស្រោមបិទស្រេច ទទួល**ទៀវសុក**ជាបងដែលធ្វើចៅហ្វាយស្រុកកេងហាន់ចូលមកសួរ **ទៀវសុង**ក៏យកសំបុត្រនោះស៊កលាក់ក្នុងដៃអាវ។ **ទៀវសុក**ជាបងឃើញកិរិយា**ទៀវសុង**ជាប្អូនធ្វើរឡេមរឡាមក៏នឹកពិភាល់ក្នុងចិត្តណាស់ តែមិនថាអ្វី។

លុះ**ទៀវសុង**បរិភោគអាហារជាមួយនឹង**ទៀវសុក** ផឹកស្រាស្រវឹងណាស់ សំបុត្រដែលនៅក្នុងដៃអាវនោះ ក៏របូតធ្លាក់ចុះទៅក្រោមតុមិនដឹងខ្លួន បាវ**ទៀវសុក**រើសបានក៏ហុចទៅឲ្យ**ទៀវសុក** ៗក៏ហែកស្រោមមើលឃើញសេចក្ដីថា ខ្ញុំបាទ**ទៀវសុង** សូមគំនាប់**ឡៅពី** ព្រោះខ្ញុំបាទបានចរចាទុកដល់លោកពីដើមនោះជាពាក្យពិត ឥឡូវលោកលើកពលមកដល់ស្រុកសែឈ្នួនហើយ បើនឹងគិតធ្វើការដូចជាពាក្យដែលនិយាយគ្នានោះ ក៏នឹងបានដូចសេចក្ដីប្រាថ្នា ស្រុកសែឈ្នួនដូចនៅក្នុងកណ្ដាប់ដៃលោកហើយ ហេតុម្ដេចបានជាលោកមិនគិតធ្វើការនោះ នឹងលើកទ័ពវិលទៅស្រុកវិញទទេដូច្នេះ នឹងមិនបង់កម្លាំងពលទាហានឥតអំពើទេឬ? សូមឲ្យលោកគិតធ្វើការឲ្យសម្រេចសិន ខ្លួនខ្ញុំបាទនឹងទទួលយកអាសាចាត់ការជូនលោកខាងក្នុងស្រុកសែឈ្នួនឯណេះហើយ។

**ទៀវសុក**ឃើញសេចក្ដីសំបុត្រដូច្នោះក៏ភ័យស្លុតចិត្តគិតថា ប្អូនអញម្ដេចមកគិតធ្វើការដូច្នេះ នឹងនាំគ្នាវិនាសទាំងអស់ទេឬ? បើអញនឹងស្ងៀមទុកទៅក៏មិនត្រូវសោះ គួរនឹងយកសំបុត្រនោះទៅបង្ហាញ**ឡៅជៀង**ឲ្យដឹង។ **ទៀវសុក**ក៏ស្រូតប្រញាប់ចាប់យកសំបុត្រនោះទៅបង្ហាញ**ឡៅជៀង**ហើយថា **ទៀវសុង**ប្អូនខ្ញុំបាទទៅគិតប្រទូសរ៉ាយលោក។ **ឡៅជៀង**ឃើញដូច្នោះក៏ខឹងខ្លាំងណាស់ ថាខ្លួនយើងបាន

ចិញ្ចឹមរក្សាព្យាបាលឧបត្ថម្ភ**ទៀវសុង**មកយូរហើយ មិនគួរឡើយវាមកប្រែចិត្តគិតក្បត់យើងដូច្នេះសោះ គួរតែវាជួយទំនុកបម្រុងយើងជាផ្លូវកតញ្ញូតទៅទៀត ហេតុអ្វីវាមកលើកស្រុកសែឈ្មូនឲ្យទៅ**ឡៅពី**វិញ មិនគួរសោះ។ លុះនិយាយហើយក៏បង្គាប់ទាហានទៅចាប់យកខ្លួន**ទៀវសុង** ព្រមទាំងភរិយាបុត្រទៅសម្លាប់បង់។ រួចប្រឹក្សានឹងនាហ្មឺនទាំងពួងថា ឥឡូវ**ឡៅពី**នឹងគិតប្រទូសរ៉ាយយើង គឺប្រាថ្នានឹងយកស្រុកសែឈ្មូនជាកម្មសិទ្ធិរបស់ខ្លួន។ ទីប្រឹក្សាទាំងពួងនឹងគិតឃើញប្រការម្ដេច? **អ៊ុយគួន**ថា ដែល**ឡៅពី**គិតប្រទូសរ៉ាយដល់លោកនោះ ក៏ដឹងខ្លួនហើយ នឹងស្ងៀមទុកយូរមិនបានទេ សុំឲ្យលោករៀសរវៃរៀងៗខ្លួន នឹងចាត់ការទៅរក្សាគយតាមផ្លូវឲ្យមាំមួន កុំឲ្យទាហាន**ឡៅពី**កន្លងចូលមកក្នុងគយបាន។ **ឡៅជៀង**ក៏យល់ត្រូវផង ទើបឲ្យមានសំបុត្រទៅកំជាប់ត្រួតត្រាគយគ្រប់ដែនតំបន់។

ឯ**ឡៅពី**នោះ លុះលើកទ័ពទៅដល់ដែនគយប៉ោយស៊ីគួន ក៏ឲ្យបម្រើចូលទៅប្រាប់**អៀវហ៊្វួយ, កោផាយ**ឲ្យចេញមក ប្រាថ្នានឹងទៅធ្វើជាគំនាប់លា។ **អៀវហ៊្វួយ**ក៏និយាយនឹង**កោផាយ**ថា ឥឡូវ**ឡៅពី**គិតប្រការម្ដេច បានជាលើកទ័ពត្រឡប់ទៅស្រុកកេងជីវវិញ? **កោផាយ**ថា អ្នកកុំវិតក្កឡើយ **ឡៅពី**គ្រានេះនឹងដល់នូវសេចក្ដីស្លាប់ហើយ យើងនឹងបបួលគ្នាយកអាវុធលាក់បង្កប់ក្នុងដៃអាវ ហើយតែងខ្លួនចូលទៅគំនាប់**ឡៅពី**កាលណានឹងដឹងខ្លួន បើយើងចូលទៅជិតហើយឃើញប្រមាទធ្វេសប្រហែសវេលាណា យើងក៏ត្រូវសម្លាប់ចេញ ស្រុកសែឈ្មូនក៏នឹងមិនអន្តរាយ។ **អៀវហ៊្វួយ, កោផាយ**គិតគូរគ្នាហើយ ក៏រៀបរបស់ផ្សេងៗលើកទាហានពីររយនាក់ចេញទៅគំនាប់**ឡៅពី**។

ខណៈនោះ**បាំងថង**និយាយនឹង**ឡៅពី**ថា ដែលលោកឲ្យចូលទៅហៅខ្លួន**អៀវហ៊្វួយ, កោផាយ**វេលានេះ បើចេញមកដោយល្អក៏កុំអាលទុកចិត្ត ត្រូវតែការពារ

រក្សាខ្លួនកុំប្រមាទ ថាបើមិនចេញមកដោយល្អទេ យើងក៏នឹងលើកទាហានចូលទៅចោមវាយយកស្រុកសែឈ្មួនកុំឲ្យដឹងទាន់ និយាយមិនទាន់ផុតមាត់ ក៏មានខ្យល់កំបុតត្បូងបក់ត្រូវដងទង់ជ័យបាក់ដួលចុះ **ឡៅពី**ឃើញអស្ចារ្យដូច្នោះក៏សួរ**បាំងថង**ថា ហេតុនេះនឹងជាគុណឬទោស?

**បាំងថង**ថា ឯហេតុទាំងនេះ មកប្រាប់ដំណឹងជាកាចអន្តរាយនឹងមាន បើ**អៀវហ៊្វួយ, កោផាយ**នឹងចេញមករកលោកនោះ ប្រាថ្នានឹងធ្វើកាចជាប្រាកដ កុំបីធ្វេសប្រហែសឡើយ ចូរវាំងខ្លួនឲ្យមាំមួន។ **ឡៅពី**ដឹងហើយ ក៏តែងខ្លួនពាក់ក្រោះកាន់អាវុធសម្រាប់ដៃ ហើយបង្គាប់ឲ្យទាហានឈប់តាំងបន្ទាយវាយជាពួក ជាកងរៀងគ្នា។ ទទួលមានមនុស្សចូលមកប្រាប់ថា ឥឡូវ**អៀវហ៊្វួយ, កោផាយ**នាំរបស់ជាជំនូនមកជូនលោក។ **បាំងថង**ក៏ឲ្យ**អ៊ុយអៀន**និង**ហាងតុង**ចេញទៅនៅខាងមុខហើយបង្គាប់ថា ដែលទាហានមកជាមួយ**អៀវហ៊្វួយ, កោផាយ**នោះ ឲ្យចាប់ទុកឲ្យអស់។ **អ៊ុយអៀន, ហាងតុង**ក៏ចេញទៅចាំតាមបង្គាប់។

គ្រានោះ **អៀវហ៊្វួយ, កោផាយ** ក៏នាំទាហានមកដល់មុខបន្ទាយ**ឡៅពី** ឃើញ**ឡៅពី**មិនបានត្រៀមទាហានទាំងពួងដូច្នោះក៏គិតថា **ឡៅពី**នេះត្រូវក្នុងកលរបស់យើងហើយ ក៏នាំគ្នាចូលទៅដល់ខាងក្នុង ហើយឃើញ**ឡៅពី** និង**បាំងថង**អង្គុយនៅជាមួយគ្នា ក៏ចូលទៅគំនាប់ថា ដ្បិតខ្ញុំបាទឮដំណឹងថា លោកនឹងលើកទ័ពត្រឡប់ទៅវិញ បានជានាំរបស់ទាំងអស់នេះចេញមកគំនាប់ ជូនលោកតាមប្រពៃណី។ **ឡៅពី**ថា អរគុណណាស់ ហើយឲ្យរៀបតុលៀងអាហារអញ្ជើញ**អៀវហ៊្វួយ, កោផាយ**បរិភោគហើយថា អ្នកទាំងពីរបានរក្សាផ្លូវស្រុកសែឈ្មួនទុកនេះ ជាសេចក្តីគាប់ប្រសើរណាស់ ចូរផឹកស្រាលេងឲ្យសប្បាយចុះ តែយើងគិតថានឹងចរចាការស្ងាត់បន្តិចដល់អ្នកទាំងពីរ តែមានពួកទាហានចូលមកជាច្រើន ក្រែងដឹងឮទៅនឹងនាំឲ្យ

បែកការណ៍ ឲ្យអ្នកបណ្ដេញចេញទៅនៅខាងក្រៅឲ្យអស់សិន យើងបានសន្ទនានឹងគ្នា។

**អៀវហ៊្វួយ, កោផាយ** ក៏មិនបានមានសេចក្ដីសង្ស័យ ទើបបណ្ដេញពួកទាហានទាំងអស់ឲ្យចេញទៅក្រៅបន្ទាយ ខណៈនោះ**ឡៅពី**ក៏ស្រែកឡើងថា នរណានឹងយកអាសាចាប់អាចោរពីរនាក់នេះឲ្យយើងបាន? **ឡៅហង** និង**គួនប៉េង**ឮដូច្នោះក៏ស្ទុះចេញមកព្រួតចាប់ខ្លួន**អៀវហ៊្វួយ** និង**កោផាយ**បាន។ **ឡៅពី**ថា អញនិងនាយឯងជាសែជាមួយគ្នា ហេតុម្ដេចបានជាឯងទាំងពីរ មកគិតចង់ប្រទូសរ៉ាយនឹងអញ? ប្រាថ្នានឹងឲ្យអញជាបងប្អូនមានទាស់អារម្មណ៍នឹងគ្នា។

ខណៈនោះ **បាំងថង**ក៏ឲ្យទាហានត្រួតពិនិត្យរើមើល ឃើញមានអាវុធនៅក្នុងអាវ**អៀវហ៊្វួយ** និង**កោផាយ** ក៏បង្គាប់ឲ្យទាហាននាំយកខ្លួនទាំងពីរនាក់ទៅប្រហារជីវិតបង់។ **ហងតុង, អ៊ុយអៀន**ក៏ចាប់ទាហានទាំងពីររយនាក់នោះបាន នាំចូលមកជូន**ឡៅពី** ៗក៏ឃុំរក្សាទុកដោយប្រក្រតី ហើយថា ដ្បិត**អៀវហ៊្វួយ** និង**កោផាយ**ចូលមករកយើងមិនមែនជាផ្លូវសុចរិត ប្រាថ្នានឹងប្រទូសរ៉ាយយើង ៗក៏ចាប់សម្លាប់តាមទោសទៅហើយ ចូរផឹកស្រាលេងឲ្យសប្បាយចុះ ទាហានទាំងនោះក៏លើកដៃឡើងគំនាប់**ឡៅពី**ដោយសេចក្ដីប្រីតាភិរម្យសោមនស្សទាំងអស់គ្នា។

**បាំងថង**ថា ឥឡូវយើងចង់ឲ្យអ្នកឯងរាល់គ្នាលើកចូលទៅវាយបន្ទាយប៉ោយស៊ីគួន បើបានហើយយើងនឹងឲ្យបំណាច់រង្វាន់ដល់ខ្វាត។ ពួកទាំងនោះក៏ព្រមទទួលតាមពាក្យ លុះដល់ពេលយប់ក៏លើកចេញទៅជាកងមុខ **ឡៅពី**ក៏លើកកងទ័ពទៅជាក្រោយ លុះទៅដល់តំបន់ប៉ោយស៊ីគួន ទាហានទាំងពីររយនាក់ដែលទទួលជាកងមុខក៏ស្រែកចូលទៅថា នាយយើងវិលមកវិញហើយ ឲ្យបើកទ្វារទទួលនឹងចូលទៅកេណ្ឌទាហានជាការប្រញាប់។ នោះពួកទាហានដែលរក្សាបន្ទាយ ឃើញស្គាល់ជា

ពួកម៉ាករបស់ខ្លួន ក៏មិនមានមន្ទិលសង្ស័យ នាំគ្នាបើកទ្វារទទួល។ ទាហាន**ឡៅពី**ក៏ស្រុះគ្នាស្រទៅបាន។ ពួកទាហានក្នុងបន្ទាយក៏នាំគ្នាភិតភ័យខ្លាចមិនអាចតស៊ូ ក៏នាំគ្នាចូលទៅគំនាប់ចុះចូល**ឡៅពី**ទាំងអស់។ **ឡៅពី**ក៏ឲ្យបំណាច់រង្វាន់ទាហានទាំងពួងតាមសមគួរ ហើយក៏ឲ្យចាត់ចែងទាហាននៅរក្សាបន្ទាយនោះឲ្យមាំមួន ទើបតែងតុលៀងអាហារតាមប្រពៃណី។

**ឡៅពី**សេពសុរាស្រវឹងខ្លាំង ក៏និយាយនឹង**បាំងថង**ថា ទីនេះយើងវាយបានបន្ទាយប៉ោយស៊ីគួនហើយ ៗក៏ត្រូវបានសេចក្ដីសុខសប្បាយ ហើយ**បាំងថង**ថា យើងមកវាយយកស្រុកគេនៅប្រាបប្រាមមិនទាន់រាបទាបនៅឡើយ លោកនឹងមកប្រមាទថាជាសុខនោះមិនត្រូវទេ។ **ឡៅពី**ថា កាលគ្រាព្រះចៅ**ជីវប៊ូអង**លើកទៅវាយយកស្រុកព្រះចៅ**ទីវអង**នោះទៅដល់តំបន់ណា ក៏មានសេចក្ដីស្រណុកសុខសប្បាយគ្រប់អន្លើ ដែលខ្លួនយើងវាយបានបន្ទាយប៉ោយស៊ីគួន កន្លងចូលមកដល់ទីនេះហើយនឹងនៅមិនបានឈ្មោះថាជាសុខមែនហើយឬ? អ្នកមកថាដូច្នេះមិនគួរសោះ ចូរថយចេញទៅឲ្យឆាប់។ **បាំងថង**ឮ**ឡៅពី**ថាដូច្នោះ ក៏សម្គាល់ថាសេពសុរាស្រវឹងខ្លាំង ថាដោយអំណាចស្រវឹងមិនដឹងខ្លួន មិនមានការនឹកខឹងអ្វី សើចហើយក៏ក្រោកដើរចេញទៅ។ **ឡៅពី**ស្រវឹងស្រាខ្លាំងណាស់ ក៏ដេកលក់ទៅ។

លុះព្រឹកឡើង មនុស្សបម្រើស្និទ្ធឃើញ**ឡៅពី**ស្វាងស្រវឹង ហើយភ្ញាក់ពីដេកក៏ចូលទៅសួរថា កាលពីម្សិលមិញ លោកបានចរចានឹង**បាំងថង**តាមអំណាចស្រវឹងនោះ **បាំងថង**នឹងមិនតូចចិត្តទេឬ? **ឡៅពី**ឮដូច្នោះ ក៏ឲ្យមានចិត្តភិតភ័យណាស់ត្រឡប់នឹកឡើងឃើញ ខ្លាច**បាំងថង**អន់ចិត្ត ក៏ឲ្យបម្រើទៅអញ្ជើញមកជួបហើយនិយាយថា កាលពីម្សិលមិញខ្ញុំស្រវឹងស្រាជ្រុលណាស់ បានជានិយាយនឹងអ្នកដោយពាក្យមិនគួរសមព្រោះគិតមិនទាន់ ខ្ញុំសុំឲ្យអ្នកអត់ទោសកុំឲ្យខឹងសម្បារអ្វីនឹងខ្ញុំ

ឡើយ។ **បាំងថង**ថា ពាក្យដែលចរចាម្សិលមិញនោះ មិនមែននឹងខុសតែខាងលោកទេ ចំណែកខាងខ្លួនខ្ញុំបាទ ក៏បានប្រមាទខុសដូចគ្នា លោកក៏ត្រូវអត់ទោសឲ្យខ្ញុំផង។ **ឡៅពីនិងបាំងថង**ទាំងពីរនាក់និយាយគ្នាដូច្នោះហើយ ក៏នាំគ្នាសើច ហើយសន្ទនាគ្នាជាប្រក្រតីទៅ។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៥២

## ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា

*(តាំងពី**ឡៅជៀង**ចៅហ្វាយស្រុកសែឈួនដឹងថា **ឡៅពី**វាយយកបានបន្ទាយប៉ោយស៊ីគួន ហើយសម្លាប់**អៀវហ៊្វយ, កោផាយ** ក៏ឲ្យលើកទាហានប្រាំម៉ឺនទៅតាំងបន្ទាយនៅស្រុកឡុកសៀ រហូតទៅដល់**តៀវហ៊ុយ**ឲ្យ**ង៉ៀមង៉ាន់**នាំផ្លូវលើកទ័ពទៅស្រុកឡុកសៀ។)*

**ឯឡៅជៀង**ដឹងថា **ឡៅពី**លើកទាហានចូលវាយយកបន្ទាយប៉ោយស៊ីគួនបាន ហើយសម្លាប់**អៀវហ៊្វយ** និង**កោផាយ**ដូច្នោះ ក៏ភ័យណាស់ ទើបឲ្យហៅនាហ្មឺនចូលមកប្រឹក្សាការរាជការថា វេលានេះ**ឡៅពី**លើកទ័ពមកប្រទូសរ៉ាយយើង វាយយកបន្ទាយប៉ោយស៊ីគួនបានហើយ តើយើងនឹងគិតរក្សាស្រុកប្រការម្ដេច ទើបនឹងកម្ចាត់**ឡៅពី**វិញបាន? **អ៊ុយគួន**ថា ដែល**ឡៅពី**លើកទ័ពមកគ្រានេះ យើងនឹងគិតរក្សាស្រុកទុកនោះ សូមឲ្យលោកចាត់កងទ័ពលើកទៅតាំងបន្ទាយស្កាត់ នៅស្រុកឡុកសៀវ ព្រោះស្រុកនោះជាមាត់ផ្លូវ ត្រូវចូលមកជាច្រកចង្អៀតណាស់ ទោះបីជាទាហាន**ឡៅពី**នឹងមានថ្វីដៃខ្លាំងពូកែយ៉ាងណា ក៏នឹងហែកទម្លាយចូលមកមិនបាន។ **ឡៅជៀង**ក៏យល់ឃើញផង ទើបចាត់ប្រើ**ឡេងប៉ៅ, ឡៅកុយ, ទៀវយឹម, តេងហៀន**ឲ្យលើកទាហានប្រាំម៉ឺនទៅទាំងយប់ថ្ងៃនឹងតាំងបន្ទាយនៅស្រុកឡុកសៀ។

កាលទាហានបួននាយលើកទៅដល់កណ្ដាលផ្លូវ **ឡៅកុយ**និយាយនឹង**ឡេងប៉ៅ, ទៀវយឹម, តេងហៀន**ថា យើងបានឮល្បីគេនិយាយពីដើមមកថា ក្នុងតំបន់គិមបិនសាននោះមានអាចារ្យម្នាក់ឈ្មោះ**ជីហោតោយិន** មានសតិបញ្ញាប្រកបដោយវិជ្ជាការចំណាន ដឹងច្បាស់លក្ខណៈមនុស្សមានគ្រោះកាចឬល្អ ហើយនឹងដឹងរស់ដឹងស្លាប់គ្រប់ប្រការ ឥឡូវត្រូវយើងគេចចូលទៅសន្ទនានឹងគ្រូនោះ ឲ្យពិគ្រោះមើលខ្លួនយើងនឹងល្អឬអាក្រក់។ **ទៀវយឹម**ថា ដែលកើតមកជាមនុស្សនេះ ក៏រមែង

មានសេចក្ដីស្លាប់ទៅជាធម្មតា នរណានឹងរួចចាកសេចក្ដីអន្តរាយនោះគ្មានទេ ខ្លួនយើងជាជាតិទាហាននឹងចេញទៅធ្វើការរណរង្គសង្គ្រាម ដែលនឹងមកគិតវិតក្កថាក្រែងល្អអាក្រក់នាំឲ្យតក់ស្លុតមិនបានយកចិត្តខ្លួនជាប្រមាណ ហើយនឹងទៅសួរព័ត៌មានមនុស្សអ្នកក្រៅនៅក្នុងព្រៃ ឲ្យជួយលុបលាងបាបគ្រោះចំពោះខ្លួននោះ មិនត្រូវការសោះ។

**ឡៅកុយ**ថា អ្នកនិយាយនេះគឺមិនបានរាប់អានគតិបូរាណ មានតែខុសប្រពៃណីលោកទាំងអស់ ធម្មតាមនុស្សដែលមានសតិបញ្ញានោះ គេរមែងសាកសួរដល់មនុស្សចាស់ព្រឹទ្ធាចារ្យជាទីអាង គួរតែយើងទៅគំនាប់ទើបគួរ។ **ឡេងប៉ៅ, តេងហៀន, ទៀវយឹម**បានស្ដាប់**ឡៅកុយ**និយាយដូច្នោះ ក៏ស្រុះស្រួលបបួលគ្នាចូលទៅក្នុងភ្នំគិមបិនសាន ឃើញ**ជីហោតោយិន**អង្គុយលើគ្រែ ក៏ចូលទៅក្រាបនមស្សការ ហើយនិយាយថា ខ្ញុំបាទនាំគ្នាចូលមកគំនាប់លោកវេលានេះ ប្រាថ្នានឹងសុំយកតម្រិះប្រាជ្ញារបស់លោកឲ្យជួយមេត្តាទំនុកបម្រុង ព្រោះ**ឡៅជៀង**ជានាយចៅហ្វាយ ប្រើឲ្យយើងទាំងអស់គ្នានេះ លើកកងទ័ពចេញទៅការពារបច្ចាមិត្ត គឺ**ឡៅពី**នៅស្រុកឡុកសៀ ការដែលនឹងទៅធ្វើសង្គ្រាមគ្រានេះ តើនឹងជាល្អឬអាក្រក់ប្រការម្ដេច សូមឲ្យលោកមានសេចក្ដីករុណាពិនិត្យពិចារណាមើលគ្រោះយាមឲ្យទាន។

**ជីហោតោយិន**ក៏ឆ្លើយថា ខ្លួនយើងជាមនុស្សអ្នកព្រៃ មានស្មារតីប្រាជ្ញាតិចណាស់ ដែលអ្នកទាំងអស់មកសួរដណ្ដឹងឲ្យយើងប្រាប់សេចក្ដីអាក្រក់ល្អតទៅខាងមុខនោះ យើងមិនអាចនឹងថាបាន។ **ឡៅកុយ**ក៏សំពះអង្វរជាច្រើនគ្រា **ជីហោតោយិន**អត់មិនបាន ក៏យកភ្ជូ និងពិតមកសរសេរជាសេចក្ដីថា មករ និងហង្សនឹងចូលមកនៅក្នុងស្រុកសៃឈ្នួន ចំណែកហង្សមានស្លាបហើរបាន តែមិនអាចនឹងហើរទៅដោយអាកាសវេហាស៍ ធ្លាក់គ្រាំគ្រានៅលើផែនដី មករគ្មានស្លាបសោះ តែអាចនឹងហោះហើរទៅសម្ដែងអានុភាពនៅលើអាកាសបាន បើអ្នកឯណាដឹងច្បាស់លក្ខណៈ

ដូច្នេះហើយ ក៏ចូរវិះគិតប្រែប្រួលដើម្បីនឹងរក្សាខ្លួនឲ្យមាំមួនចុះ ទើបនឹងរួចចាកអន្តរាយក្នុងគ្រានេះបាន។

**ឡៅកុយ**តបថា ខ្ញុំបាទជម្រាបសួរលោកនេះ ប្រាថ្នានឹងចង់ដឹងច្បាស់ហេតុផលក្នុងខ្លួន យើងខ្ញុំទាំងបួននាក់នេះនឹងជាល្អ ឬអាក្រក់ប៉ុណ្ណោះទេ ដែលលោកមកថាប្រៀបប្រាយឲ្យវែងឆ្ងាយដូច្នេះ ក៏មិនជាប្រយោជន៍ចំពោះដល់យើងខ្ញុំនោះ **ជីហោតោយិន**ថា បណ្តាបុណ្យ និងកម្មដែលអ្នកសួរយើងនោះ ក៏មិនត្រូវការនឹងប្រាប់បានទេ ការអាក្រក់ល្អនោះក៏រមែងសម្រាប់ខ្លួនរាល់គ្នា នរណានឹងប្រាប់បាន ថាហើយក៏ធ្មេចភ្នែកអង្គុយស្ងៀមទៅវិញ។ **ទៀវយឹម**ឃើញដូច្នោះក៏ថា យើងមកចរចាជាមួយនឹងមនុស្សបង់ចរិតដូច្នេះមិនត្រូវទេ មកយើងទៅវិញចុះ ថាហើយក៏នាំគ្នាត្រឡប់ទៅឡើងសេះ នាំទាហានស្រូតទៅដល់ស្រុកឡុកសៀ។ **ឡៅកុយ**ថា ស្រុកឡុកសៀនេះជាទីសំខាន់ណាស់ បើបណ្តោយឲ្យខូចតំបន់នេះហើយ ក៏ដូចជាខូចដល់ស្រុកសែឈ្លួនតែម្តង ហេតុនេះត្រូវតែតាំងបន្ទាយខ្ទប់ទុកពីខាងច្រកភ្នំមុខស្រុក ដើម្បីកុំឲ្យកងទ័ព**ឡៅពី**កន្លងចូលមកបាន។ **ឡេងប៉ៅ, តេងហៀន**យល់ឃើញត្រូវផង ក៏ឃុំនាំទាហានពីរម៉ឺន លើកចេញទៅតាំងបន្ទាយស្កាត់ផ្លូវខ្ទប់តាមច្រកចង្អៀតនោះ។ **ឡៅកុយ** និង**ទៀវយឹម**ក៏តាំងនៅរក្សាស្រុកឡុកសៀ។

ឯ**ឡៅពី**ក៏ប្រឹក្សានឹង**បាំងថង**ថា នឹងលើកចាកបន្ទាយប៉ោយស៊ីគួនចូលទៅវាយយកស្រុកសែឈ្លួន ទទួលទាហានចូលមកប្រាប់ថា ឥឡូវ**ឡៅជៀង**ឲ្យលើកទ័ពទៅតាំងបន្ទាយក្នុងស្រុកឡុកសៀ ដើម្បីនឹងការពាររក្សាស្រុកនេះទុក ហើយឲ្យ**ឡេងប៉ៅ, ទៀវហៀន** ទាំងពីរនាយនេះឃុំនាំទាហានពីរម៉ឺន នៅតាំងបន្ទាយនៅច្រកចង្អៀតតាមផ្លូវប្រហែលចម្ងាយប្រាំមួយរយសិន (២៤ គ.ម) **ឡៅពី**ក៏សួរទាហានទាំងពួងថា គ្រានេះនរណានឹងអាចយកអាសាទៅវាយបន្ទាយត្រង់ច្រកចង្អៀតនោះបាន? **ហាងតុង**ទទួលរ៉ាប់ខ្លួនយកអាសាថា ខ្ញុំបាទនឹងសុំទៅវាយឲ្យបាន។ **ឡៅពី**ថា អ្នកនឹងទទួលទៅធ្វើការគ្រានេះក៏ល្អហើយ **ហាងតុង**មានចិត្តត្រេកអរណាស់ គំនាប់លានឹងចេញទៅចាត់ចែងទាហាន ទទួល**អ៊ុយអៀន**ចូលមកនិយាយនឹង**ឡៅពី**ថា

ដែល**ហាងតុង**ជាមនុស្សចាស់ជរាណាស់ សុំឲ្យគាត់នៅវិញចុះ ខ្ញុំបាទនឹងយកអាសាទៅវិញ។ **ហាងតុង**ឮដូច្នោះក៏ខឹងណាស់និយាយថា អ្នកនេះមាក់ងាយប្រមាថយើងពន់ពេកណាស់។ **អ៊ុយអៀន**ថា ខ្ញុំមិនបានមើលងាយប្រមាថអ្នកទេ ខ្លួនអ្នកពូកែមានថ្វីដៃក៏មែនហើយ តែថាខ្លួនអ្នកចាស់ហើយ ថយកម្លាំងមិនដូចពីក្មេង ឯ**ឡេងប៉ៅ, តេងហៀន** ទាំងពីរនាក់នេះជាទាហានឯកក្នុងស្រុកសៃឈ្នួនមានថ្វីដៃខ្លាំងពូកែ ហើយសុទ្ធតែនៅក្មេងមានកម្លាំងច្រើន ក្រែងអ្នកជាមនុស្សចាស់ជរានឹងថ្លោះការទៅ បានជាខ្ញុំសូមខ្លួនទៅជំនួសអ្នកកុំឲ្យលំបាក។ បើខ្ញុំនិយាយការល្អដូច្នេះ ហេតុម្តេចក៏អ្នកខឹងទៅវិញ? **ហាងតុង**ថា អ្នកសម្គាល់ថាយើងជាមនុស្សចាស់អស់កម្លាំងពីក្នុងខ្លួនហើយឬ? បើខ្លួនអ្នកនៅក្មេង ចូរមកល្បងលេងនឹងថ្វីដៃយើងមើល។ **អ៊ុយអៀន**នឹកខឹងណាស់ថា អ្នកនិងខ្ញុំមកតស៊ូគ្នាមើលក៏មកចុះ។ **ហាងតុង**ក៏ហៅបាវឲ្យទៅយកលំពែងមកនឹងតយុទ្ធគ្នានឹង**អ៊ុយអៀន**។

**ឡៅពី**ឃើញដូច្នោះក៏ឃាត់ហាមថា ដែលមកធ្វើការនេះគឺខ្ញុំរំពឹងកម្លាំងអ្នកទាំងពីរ បើខ្លានិងខ្លាមកប្រខាំគ្នាដូច្នេះ ការរបស់យើងនឹងមិនខូចអសារទៅទេឬ? យើងសូមឲ្យលើកចោលទៅចុះ។ **បាំងថង**ថា អ្នកទាំងពីរកុំវិវាទគ្នាឡើយ អ្នកទាំងពីរសុទ្ធតែមានថ្វីដៃដូចគ្នា បើនឹងឲ្យទៅតែម្នាក់ឯង ក៏មានចិត្តមិនសប្បាយម្ខាងៗ ត្រូវឲ្យទៅទាំងពីរនាក់ចុះ ដើម្បីនឹងវាយយកបន្ទាយឲ្យបានម្នាក់មួយ។ បើនរណាវាយយកបានមុនក៏នឹងត្រូវបានសេចក្តីគាប់ប្រសើរជាងគេ។ ហើយបែងទាហានឲ្យ**ហាងតុង**ទៅវាយយកបន្ទាយ**ឡេងប៉ៅ** ឲ្យ**អ៊ុយអៀន**លើកទាហានទៅវាយយកបន្ទាយ**តេងហៀន**។ ទាំងពីរនាក់គំនាប់លា**ឡៅពី** ហើយក៏ចេញទៅរៀបចំពលទាហាន ក្រោយនោះ**បាំងថង**និយាយថា នាយទាហានពីរនាក់ដែលលើកពលចេញទៅ ឥឡូវនេះមុខជាមិនបានប្រក្រតី ក្រែងទៅកើតវិវាទគ្នាកណ្តាលផ្លូវដោយព្យាបាទក៏មិនដឹង សូមឲ្យលោកលើកទាហានជាកងជំនួនជូនទៅតាមស្តាប់ការណ៍ ដើម្បីឲ្យឃើញខុសត្រូវផង។ **ឡៅពី**ក៏ឃើញត្រូវផង ទើបប្រមូលទាហានទុកឲ្យ**បាំងថង**នៅរក្សាបន្ទាយមួយប៉ែក បំបែកនាំចេញទៅជាមួយនឹងខ្លួន**ឡៅពី**ជាទ័ពជំនួយមួយប៉ែក។

**ហាងតុង**ក៏បង្គាប់ទាហានឲ្យដាំបាយស៊ីឲ្យរួចពីព្រឹក នឹងលើកទ័ពទៅខាងជើងភ្នំខាងស្ដាំដៃ ខណៈកាល**ហាងតុង**បង្គាប់ទាហានឲ្យដាំបាយនោះ **អ៊ុយអៀន**ដឹងកិត្តិសព្ទក៏មានអំណរណាស់ ទើបបង្គាប់ទាហានរបស់ខ្លួនឲ្យដាំបាយស៊ីឲ្យរួចពីយាមមួយ ហើយក៏លើកចេញទៅមុខតាំងពីកណ្ដាលអាធ្រាត្រ ប្រមាណជាភ្លឺស្វាងឲ្យដល់ លុះទៅដល់កណ្ដាលផ្លូវក៏គិតថា បើយើងនឹងទៅវាយយកបន្ទាយ**តេងហៀន**តែមួយឥឡូវនេះ សេចក្ដីគាប់ប្រសើរក៏មិនជាប្រមាណ ឈ្មោះសំឡេងក៏មិនជាល្បីឮទូទៅខាងមុខ គួរតែនឹងលើកទៅវាយយកបន្ទាយ**ឡេងប៉ៅ**ជាចំណែក**ហាងតុង**ឲ្យបានជាមុនសិន រួចសឹមត្រឡប់ទៅវាយយកបន្ទាយ**តេងហៀន**ជាក្រោយ។ លុះគិតដូច្នោះហើយ ក៏ប្រាប់ទាហានឲ្យលើកបកទៅផ្លូវខាងស្ដាំដៃប្រាថ្នានឹងដណ្ដើមយកមុខងារ**ហាងតុង** លុះលើកទៅជិតបន្ទាយក៏វាយទាហានឲ្យឈប់ត្រៀមខ្លួនដើម្បីនឹងចូលច្បាំង។

បម្រើសេះយកសេចក្ដីទៅប្រាប់**ឡេងប៉ៅ** ៗដឹងដូច្នោះក៏រៀបចំទាហានទុកហើយចាត់ទាហានមួយកងឲ្យលើកត្រឡប់ទៅចាំវាយពីក្រោយ។ ទាហាន**អ៊ុយអៀន**ខំដើរស្រូតទៅមិនទាន់ភ្លឺស្រាងក៏នឿយណាស់ ស៊ូនឹងទាហាន**ឡេងប៉ៅ**មិនបាន ក៏ចាញ់ថយបែកទ័ពទៅ។ **អ៊ុយអៀន**ឃើញទាហានទាំងពួងបែកក៏ញាក់សេះរត់។ **ឡេងប៉ៅ**បានការ ក៏បំផាយសេះតាមដេញទៅចម្ងាយប្រហែលហាសិបសិន (២ គ.ម)។

កាល**អ៊ុយអៀន**លើកទៅនោះ **តេងហៀន**ក៏លើកទាហានទៅចាំស្ទាក់នៅលើកំពូលភ្នំ ទទួល**អ៊ុយអៀន**បែករត់ទៅ **តេងហៀន**ក៏បរសេះបញ្ចោះទាហានឲ្យចុះពីលើភ្នំដេញតាមទៅ **អ៊ុយអៀន**បង្ខំបរសេះរត់ដោយកម្លាំង សេះនោះបោលជាន់លើថ្មរអិលដួលចុះ **អ៊ុយអៀន**ក៏ភ្លាក់ធ្លាក់ពីលើខ្នងសេះ។ **តេងហៀន**បានការ ក៏បំបោលសេះសង្កុញទៅលើកលំពែងនឹងចាក់ ទទួល**ហាងតុង**លើកទាហានទៅដល់ប្រទះគ្នាឃើញ**តេងហៀន**ដេញ**អ៊ុយអៀន**ប្រកិតជិតណាស់ លើកលំពែងឡើង **ហាងតុង**ក៏ស្រែកដោយសំឡេងខ្លាំងថា អញឈ្មោះ**ហាងតុង**ទាហានឯកនៅខាងនេះ នរណាពូកែ

ចូលមកតស៊ូគ្នា **ឡេងប៉ៅ**ក៏ងាក់ទៅតនឹង**ហាងតុង**បានប្រាំភ្លែង តទល់ពុំបានក៏ញាក់សេះរត់ **ហាងតុង**បានចំណាប់ក៏បំបោលសេះដេញទាហានឲ្យចូលទៅ ទាហាន**ឡេងប៉ៅ**ក៏បែកបាក់ខ្ចាត់ខ្ចាយទៅអស់។ **ឡេងប៉ៅ**នឹងចូលបន្ទាយមិនទាន់ ឃើញ**ហាងតុង**ដេញខ្ជាន់ពីក្រោយ ក៏ទាញសេះងាកមកតបានដប់ភ្លែង ឃើញទាហាន**ហាងតុង**ជាប់តាមមកច្រើនណាស់ ប៉ះពារលើខ្លួនជុំវិញ ក៏ទាញសេះរត់តម្រង់ចូលបន្ទាយ**តេងហៀន** ទទួល**ឡៅពី**លើកទ័ពជំនួនមកជាកងក្រោយ ចូលដណ្ដើមយកបន្ទាយ**តេងហៀន**បានមុខ **ឡេងប៉ៅ**ក្រឡេកទៅឃើញ**ឡៅពី**ពាក់ក្រោះមាសឈរពីក្រោយ **គួនប៉េង**ឈរឆ្វេង **ឡៅហាង**ឈរខាងស្ដាំ ស្រែកមកថា ឥឡូវអញដណ្ដើមយកបន្ទាយបានហើយ ឯងនឹងរត់ទៅខាងណា? **ឡេងប៉ៅ**ទាល់ច្រកនឹងងាកចូលបន្ទាយមិនបាន ក៏ញាក់សេះវេះទៅតាមច្រកភ្នំ នឹងរត់តម្រង់ទៅស្រុកឡុកសៀ។

**អ៊ុយអៀន**ថ្កោះការ ចាញ់ប្រៀបគេខ្លាំងណាស់ ក៏គិតថានឹងធ្វើការកែខ្លួនឲ្យបាត់ខ្មាស ហើយក៏លើកទាហានទន្ទ្រានដេញតាម**ឡេងប៉ៅ**ទៅ តាមផ្លូវដែលបែកទៅនោះ ស្រូតរូតទៅស្ទាក់ពីមុខ ហើយឲ្យទាហានយកពួរចងសន្ទឹងរាំងផ្លូវ សេះ**ឡេងប៉ៅ**បោលទៅប៉ះលើពួរក៏ដួលចុះធ្លាក់**ឡេងប៉ៅ**ពីលើសេះ ក៏នាំគ្នាចុះចូលទៅព្រួតចាប់ខ្លួនបានចងនាំមក។ កាល**ឡៅពី**បានបន្ទាយ**តេងហៀន**ហើយ ក៏ឲ្យចារឹកអក្សរនៅទង់សេចក្ដីថា កុំឲ្យនរណាធ្វើទុក្ខបុកម្នេញពួកឈ្លើយឲ្យអន្តរាយជីវិតឡើយ បើនរណាហើយមិនស្ដាប់នឹងយកខ្លួនធ្វើទោសប្រហារជីវិតតាមគ្នា។ លុះចារឹកអក្សរហើយ ក៏លើកទង់ដោតឡើងនៅមុខបន្ទាយ ហើយក៏និយាយនឹងទាហាន**ឡេងប៉ៅ**និង**តេងហៀន**ដែលចាប់បានមកនោះថា អស់អ្នករាល់គ្នាដែលជាឈ្លើយយើងនេះ បើនរណាមានចិត្តគិតចង់នៅធ្វើការជាមួយនឹងយើង ចូរនៅចុះ បើនរណានឹងចង់វិលត្រឡប់ទៅស្រុកវិញ ព្រោះនឹករឭកដល់មាតាបិតាញាតិការបងប្អូនក៏ឲ្យវិលទៅចុះ។ មនុស្សពួកនោះបានឱកាសដូច្នោះហើយ ណាដែលនឹកដល់បុត្រភរិយា បងប្អូនក៏គំនាប់លា**ឡៅពី**ទៅ បណ្ដាមនុស្សដែលមានចិត្តស្រឡាញ់ក៏នាំគ្នាសរសើរ**ឡៅពី**ខ្ជរខ្ជារទូទៅពេញក្នុងស្រុក។

**ហាងតុង**បានជ័យជម្នះហើយ ក៏ចូលទៅគំនាប់**ឡៅពី**ជម្រាបថា ឥឡូវ**អ៊ុយអៀន**ធ្វើខុសថ្លោះការនឹងបច្ចាមិត្តដែលរត់មកដូច្នេះ លុះនឹងមិនយកទោស បើអំណឹះតទៅមុខការសង្គ្រាមក៏រមែងមានតម្រាប់ជាទម្លាប់ដូច្នេះ ឲ្យខុសនឹងច្បាប់មេទ័ព ទាហានទាំងពួងនឹងយកតម្រាប់តាម សុំឲ្យលោកប្រហារជីវិតវាចេញទើបត្រូវ។ **ឡៅពី**ក៏ប្រើទាហានឲ្យទៅរកហៅខ្លួន**អ៊ុយអៀន** ទទួល**អ៊ុយអៀន**ចង**ឡេងប៉ៅ**នាំចូលមកគំនាប់**ឡៅពី** ៗថា ខ្លួនអ្នកឯងមានទោសជាទម្ងន់ធ្ងន់ណាស់ តែគ្រានេះហាក់តែអ្នកឯងធ្វើការកែខ្លួនចាប់**ឡេងប៉ៅ**បាន បានជាយើងត្រូវលើកទោសចោល ពីថ្ងៃនេះទៅមុខបើនឹងធ្វើការអ្វី កុំគប្បីធ្វើឲ្យទាស់ទែងខ្វែងគំនិតគ្នា កុំធ្វើការវែកយកតែមុខរបស់ខ្លួនលើកខ្លួនថា គ្រាន់បើជាងគេដូចជាគ្រានេះ ដែលអ្នកឯងរួចពីសេចក្ដីស្លាប់នោះ មិនពីព្រោះ**ហាងតុង**ទៅជួយទេឬ? ឥឡូវត្រូវតែទៅគំនាប់**ហាងតុង**តាមប្រពៃណី។ **អ៊ុយអៀន**ក៏គំនាប់**ហាងតុង**សុំខមាលទោស **ឡៅពី**ក៏ឲ្យបំណាច់រង្វាន់ដល់**ហាងតុង**ជាច្រើន ហើយក៏ឲ្យទាហាននាំយកខ្លួន**ឡេងប៉ៅ**ចូលមក។ **ឡៅពី**ក៏ចុះទៅស្រាយចំណងដែលចងនោះចេញ រួចឲ្យរៀបតុលៀងអាហារហើយសួរថា អ្នកឯងនឹងស្ម័គ្រចិត្តគិតភក្ដីនឹងយើងឬប្រការម្ដេច?

**ឡេងប៉ៅ**ជម្រាបថា ជីវិតខ្ញុំបាទដល់ស្លាប់ហើយ លោកមានសេចក្ដីករុណាទុកអាយុឲ្យរស់នៅគ្រានេះ ព្រះតេជព្រះគុណានឹងរកទីបំផុតគ្មាន ខ្ញុំបាទនឹងសូមធ្វើការតបស្នងគុណលោកតទៅ ដែលនឹងមានចិត្តគិតប្រែពីលោកទៅវិញគ្មាន ឥឡូវ**ទៀវឃឹម, ឡៅកុយ**ដែលមកតាំងបន្ទាយនៅក្នុងស្រុកឡុកសៀនោះ ហើយនឹងខ្ញុំបាទជាមនុស្សចិត្តមួយនឹងគ្នា បើលោកករុណាលែងខ្ញុំបាទឲ្យទៅ ខ្ញុំបាទក៏នឹងទៅនិយាយបញ្ចុះបញ្ចូលអ្នកទាំងពីរឲ្យមកស្វាមីភក្ដិនៅនឹងលោក ដើម្បីនឹងជួយគិតការតទៅឲ្យបានស្រុកឡុកសៀមកជាកំណាន់របស់លោក។ **ឡៅពី**មានសេចក្ដីត្រេកអរ ក៏ឲ្យអាវសំពត់និងរង្វាន់ទៅ**ឡេងប៉ៅ**ហើយថា អ្នកឯងនិយាយទុកទៅមុខ កុំឲ្យត្រឡប់ពាក្យសម្ដីឲ្យបង់ស័ត្យឡើយ ហើយក៏បើកឲ្យ**ឡេងប៉ៅ**ទៅស្រុកឡុកសៀ។

**អ៊ុយអៀន**ជម្រាប**ឡៅពី** ដែលនឹងបើកខ្លួន**ឡេងប៉ៅ**ឲ្យត្រឡប់ទៅវិញវេលានេះ ខ្ញុំបាទយល់ឃើញថា បើវាទៅហើយមិនមែនវិលត្រឡប់មកវិញទេ។ **ឡៅពី**ថា ខ្លួនយើងមានចិត្តអាណិតជួយជីវិតគេ មិនត្រូវនឹងធ្វើគេឲ្យវិនាស បើគេមិនគិតដល់គុណក៏តាមបុណ្យចុះ នឹងឃាត់ឃាំងយោងទុកប្រយោជន៍អ្វី ឲ្យគេទៅចុះ។ **ឡេងប៉ៅ**គំនាប់លា**ឡៅពី**ហើយក៏តម្រង់ទៅស្រុកឡុកសៀ ហើយនិយាយប្រាប់**ឡៅកុយ**ថា បានធ្វើសង្គ្រាមតនឹង**ឡៅពី**ជាសន្ធឹកសន្ធាប់ណាស់ សម្លាប់ទាហានឯក**ឡៅពី**ស្លាប់អស់ដប់នាក់ សត្រូវមានកម្លាំងច្រើនលើសលុបទប់ទល់ពុំឈ្នះ បានជាដោះខ្លួនមកម្នាក់ឯង។ **ឡៅកុយ**សម្គាល់ថា ពិតក៏រឹតតែភ័យខ្លាំងណាស់ ទើបចាត់បម្រើឲ្យកាន់សំបុត្រទៅដល់**ឡៅជៀង** សុំកងទ័ពឲ្យលើកមកជួយ។

**ឡៅជៀង**ដឹងក្នុងសំបុត្រថា **តេងហៀន**ស្លាប់ បន្ទាយច្រកចង្អៀតក៏បែកបានទៅសត្រូវ **ឡៅជៀង**ទុក្ខព្រួយណាស់ ក៏ឲ្យហៅនាហ្មឺនភ្នាក់ងារចូលមកប្រឹក្សារាជការ។ **ឡៅឈុន**ជាកូនជម្រាបថា ខ្ញុំបាទនឹងសុំលើកទាហានទៅរក្សាស្រុកឡុកសៀកុំឲ្យអន្តរាយ។ **ឡៅជៀង**សួរថា ខ្លួននឹងលើកទ័ពទៅគ្រានេះក៏ស្រួលណាស់ហើយ តែថានឹងបាននរណាទៅកំដរជាទីប្រឹក្សាជាមួយផង? **ង៉អ៊ី**ប្អូនភរិយា**ឡៅជៀង**សុំទទួលអាសាទៅជាមួយ។ **ឡៅជៀង**មានអំណរណាស់ថា បើដូច្នោះចូរឲ្យអ្នកចាត់ទាហានរងពីរនាយចេញទៅជាមួយផង។ **ង៉អ៊ី**ក៏ចាត់**លុយគង, ង៉ឡាន់**ពីរនាក់ជាទាហានរង និងពួកកូនទាហានពីរម៉ឺនឲ្យទៅ**ឡៅឈុន**ស្រេចហើយ ក៏លើកទៅដល់ស្រុកឡុកសៀ។

**ឡៅកុយ, ទៀវយឹម** ដឹងថា**ឡៅឈុន**លើកទ័ពមក ក៏ចេញទៅទទួលឲ្យចូលទៅក្នុងស្រុក ហើយក៏ពណ៌នារ៉ាយរឿងដែល**តៀនហាង**បរាជ័យនឹង**ឡៅពី**នោះឲ្យស្តាប់គ្រប់ប្រការ។ **ង៉អ៊ី**ថា ឥឡូវសត្រូវលើកកន្លងចូលមកនឹងជិតដល់ជើងកំផែងហើយ **ឡៅពី**ក៏មានចិត្តកំរើបខ្លាំងណាស់ ដែលនឹងតស៊ូដោយថ្វីដៃនោះឃើញថាមិនបាន។ នរណានឹងគិតជាកលឧបាយប្រការម្តេច ទើបនឹងកម្ចាស់សឹក**ឡៅពី**បាន?

**ឡេងប៉ៅ**ថា ដែលនឹងគិតកម្ចាត់សត្រូវគ្រានេះ ខ្ញុំឃើញថាស្រុកឡុកសៀនោះ តាំងនៅក្នុងទីខ្ពស់ជើងភ្នំ ដែលសត្រូវតាំងនៅនោះច្រើនឯស្ទឹងក្បែរស្រុក ខ្សែទឹកក៏ហូរខ្លាំង ខ្ញុំគិតថានឹងលើកទាហានទៅជីកព្រែកទម្លុះទៅត្រង់កន្លែងសត្រូវ បង្ហូរទឹកឲ្យហូរបាក់ចុះទៅពន្លិចបន្ទាយសត្រូវ ឲ្យស្លាប់ទាហានទាំងនោះអស់ហើយ យើងក៏នឹងបានជ័យជម្នះដោយងាយ។ **ង៉អ៊ី**យល់ត្រូវផង ក៏ឲ្យ**ឡេងប៉ៅ**លើកទាហានទៅធ្វើការដូចថា ហើយក៏ឲ្យ**ង៉ឡាន់, លុយតង** លើកទាហានពីរកងទៅការពារមនុស្សដែលធ្វើការនោះឲ្យមាំមួន។

**ឡៅពី**ក៏ចាត់ឲ្យ**អ៊ុយអៀន, ហងតុង**នៅរក្សាបន្ទាយច្រកចង្អៀតដែលវាយបាននោះ ហើយក៏លើកទៅតាំងនៅគយប៉ោយស៊ីគួន ហើយពិចារណាគ្នានឹង**បាំងថង**ដែលនឹងគិតធ្វើការតទៅ ទទួលបម្រើសេះមកប្រាប់ថា ឥឡូវ**ស៊ុនគួន**ឲ្យមានសំបុត្រទៅដល់**ទៀវឡូ**ឲ្យលើកទាហានមកវាយបន្ទាយហែបាំងគួន។ **ឡៅពី**ឮដូច្នោះក៏មានសេចក្តីភ័យបារម្ភណាស់ ទើបប្រឹក្សានឹង**បាំងថង**ថា បើ**ទៀវឡូ**លើកមកវាយយកបន្ទាយហែបាំងគួនហើយ ក៏នឹងបិទផ្លូវយើងអស់នឹងទៅមុខក៏មិនរួច ថយក្រោយក៏មិនបាននឹងគិតប្រការម្តេច? **បាំងថង**និយាយនឹង**បេងតាត់**ថា ខ្លួនអ្នកពួកស្រុកសែឈួន ដឹងផ្លូវដែលនឹងរត់នឹងដេញស្ទាញស្ទាត់ណាស់ ព្រោះជាស្រុកកំណើតរបស់ អ្នក។ អ្នកចូរទៅនៅរក្សាបន្ទាយហែបាំងគួនទើបស្រួល។ **បេងតាត់**ក៏ទទួលពាក្យហើយថា ខ្ញុំបាទសុំយក**ហាក់ជុន**ទៅផង ព្រោះ**ហាក់ជុន**នេះមានថ្វីដៃ ពីដើមជាទាហាន**ឡៅពៀវ**។ **ឡៅពី**ក៏ព្រមអនុញ្ញាត ទើបចាត់**បេងតាត់**ឲ្យឃុំទាហានលើកទៅរក្សាបន្ទាយហែបាំងគួន។

**បាំងថង**ក៏លា**ឡៅពី**ថយទៅទីសំណាក់ មានទាហានម្នាក់ចូលទៅជម្រាប**បាំងថង**ថា មានមនុស្សម្នាក់មានការមករកលោក ឈរចាំនៅមាត់ទ្វារ **បាំងថង**ក៏ដើរចេញទៅ ទទួលឃើញអ្នកនោះរូបរាងធំខ្ពស់ប្រាំហត្ថ មុខនិងភ្នែកស្វាហាប់ណាស់ ក៏សួរថា អាចារ្យឈ្មោះអ្វី? មកពីណា? អ្នកនោះក៏មិននិយាយតប ដើរចូលទៅដេកលើគ្រែខាងក្នុង **បាំងថង**ក៏ចូលទៅសួរម្តងទៀត អ្នកនោះប្រាប់ថា ឲ្យបង្អង់

បន្តិចសិនចុះ ព្រោះខ្ញុំកំពុងហត់នឿយណាស់ បន្តិចទៀតសឹមប្រាប់កិច្ចការស្រុកទេសដែលធំឱ្យស្ដាប់។ **បាំងថង**មានសេចក្ដីសង្ស័យណាស់ ក៏ប្រើមនុស្សឱ្យទៅរៀបអាហារនាំចូលមក លុះមនុស្សបម្រើលើកអាហារចូលមក នៅមិនទាន់អញ្ជើញឱ្យបរិភោគ ក៏ស្រាប់តែអ្នកនោះក្រោកពីក្រែទៅអង្គុយស៊ីបាយខ្លួនឯង លុះស៊ីឆ្អែតហើយ ក៏ត្រឡប់វិលទៅដេកលើគ្រែដដែលនោះវិញ។ **បាំងថង**រឹតតែសង្ស័យណាស់ ក៏ប្រើមនុស្សទៅប្រាប់**ហ្គួតចេង**។

លុះ**ហ្គួតចេង**ដើរមកដល់ទ្វារ **បាំងថង**ក៏ចេញទៅទទួល ហើយពណ៌នាឱ្យស្ដាប់។ **ហ្គួតចេង**ថា បើបែបភាពយ៉ាងនេះ ប្រហែលជា**ផែអៀវ**ហើយ ៗក៏នាំគ្នាដើរចូលទៅខាងក្នុង។ **ផែអៀវ**ឃើញ**ហ្គួតចេង**មកដល់ក៏ត្រេកអរណាស់ ក្រោកឡើងទះដៃសើចហើយថា **ហ្គួតចេង**អ្នកឯងមកនៅៗនេះហើយឬ? សព្វថ្ងៃមានសេចក្ដីសុខទុក្ខប្រការម្ដេចខ្លះ? **ហ្គួតចេង**ឆ្លើយតបទៅតាមដំណើរ **បាំងថង**សួរថា អ្នកនេះឈ្មោះអ្វី? **ហ្គួតចេង**ប្រាប់ថា អ្នកនេះឈ្មោះ**ផែអៀវ** ពួកស្រុកកុងហាន ជាមនុស្សមានសតិបញ្ញាច្រើនណាស់ តាំងនៅក្នុងទីប្រឹក្សា**ឡៅជៀង** ប្រកបដោយសេចក្ដីទៀងត្រង់សុចរិត នឹងនិយាយការអ្វីក៏មិនបានទ្បេះទ្បោះដូចមនុស្សទាំងពួង។ **ឡៅជៀង**មិនត្រូវចិត្ត ព្រោះដ្បិតថាមិនគួរសម ក៏ខាងប្រកាន់កាត់កាលចេញ បណ្ដេញឱ្យបានសេចក្ដីខ្មាសមិនឱ្យនៅក្នុងស្រុក។ **បាំងថង**ក៏មានចិត្តត្រេកអរណាស់ ទើបសួរថា អ្នកមកនេះមានការអ្វី?

**ផែអៀវ**ឆ្លើយថា យើងមកគ្រានេះប្រាថ្នានឹងជួយជីវិតអ្នក តែថាយើងនឹងប្រាប់តែម្ដងពុំទាន់បាន ឱ្យ**ឡៅពី**មករកយើងសិនសឹមប្រាប់ឱ្យដឹង។ **ហ្គួតចេង**ក៏ឱ្យបម្រើទៅអញ្ជើញ**ឡៅពី**មក។ **ឡៅពី**ក៏សួរថា អ្នកនឹងប្រាប់សេចក្ដីអ្វី? ក៏ចូរអាណិតប្រាប់ឱ្យបានដឹងបន្តិចមកចុះ។ **ផែអៀវ**សួរថា ទាហានលោកដែលតាំងនៅបន្ទាយច្រកចង្អៀតនោះចំនួនប៉ុន្មាន? **ឡៅពី**ថា មានទាហានឯកនៅទីនោះ តែ**ហាងតុង** និង**អ៊ុយអៀន**ពីរនាយ ហើយនិងកូនទាហានប្រមាណមួយម៉ឺនប៉ុណ្ណោះទេ។

**ផៃអៀវ**ថា លោកក៏ធ្លាប់ធ្វើសង្គ្រាមមក ប្រាកដជាមានសតិបញ្ញា ហេតុម្ដេចខ្លួនលោកជាមេទ័ពក៏មិនដឹងផែនទីជាមុនសិន មើលទៅលោកធ្វើការនេះនៅស្រាលណាស់ លោកសម្គាល់ថា តាំងនៅទីនោះស្រួលល្អហើយឬ? ទីនោះមានស្ទឹងមួយកុងនៅជិតណាស់ ទីតាំងបន្ទាយនោះជាកន្លែងទំនាប បើសត្រូវនឹងទម្លាយទឹកឲ្យហូរធ្លាក់បាក់មកលិចបន្ទាយ ហើយនិងលើកទាហានមកព័ទ្ធពីក្រោយថែមទៀត ទាហានលោកនឹងមិននាំគ្នាស្លាប់ទាំងអស់ហើយឬ?

**ឡៅពី**ឮ**ផៃអៀវ**និយាយដូច្នោះ ក៏ភ័យស្លុតចិត្តគិតទៅឃើញមែន **ផៃអៀវ**ថា ឥឡូវខ្ញុំឃើញផ្កាយសម្រាប់អ្នកបុណ្យរះឡើងខាងទិសបស្ចិម មានរស្មីភ្លឺថ្លាណាស់ តែថាមានផ្កាយមួយដួង រស្មីសនៅខាង ឃើញកាចនឹងមានអន្តរាយដល់លោកជាប្រាកដ ចូរលោកប្រុងប្រយ័ត្នឲ្យមាំមួន។ **ឡៅពី**ក៏គំនាប់**ផៃអៀវ**បីដូចទីប្រឹក្សាធំ ហើយក៏ឲ្យមនុស្សស្រូតទៅប្រាប់**ហងតុង** និង**អ៊ុយអៀន**ឲ្យបង្គំទាហានមានដាក់យាមគយល្បាតរក្សាបន្ទាយ កុំឲ្យសត្រូវជីកព្រែកទម្លាយទឹកឲ្យលិចបន្ទាយនោះបាន។ **ហងតុង** និង**អ៊ុយអៀន**បានដឹងសេចក្ដីហ្នឹងហើយ ក៏ជួយគ្នាចេញត្រួតត្រាគយល្បាតលាតក្រវែលប្រយ័ត្នរក្សាបន្ទាយនោះមាំមួនណាស់។

លុះដល់ពេលកណ្ដាលអាធ្រាត្រក្នុងថ្ងៃនោះ មានភ្លៀងរំលាធំ **ឡេងប៉ៅ**លើកពលប្រាំពាន់ស្រូតទៅដល់ទីនោះនឹងតាំងជីកបង្ហូរទឹក កំពុងតែវាយគ្នាជាលំដាប់ចាប់ធ្វើការនោះ ទទួល**អ៊ុយអៀន**ឃុំទាហានចេញទៅគយល្បាត ឃើញក៏ស្រែកហ៊ោឡើង។ **ឡេងប៉ៅ**ឮសំឡេងដូច្នោះក៏ភ័យណាស់ ពួកទាហានទាំងនោះក៏បែកបាក់ព្រាត់ព្រាយរត់ទម្លាយទ័ពជាន់គ្នាស្លាប់ជាច្រើន។ **ឡេងប៉ៅ**ក៏បំបោលសេះរត់ទៅជួបនឹង**អ៊ុយអៀន** ៗស្ទាក់ជាប់ ក៏ត្រឡប់ចូលតយុទ្ធគ្នាបានប្រាំភ្លែង **អ៊ុយអៀន**ក៏ចាប់ខ្លួន**ឡេងប៉ៅ**បាន។ **ង៉ឡាន់, លុយតង**ឃុំទាហានជាកងក្រោយ បានឮសំឡេងស្រែកហ៊ោឡើងក៏បរសេះដេញទាហានស្រូតទៅជួយ**ឡេងប៉ៅ** ជួបប្រទះនឹង**ហងតុង**ស្ទាក់ពីមុខក៏ចូលប្រយុទ្ធគ្នានឹង**ហងតុង**បានពីរភ្លែង តទល់ពុំបានក៏ថយទៅ។ **អ៊ុយអៀន**ក៏ចងយក**ឡេងប៉ៅ**ទៅជូន**ឡៅពី**ឯបន្ទាយប៉ោយស៊ីគួន។ **ឡៅពី**ឃើញ**ឡេងប៉ៅ**ក៏ជេរថា អា

ចោរទុរយសគ្មានសេចក្ដីស័ត្យនោះ ហើយបង្គាប់ទាហានឲ្យនាំខ្លួន**ឡេងប៉ៅ**ទៅប្រហារជីវិត រួចក៏ឲ្យបំណាច់រង្វាន់ដល់**អ៊ុយអៀន**ជាច្រើន។

ខណៈនោះ **ម៉ាលៀង**ក៏ចូលមកជួបនឹង**ឡៅពី** គំនាប់ហើយនិយាយថា ស្រុកកេងជីវនោះនៅជាសុខតាមធម្មតាមិនមានអន្តរាយអ្វីទេ ឥឡូវ**ខុងបេង**ប្រើខ្ញុំបាទឲ្យនាំសំបុត្រមកជូនលោក ហើយក៏ហុចសំបុត្រនោះទៅឲ្យ**ឡៅពី** ៗក៏ហែកស្រោមមើលឃើញសេចក្ដីថា ក្នុងឆ្នាំកុរនេះ ខ្ញុំពិនិត្យឃើញផ្កាយមួយដួងប្រាកដត្រង់ស្រុកឡុកសៀ នៅខាងបស្ចិមទិសនោះកាចណាស់ មុខជានឹងខូចមេទ័ពឬនាយកងដែលលើកមកគ្រានេះជាប្រាកដ សូមឲ្យលោកប្រុងប្រយ័ត្នការ រក្សាពួកក្រុមឲ្យមាំមួនកុំប្រមាទ។ **ឡៅពី**ដឹងក្នុងសំបុត្រដូច្នោះហើយក៏និយាយនឹង**ម៉ាលៀង**ថា ដែល**ខុងបេង**ឲ្យសំបុត្រមកដូច្នេះក៏ដឹងហើយ យើងក៏បានប្រុងប្រយ័ត្នការមិនប៉ានប្រមាទទេ ឲ្យអ្នកស្រួតត្រឡប់ទៅប្រាប់**ខុងបេង**ចុះ។ **ម៉ាលៀង**គំនាប់លា**ឡៅពី**ត្រឡប់ទៅស្រុកកេងជីវវិញ។

**ឡៅពី**ក៏ប្រឹក្សានឹង**បាំងថង**ថា **ខុងបេង**មានសំបុត្រដល់ខ្ញុំថា អន្តរាយនឹងមានដល់នាយទ័ពកងនេះ លុះយើងនឹងរឹងនៅធ្វើការតទៅទៀតក្រែងអន្តរាយនឹងមានពិត **ខុងបេង**ក៏នឹងបន្ទោសយើងបាន ហេតុនេះគួរយើងលើកទ័ពត្រឡប់ទៅស្រុកកេងជីវសិន នឹងបានប្រឹក្សាពិគ្រោះនឹង**ខុងបេង**ជាអ្នកធំ។ **បាំងថង**មកនឹកតែក្នុងចិត្តថា **ខុងបេង**ឲ្យសំបុត្រមកទាំងនេះដោយចិត្តឫស្យា ព្រោះឃើញថា យើងមកធ្វើការមុខជាយកស្រុកសៃឈួនបាន នឹងមានសេចក្ដីគាប់ប្រសើរជាច្រើន បានជាគេក្លែងធ្វើសំបុត្រមកនាំឲ្យតែរារែកមិនឲ្យធ្វើការបាន ទើបនិយាយនឹង**ឡៅពី**ថា សព្វថ្ងៃនេះខ្ញុំបាទក៏ដឹងហើយ ការដែលមើលលើអាកាស ឃើញផ្កាយមួយកាចមែន តែថាហេតុនោះធ្លាក់ទៅលើ**ឡេងប៉ៅ**ផ្សេងទេ ដែលផ្កាយដួងនោះប្រាកដសព្វថ្ងៃ នឹងបានដល់ខ្លួនលោកនឹងបានធ្វើធំក្នុងស្រុកសៃឈួនទៅ ហេតុអ្វីលោកមកសង្ស័យថានឹងមានអន្តរាយ ហើយគិតនឹងលើកទ័ពត្រឡប់ទៅស្រុកវិញដូច្នោះ? ខ្ញុំបាទមិនយល់ព្រមផងទេ សូមឲ្យលោកបង្ខំលើកទាហាន ស្រួតទៅធ្វើការវាយយកស្រុកសៃឈួន

ចុះ។ **ឡៅពីឮបាំងថង**ថាដូច្នោះក៏ជឿ ទើបឲ្យលើកទាហានត្រឡប់ចូលទៅជិតបន្ទាយច្រកចង្អៀត ដែល**ហាងតុង, អ៊ុយអៀន**រក្សានៅនោះ។

**បាំងថង**ក៏សួរ**ហួតចេង**ថា ផ្លូវដែលយើងនឹងចូលទៅស្រុកឡុកសៀនោះ ជាផ្លូវតែមួយឬមានផ្លូវបែក? **ហួតចេង**ឲ្យយកផែនទីដែល**ទៀវសុង**ធ្វើឲ្យនោះមកលាមើល។ **បាំងថង**ក៏ពិគ្រោះមើលផែនទី ឃើញមានផ្លូវបែកជាពីរអន្លើ ផ្លូវតូចដែលនឹងកាត់តម្រង់ទៅតាមច្រកភ្នំជាផ្លូវរហ័ស ផ្លូវធំកោងវាង ទើបនិយាយនឹង**ឡៅពី**ថា ដែលនឹងលើកចូលទៅស្រុកឡុកសៀនេះ ខ្ញុំបាទនឹងសុំនាំទាហានទៅតាមផ្លូវតូច សុំឲ្យលោកលើកទៅតាមផ្លូវធំចុះ។ **ឡៅពី**ថា ឯផ្លូវតូចនោះជាច្រកចង្អៀតពិបាកណាស់ ខ្លាចសត្រូវនឹងលើកទាហានមកចាំស្កាត់បង្កប់នៅទីនោះ ខ្លួនអ្នកមិនចំណានខាងបាញ់ធ្នូផង ឃើញថាជាការលំបាកណាស់ ក្រែងថ្លោះការនឹងសត្រូវទេដឹង? គួរតែអ្នកលើកទាហានទៅតាមផ្លូវធំ ចូលខាងទ្វារខាងកើត ខ្លួនខ្ញុំចំណានខាងបាញ់ធ្នូនឹងលើកទៅតាមផ្លូវតូចវិញ ទោះបីជួបនឹងសត្រូវក៏ត្រូវតស៊ូគ្នាឲ្យទាល់តែបានជ័យជម្នះ។

**បាំងថង**ថា ឯផ្លូវធំនោះ ខ្ញុំបាទឃើញថា សត្រូវនឹងលើកទាហានមកចាំជាច្រើន បើខ្ញុំបាទនឹងលើកទៅ ត្រូវតទល់ដោយកម្លាំងមិនបាន បានជាសុំទៅខាងផ្លូវតូចវិញដោយឃើញថាសត្រូវស្ដើងស្ដួចទេ ល្មមកម្លាំងខ្ញុំបាទនឹងតស៊ូបាន ឯផ្លូវធំនោះ អ្នកដទៃនឹងលើកទៅមុខជាថ្លោះការហើយ គួរលោកលើកទៅខ្លួនលោកទើបស្រួល។ **ឡៅពី**ថា អ្នកចូរទៅតាមផ្លូវធំតាមខ្ញុំថាចុះ កុំទៅតាមផ្លូវតូចនោះឡើយ ព្រោះពីយប់មិញខ្ញុំយល់សប្តិអាក្រក់ណាស់ ចេះតែប្លែកក្នុងចិត្តថា មានទេវតាមួយអង្គយកឈើដំបងដែកមកវាយត្រូវជើងឆ្វេងខ្ញុំ ឈឺពើតចាប់ខ្លាំងទាល់តែភ្ញាក់ឡើងក៏មិនទាន់បាត់ឈឺ។ ខ្ញុំពិភាល់ក្នុងចិត្តណាស់ បានជាចង់ឲ្យអ្នកទៅតាមផ្លូវធំវិញ។ **បាំងថង**ថា កើតមកជាទាហានធ្វើការសង្គ្រាម បើមិនស្លាប់ក៏គង់ត្រូវមានរបួសជាប្រវេណី ហេតុម្ដេចលោកមកវិតក្កក្ដៅក្រហាយដោយសេចក្ដីយល់សប្តិដូច្នេះ មិនត្រូវទេ។

**ឡៅពី**ថា អ្នកនិយាយនោះត្រូវហើយ តែឥឡូវខ្ញុំមានសេចក្ដីវិតក្កព្រោះ**ខុងបេង**ឲ្យសំបុត្រមក ខ្លាចក្រែងមានថ្លោះការ បានជាមិនទុកចិត្ត ដូច្នេះគិតនឹងឲ្យអ្នកនៅរក្សាបន្ទាយប៉ោយស៊ីគួនវិញទៅចុះ ខ្លួនខ្ញុំនឹងលើកទាហានទៅធ្វើការតែម្នាក់ឯងក៏បាន អ្នកកុំបាច់ទៅឲ្យកង្វល់ឡើយ។ **បាំងថង**សើច ហើយថា ដែល**ខុងបេង**ឲ្យសំបុត្រមកនោះដោយឫស្យាទេ ពីព្រោះឃើញថា ខ្ញុំបាទមកធ្វើការជាមួយនឹងលោក បើបានស្រុកសែឈួនហើយ ក៏មានសេចក្ដីគាប់ប្រសើរជាង បានជាមកថាដូច្នេះ ប្រាថ្នានឹងឲ្យលោកសង្ស័យចិត្ត មិនឲ្យធ្វើការរហូត។ ខ្ញុំបាទក៏មិនប្រាថ្នានឹងរកសេចក្ដីគាប់ប្រសើរនោះប៉ុន្មានទេ ដែលលោកនិម្មិតនោះជាការល្អទេតើ កុំសង្ស័យចិត្តធ្វើអ្វី ខ្ញុំបាទមកធ្វើការជាមួយនឹងលោកនោះ គឺតាំងចិត្តនឹងយកអាសាឲ្យដល់ខ្នាត ប្រាថ្នានឹងយកលោហិតលាបផែនដីទុកជាប្រាកដទៅខាងមុខ ទោះបីនឹងអន្តរាយដល់ជីវិតក៏មិនបានគិត វេលាព្រឹកនេះសូមឲ្យលោករៀបលើកទាហានទៅចុះ។

**ឡៅពី**ស្ដាប់ហើយក៏យល់តាម ទើបចាត់ឲ្យ**អ៊ុយអៀន**ជានាយកងមុខ ខាង**បាំងថង**ឲ្យ**ហងតុង**ជានាយកងមុខ ខាងទ័ពហ្លួង លុះទាហានទាំងពួងជុំព្រមគ្នាហើយ **ឡៅពី**និង**បាំងថង**ក៏ឡើងសេះទឹមគ្នា លើកចេញចាកបន្ទាយពីពេលព្រឹកព្រហាមស្រាង សេះជំនិះ**បាំងថង**នោះបណ្ដាលឲ្យដើរភ្លាត់ជើងដួលទៅ **បាំងថង**ក៏ធ្លាក់ពីលើខ្នងសេះទៅដី។ **ឡៅពី**ឃើញដូច្នោះ ក៏លោតចុះពីលើខ្នងសេះ ទៅគ្រាហ៍**បាំងថង**លើកឡើងហើយថា សេះខ្ញុំធ្លាប់ធ្វើការចម្បាំងយូរមកហើយ មិនដែលដូច្នេះឡើយ ដែលសេះវាបណ្ដាលដូច្នេះមកអំពីការប្រមាទ។ **ឡៅពី**ថា បើសេះអ្នកមិនស្រួលដូច្នេះហើយ នឹងចូលតតាំងច្បាំងនឹងសត្រូវធ្វើម្ដេចបាន នឹងមិនថ្លោះការទេឬ? អ្នកចូរផ្លាស់យកសេះខ្ញុំជិះទៅ ខ្ញុំនឹងយកសេះរបស់អ្នកមកជិះវិញ។ **បាំងថង**គំនាប់**ឡៅពី**ហើយថា គ្រានេះឃើញថាលោកមានគុណនឹងខ្ញុំបាទ នឹងរកទីបំផុតមិនមានឡើយ។ **បាំងថង**ក៏ស្រូតលើកទាហានទៅមុន**ឡៅពី** ៗក៏លើកទ័ពតាមទៅ ចេះតែមានសេចក្ដីវិតក្កដល់**បាំងថង**គ្មានសប្បាយក្នុងចិត្តសោះ។

ឯ**ង៉ំអុី** និង**ឡៅកុយ** ដែលនៅរក្សាស្រុកឡុកសៀនោះ ដឹងថា**ឡេងប៉ៅ**ទទួលអនិច្ចកម្មក៏ប្រឹក្សាគ្នា **ទៀវយឹម**ក៏ចូលទៅនិយាយថា ឥឡូវ**ឡៅពី**លើកទាហានមកធ្វើអន្តរាយយើងហើយ។ ខ្ញុំឃើញថា ផ្លូវកាត់ច្រកភ្នំដែលនឹងមកត្រង់ស្រុកឡុកសៀនោះជាផ្លូវតូចចង្អៀតណាស់ ខ្ញុំសូមអាសាលើកទាហានទៅស្កាត់បង្កប់នៅក្បែរផ្លូវនោះ បើ**ឡៅពី**លើកមកក៏នឹងចេញតទល់ទុក កុំឲ្យមកបាន សុំឲ្យអ្នកទាំងពីរនៅរក្សាស្រុកចុះ។ ចរចាគ្នាមិនទាន់ផុតមាត់មានបម្រើចូលមកប្រាប់ថា ឥឡូវ**ឡៅពី**លើកទ័ពមកជាពីរផ្លូវ។ **ទៀវយឹម**ឮដូច្នោះក៏ស្រូតលើកទាហានទៅចាំស្កាត់នៅទីនោះ លុះឃើញ**អ៊ុយអៀន**ជានាយកងមុខលើកមក ក៏បង្គាប់ទាហានទាំងអស់ឲ្យសំងំនៅស្ងៀម ហើយចង្អុលប្រាប់ថា ដែលលើកទ័ពមកខាងក្រោយជិះសេះសនោះគឺ**ឡៅពី**យើងប្រុងចាំចាប់ខ្លួនឲ្យបាន។ លុះ**បាំងថង**មកដល់ផ្លូវច្រកភ្នំ ឃើញផ្លូវនោះតូចចង្អៀតណាស់ ហើយមានព្រៃឈើស្បាតញឹកទាំងសងខាងផ្លូវ ក៏គិតតក់ស្លុតក្នុងចិត្ត ទាញសេះឲ្យឈប់ហើយសួរថា តំបន់នេះឈ្មោះអ្វី? ទាហានស្រុកសែឈ្វនដែលជាឈ្លើយឆ្លើយប្រាប់ថា ទីនេះឈ្មោះឡុកហងហោ។

**បាំងថង**ឮដូច្នោះក៏គិតថា ខ្លួនយើងនេះ លោកអាចារ្យតាំងនាមទុកឲ្យឈ្មោះថា **ហងស៊ូ** ឯផ្លូវដែលនឹងចេញពីច្រកភ្នំនេះជាផ្ទៃវាល ធម្មតាហង្សបើនឹងធ្លាក់វាលហើយក៏មិនអាចហើរទៅបាន ខ្លួនយើងឈ្មោះ**ហង្ស**នឹងធ្លាក់ចុះត្រង់ផ្ទៃវាលនេះក៏នឹងមានអន្តរាយ។

គិតតក់ស្លុតរន្ធត់ចិត្តដូច្នេះហើយ ក៏ឲ្យទាហានថយវិលចេញមកវិញ ទទួលទាហាន**ទៀវយឹម**អុជផាវឡើង ហើយស្រែកហ៊ោបាញ់ធ្នូចម្រុះត្រង់មកទាំងសងខាងផ្លូវ ត្រូវ**បាំងថង**ធ្លាក់ពីលើសេះស្លាប់ ទាហានទាំងពួងក៏បែកបាក់ព្រាត់ព្រាយទៅអស់។ ខណៈកាល**បាំងថង**អនិច្ចកម្មនោះ អាយុបាន៣៦ឆ្នាំ ទាហានទាំងពួងដែលបែកតាមទៅដល់**អ៊ុយអៀន**ហើយ ក៏ស្រែកប្រាប់ថា ឥឡូវសត្រូវលើកមកស្កាក់ស្កាត់ច្រើនណាស់ បាញ់ត្រូវ**បាំងថង**អាចារ្យយើងស្លាប់ទៅហើយ។ **អ៊ុយអៀន**ឮដូច្នោះក៏ភ័យខ្លាំងណាស់ នឹងលើកទាហានត្រឡប់ចុះមកវិញ ទទួលទាហាន

**ទៀវឃឹម**លើកមកស្កាត់ពីមុខពីក្រោយ ក៏តាំងច្បាំងគ្នាជាចលាចល នឹងចេញក៏ពុំរួច លុះនឹងថយក្រោយ **ទៀវឃឹម**ក៏ស្ទាក់ជាប់ កាល**អ៊ុយអៀន**តច្បាំងនៅក្នុងចំណោម ដូច្នោះ ទាហានក៏ស្លាប់វិនាសជាច្រើនណាស់។ **អ៊ុយអៀន**ទាល់ច្រកមិនដឹងគិតយ៉ាងណា។

ពួកទាហានស្រុកសែឈួនដែលទៅជាមួយក៏និយាយថា លោកនឹងតទល់នៅទីនេះមិនបានទេ ព្រោះសត្រូវចូលខ្ទប់ជិតមកទាំងសងខាងច្រើនណាស់ សូមឲ្យវាយទម្លាយត្រង់មាត់ផ្លូវទៅខាងស្តាំដៃ គេចត្រង់ទៅផ្លូវធំ ចូលទៅជួបគ្នានឹងកងទ័ព**ឡៅពី**ចុះ។ **អ៊ុយអៀន**យល់ឃើញត្រូវ ក៏បង្ខំវាយទម្លាយត្រង់មាត់ផ្លូវចេញរួចទៅបានប្រហែលសាមសិបសិន (១២០០ម) ប្រទះនឹង**លុយតង, ង៉ឡាន់** ឃុំទាហានលើកស្ទាក់ពីមុខ **ទៀវឃឹម**ក៏បង្ខំដេញទាហានឲ្យទន្ទ្រានតាមទៅពីក្រោយ។ **អ៊ុយអៀន**ត្រូវនៅក្នុងចំណោមទៀត នឹងទៅមុខក៏មិនរួច ទៅក្រោយក៏មិនរួច ទើបបរសេះចូលតស៊ូទៅមុខ គេចគ្រលុកមកក្រោយវិលក្នុងទីនោះ ទទួល**ហាងតុង**លើកជាកងមុខ**ឡៅពី**មកតាមផ្លូវធំ មកដល់ទន្ទឹមនឹងផ្លូវកាត់ដែល**ង៉ឡាន់, លុយតង**លើកទៅនោះ ក្រឡេកឃើញទាហានខាងក្រោយ**ង៉ឡាន់**ស្រែកហ៊ោគឹកកង ក៏គិតថាប្រហែល**អ៊ុយអៀន**លើកមកដល់ទីនេះ សត្រូវស្ទាក់ផ្លូវទេដឹង **ហាងតុង**ក៏បំបោលសេះវាយសង្កុញពីក្រោយចូលទៅហើយស្រែកថា **អ៊ុយអៀន**កុំខ្លាច យើងមកជួយហើយ។ **អ៊ុយអៀន** និង**ហាងតុង**ក៏ព្រួតគ្នាវាយប្រសព្វពីមុខពីក្រោយ **ង៉ឡាន់, លុយតង**តទល់ពុំឈ្នះក៏ប្រាសរត់ផ្លាយទៅ ទាហានក៏ស្លាប់នៅគរលើគ្នាច្រើនណាស់។

**ហាងតុង**និង**អ៊ុយអៀន**បានចំណាប់ ក៏ដេញទាហានចូលប្រកាប់ប្រចាក់ទៅដល់ជើងកំពែងប្រសព្វគ្នានឹងកងទ័ព**ឡៅពី**។ **ឡៅកុយ**ដែលនៅរក្សាស្រុកនោះក៏ឲ្យទាហានបាញ់ធ្នូចម្រុះទប់ក្នុង **ឡៅពី**នឹងវាយទម្លាយចូលទៅក៏ពុំបាន ទើបលើកទាហានត្រឡប់ក្រោយចូលទៅក្នុងបន្ទាយច្រកចង្អៀត។ **ង៉ឡាន់** និង**ឡៅកុង**ឃើញដូច្នោះក៏បរពលចូលប្រយុទ្ធគ្នា ទទួល**ទៀវឃឹម**លើកត្រឡប់ក្រោយតាមច្រកភ្នំទៅ

ទាន់**ឡៅពី** ក៏ចូលប្រសព្វគ្នានឹងទាហាន**ង៉ឡាន់**, **ឡៅកុយ**ជួយព្រួតគ្នាដេញសង្កុញចូលទៅ។ **ឡៅពី**ទាល់ខ្លួននឹងចូលបន្ទាយច្រកចង្អៀតនោះពុំបាន ក៏រត់ត្រឡប់ទៅតាមផ្លូវគយប៉ោយស៊ីគួន។

ខណៈនោះសេះ**ឡៅពី**និងបណ្ដាពួកពលទាហានក៏ថយកម្លាំងទន់ចុះ នឹងចូលតស៊ូនឹងទាហាន**ទៀវយឺម**, **ង៉ឡាន់**, **ឡៅកុយ**មិនបាន ក៏ថយវារែកបណ្ដោយទៅដល់បន្ទាយប៉ោយស៊ីគួន។ **គួនប៉េង**និង**ឡៅថង**ដែល**ឡៅពី**ឲ្យនៅរក្សាស្រុកនោះដឹង ក៏លើកទាហានបីម៉ឺនចេញមកជួយចូលវាយទ័ព**ង៉ឡាន់**, **ឡៅកុយ**, **ទៀវយឺម**បែក ហើយដេញជាប់តាមទៅបានកាប់សម្លាប់ពួកសត្រូវស្លាប់ជាច្រើន រើសយកបានគ្រឿងសាស្ត្រាវុធច្រើនណាស់ ហើយក៏អញ្ជើញ**ឡៅពី**ចូលទៅក្នុងបន្ទាយប៉ោយស៊ីគួន។ **ឡៅពី**ក៏សួរដំណឹងអ្នកទាំងពួងថា **បាំងថង**នោះនៅឯណា ជាប្រការដូចម្ដេចខ្លះ? ទាហានក្នុងកងទ័ព**បាំងថង**ដែលបែកមកនោះឆ្លើយថា ឥឡូវ**បាំងថង**ត្រូវព្រួញដល់នូវសេចក្ដីស្លាប់ហើយ។ **ឡៅពី**ឮដូច្នោះក៏យំសោកាល័យទាល់តែដួលសន្លប់ទៅ។ ទាហានទាំងពួងក៏នាំគ្នាទួញយំអាល័យ**បាំងថង**គ្រប់ៗគ្នា ហើយ**ឡៅពី**ក៏ឲ្យរៀបចំគ្រឿងសែន បញ្ជូនទៅឲ្យ**បាំងថង**តាមប្រពៃណី។

**ហងតុង**ថា អាចារ្យរបស់យើងទទួលអនិច្ចកម្មហើយ **ទៀវយឺម**ក៏នឹងមានចិត្តកម្រើកលើកមកវាយយើងជាប្រាកដ នឹងរកអ្នកឯណាជាធំនឹងជួយគិតការតទៅបាន សុំឲ្យលោកទៅអញ្ជើញ**ខុងបេង**មកនឹងបានជួយរិះគិតធ្វើសង្គ្រាមនឹងយកស្រុកសែឈួននេះ និយាយមិនទាន់ផុតមាត់ មានបម្រើសេះចូលមកប្រាប់ថា ឥឡូវ**ទៀវយឺម**លើកទាហានមកដល់ជើងកំពែងហើយ **ហងតុង**និង**អ៊ុយអៀន**ក៏និយាយនឹង**ឡៅពី**ថា ខ្ញុំបាទនឹងសូមអាសាលើកទាហានចេញទៅតស៊ូនឹង**ទៀវយឺម**។ **ឡៅពី**ក៏ឃាត់ថា ដែលអ្នកទាំងពីរនឹងលើកទាហានចេញទៅតស៊ូនឹង**ទៀវយឺម**នោះ មិនទាន់ស្រួលទេ ព្រោះគ្រានេះសត្រូវមានកម្លាំងច្រើនណាស់ យើងត្រូវតែការពារបន្ទាយទុកសិន ចាំប្រើបម្រើឲ្យទៅអញ្ជើញ**ខុងបេង**មកជួយរិះគិតធ្វើការសិន។

**ឡៅពី** ក៏តែងសំបុត្រឲ្យ**គួនប៉េង**ស្រូតរូតនាំសំបុត្រទៅអញ្ជើញ**ខុងបេង**ឯស្រុកកេងជីវ។ **គួនប៉េង**គំនាប់លា**ឡៅពី**ស្រូតទៅទាំងយប់ទាំងថ្ងៃ ឯ**ឡៅពី**ក៏ចាត់ចែងរក្សាគយ និងបន្ទាយប៉ោយស៊ីគួនជាមាំមួនណាស់ មិនបានលើកចេញទៅច្បាំងនឹង**ទៀវយឺម**។

កាលថ្ងៃដែល**បាំងថង**ស្លាប់នោះ ជាខែស្រាពណ៍៩កើត ត្រូវជាទេសកាលប្រជាជនតែងតុលៀងអាហារជាសប្បាយតាមប្រពៃណី **ខុងបេង**អង្គុយបរិភោគអាហារជាមួយនឹងនាហ្មឺនមុខមន្ត្រីនៅទីកណ្ដាលវាល ពេលយប់ស្រាប់តែឃើញផ្កាយមួយដួងធំប្រមាណបួនផ្លាប់ ធ្លាក់ចុះពីលើអាកាសវេហាស៍ជាខាងទិសបស្ចិម។ **ខុងបេង**ក៏ភ័យផ្អាក់ផ្អើលដកដង្ហើមធំ ហើយភ្លាត់មាត់ស្រែកថាស្ដាយណាស់ ដៃនោះក៏បោះចោលពែងស្រាឲ្យធ្លាក់ចុះទៅហើយយកដៃខ្ទប់ភ្នែក ស្រែកយំអណ្ដឺតអណ្ដក ទាហានទាំងពួងក៏សួរថា លោកយំដោយហេតុអ្វី? **ខុងបេង**ថា ពីដើមយើងឃើញផ្កាយមួយដួងកាចណាស់ ប្រាកដត្រង់ទិសបស្ចិមចំស្រុកឡុកសៀនោះក៏ចូលចិត្តថាដែលនាយថៅហ្វាយយើងលើកកងទ័ពនៅពេលនេះ នឹងខូចនាយទ័ពឬនាយកងឬទីប្រឹក្សាឯណានីមួយជាប្រាកដ យើងក៏បានមានសំបុត្រឲ្យដំណឹងទៅដល់**ឡៅពី** ឲ្យប្រុងប្រយ័ត្នរក្សាខ្លួននិងពួកក្រុមកុំធ្វេសប្រមាទ គួរឬមិនបានគិតប្រុងប្រយ័ត្នការភ័យអន្តរាយនោះ បណ្ដាលឲ្យមានហេតុដល់យ៉ាងនេះសោះ។ ឥឡូវនេះ យើងឃើញផ្កាយមួយដួងធំធ្លាក់ចុះមក ប្រហែល**បាំងថង**ទទួលអនិច្ចកម្មទៅហើយដឹង? **ឡៅពី**ថៅហ្វាយយើងដាច់ដើងម្ខាងទៅហើយ។ ទាហានទាំងពួងឮ**ខុងបេង**ថាដូច្នោះ ក៏ឆ្ងល់ក្នុងចិត្តគិតមិនទាន់ជឿជាប្រាកដ **ខុងបេង**ឃើញអ្នករាល់គ្នាមានសេចក្ដីសង្ស័យដូច្នោះ ក៏និយាយថា អ្នកទាំងពួងចូរស្ដាប់មើលចុះ ពីរបីថ្ងៃទៀត ក៏គង់ដឹងដំណឹងហើយ។ នាហ្មឺនទាំងអស់នោះក៏គំនាប់លា**ខុងបេង**ចេញទៅ។

លុះកន្លងមកប្រាំប្រាំមួយថ្ងៃ **ខុងបេង**និង**គួនអ៊ូ**អង្គុយនិយាយគ្នា ទទួល**គួនប៉េង**ចូលទៅគំនាប់ ហើយហុចសំបុត្រទៅឲ្យ**ខុងបេង** ឃើញសេចក្ដីថា **បាំងថង**ទទួលអនិច្ចកម្មហើយ។ **ខុងបេង**ក៏ទួញយំអាណិត**បាំងថង**ពន់ប្រមាណណាស់

ទាហានទាំងពួងក៏សោកយំទាំងអស់គ្នា។ **ខុងបេង**ថា ឥឡូវ**ឡៅពី**នាយចៅហ្វាយយើងតាំងនៅតំបន់ប៉ោយស៊ីគួន ឯសត្រូវក៏លើកទៅព័ទ្ធជុំវិញជាខ្លាំងណាស់ លុះនឹងវាយទម្លាយទៅខាងណាក៏មិនបាន នឹងថយក្រោយចេញមកក៏មិនស្រួល ជាទីចង្អៀតចង្អល់ទាល់ខ្លួនណាស់ បើយើងនឹងមិនលើកទ័ពទៅជួយទេ វេលានេះមុខជានាយរបស់យើងនឹងថ្លោះការដោយសត្រូវពួកនោះពុំខាន។

**គួនអ៊ូ**ថា ដែលលោកនឹងលើកទ័ពទៅនោះក៏ស្រួលហើយ តែថាស្រុកកេងជីវនេះជាទីសំខាន់ណាស់ ហើយមិនមាននរណាជាធំនៅគ្រប់គ្រងរក្សាទេ តើលោកនឹងយល់ឃើញដូចម្តេច? **ខុងបេង**ថា ដែល**ឡៅពី**ឲ្យមានសំបុត្រមកនឹងឲ្យយើងទៅជួយនោះ យើងក៏ដឹងថា **ឡៅពី**ឃើញតែអ្នកមួយនឹងនៅរក្សាស្រុកនេះបាន តែខ្លួនអ្នកបានស្បថស្បែនឹង**ឡៅពី**ជាបងប្អូនដោយសុចរិត ក៏កុំបីគិតរង្កៀសសង្ស័យអ្វីឡើយ ឯស្រុកកេងជីវដែលអ្នកនៅរក្សាតែម្នាក់ឯងនេះ មុខជានឹងវាមុខវាក្រោយឲ្យលំបាក តែអ្នកត្រូវយកសេចក្តីស្វាមីភក្តិដល់**ឡៅពី**ជាប្រធាន កុំបីមានចិត្តគិតតែប្រងើយកន្តើយឡើង។ **គួនអ៊ូ**ឮ**ខុងបេង**និយាយដូច្នោះហើយ ក៏គំនាប់ទទួលប្រសាសន៍ លុះវេលាព្រឹកឡើង **ខុងបេង**ក៏ឲ្យរៀបតុលៀងអាហារ ហើយក៏យកត្រាសម្រាប់ទីចៅហ្វាយខេត្តនោះមកប៉ងប្រគល់ឲ្យ**គួនអ៊ូ**តាមប្រពៃណី។ **គួនអ៊ូ**លើកដៃឡើងគំនាប់រៀបនឹងលូកចាប់យកត្រានោះ **ខុងបេង**ក៏មិនទាន់ប្រគល់ឲ្យ ហើយថា បើអ្នកទទួលយកត្រានេះហើយ កិច្ចការអ្វីៗក្នុងស្រុកកេងជីវ ក៏ត្រូវធ្លាក់មកជាធុរៈលើអ្នកទាំងអស់។

**គួនអ៊ូ**ថា ខ្លួនខ្ញុំបាទជាប្រុសជាតិទាហាន ទោះបីសេចក្តីស្លាប់នឹងត្រឡប់មកដល់ខ្លួនក៏មិនមានគិតនឹងប្រែប្រួលពាក្យស័ត្យឲ្យបង់។ **ខុងបេង**ឮពាក្យ**គួនអ៊ូ**ចរចាដល់សេចក្តីស្លាប់ដូច្នោះ ក៏នឹកក្នុងចិត្តថា ពីដើមយើងប្រុងនឹងប្រគល់ត្រាសម្រាប់ងារចៅហ្វាយខេត្តឲ្យជាមង្គល ដែលមកចរចាជាពាក្យអពមង្គលដូច្នេះមិនគួរសោះ។ **ខុងបេង**ក៏រន្ថើនសួរថា ខ្លួនអ្នកនឹងនៅរក្សាស្រុកទទួលធុរៈទាំងពួងដូច្នេះ បើប្រសិនជា**ចូឆូ**លើកទ័ពមកវាយយកស្រុកកេងជីវ តើអ្នកនឹងត្រូវគិតការពារដូច

ម្ដេច? **គួនអ៊ូ**ឆ្លើយថា ខ្លួនខ្ញុំបាទជាទាហានគ្មានខ្លាចដល់សត្រូវសោះ ទោះបី**ចូឆ្វូ**លើកទ័ពមកខ្ញុំបាទក៏ត្រូវស៊ូច្បាំងឲ្យពេញកម្លាំង ត្រាតែចាញ់ និងឈ្នះមិនឲ្យអប្បយស។

**ខុងបេង**សួរថា បើ**ស៊ុនគួន**និង**ចូឆ្វូ**លើកទ័ពប្រសព្វគ្នាចូលមកវាយដណ្ដើមយកស្រុកនេះ តើអ្នកនឹងគិតប្រការម្ដេច? **គួនអ៊ូ**ថា បើយ៉ាងដូច្នេះ ខ្ញុំបាទនឹងញែកទាហានចេញជាពីរកងច្បាំងទាំងសងខាង បើកាលណាខ្លួនខ្ញុំបាទស្លាប់ហើយ ទើប**ស៊ុនគួន** និង**ចូឆ្វូ**យកស្រុកកេងជីវចុះ បើមិនទាន់ស្លាប់ទេ លោកកុំសង្ស័យឡើយថា ស្រុកកេងជីវនេះជារបស់អ្នកដទៃនោះមិនមែនទេ។ **ខុងបេង**ថា បើការសង្គ្រាមមានមកហើយ អ្នកមិនបានរិះគិតប្រើឧបាយប្រាជ្ញា យកតែកម្លាំងហៅហានទន្ទ្រានកាច់យកកម្លាំងគេដូច្នេះ យើងយល់ឃើញថា ស្រុកកេងជីវនឹងខូចជាប្រាកដ ដែលអ្នកនឹងនៅរក្សាស្រុកកេងជីវនេះ ចូរចាំសម្ដីយើងទុកចុះ ទោះបីអ្នកនឹងប្រព្រឹត្តតាមហើយ ស្រុកកេងជីវគង់នឹងមិនអន្តរាយឡើយ។ **គួនអ៊ូ**សួរថា លោកនឹងធ្វើប្រការម្ដេច?

**ខុងបេង**ប្រាប់ថា អ្នកនៅរក្សាស្រុកជាក្រោយយើងនោះ ចូរចាត់ការរក្សាស្រុកឲ្យមួនមាំ គឺប្រយ័ត្នខាងទិសឯជើងចាំតទល់នឹង**ចូឆ្វូ**ឲ្យបានឯទិសខាងត្បូងនោះ អ្នកត្រូវធ្វើចិត្តឲ្យល្អ តស្ពានមេត្រីនឹង**ស៊ុនគួន**ឲ្យបានជាប្រក្រតី ទើបស្រុកកេងជីវនេះនឹងបានសេចក្ដីសុខ។ **គួនអ៊ូ**ក៏មានចិត្តត្រេកអរណាស់ថា ពាក្យរបស់លោកដែលរំឭកនេះ ខ្ញុំបាទវែកដាក់ក្នុងដើមទ្រូងពាក់អាវគ្របទុកមិនភ្លេចឡើយ។ **ខុងបេង**ប្រដៅ**គួនអ៊ូ**សព្វគ្រប់ហើយ ទើបយកត្រាសម្រាប់ងារចៅហ្វាយខេត្តនោះប្រគល់ឲ្យ**គួនអ៊ូ** ហើយក៏កេណ្ឌទាហាន និងនាយទាហានគឺ **អ៊ីចៀ**, **ម៉ាលៀង**, **អៀងឡុង**, **ប៊ីតុក** ខាងរដ្ឋបាលបួននាយ **ប៊ីហង**, **ឡៅហង**, **គួនប៉េង**, **ជីវឆង** បួននាយខាងទាហានឲ្យនៅរក្សាស្រុក ក្រោមបង្គាប់**គួនអ៊ូ**ស្រេចហើយ ទើបចាត់ឲ្យ**តៀវហ៊ុយ**ឃុំទាហានមួយម៉ឺនជាទ័ពគោក កំណត់ឲ្យលើកចេញទៅចាំទទួលទ័ពហ្លួងត្រង់ទ្វារបន្ទាយទិសឯលិចស្រុកឡុកសៀ ចាត់**ជូឡុង**ឃុំទាហានមួយម៉ឺនជាកងមុខទ័ពទឹក ខ្លួន**ខុងបេង**ឃុំទាហានមួយម៉ឺប្រាំពាន់ជាកងហ្លួង លុះបានកំណត់ឫក្សល្អ ក៏ឲ្យលើកទ័ពទឹក ទ័ព

គោកទៅព្រមគ្នា ខាង**តៀវហ៊ុយ**លើកទៅដល់ដែនស្រុកប៉ាគុនហើយ ក៏កំជាប់ទាហានមិនឲ្យធ្វើអន្តរាយដល់អ្នកឯណា តាមពាក្យ**ខុងបេង**បង្គាប់គ្រប់ប្រការ។

ខណៈនោះ បម្រើសេះក៏នាំយកសេចក្ដីទៅប្ដឹង**ង៉ៀមង៉ាន់** ជាចៅហ្វាយស្រុកប៉ាគុនថា ឥឡូវ**តៀវហ៊ុយ**លើកកងទ័ពកន្លងចូលមកក្នុងដែនហើយ **ង៉ៀមង៉ាន់**ឮដូច្នោះក៏ចាត់ទាហានឲ្យប្រុងប្រយ័ត្ន រក្សាស្រុកមាំមួនណាស់ ព្រោះពីដើមនោះដឹងថា **ឡៅពី**លើកទាហានមកវាយយកបន្ទាយប៉ោយស៊ីគួនបាន ក៏មានចិត្តខឹងជាប់ដរាប ទើបឲ្យកេណ្ឌទាហានលើកទៅនឹងវាយ**ឡៅពី**ទៀត តែថានៅបារម្ភរវាំងក្រោយ ខ្លាចក្រែងកងទ័ព**ឡៅពី**នឹងលើកមកខាងផ្លូវស្រុកប៉ាគុន បានជាបង្អង់កងទ័ពទុកមិនទាន់លើកទៅច្បាំងនឹង**ឡៅពី** លុះដឹងថា**តៀវហ៊ុយ**លើកទៅដល់ ក៏កេណ្ឌទាហានប្រចាំការរក្សាបន្ទាយស្រុក មិនបានឲ្យលើកចេញទៅចំណុះ ព្រោះ**ង៉ៀមង៉ាន់**នោះជាមនុស្សមានថ្វីដៃខ្លាំងពូកែ ទោះបីថាខ្លួននោះមានអាយុជរាណាស់ហើយក៏មែន តែថាគង់នៅមានកម្លាំងច្រើន អាចតស៊ូនឹងពលមួយម៉ឺនបានដោយលំពែងធំសម្រាប់កាន់នោះ។

**តៀវហ៊ុយ**ដឹងថា **ង៉ៀមង៉ាន់**នឹងតស៊ូដូច្នោះ ក៏ឲ្យតាំងបន្ទាយយ៉ាងមាំទុកបម្រុងការហើយឲ្យទាហានចូលទៅស្រែកជេរ ត្រង់មុខទ្វារស្រុកថា អាកញ្ចាស់ជរាចូរប្រញាប់ចេញមកគំនាប់អញដោយស្រួល បើខំប្រឹងទទឹងនៅ អញនឹងលើកទាហានចូលទៅជាន់សង្កត់ឲ្យល្អិតអស់ទាំងស្រុក សូម្បីតែទារកនៅក្នុងអង្រឹង ក៏មិនទុកឲ្យសល់នឹងសម្លាប់ឲ្យអស់។ **ង៉ៀមង៉ាន់**ឮដូច្នោះក៏ខឹងណាស់ គួរចាត់ចែងរៀបទាហានចេញទៅច្បាំង **ហេកអ៊ួត**ទាហានរងហាមឃាត់ថា លោកកុំអាលលើកចេញទៅច្បាំងសិន ខ្ញុំបាទដឹងថា **តៀវហ៊ុយ**នោះមានថ្វីដៃខ្លាំងពូកែណាស់ ត្រូវតែប្រុងប្រយ័ត្នគិតរក្សាបន្ទាយឲ្យមាំមួនទៅជាជាង ព្រោះទាហានដែលលើកមកនោះសុទ្ធតែមកពីចម្ងាយ គង់នឹងដាច់ស្បៀងអាហារមិនខាន។ មួយទៀត**តៀវហ៊ុយ**នោះជាមនុស្សចិត្តរហ័សបើយើងនៅសំងំ ខំតែការពារពីក្នុងក៏នឹងហែកទម្លាយចូលមិនបានដោយស្រួលទេ មុខជានឹងច្រឡោតខឹងប្រឹងវាយដំបង្ខំទាហានឲ្យមានសេចក្ដីក្ដៅ

ក្រហាយ ទាហានទាំងឡាយក៏គង់នឹងប្រែចិត្តគិតដោះខ្លួនចេញអស់ យើងនឹងគិតធ្វើការយកជ័យជម្នះបានដោយងាយ។ **សៀមង៉ាន់**យល់ឃើញត្រូវ ក៏ឲ្យទាហានប្រុងប្រយ័ត្នការរក្សាទីសើនបន្ទាយមិនឲ្យទម្លាយចូលបាន។

ខណៈនោះ **តៀវហ៊ុយ**ចេះតែបន្ថែមប្រើទាហានឲ្យទៅហៅឲ្យបើកទ្វារ **សៀមង៉ាន់**ក៏បង្គាប់ឲ្យបើកទ្វារ ឲ្យទាហានម្នាក់ចូលទៅ ទាហាននោះក៏និយាយថា ឥឡូវ**តៀវហ៊ុយ**ប្រើឲ្យមកជម្រាបលោកឲ្យបើកទ្វារទទួលដោយល្អទៅ។ បើរឹងទទឹងនៅដូច្នេះ នោះបើទាហានវាយទម្លាយចូលមកបាន នឹងសម្លាប់ឲ្យអស់មិនឲ្យមានសល់ដល់ម្នាក់ឡើយ។ **សៀមង៉ាន់**ខឹងណាស់ថា អាចោរម្សៀតហ៊ានមកនិយាយព្រហើនមាក់ងាយអញដល់ម្ល៉េះ! អាឯងគិតថាអញខ្លាច ខ្លួនអញជាមនុស្សចាស់ទុំប៉ុណ្ណោះហើយ នឹងងាកមុខចេញទៅគំនាប់នាយឯងមឹងឬ? អញសុំខ្ចីមាត់ឯងឲ្យឯងចេញទៅប្រាប់នាយឯងចុះថា អញស៊ូតែស្លាប់មិនចេញទៅគំនាប់ទេ ហើយក៏ឲ្យកាត់មាត់ច្រមុះទាហាន**តៀវហ៊ុយ**នោះអស់ ហើយបើកឲ្យចេញមកវិញ លុះទាហាននោះទៅដល់ក៏ស្រែកយំប្រាប់**តៀវហ៊ុយ** តាមសម្ដី**សៀមង៉ាន់**ថាគ្រប់ប្រការ។

**តៀវហ៊ុយ**ខឹងខ្លាំងណាស់ ក៏លើកទាហានប្រមាណពីររយឡើងសេះបរចូលទៅដល់ជើងកំពែង ទាហាន**សៀមង៉ាន់**ដែលនៅលើសើនបន្ទាយ ក៏មិនបានចេញមកតស៊ូ តាំងតែស្រែកជេរ**តៀវហ៊ុយ**ជាពាក្យទ្រគោះអសុរោះផ្សេងៗ **តៀវហ៊ុយ**រឹតតែខឹងណាស់ បីដូចភ្លើងឆេះកណ្ដាលដើមទ្រូង ទើបបរសេះបំពារចូលទៅក៏ទើសនឹងគូកំផែងចូលទៅពុំបាន បានតែគំរាមស្រែកមិនឈប់ ទាល់តែព្រលប់ក៏ត្រឡប់វិលទៅបន្ទាយវិញ លុះព្រឹកឡើងលើកទាហានចូលទៅស្រែកជេរទៀត **សៀមង៉ាន់**ក៏យកធ្នូបាញ់ទៅត្រូវមួក**តៀវហ៊ុយ** ឯ**តៀវហ៊ុយ**ខឹងណាស់ក៏លើកដៃចង្អុលជេរថា អាកញ្ជាស់បើអញចាប់បានខ្លួនឯង អញនឹងវះពន្លះសាច់ឲ្យអស់នៅតែឆ្អឹង។ ស្រែកជេរទាល់តែព្រលប់ទើបត្រឡប់ទៅបន្ទាយវិញ។

លុះព្រឹកឡើងជាថ្ងៃគម្រប់បី **តៀវហ៊ុយ**លើកទាហានត្រឡប់ចូលទៅស្រែកជេរជុំវិញកំផែងតាមទ្វារ ឃើញ**សៀមង៉ាន់**មិនបើកទ្វារលើកទាហានចេញមកច្បាំង

សោះ ក៏ឲ្យទាហានជិះសេះឡើងទៅលើភ្នំហើយសម្លឹងមើលទៅក្នុងស្រុក ឃើញទាហានទាំងពួងតែងខ្លួនពាក់ក្រោះកាន់អាវុធត្រៀមចាំព្រមគ្នា **តៀវហ៊ុយ**ក៏ឲ្យទាហានត្រឡប់ចុះមកវិញ ហើយធ្វើជាដេកលក់ស្ងាត់អស់ ប្រាថ្នានឹងឲ្យ**ង៉ៀមង៉ាន់**ឃើញថាអស់កម្លាំងនឹងលើកចេញមកច្បាំងក្រោយនោះ ក៏មិនឃើញ**ង៉ៀមង៉ាន់**ចេញមក លុះវេលាល្ងាចក៏ត្រឡប់ចូលបន្ទាយវិញ ទើបគិតថា **ង៉ៀមង៉ាន់**នេះមានអំណត់អត់កំហឹងបានមិនចេញច្បាំង លុះព្រឹកឡើង ក៏ឲ្យទាហានចូលទៅស្រែកជេរដូចថ្ងៃមុនទៀតគ្រប់ជាបីថ្ងៃ។ **ង៉ៀមង៉ាន់**ក៏មិនបានចេញច្បាំងសោះ **តៀវហ៊ុយ**ក៏ក្លែងធ្វើកលឲ្យទាហានដើរលេងរាយគ្នាទៅរកអុសខ្លះ ឲ្យស្វែងរកផ្លូវដែលនឹងលើកចូលទៅក្នុងស្រុកនោះខ្លះ។

**ង៉ៀមង៉ាន់**ឃើញទាហាន**តៀវហ៊ុយ**បែកខ្ញែកគ្នាទៅដូច្នោះ ក៏មិនបានដឹងថានឹងគិតធ្វើការម្តេច ទើបចាត់ទាហានឲ្យបន្លំចេញទៅស៊ើបយកការទាំងពួង លុះវេលាល្ងាច ទាហានដែលទៅស្វែងរកផ្លូវនោះវិលមកប្រាប់**តៀវហ៊ុយ**ថា ជួបឃើញផ្លូវដែលនឹងចូលទៅក្នុងស្រុកប៉ាគុន ជាផ្លូវតូចនៅក្បែរជាយភ្នំ។ **តៀវហ៊ុយ**ក៏មានអំណរណាស់ បង្គាប់ទាហានទាំងអស់ឲ្យដាំបាយស៊ីពីយប់កំណត់នឹងលបលើកទ័ពទៅ កុំឲ្យដឹងខ្លួនទាន់ ឲ្យយកឃ្នុំរុំមាត់សេះកុំឲ្យស្រែកឮសំឡេងបាន ឯខ្លួនយើងនឹងទៅមុខ ឯទាហានដែលលើកតាមទៅជាក្រោយនោះ ឲ្យប្រុងប្រយ័ត្នខ្លួនកុំឲ្យប្រមាទ **តៀវហ៊ុយ**ដាក់កំហិតបង្គាប់បញ្ជាទាហានសព្វគ្រប់ហើយ ក៏ឲ្យណាត់ពេលដែលនឹងលើកចូលទៅនោះនៅក្នុងយាមបី។

ឯទាហាន**ង៉ៀមង៉ាន់**ដែលបន្លំចេញទៅនោះក៏ដឹងសេចក្តី ទើបត្រឡប់ចូលទៅប្រាប់**ង៉ៀមង៉ាន់** ៗក៏មានសេចក្តីត្រេកអរណាស់ និយាយថា ដែល**តៀវហ៊ុយ**នឹងលើកពលចូលមកតាមផ្លូវតូចនោះ យើងនឹងលើកទាហានចេញទៅចាំកាត់ស្ទៀង ហើយនឹងរាយព័ទ្ធចូលមកព្រួតចាប់យកខ្លួន**តៀវហ៊ុយ**ឲ្យបាន។ **ង៉ៀមង៉ាន់**រៀបចំទាហានព្រមហើយក៏លបលើកចេញមកពីក្នុងកំផែងស្រុក ក្នុងពេលពាក់កណ្តាលអាធ្រាត្រទៅបង្កប់ចាំគ្រប់ច្រក។

លុះដល់យាមបី **តៀវហ៊ុយ**ក៏ឲ្យទាហានម្នាក់តែងខ្លួនពាក់ក្រោះនិងប្រដាប់ខោអាវដូច**តៀវហ៊ុយ** ហើយក៏ឲ្យជិះសេះបរចេញទៅមុខ ខ្លួន**តៀវហ៊ុយ**លើកទាហានតាមទៅជាក្រោយ។ **ងៀមង៉ាន់**ដែលបង្កប់ទាហានចាំក្បែរផ្លូវនោះ ក្រឡេកឃើញទាហានជិះសេះមុខនោះដូច**តៀវហ៊ុយ** ក៏សម្គាល់ថាដូចជារូប**តៀវហ៊ុយ**ប្រាកដ ឲ្យទាហានសំងំចាំ លុះកន្លងទៅឆ្ងាយហើយ ទទួលកងស្បៀងលើកមកដល់ទីនោះ មិនដឹងថា**តៀវហ៊ុយ**បន្ទំមកជាមួយ ក៏អុជផាវជាសញ្ញាឡើង ហើយវាយគងឃ្មោះស្គរលើកទាហានចេញពីសងខាងផ្លូវ មកប្រកាប់ប្រចាក់គ្នាជាជ្រួលច្របល់។

ខណៈនោះ **តៀវហ៊ុយ**ក៏ញាក់សេះមកឃើញ**ងៀមង៉ាន់**នៅពីមុខ ក៏ស្រែកគំហកដោយសំឡេងយ៉ាងខ្លាំងថា អាសត្រូវកញ្ចាស់ ទីនេះអ្នកកុំរត់មិនរួចពីដៃអញទេ។ **ងៀមង៉ាន់**ឮសំឡេង ងាកមើលមកក្រោយឃើញ**តៀវហ៊ុយ**ក៏ស្លុតស្លាំងកាំងត្រឡប់ញាក់សេះមកតយុទ្ធនឹង**តៀវហ៊ុយ**បានដប់ភ្លែង **ងៀមង៉ាន់**បានការ ក៏លើកដាវឡើងកាប់ **តៀវហ៊ុយ**ក៏គេចរងទាន់ កន្ត្រាក់សេះត្រឡប់ទឹមគ្នានឹងសេះ**ងៀមង៉ាន់**ចូលទៅកៀកបានខ្លួន ក៏របូតធ្លាក់ពីលើសេះ ទាហានទាំងពួងក៏ស្ទុះស្រូចូលទៅជួយព្រួតចាប់ខ្លួន**ងៀមង៉ាន់**បាន ក៏ចងដឹកយកទៅ ទាហាន**ងៀមង៉ាន់**ក៏បែកបាក់ខ្ចាត់ខ្ចាយអស់ទៅ ខ្លះក៏ត្រឡប់ចូលមកខាង**តៀវហ៊ុយ**ជាច្រើន។ **តៀវហ៊ុយ**ក៏បរពលចូលទៅវាយស្រុកប៉ាគុនបាន ទើបកំជាប់ទាហានទាំងពួងមិនឲ្យធ្វើអន្តរាយដល់បណ្ដារាស្ត្រអ្នកស្រុកនោះ។

ពួកទាហានក៏នាំយកខ្លួន**ងៀមង៉ាន់**ចូលទៅឲ្យ**តៀវហ៊ុយ** ។ឃើញ**ងៀមង៉ាន់**មិនបានគំនាប់តាមប្រពៃណី ក៏ខឹងខាំមាត់ហើយស្រែកថា ខ្លួនអញជាទាហានឯកលើកទ័ពចូលមកដល់ទីនេះ ហេតុម្ដេចបានជាមិនចេញមកគំនាប់អញ ត្រឡប់ហ៊ានតស៊ូនឹងអញទៀត? **ងៀមង៉ាន់**ឆ្លើយតបថា ខ្លួនឯងជាមនុស្សអាក្រក់គ្មានសេចក្ដីស័ត្យសុចរិត លើកទ័ពមកប្រទូសរ៉ាយគេ ឲ្យអាណាប្រជានុរាស្ត្របានសេចក្ដីក្ដៅក្រហាយ អញត្រូវការអ្វីនឹងទៅគំនាប់ឯង ថ្វីដ្បិតតែឯងចាប់ខ្លួនអញបាន អញមិនត្រូវខ្លាចស្លាប់ បើក្បាលអញនឹងដាច់ចេញក៏មិនសុំគំនាប់ឯងឡើយ។ **តៀវហ៊ុយ**ខឹង

ណាស់ បង្គាប់ឲ្យទាហាននាំយកខ្លួន**ងៀមង៉ាន់**ទៅសម្លាប់ **ងៀមង៉ាន់**ថា ឯងនឹងសម្លាប់អញក៏សម្លាប់ចុះ ចាំខឹងក្តៅក្រហាយធ្វើអ្វីទៀត?

**តៀវហ៊ុយ**ឃើញអាការកិរិយា**ងៀមង៉ាន់**មានចិត្តមិនតក់ស្លុតរន្ធត់នឹងសេចក្តីស្លាប់ដូច្នោះ ក៏ដូចជារសាយកំហឹងអស់ ទើបក្រោកចុះទៅស្រាយចំណងដែលចង**ងៀមង៉ាន់**ចេញ ហើយក៏កៀកខ្លួនឡើងទៅអង្គុយលើកៅអីទឹមគ្នា ហើយឱនគំនាប់ថា ខ្ញុំដឹងថា អ្នកជាមនុស្សចាស់ មានអធ្យាស្រ័យប្រកបទៅដោយសតិបញ្ញាមកជាយូរហើយ ដែលខ្លួនខ្ញុំនៅក្មេងមិនគារវៈដល់ចាស់ ហើយថែមមកពោលពាក្យទ្រគោះប្រមាថដូច្នេះមិនគួរសោះ ខ្ញុំក៏ខុសល្មើសលើសលោះណាស់ទៅហើយ សូមឲ្យអ្នកអត់ទោសសន្តោសដល់ខ្ញុំទៅចុះ។

**ងៀមង៉ាន់**បានស្តាប់ដូច្នោះ ក៏គិតដល់គុណូបការៈ**តៀវហ៊ុយ**ពន់ប្រមាណណាស់ ទើបនិយាយថា ពីដើមខ្ញុំឮគេនិយាយថា ខ្លួនអ្នកនេះជាមនុស្សចិត្តអាក្រក់កាចសាហាវណាស់ មិនដឹងក្មេងមិនដឹងចាស់សោះឡើយ។ ឥឡូវខ្ញុំឃើញហើយថា អ្នកជាមនុស្សសុភាពដឹងខ្ពស់ទាបខុសត្រូវស្រួលល្អណាស់ ទោះបីខ្លួនអ្នកនៅក្មេងយ៉ាងណា ក៏គួរឲ្យខ្ញុំជាចាស់កោតខ្លាចអាចនឹងគោរពតាមគួរសម។ **ងៀមង៉ាន់**និយាយហើយក៏ក្រោកឡើងឱនគំនាប់**តៀវហ៊ុយ**ដោយប្រក្រតីរាប់អាន ថាជាអ្នកមានគុណដល់ខ្លួន។

**តៀវហ៊ុយ**សួរថា ឥឡូវខ្លួនខ្ញុំនឹងលើកទ័ពចូលទៅស្រុកឡុកសៀនោះ តើនឹងលើកទៅតាមផ្លូវណា? **ងៀមង៉ាន់**ឆ្លើយថា ឯស្រុកឡុកសៀនោះមានគយតាមរយៈផ្លូវជាច្រើនតំបន់ណាស់ កម្រនឹងទៅឲ្យបានស្រួល តែថាខ្លួនអ្នកមានឧបការៈដល់ខ្ញុំបាទ ដែលបានរួចជីវិតដល់ប៉ុណ្ណោះហើយ ខ្ញុំត្រូវតែតបស្នងសងគុណឲ្យអ្នកឲ្យដល់ខ្នាត គឺខ្ញុំជាអ្នកនាំផ្លូវទៅកាន់ស្រុកឡុកសៀ។ ខ្ញុំសូមលើកទាហានទៅជាមុខ បណ្តាគយល្បាតដែលមាននៅតាមរយៈផ្លូវនឹងទៅនោះ សុទ្ធតែនៅក្រោមបង្គាប់ស្តាប់ខ្ញុំជាអ្នកត្រួតត្រាគ្រប់តំបន់។ **តៀវហ៊ុយ**មានសេចក្តីសោមនស្សសាទរស្មោះសរពន់ប្រមាណណាស់ ឱនគំនាប់ហើយ ក៏ចាត់ឲ្យ**ងៀមង៉ាន់**លើកទៅដល់តំបន់ណា

បណ្ដាភ្នាក់ងារជាមេគយល្បាតតំបន់នោះ សឹងតែចេញមកគំនាប់លុតក្រាប**ង៉ៀមង៉ាន់**តាមប្រក្រតី ឥតបីមានទទឹងរឹងគ្រប់តំបន់ ខណៈដែលមេគយល្បាតនានាបានចុះចូលដល់**ង៉ៀមង៉ាន់**ហើយ ក៏ចុះចូលដល់**តៀវហ៊ុយ**ជាមេទ័ពធំដរាបទៅ។ **តៀវហ៊ុយ**ក៏លើកទ័ពទៅក្នុងគ្រានេះដោយស្រួលបួលពេកណាស់ សូម្បីគ្រប៊ឹឬដាវក៏មិនបានហូតចេញពីស្រោមសោះ ធ្នូក៏មិនបានដំឡើងខ្សែនឹងព្រួញ ព្រោះ**ង៉ៀមង៉ាន់**ជាទ័ពមុខទៅ។

ចប់សៀវភៅទីប្រាំមួយ

**សូមរង់ចាំអានសៀវភៅទីប្រាំពីរបន្តទៀត។**

**សូមអរគុណ។**

**ណុល ដារ៉ា។**

លោកអ្នកអាចរកអានសៀវភៅផ្សេងទៀតតាមរយៈគេហទំព័រខាងក្រោម៖

www.khmerliterature.wordpress.com